# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៧

**ចារឹកឡើងវិញដោយ ៖ ឈុល ដាក់**

*(តាំងពី**ខុងបេង, ឡៅពី** ប្រើ**គួនអ៊ូ**ទៅសុំទ័ព**ឡៅគី**មកជួយ **ចូឆូ**លើកចូលទៅស្រុកសុងយ៉ុងបញ្ឆោតសម្លាប់**ឡៅចង**និងម្តាយ ហើយលើកតាម**ឡៅពី, ខុងបេង**ចុះទូកទៅនៅបន្ទាយហែខៅ។)*

**ខុងបេង**និយាយនឹង**ឡៅពី**ថា ឥឡូវ**ចូឆូ**លើកទ័ពជាប់តាមមកជិតទាន់ហើយ សុំលោកប្រើ**គួនអ៊ូ**ស្រូតទៅប្រាប់**ឡៅគី**ឯស្រុកកាំងហែ ឲ្យលើកទ័ពទូកមកជួយបញ្ចូលគ្នានឹងកងទ័ពស្រុកកាំងឡេង។ **ឡៅពី**ក៏យល់ឃើញត្រូវ ទើបប្រើ**គួនអ៊ូ**និង**ស៊ុនខៀន**កាន់សំបុត្រទៅឲ្យ**ឡៅគី**លើកកងទ័ពទូកមកជួយ ហើយឲ្យ**ជូឡុង**នាំគ្រប់គ្រួទាំងពួង ឲ្យ**តៀវហ៊ុយ**នាំទាហានលើកទៅជាកងទ័ពក្រោយសម្រាប់ការពារ**ឡៅពី**ក៏ដើរកៀរប្រមូលគ្រប់គ្រួទៅតាមផ្លូវមួយថ្ងៃបានមួយរយសិន (៤ គ.ម)។

ឯ**ចូឆូ**កាលលើកទ័ពទៅដល់ស្រុកអ៊្វិនសៀហើយ ក៏ស្រូតរូតនាំទាហានទាំងពួងឆ្លងទៅស្រុកសុងយ៉ុង លុះទៅដល់ហើយ ក៏ឲ្យបម្រើទៅហៅ**ឡៅចង**ឲ្យចេញមក។ **ឈួម៉ី**និង**ទៀវអ៊ុន**ក៏និយាយនឹង**ឡៅចង**ថា មហាឧបរាជលើកមកដល់ស្រុកហើយ ឲ្យបម្រើមកហៅលោកចេញទៅគំនាប់ ក៏គួរនឹងចេញទៅគំនាប់តាមទម្លាប់ប្រវេណី។ **អងអ៊ិុយ**ទីប្រឹក្សាចូលទៅខ្សឹបប្រាប់**ឡៅចង**ថា ពីដើមលោកនឹងទៅចំណុះចុះចូល**ចូឆូ**ក៏ពិតមែន ឥឡូវ**ឡៅពី**រត់ពី**ចូឆូ**ទៅមិនបានតស៊ូទេ ឃើញថា**ចូឆូ**គ្រានេះមានចិត្តទ្រើសទ្រនង់អង់អាចណាស់ មិនបានចាត់ចែងនឹងរក្សាខ្លួនឲ្យមាំមួនដូចពីដើមទេ មុខជាធ្វេសប្រហែសណាស់ហើយ នាទីបណ្តាមនុស្សទាំងពួងក៏នឹងដឹងឮប្រាកដ ថាលោកមានតម្រិះប្រាជ្ញាវិះគិតរឹតតែកោតខ្លាច ដែលនឹងគិតការធំតទៅទៀត ក៏គង់នឹងមានអំណាចសម្រេចតាមប្រាថ្នា។ **ឡៅចង**ក៏យកសម្តីដែល**អងអ៊ិុយ**និយាយនោះទៅប្រាប់**ឈួម៉ី**។

**ឈ្លូម៉**ឮដូច្នោះ ក៏ឲ្យហៅ**អងអ៊ុយ**ចូលទៅហើយនិយាយថា ខ្លួនឯងនេះមិនបានដឹងច្បាស់លក្ខណៈផែនដីដែលនឹងវិនាសនិងរីកចម្រើន ហេតុម្ដេចព្រហើនអាចប៉ានចរចាដូច្នេះ? **អងអ៊ុយ**បានឮ**ឈ្លូម៉**និយាយដូច្នោះក៏ខឹងណាស់ឆ្លើយថា អាសត្រូវលក់ម្ចាស់ កាលណាអញនឹងបានស៊ីសាច់អាឯងទើបអញអស់ខឹង។ **ឈ្លូម៉**ឮដូច្នោះក៏បង្គាប់ទាហានឲ្យចាប់**អងអ៊ុយ**យកទៅសម្លាប់។ **កេងអ៊ួត**ក៏ឃាត់ហាមសូមទោស**អងអ៊ុយ**។ **ឈ្លូម៉**ក៏នាំ**ទៀវអ៊ុន**ចេញទៅគំនាប់**ចូឆូ**ដល់ក្បែរច្រាំងស្ទឹងនឹងឆ្លង។ **ចូឆូ**សួរថា ក្នុងទីដែនដែលឡើងស្រុកកេងជីវនេះ មានស្បៀងអាហារនិងរាស្ត្រចំណុះស្រុកទាំងអស់ប៉ុន្មាន? **ឈ្លូម៉**ឆ្លើយថា មានសេនាសេះប្រាំម៉ឺន មានទាហានថ្មើរជើងដប់ប្រាំម៉ឺន ទាហានទូកប្រាំបីម៉ឺន រួមផងគ្នាត្រូវជាម្ភៃប្រាំបីម៉ឺន ឯស្បៀងអាហារនោះបានប្រមូលទុកដាក់ក្នុងស្រុកកាំងឡេងជាច្រើន បើប្រមូលផ្សំគ្នាគ្រប់ខេត្តទាំងអស់នឹងស៊ីបានប្រហែលមួយឆ្នាំ។

**ចូឆូ**សួរថា ទូកចម្បាំងមានចំនួនប៉ុន្មាន? នរណាជាអ្នកបង្គាប់បញ្ជាត្រួតត្រា? **ឈ្លូម៉**ឆ្លើយថា ទូកចម្បាំងទាំងធំទាំងតូចមានប្រាំពីរពាន់ប្លាយ នៅក្នុងបង្គាប់បញ្ជាខ្ញុំបាទពីរនាក់នេះទាំងអស់។ **ចូឆូ**ឮដូច្នោះត្រេកអរណាស់ ទើបតាំងឲ្យ**ឈ្លូម៉**និង**ទៀវអ៊ុន**ជានាយកងទ័ពជើងទឹក ហើយថា ឥឡូវនេះ**ឡៅពៀវ**ក៏ស្លាប់បាត់ហើយ ឯ**ឡៅចង**ជាកូនក៏មកចំណុះចុះចូលយើង ៗនឹងក្រាបទូលព្រះចៅ**ហៀនតេ**ឲ្យតាំងជានាហ្មឺនធំ សម្រេចការរាជការក្នុងស្រុកកេងជីវតទៅ។ **ឈ្លូម៉, ទៀវអ៊ុន**បានស្ដាប់ដូច្នោះ ក៏មានចិត្តបីតិប្រាមោជ្ជត្រេកអរណាស់ គំនាប់លា**ចូឆូ**មកវិញ។

**ស៊ុនហុក**ជម្រាប**ចូឆូ**ថា **ឈ្លូម៉**និង**ទៀវអ៊ុន**ពីរនាក់នេះ ជាមនុស្សប្រចុបប្រចែងឡែបឡប ហេតុម្ដេចលោកមិនស្គាល់ចិត្តគំនិត ក៏តែងតាំងឲ្យធ្វើជានាយទាហានជើងទឹកតែម្ដងនោះម្ដេចទៅ? **ចូឆូ**អស់សំណើចហើយថា បើយើងមិនដឹងមិនស្គាល់ចិត្តមនុស្សទេ នឹងធ្វើការធំម្ដេចបាន។ ប្រការមួយទៀត ទាហានរបស់យើងប៉ិនប្រសប់តែផ្លូវគោក ដែលនឹងរកឲ្យស្ទាត់ជំនាញខាងជើងទឹកនោះមិនមាន

យើងធ្វើទាំងអម្បាលនេះ ប្រាថ្នានឹងយកចិត្តទុកដាក់ហ្វឹកហាត់ទាហានយើងឲ្យប្រសប់ រួចសឹមកម្ចាត់វាចេញទៅចុងដៃនឹងក្រងាយអ្វី។

ឯ**ឈ្វូម៉** និង**ទៀវអ៊ិន**ក៏នាំយកសេចក្ដីទៅសម្ដែងប្រាប់**ឡៅ្យចង**តាមពាក្យ**ចូឆ្វ**សព្វគ្រប់ប្រការ។ **ឡៅ្យចង**ឮហើយមានអំណរណាស់ នាំយកសេចក្ដីនោះទៅសម្ដែងប្រាប់នាង**ឈ្វូហ៊្វុយិន**ជាម្ដាយ។ លុះវេលាព្រឹក ក៏រៀបតាក់តែងរបស់ទ្រព្យដែលនឹងនាំទៅគំនាប់**ចូឆ្វ**។ លុះរៀបចំស្រេចហើយ **ឡៅ្យចង**និងនាង**ឈ្វូហ៊្វុយិន**ក៏នាំចូលទៅគំនាប់**ចូឆ្វ** យកត្រាសម្រាប់ងារជូនទៅផង រួចក៏លើករបស់និងត្រានោះជូនទៅ**ចូឆ្វ**ៗត្រេកអរណាស់ ក៏លើកកងទ័ពទៅតាំងនៅប្របស្រុកសុងយ៉ុង។

**ឈ្វូម៉, ទៀវអ៊ិន** ក៏អុជធូបទៀនគំនាប់**ចូឆ្វ** អញ្ជើញឲ្យ**ចូឆ្វ**ចូលទៅក្នុងស្រុក។ **ចូឆ្វ**ឲ្យរកហៅ**កេងអ៊្វិត**មកហើយ ក៏និយាយថា ខ្លួនយើងមកយកស្រុកកេងជីវគ្រានេះ មិនមែននឹងមានអំណរប៉ុន្មានទេ ដែលយើងបានខ្លួនអ្នកតែមួយក៏មានចិត្តត្រេកអរ លើសជាងបានស្រុកកេងជីវទាំងមូលទៅទៀត។ ហើយក៏តាំង**កេងអ៊្វិត**ជាចៅហ្វាយស្រុកកាំងឡេង តាំង**ហ៊្វូស្វូន, អងសាន**ជាមន្ត្រីធំ តាំង**ឡៅ្យចង**ជាចៅហ្វាយស្រុកកេងជីវ ហើយក៏ឲ្យរៀបខ្លួនចេញទៅ។

**ឡៅ្យចង**ឮដូច្នោះក៏ស្ដុតស្ដុងក្នុងចិត្ត ទើបអង្វរសុំខ្លួនថា ដែលមហាឧបរាជតាំងឲ្យខ្ញុំបានជាចៅហ្វាយស្រុកកេងជីវនោះ ជាព្រះគុណធ្ងន់គ្មានទីបំផុត ដែលខ្ញុំបាទឧស្សាហ៍ចេញមកគំនាប់លោកទាំងម្ល៉េះ មិនមែននឹងមានសេចក្ដីប្រាថ្នាចង់ធ្វើចៅហ្វាយស្រុកនោះណាស់ណាទេ ខ្ញុំបាទសុំឲ្យបានតែជារាស្ត្រទាសនៅក្នុងស្រុកសុងយ៉ុងនេះ ដើម្បីនឹងបានថែរក្សាសពបិតាប៉ុណ្ណោះ ក្រៅពីនោះប្រាថ្នានឹងរក្សាញាតិសាលោហិតតាមប្រវេណីតទៅ។ ឥឡូវសូមឲ្យលោកមានករុណាដល់ខ្ញុំបាទចុះ។ **ចូឆ្វ**ថា ដែលយើងនឹងឲ្យអ្នកទៅនៅស្រុកកេងជីវនោះ ដោយសេចក្ដីប្រណីអាណិតអ្នក ព្រោះឃើញថាស្រុកកេងជីវ និងស្រុកហ៊្វូតោនៅជិតគ្នា អ្នកនឹងបានចូលចេញគាល់ហ្វៅព្រះចៅ**ហៀនតេ**ដោយស្រួល។ ប្រការមួយទៀត បើអ្នកនឹងចង់នៅក្នុងស្រុកសុងយ៉ុងនេះ ឆ្ងាយពីយើងនិងព្រះចៅ**ហៀនតេ** ជាទីបៀតបៀននៃមនុស្សដែល

ជាសត្រូវទាំងពួង នឹងមិនសប្បាយទៅចុងដៃ។ **ឡៅចង**ឮហើយ ក៏ទាល់គំនិតព្រោះគិតខ្លាច**ចូឆ្វ** នឹងរឹងទទឹងមិនបាន ក៏ព្រមទទួល ហើយគំនាប់លានាំមាតាចេញទៅស្រុកកេងជីវ លុះទៅដល់មាត់កំពង់នឹងឆ្លងស្ទឹង។ នាហ្មឺនទាំងអស់ក៏លា**ចូឆ្វ**ទៅកាន់កន្លែងរៀងខ្លួន។ ឯ**អងអ៊ុយ**ក៏ជាប់តាម**ឡៅចង**ទៅផង។

កាលដែល**ឡៅចង**ចេញផុតពីស្រុកនោះហើយ **ចូឆ្វ**ក៏បង្គាប់**អ៊ីគឹម**ថា អ្នកចូរលើកទាហានស្រួតតាមទៅស្កាត់ចាប់សម្លាប់**ឡៅចង**ចេញ។ **អ៊ីគឹម**ក៏លើកទាហានស្រួតតាមទៅ លុះទៅទាន់**ឡៅចង**ហើយ ក៏ស្រែកថា ឥឡូវមហាឧបរាជប្រើយើងឲ្យមកតាមសម្លាប់អ្នកឯង ព្រមទាំងម្ដាយទាំងពីរនាក់ចេញ អ្នកកុំរីវរវត់ទៅឯណាឡើយ ចូរនៅស្ងៀមឲ្យយើងកាត់ក្បាលនាំទៅឲ្យមហាឧបរាជចុះ។ នាង**ឈ្លូហ៊ូយិន**ឮដូច្នោះក៏តក់ស្លុតស្មារតី ម្ដាយនិងកូនក៏ឱបគ្នាទួញយំដំឱរា។ **អងអ៊ុយ**ឃើញដូច្នោះខឹងណាស់ ត្រឡប់មុខវិលមកនឹងតស៊ូ។ **អ៊ីគឹម**ឲ្យទាហានចាប់សម្លាប់ចេញហើយកាត់ក្បាលនាង**ឈ្លូហ៊ូយិន**និង**ឡៅចង**ត្រឡប់នាំទៅឲ្យ**ចូឆ្វ** ៗក៏ឲ្យបំណាច់រង្វាន់**អ៊ីគឹម**តាមសមគួរ ហើយបង្គាប់ទាហានឲ្យទៅចាប់គ្រប់គ្រួ**ខុងបេង**មិនឃើញសោះ ហើយក៏វិលមកប្រាប់**ចូឆ្វ**វិញ។ **ចូឆ្វ**ក៏មានកំហឹងគុំគួនមិនរសាយ។ ខណៈកាល**ខុងបេង**នឹងលើកព្យុហៈទ័ពចេញពីស្រុកស៊ិនអៀនោះ ក៏នឹកខ្លាចក្រែង**ចូឆ្វ**នឹងធ្វើអន្តរាយដល់គ្រប់គ្រួ ក៏គេចចូលទៅនាំគ្រប់គ្រួយកទៅលាក់បំពួននៅតំបន់សាំងតាំងបានជាទាហានស្រាវជ្រាវរកមិនជួបប្រទះ។

ចំណែក**ស៊ុនហ៊ីវ**ជម្រាប**ចូឆ្វ**ថា ស្រុកកាំងឡេងនោះ ជាទីមាំមួនណាស់ ទាំងស្បៀងអាហារក៏ប្រមូលយកទៅទុកជាច្រើន ប្រសិនបើ**ឡៅពី**ទៅតាំងនៅមុនបាន យើងនឹងតាមទៅធ្វើការច្បាំងដណ្ដើមក៏មិនងាយនឹងយកជ័យជម្នះបានសោះ។ **ចូឆ្វ**តបថា អ្នកនិយាយនោះត្រូវហើយ យើងមិនភ្លេចទេ យើងក៏នៅគិតឃើញដរាប តែឥឡូវត្រូវឲ្យទាហានស្រួតរួតរំលងទៅមុខ ចូលយកស្រុកកាំងឡេងឲ្យបានមុន។ **ចូឆ្វ**ក៏ឲ្យអញ្ជើញពលទាហានរបស់**ឡៅចង**មកត្រួតមើល ឃើញបាត់ម្នាក់ឈ្មោះ**ប៊ុនផេង**។ **ចូឆ្វ**ក៏ឲ្យមនុស្សទៅហៅយកខ្លួន ទទួលជួបប្រទះនឹង**ប៊ុនផេង**ក៏ចូលមក

គំនាប់**ចូឆ្វ** ៗសួរថា តាំងពីយើងមកនៅក្នុងស្រុកសុងយ៉ុងនេះច្រើនពេល ហេតុម្ដេចក៏ខ្លួននៅពួនមុខមិនមករកជួបនឹងយើង? **ប៊ុនផេង**ឆ្លើយថា ខ្ញុំបាទមិនបានមករកលោកនោះ មិនមែននឹងពួនមុខលាក់ខ្លួនទេ ព្រោះខ្ញុំបាទកើតមកជាទាហាន មិនបានធ្វើការយកអាសាចៅហ្វាយនាយឲ្យស្រុកភូមិនៅជាសុខ បានជាខ្ញុំបាទកើតទុក្ខអៀនខ្មាសណាស់ ទើបមិនបានមករកលោក។ និយាយហើយក៏យំ។ **ចូឆ្វ**ឃើញដូច្នោះក៏ពេញចិត្តណាស់ សម្លឹងមើលឃើញថា ជាមនុស្សសុចរិតទៀងត្រង់មែន ទើបតាំងឲ្យ**ប៊ុនផេង**ជាចៅហ្វាយស្រុកកាំងហែ ហើយឲ្យលើកទាហានដែលមានកម្លាំងខ្លាំងពូកែបានប្រាំពាន់ស្រួតទៅតាម**ឡៅពី**។ **ចូឆ្វ**ក៏លើកទ័ពហ្លួងជាជំនួយតាមទៅក្រោយ។

ឯ**ខុងបេង**និយាយនឹង**ឡៅពី**ថា បណ្ដាគ្រប់គ្រួដែលមកទាំងអម្បាលនេះ មានចំនួនដល់បីម៉ឺន បួនម៉ឺន មានទាហានចម្បាំងប្រហែលតែបីពាន់តិចពេកណាស់ ហើយខ្លួនលោកក៏ដើរកៀរប្រមូលគ្រប់គ្រួយឺតទាំងម្ល៉េះ កងទ័ព**ចូឆ្វ**ក៏លើកជាប់តាមខ្ជាន់ៗជិតទាន់ហើយ។ កាលដែលលោកប្រើ**គួនអ៊ូ** ទៅសុំកងទ័ពពីស្រុកកាំងហែមកជួយ តាំងពីថ្ងៃទៅរាប់មកដល់ថ្ងៃនេះកំណត់មួយខែហើយ នឹងគិតដូចម្ដេច? **ឡៅពី**ថា បើដូច្នោះលោកកុំឃើញតែនឿយហត់ឡើយ ចូរឧស្សាហ៍ទៅខ្លួនឯងបន្តិចចុះ ព្រោះលោកមានគុណូបការៈនឹង**ឡៅគី**ពីថ្ងៃមុន **ឡៅគី**ឃើញលោកទៅខ្លួនឯងហើយក៏នឹងបោះបង់ពុំបាន គង់នឹងរកពលទាហានឲ្យលោកខ្លះ។ **ខុងបេង**ទទួលពាក្យហើយក៏ចេញទៅ នាំ**ឡៅហង**ទៅផងជាពីរនាយ លើកទាហានប្រាំរយស្រួតទៅស្រុកកាំងហែ។

កាល**ឡៅពី**និង**ប៊ីតុក, ប៊ីហង, កាន់យ៉ុង** នាំគ្រប់គ្រួលើកពពាក់ពពូនទៅក្នុងថ្ងៃនោះ ក៏កើតខ្យល់ព្យុះកំបុតត្បូងបោកបក់គួចយកផង់ធូលី ហុយត្រឡប់ឡើងទៅត្រង់មុខសេះ**ឡៅពី** ៗស្លុតចិត្តក៏សួរ**ប៊ីតុក, ប៊ីហង, កាន់យ៉ុង**ថា ភេទនេះនឹងល្អអាក្រក់ប្រការម្ដេច? **កាន់យ៉ុង**ចាប់យាមមើល ហើយជម្រាប**ឡៅពី**ថា ភេទនេះកាចណាស់ ពេលយប់នេះភ័យនឹងមកដល់លោកជាប្រាកដហើយ សុំឲ្យលោកចោលគ្រប់

គ្រួចេញសិន ស្រួតរត់ទៅមុនឲ្យរួចខ្លួនសិនចុះ។ **ឡៅពី**ថា បង់កម្លាំងដែលយើងបានការពាររក្សាមនុស្សទាំងអស់នេះមកពីស្រុកស៊ិនអៀ រហូតដល់ទីនេះហើយ ដែលនឹងបោះបង់ចោលគ្នារត់យកតែខ្លួននោះ យើងមិនដឹងនឹងធ្វើការកើតសោះឡើយ។ **កាន់យ៉ុង**ថា បើលោកនៅតែមិនជឿស្តាប់ពាក្យខ្ញុំបាទ អន្តរាយមុខជានឹងមានដល់ខ្លួនលោកមិនខាន។ **ឡៅពី**សួរថា ផ្លូវដែលនៅខាងមុខនោះឈ្មោះតំបន់អ្វី? ទាហានទាំងពួងឆ្លើយថា ទៅខាងមុខនោះ នឹងចូលដែនស្រុកកុងយ៉ុង មានភ្នំធំមួយឈ្មោះភ្នំកេងសាន់។ **ឡៅពី**ដឹងដូច្នោះ ក៏នាំគ្រប់គ្រួស្រួតរូតដើរទៅដល់ភ្នំកេងសាន់ ហើយឲ្យគ្រប់គ្រួតាំងជំរំឈប់នៅប្របជើងភ្នំ។ គ្រានោះជារដូវរងាណាស់ អាណាប្រជានុរាស្ត្រទាំងពួងនោះទៅជាឈឺថ្កាត់គ្រុនរងារមានសេចក្តីលំបាកវេទនាជាច្រើន ខ្លះស្រែកទួញយំរងំស៊ានក្នុងព្រៃ ច្រឡំទាំងសំឡេងស្រី និងប្រុស និងក្មេង គួរឲ្យកើតសេចក្តីសង្វេគពេកណាស់។

លុះពេលប្រហែលយាមបីយប់ **ឡៅពី**ក៏ឮសំឡេងស្រែកហ៊ោកញ្ជៀវពីទិសខាងជើង ដូចជារលើងរលំព្រៃឈើ។ **ឡៅពី**ក៏ភ័យតក់ស្លុតចិត្ត ទើបឡើងសេះនាំទាហានពីរពាន់លើកចេញទៅ ទទួលប្រទះនឹងកងទ័ព**ចូឆូ**លើកតាមមក **ឡៅពី**ក៏បរសេះនាំទាហានចូលតច្បាំងជាពន្លឹក ទាហាន**ចូឆូ**ក៏ឡោមព័ទ្ធ**ឡៅពី**បាន។ លុះ**តៀវហ៊ុយ**ក្រឡេកឃើញ**ឡៅពី**នៅក្នុងចំណោមទ័ព**ចូឆូ**ដូច្នោះ ក៏ស្ទុះពុះពារទម្លាយទ័ពចូលទៅជួយ**ឡៅពី** ៗបានទំនងស្រួល ក៏ចូលប្រយុទ្ធជ្រែកចេញទៅតាម**តៀវហ៊ុយ**ទិសឯកើត ប្រទះគ្នានឹង**ប៊ុនផេង**លើកទាហានមកចាំស្កាត់ពីមុខ។ **ឡៅពី**ក៏បរសេះសម្រុកចេញទៅមុខ។ ទាហានស្រែកជេរ**ប៊ុនផេង**ថា អាចោរទុយ៌សលក់ឈ្មោះម្ចាស់ នៅចេញមុខឥតខ្មាសមកចូលនឹង**ចូឆូ**ជាសត្រូវផែនដីទៀត? **ប៊ុនផេង**ឮដូច្នោះ ក៏មានសេចក្តីអៀនខ្មាសមិនបង្អង់ឲ្យ**ឡៅពី**ឃើញមុខបាន ក៏លើកទាហានបែករត់ទៅ។

ទាហាន**ចូឆូ**បានចំណាប់ ក៏លើកដេញ**ឡៅពី**ប្រជាន់ចូលមក។ **ឡៅពី**និង**តៀវហ៊ុយ** ពីរនាក់បងប្អូនក៏ជួយគ្នាពារទម្លាយមកក្រោយ រាំងទ័ពទុកទាល់តែភ្លឺ

ស្រោង។ លុះទាហាន**ចូវឆូ**គ្រាកចេញទៅឆ្ងាយហើយ ក៏ឈប់សម្រាកទាហាននៅទីនោះ។ លុះឃើញទាហានដែលសល់រត់មកតាមផងប្រហែលមួយរយនាក់ គ្រប់គ្រួទាំងហ្វូងហ្វាយរបស់ខ្លួន និងអាណាប្រជានុរាស្ត្រទាំងពួងខ្ចាត់ខ្ចាយព្រាត់គ្នាទៅ **ឡៅពី**ក៏យំសោកសៅថា មនុស្សទាំងអស់នេះមកថ្កោះថ្កោយស្លាប់ព្រោះតែយើងម្នាក់ ទាំងបុត្រភរិយារបស់យើងក៏មិនដឹងថានៅទីណា ជាស្លាប់ឬរស់មិនបានឃើញនឹងភ្នែកសោះឡើយ។ កាល**ឡៅពី**វាឈប់អង្គុយយំនៅទីនេះ ទទួលឃើញ**ប៊ីហាង**ត្រូវអាវុធរបួសជាច្រើនអន្លើ ប្រឡាក់ទៅដោយឈាមពេញអស់ទាំងខ្លួន រត់ចូលមកស្រែកប្រាប់ថា ឥឡូវ**ជូឡុង**ប្រែចិត្តចូលទៅខាងទ័ព**ចូវឆូ**ហើយ។ **ឡៅពី**ឮដូច្នោះក៏ស្រែកគំហកឲ្យ**ប៊ីហាង**ថា ឯងជាមនុស្សឥតពិគ្រោះពិចារណាអ្វីសោះ ឯ**ជូឡុង**នោះជាមនុស្សសុចរិតស្រឡាញ់យើងពិតត្រង់ណាស់ ដែលថាប្រែចិត្តចូលទៅខាង**ចូវឆូ**នោះ កុំសង្ស័យឡើយ។

**តៀវហ៊ុយ**ឆ្លើយថា ពីដើមគេឃើញយើងជាទីពំនាក់បាន ឥឡូវយើងបងប្អូនដុនដាបទៅហើយ ប្រហែលគេប្រែចិត្តចេញទៅមែនទេដឹង? **ឡៅពី**ថា ឯចិត្ត**ជូឡុង**នោះទៀងត្រង់ពិតប្រាកដណាស់ ប្អូនចូរគិតមើលចុះ កាល**គួនអ៊ូ**ទៅនៅនឹង**ចូវឆូ**ចេញមកសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ**ស្លាប់ ប្អូនក៏សង្ស័យថា **គួនអ៊ូ**ប្រែចិត្តចេញទៅនៅនឹង**ចូវឆូ** គិតសម្លាប់គ្នាគ្រានោះ ដល់គ្រានេះទៀត ទោះបី**ជូឡុង**ទៅនៅខាង**ចូវឆូ**មែនក្តី ទោះបីកាចជាក៏ដោយសារមានហេតុទើបទៅ ឯ**ជូឡុង**បងស្គាល់បានថា មិនមែនចោលបងជាប្រាកដ។ **តៀវហ៊ុយ**មិនជឿនឹកខឹងណាស់ ក៏លើកទាហានសេះម្ភៃស្រូតវិលត្រឡប់ចូលទៅជួបនឹង**ជូឡុង** លុះទៅដល់ដើមស្ពានទៀងប៉ាន់កៀវ ក្រឡេកឃើញព្រៃមួយនៅខាងទិសឯកើត ក៏នាំទាហានចូលទៅ ហើយកាត់យកមែកឈើមកចងគ្រប់កន្ទុយសេះ ហើយបង្គាប់ទាហានឲ្យបរសេះវិលវក់ចុះឡើង។ កងទ័ព**ចូវឆូ**មិនដឹងក៏សម្គាល់ថា ពលនៅក្នុងព្រៃជាច្រើន **តៀវហ៊ុយ**បង្គាប់ទាហានដូច្នោះហើយ ក៏បរពលទៅឈរកាន់ទួនស្ទាក់នៅដើមស្ពាន។

ឯ**ជូឡុង**ចូលច្បាំងជាច្រឡំបល់ នៅក្នុងជ្រោះកណ្ដាលកងទ័ព**ចូវឆូ**នោះ វាយត្រឡប់ចេញមកហើយ ក៏ចូលពុះពារទៅវិញទៀត ស្វះស្វែងរក**ឡៅពី**និងគ្រប់គ្រួទាំងពួងមិនឃើញសោះ ក៏វាយត្រឡប់ចេញមកវិញ វិលវល់នៅក្នុងទ័ព**ចូវឆូ** តាំងពីយាមមួយរហូតដល់ភ្លឺស្រាង។ **ជូឡុង**ក៏គិតថា នឹងស្វះស្វែងរក**ឡៅពី**ក៏មិនប្រទះសោះ ទាំងគ្រប់គ្រួក៏បាត់អស់ទៅ នឹងជាប្រការម្ដេចក៏មិនដឹងក្រោយមុខ **ឡៅពី**ក៏បានផ្ទុកធុរៈនេះឲ្យយើងរក្សាបុត្រភរិយា ឥឡូវមកឲ្យវិនាសបាត់ទៅក្នុងជ្រោះកណ្ដាលចំណោមមេទ័ពដូច្នេះ ឃើញថាមិនគួរសោះឡើយ។ **ជូឡុង**គិតហើយក៏នឹកតូចចិត្តណាស់ ត្រឡប់តាំងមានៈចិត្តគិតឡើងថា ត្រូវតែអញវាយទម្លាយកងទ័ពចូលទៅរកម្ដងទៀតឲ្យឃើញគ្រប់គ្រួទាំងនោះ ទោះបីស្លាប់នៅក្នុងរណរង្គក៏តាមការចុះ បើមិនឃើញគ្រប់គ្រួ**ឡៅពី**នោះទេ ក៏មិនដឹងបើនឹងយកមុខទៅទុកឯណា។ **ជូឡុង**គិតដូច្នោះហើយ ក៏បរសេះពុះពារទម្លាយចូលទៅក្នុងជ្រោះកណ្ដាលទ័ព**ចូវឆូ**ជាមួយនឹងទាហានសេះប្រហែលសាមសិប ឃើញពួកអ្នកស្រុកត្រូវអាវុធរបួសពិការជាច្រើន ឮតែសំឡេងទួញយំរងំអឺងកង។ **ជូឡុង**ក៏ញាក់សេះទៅរកគ្រប់គ្រួ**ឡៅពី** ប្រទះនឹង**កាន់យ៉ុង**ត្រូវអាវុធរបួសជាទម្ងន់ ដេកពួននៅក្នុងគុម្ពស្មៅ **ជូឡុង**ក៏សួរទៅថា អ្នកបានប្រទះឃើញនាង**កាំហ៊ូយិន** នាង**ប៊ីហ៊ូយិន**ទាំងពីរនាក់ដែរឬទេ? **កាន់យ៉ុង**ឆ្លើយថា ឥឡូវអ្នកទាំងពីរឃើញកងទ័ព**ចូវឆូ**លើកមកជិតនឹងទាន់ ក៏លោតចុះពីលើរទេះ ពកូនរត់បន្ដំចូលទៅក្នុងពួកអ្នកស្រុក ខ្ញុំក៏បំផាយសេះតាមទៅរកជិតជើងភ្នំ ទាហាន**ចូវឆូ**ម្នាក់យកទួនចាក់ត្រូវខ្ញុំបាទធ្លាក់ពីលើសេះ ហើយដណ្ដើមយករទេះទៅបាន ខ្ញុំក៏ឈឺលំបាកដើរទៅមិនរួច ក៏លួនមកពួននៅទីនេះ។ **ជូឡុង**ឲ្យទាហានម្នាក់ចុះពីលើសេះមកពយក**កាន់យ៉ុង**ឡើងជិះសេះ ហើយប្រាប់ថា អ្នកស្រូតរូតទៅមុនចុះ បើបានជួបប្រទះនឹងឡៅពីជាចៅហ្វាយនាយយើងឲ្យជម្រាបថា ឥឡូវនាង**កាំហ៊ូយិន**ខ្ចាត់ភ្លាត់ទៅបាត់រកមិនទាន់ឃើញទេ យើងនៅស្វះស្វែងរកឲ្យឃើញទើបទៅជាក្រោយ បើសិនណាយើងរកនាង**កាំហ៊ូយិន**មិនឃើញទេ ទោះបីនឹងស្លាប់ក៏យើងមិនស្ដាយជីវិតឡើយ។ **ជូឡុង**ផ្ដាំហើយ ក៏បំផាយសេះវិលទៅក្រោយវិញ។

ទទួលពេលនោះឮសំឡេងទាហានម្នាក់ស្រែកថា **ជូឡុង**បរសេះទៅឯណា? **ជូឡុង**ឮច្បាស់ក៏ទាញសេះឈប់ ហើយងាកចូលទៅសួរថា អ្នកឯងឈ្មោះអ្វី? ទាហាននោះប្រាប់ថា ខ្ញុំបាទជាអ្នកបររទេះឲ្យនាង**កាំហ៊ូយិន**ជិះ ឥឡូវនាងនោះត្រូវព្រួញរបួសទៅមិនរួច។ ជូឡុងសួរថា នាងនៅឯណាឥឡូវនេះ? ទាហានឆ្លើយថា នាងរត់ច្រឡំបល់ចូលទៅក្នុងគ្រួសារអ្នកស្រុកនៅទិសខាងឯត្បូង។ **ជូឡុង**ឮហើយក៏រត់ចោលទាហានទាំងអស់ ខំបរសេះស្រូតទៅតែម្នាក់ឯង ប្រទះនឹងពួកអ្នកស្រុកដែលរត់ទៅពួននៅកន្លែងមួយ ក៏សួរថា ឃើញនាង**កាំហ៊ូយិន**នៅពួនក្នុងទីនេះដែរឬ?

នាង**កាំហ៊ូយិន**ឆ្លើយថា ខ្ញុំនៅឯណេះ។ នាងក៏ធូរស្រាលក្នុងចិត្ត ព្រោះដ្បិតឃើញ**ជូឡុង**ទៅដល់ ហើយថា អ្នកចូរជួយយកអាយុជីវិតខ្ញុំផង ថាហើយក៏យំសោកាពិលាប។ **ជូឡុង**លោតចុះពីលើសេះខ្មីឃ្មាតចូលទៅគំនាប់ហើយថា ដែលខ្ញុំបាទមិនបានរិះរវាំងអ្នក ៗក៏បានសេចក្ដីលំបាកដូច្នេះ ទោសខ្ញុំខុសធ្ងន់ណាស់ ឥឡូវនាង**ប៊ីហ៊ូយិន**និង**អាតៅ**ជាបុត្រនោះនៅឯណា? នាង**កាំហ៊ូយិន**ប្រាប់ថា កាលទើបចុះពីលើរទេះ រត់ចូលទៅច្រឡំនឹងគ្រួសារអ្នកស្រុកដែលមកជាមួយគ្នា លុះទាហាន**ចូឆូ**ដេញវាយចូលមកពីក្រោយ ទាំងអស់គ្នាក៏បែកខ្ចាត់ភ្លាត់អស់ទៅ មិនដឹងជាទៅនៅខាងណាទេ។

កាលកំពុងតែនិយាយគ្នា ទទួលឃើញកងទ័ព**ចូឆូ**លើកមកមួយកងដេញគ្រប់គ្រួសារចូលមក **ជូឡុង**ឮសំឡេងទ្រហ៊ោយំអឺងកង ក៏ភ័យស្លុតស្មារតីលោតឡើងសេះខ្មីឃ្មាត ក្រឡេកទៅឃើញ**អ៊ីតោ**លើកទាហានមួយកង ប្រហែលមួយពាន់ប្លាយ ចាប់បាន**ប៊ីតុក**ចងដៃដឹកមកខាងក្រោយសេះ **ជូឡុង**ក៏បំផាយសេះចូលទៅស្រែកគំហកដោយសំឡេងយ៉ាងខ្លាំង នឹងចូលច្បាំងតនឹង**អ៊ីតោ** ៗបរសេះចូលតស៊ូនឹង**ជូឡុង**មិនទាន់បានមួយភ្លែង **ជូឡុង**ក៏យកទួនចាក់ត្រូវ**អ៊ីតោ**ធ្លាក់ពីលើសេះស្លាប់ ហើយក៏ស្រាយចំណង**ប៊ីតុក**ចេញ ដណ្ដើមសេះបានពីទាហានពីរ ហើយឲ្យប៊ីតុកមួយ នាង**កាំហ៊ូយិន**មួយ ឡើងជិះសេះចេញទៅដល់ចុងស្ពាន។

**តៀវហ៊ុយ**ក្រឡេកឃើញ**ជូឡុង**ក៏ស្រែកថា ហេតុម្ដេចបានជា**ជូឡុង**ប្រែចិត្តទៅចូលខាងចូឆូ? **ជូឡុង**ស្រែកតបថា អ្នកកុំស្ដីដូច្នោះ ដែលខ្ញុំបាត់យូរទាំងម៉្លេះ ព្រោះខ្ញាត់ភ្លាត់បាត់នាង**កាំហ៊ូយិន** នាង**ប៊ីហ៊ូយិន**ទាំងពីរមិនដឹងទៅឯណា។ ខ្ញុំខំស្វះស្វែងតាមរកបានជាយឺតយូរមកជាក្រោយ ដែលថាខ្ញុំនឹងប្រែចិត្តចេញទៅស្រឡាញ់**ចូឆូ**នោះមិនមែនទេ។ **តៀវហ៊ុយ**ស្ដាប់ហើយថា នេះហាក់តែ**កាន់យ៉ុង**មកប្រាប់ការធូន់ស្រាលដល់ខ្ញុំជាមុន បើកុំតែដូច្នោះខ្លួនអ្នកនិងខ្ញុំក៏ភ័ន្តច្រឡំខុសគ្នាទៅ។ ឯ**ជូឡុង**សួរថា ឥឡូវចៅហ្វាយយើងនៅឯណា? **តៀវហ៊ុយ**ឆ្លើយថា បងយើងនៅឯក្រោយផ្លូវមិនឆ្ងាយប៉ុន្មានទេ។ **ជូឡុង**និយាយនឹង**ប៊ីតុក**ថា អ្នកចូរនាំនាង**កាំហ៊ូយិន**ទៅឲ្យចៅហ្វាយយើងមុនចុះ ខ្ញុំនឹងវិលត្រឡប់ទៅស្វែងរកនាង**ប៊ីហ៊ូយិន** និង**អាតៅ**ឲ្យឃើញសិនសឹមទៅជាក្រោយ។ **ជូឡុង**និយាយហើយ បរសេះត្រឡប់ទៅជួបនឹង**ហែហ៊ូអៀន**កំពុងលើកទាហានប្រហែលហាសិបនាក់ បរសេះកាន់ទួនសៀតគ្រប៊ីឈរស្ទាក់ផ្លូវ**ជូឡុង** ៗក៏បរសេះចូលតយុទ្ធនឹង**ហែហ៊ូអៀន**បានមួយភ្លែង ក៏យកទួនចាក់ត្រូវ**ហែហ៊ូអៀន**[1]ធ្លាក់ពីលើសេះស្លាប់។ ទាហានទាំងអស់ក៏បែកខ្ញាត់ខ្ចាយរត់ទៅ។ **ហែហ៊ូអៀន**នេះជាមនុស្សទំនុកទុកចិត្តរបស់**ចូឆូ** មានកម្លាំងច្រើន។ **ចូឆូ**ស្រឡាញ់ឲ្យកាន់គ្រប៊ីឈ្មោះគីថនកៀម បើនឹងកាប់ដែកក៏ដូចកាប់បណ្ដូលចេក។

**ជូឡុង**បានគ្រប៊ីហើយហូតចេញមកមើល ឃើញអក្សរចារឹកជាប់នឹងផ្លែក៏ដឹងថាគ្រប៊ីឯករបស់**ចូឆូ**។ **ជូឡុង**ក៏សៀតស្ពាយហើយបំផាយសេះពុះពារទម្លាយចូលទៅរកនាង**ប៊ីហ៊ូយិន**ក្នុងកងទ័ពតែម្នាក់ឯង មិនបានកោតញញើតនឹងសេចក្ដីស្លាប់សោះ ប្រទះគ្រប់គ្រួពួកអ្នកស្រុកទាំងពីរតំបន់ ក៏សួររកនាង**ប៊ីហ៊ូយិន**ជាដរាប។ មានមនុស្សម្នាក់ចង្អុលប្រាប់ថា នាង**ប៊ីហ៊ូយិន**ត្រូវព្រួញត្រង់ភ្លៅដើរមិនរួចពកូនអង្គុយពួននៅត្រង់ជញ្ជាំងផ្ទះត្រង់ណោះ។ **ជូឡុង**ដឹងច្បាស់ដូច្នោះ ក៏បរសេះ

---

[1] ត្រង់នេះ អាចមានការភ័ន្តច្រឡំពីអ្នកធ្វើប្រតិចារឹកជាន់ដើម ព្រោះឈ្មោះតួអង្គ**ហែហ៊ូអៀន**នេះ មានឃើញនៅក្នុងភាគបន្តៗទៀតរហូតដល់ភាគប្រាំបួនទើបស្លាប់។

ស្រូតទៅដល់ផ្ទះមួយភ្លើងឆេះនៅតែជញ្ជាំង ក៏ចូលទៅគន់រកមើលឃើញនាង**ប៊ីហ៊ូឃិន**ពរ**អាតៅ**អង្គុយយំនៅក្បែរមាត់អណ្ដូង។ **ជូឡុង**លោតចុះពីលើសេះរត់ចូលទៅគំនាប់ហើយក៏យំ។

នាង**ប៊ីឃ៊ូឃិន**ឃើញ**ជូឡុង**ទៅដល់ មានអំណរក្នុងចិត្តណាស់ថា អ្នកមកជួបនឹងខ្ញុំគ្រានេះ ក៏ដូចជាអ្នកមកយកជីវិតកូនទៅទុកឲ្យរស់ សូមឲ្យអ្នកមានសេចក្ដីករុណានាំយក**អាតៅ**ទៅចុះ ដើម្បីឲ្យបិតាបានឃើញមុខ ឯខ្លួនខ្ញុំមុខជាស្លាប់ហើយតាមតែវេរាកម្មរបស់ខ្ញុំស្រាប់។ **ជូឡុង**តបថា ដែលអ្នកបានផ្ដល់នូវសេចក្ដីទុក្ខលំបាកទាំងម្ល៉េះ ក៏ព្រោះខ្លួនខ្ញុំបាទគ្រងរក្សាអ្នកមិនឈ្នះ ទោសទាំងអស់ក៏ធ្លាក់លើខ្លួនខ្ញុំបាទជាទម្ងន់ ឥឡូវខ្ញុំបាទបានខំស្វះស្វែងមករកអ្នកឃើញហើយ សូមអញ្ជើញអ្នកឡើងជិះសេះចុះ ខ្ញុំបាទនឹងដើរជើងរវាំងការពីមុខនាំអ្នកចេញទៅ។ នាង**ប៊ីហ៊ូឃិន**ឆ្លើយថា អ្នកកុំព្រួយជាទុក្ខនឹងខ្ញុំឡើយ ដ្បិតខ្លួនខ្ញុំឈឺធ្ងន់ណាស់ ហើយមុខជាមិនរស់ទេ ខ្ញុំនេះបើនឹងរួចរស់ជីវិតក៏ពីព្រោះតែអ្នកដែលអ្នកនឹងចុះពីលើសេះដើរជើងទៅបីដូចជាជីវិតកូនខ្ញុំគ្មាននៅសោះឡើយ អ្នកចូរខំស្រូតយកតែកូនខ្ញុំទៅមុនចុះ កុំបីរវល់កំណាន់ចិត្តគិតដល់ខ្ញុំឡើយ។ **ជូឡុង**ឆ្លើយថា អ្នកកុំជជែកដោះស្រាយឲ្យខ្ញុំបាទរង់ចាំយូរឡើយ អញ្ជើញឡើងសេះឲ្យឆាប់ៗចុះ។ សំឡេងទាហាន**ចូឆ្វ**ហ៊ោកញ្ជ្រៀវខ្ទាន់ៗទ័ពចូលកាន់តែជិតណាស់ហើយ។ នាង**ប៊ីហ៊ូឃិន**ថា បើអ្នកអាណិតហើយ ក៏ចូរស្រូតរូតយកកូនខ្ញុំរត់ឲ្យរួចចុះ ខ្លួនខ្ញុំនេះនឹងទៅផងមិនបានទេ នឹងមករវល់អំពល់អ្វីនឹងខ្ញុំនេះ នឹងនាំគ្នាស្លាប់ទាំងអស់ទៅឬ? ហើយក៏យកកូននោះហុចទៅឲ្យ**ជូឡុង** ៗ មិនព្រមទទួល នៅតែទទូចអញ្ជើញនាង**ប៊ីហ៊ូឃិន**ឲ្យឡើងជិះសេះដល់ពីរបីគ្រា។ នាង**ប៊ីហ៊ូឃិន**ក៏មិនព្រមឡើងជិះសេះសោះ ចេះតែអង្វរករជាយូរណាស់។ សំឡេងទាហាន**ចូឆ្វ**ក៏រឹតតែហ៊ោកញ្ជ្រៀវខ្ទាន់ៗជិតចូលមក។ **ជូឡុង**ក៏និយាយថា អ្នកនៅអែអង់ធ្វើឲ្យរម្ល៉េះ បើកងទ័ព**ចូឆ្វ**លើកចូលមកហើយ នឹងមិននាំគ្នាស្លាប់បង់ការទទេទៅឬ? នាង**ប៊ីហ៊ូឃិន**ឮដូច្នោះ ក៏យក**អាតៅ**ជាបុត្រនោះ បោះចោលទៅលើផែនដីចំពោះមុខ**ជូឡុង**ហើយ ក៏លោតចុះទៅក្នុងអណ្ដូងទឹកស្លាប់មួយរំពេច។

**ជូឡុង**ឃើញដូច្នោះ យំសោកបោកខ្លួនប្រាណ ដោយមានចិត្តអាណិតនាង**ប៊ីហ៊ួយិន**ណាស់ ហើយក៏កកាយដីក្បែរមាត់អណ្តូងនោះអស់ទៅ ប្រាថ្នានឹងមិនឲ្យទាហាន**ចូឆូ**ឃើញសាកសព ហើយយកសំពត់រុំខ្លួន**អាតៅ**ជាបែបអង្រឹងចងភ្ជាប់ពីខាងមុខ ដោះអាវក្រោះបញ្ចូលទៅក្នុងដើមទ្រូង យក**អាតៅ**លាក់ពីក្នុងក្រោះនោះទៅវិញ ឡើងសេះបរចេញមក ទទួលជួបនឹង**ហាន់បេង**ជាទាហានរង**ចូឆូ** លើកពលទាហានដើរឆ្លងស្ទាក់ពីមុខ**ជូឡុង** ៗក៏បរសេះចូលច្បាំងនឹង**ហាន់បេង**បានបីភ្លែង។ **ហាន់បេង**ចាញ់ដៃ**ជូឡុង** ៗចាក់ត្រូវនឹងលំពែងធ្លាក់ពីលើសេះស្លាប់ ក៏កាប់ទម្លាយចេញទៅមុខជួបនឹងកងទ័ព**ទៀវខាប់**ស្ទាក់ពីមុខទៀត ក៏បរសេះចូលប្រយុទ្ធគ្នានឹងទៀវខាប់បានដប់ប្រាំភ្លែង **ជូឡុង**ក៏ទាញសេះវេះរត់ចេញ។ **ទៀវខាប់**ឃើញបានចំណាប់ក៏បរសេះដេញតាមទៅដោយលឿនរហ័សណាស់ ប្រទះនឹងថ្លុកជង្ហុកមួយអន្លើ សេះរត់ជៀសមិនទាន់ ក៏ធ្លាក់ចុះទៅក្នុងជង្ហុកនោះ ទាំងសេះទាំងមនុស្សក៏ដួលប្រមូលលើគ្នា។ **ទៀវខាប់**ក៏ដេញតាមទៅទាន់ លោតទៅប្រុងចាក់នឹងលំពែង។ ខណៈនោះជាបុណ្យបារមីរបស់**អាតៅ** ដែលនឹងបានធ្វើជាក្សត្រសោយរាជសម្បត្តិ មិនគួរនឹងស្លាប់ដោយគ្រឿងសាស្ត្រាវុធ ក៏បណ្តាលជាពន្លឺភ្លើងឆេះចេញអណ្តាតភ្លើងត្រង់កន្លែង**ជូឡុង**ធ្លាក់នោះ។ **ទៀវខាប់**ភ័យភ្ញាក់ដូចគេកន្ត្រាក់សេះនោះទុចថយមកក្រោយ។ **ជូឡុង**ក៏កន្ទ្រាំដីឲ្យសេះស្ទុះឡើង រួចក៏លោតចេញបានពីក្នុងជង្ហុករណ្តៅរត់ទៅបាន។ **ទៀវខាប់**ឃើញច្បាស់ដូច្នោះ ក៏មិនអាចនឹងដេញតាម។ ឯ**ម៉ាអៀន** និង**ទៀវគី**ពីរនាក់លើកទាហានតាមពីក្រោយពីមុខហើយស្រែកថា **ជូឡុង**គ្រានេះនឹងរត់ពីដៃយើងមិនរួចទេ។ ឯ**ចៀវហៀ** និង**ចៀវឡាំ** ពីរនាក់ក៏លើកទាហានចេញទៅស្ទាក់ពីមុខ។ **ជូឡុង**បរសេះចូលប្រយុទ្ធគ្នានឹងពួកទាហានទាំងបួនក្រុមនោះជាពន្លឹក។ ពួកកូនទាហានទាំងអម្បាលនោះ ក៏ចោមរោមព័ទ្ធ**ជូឡុង**ជាជ្រួលច្របល់។ **ជូឡុង**ក៏ហូតគ្របីដេញកាប់ចាក់ស្លាប់ទាហានទាំងនោះច្រើនណាស់។

**ចូឆូ**ឡើងលើភ្នំកេងសាន់ ក្រឡេកមើលពីក្រោយឃើញ**ជូឡុង**ចូលប្រយុទ្ធក្នុងកងទ័ពជាជ្រួលច្របល់ដោយទាហានទាំងពួង ឃើញថ្វីដៃដែលកាប់ផ្ការមិនមានរា

ញញើតទៅខាងណា ទើបសួរថា ទាហាន**ឡៅ**ពីម្នាក់នោះឈ្មោះអ្វី ក៏មានថ្វីដៃខ្លាំងពូកែម្ល៉េះ? **ចោហាង**ឮ**ចូឆ្វ**សួរ ក៏បរសេះចុះពីលើភ្នំ ចូលទៅស្ទាក់ពីមុខ**ជូឡុង** ហើយស្រែកសួរថា ឯងឈ្មោះអ្វី? **ជូឡុង**ក៏ស្រែកតបមកវិញថា យើងឈ្មោះ**ទៀវជូឡុង**។ **ចោហាង**ក៏ត្រឡប់សេះឡើងទៅជម្រាប**ចូឆ្វ** ៗក៏សរសើរថា ទាហាននេះមានអំណាចបីដូចខ្លា ហើយក៏បង្គាប់ឱ្យស្រែកប្រកាសថា **ចូឆ្វ**ហាមប្រាមទាហានទាំងពួងមិនឱ្យបាញ់ធ្នូ គឺថាបុណ្យបារមីរបស់**អាតៅ** ដែលនឹងបានសោយរាជសម្បត្តិទៅឯមុខ ទើបបណ្ដាលឱ្យ**ជូឡុង**សម្លាប់មេកងធំក្នុងកងទ័ព**ចូឆ្វ**បានពីរនាក់ ទាហានឯកហាសិបនាក់ ឈាមក៏ហូរប្រឡាក់ពេញអស់ទាំងក្រោះនិងខ្លួនសេះ បីដូចគេស្រោចទឹកល័ក្ខ។

**ជូឡុង**បរសេះនាំ**អាតៅ**ស្រូតទៅដល់ជើងភ្នំមួយអន្លើ ប្រទះនឹង**ចុងជិន, ចុងស៊ិន**បងប្អូនទាំងពីរនាក់ ដែលជាទាហានរង**ហែហ៊្វូទុន** ញាក់សេះចេញមកស្ទាក់ពីមុខ **ជូឡុង**ក៏បរសេះចូលប្រយុទ្ធគ្នានឹង**ចុងជិន, ចុងស៊ិន**បានបីភ្លែង ចាក់ត្រូវ**ចុងជិន**ធ្លាក់ពីលើសេះស្លាប់ រួច**ជូឡុង**ក៏បរសេះស្រូតរត់ទៅ។ **ចុងស៊ិន**ក៏បរសេះចេញតាមខ្ទាន់ពីក្រោយ ជាប់គ្នានឹងសេះ**ជូឡុង** ងាកនឹងចាក់ដោយលំពែង សេះក៏ស្ទុះជែងហួសមួយថ្នាក់ រៀបនឹងចាក់ក៏ផុតទៅវារង់នៅបានទឹមគ្នា។ **ជូឡុង**ងាកសេះត្រឡប់មកតនឹង**ចុងស៊ិន** ទទួលសេះ**ចុងស៊ិន**ដេញខ្ទាន់ជិតនៅងាកខ្លួនមិនទាន់ ដើមទ្រូង**ចុងស៊ិន**និងដើមទ្រូង**ជូឡុង**ក៏ទៅប៉ះទង្គិចគ្នា **ជូឡុង**យកលំពែងវាត់លំពែង**ចុងស៊ិន**ដោយរហ័ស ក៏ជ្រុលខ្ទាតរបូតធ្លាក់ចុះ ទើបដកយកគ្រប៊ីចាក់បង្រុះត្រូវ**ចុងស៊ិន**ចំក្បាលរហូតចុះទៅ ដូចគេពុះដាច់ពាក់កណ្ដាលខ្លួនជាពីរចំណែកធ្លាក់ស្លាប់មួយរំពេច រួច**ជូឡុង**ក៏បរសេះគេចស្រូតរត់ទៅដល់ស្ពានទៀងប៉ាន់កៀវ ទទួលឮសំឡេងទាហាន**ចូឆ្វ**ស្រែកហ៊ោមកពីក្រោយ កម្លាំងសេះនិងកម្លាំង**ជូឡុង**ក៏ទន់ចុះ ទទួលក្រឡេកឃើញ**តៀវហ៊ុយ**ឈរលើស្ពានក៏ស្រែកថា គ្រានេះខ្ញុំអស់កម្លាំងណាស់ហើយ អ្នកជួយខ្ញុំផង។ **តៀវហ៊ុយ**ក៏ស្រែកថា អ្នកស្រូតឆ្លងស្ពានទៅចុះ ខ្ញុំនឹងទទួលតស៊ូ។ ឯ**ជូឡុង**ក៏ស្រូតឆ្លងស្ពានទៅចម្ងាយផ្លូវប្រហែលពីររយសិន (៨ គ.ម) ជួប

នឹង**ឡៅពី**ឈរនៅទីនោះ **ជូឡុង**ចុះពីលើសេះទៅគំនាប់**ឡៅពី**ហើយអង្គុយយំ អធិប្បាយសេចក្ដីឲ្យ**ឡៅពី**ស្ដាប់គ្រប់ប្រការ ហើយថាខ្ញុំបាទយកបានតែ**អាតៅ** ជាបុត្រលោករុំដាក់នៅក្នុងក្រោះ កាលខ្ញុំបាទទម្លាយចេញមកពីក្នុងចំណោមទ័ពនោះ បានប្រយុទ្ធនឹងទាហាន**ចូឆូ** ស្រាប់តែបានឮសំឡេង**អាតៅ**ស្រែកយំម្ដងៗ ឥឡូវបាត់សូន្យឈឹងជាយូរហើយ មិនបានឮសំឡេងយំ នឹងជាអន្តរាយយ៉ាងណាក៏មិនដឹងឡើយ។

**ជូឡុង**ក៏ដោះក្រោះចេញ ស្រាយយកសំពត់ដែលរុំ**អាតៅ**នៅកខ្លួននោះមកលាចេញ ឃើញ**អាតៅ**នៅដេកលក់ ក៏សែននឹកអរពន់ប្រមាណ ហើយក៏និយាយនឹង**ឡៅពី**ថា បុណ្យពីបុរាណរបស់លោកខ្លាំងណាស់ បានជាបុត្ររបស់លោកមិនមានប៉ះលើសេចក្ដីអន្តរាយ។ **ជូឡុង**ស្រាយហើយព**អាតៅ**ហុចជូនទៅ**ឡៅពី** ៗក៏ទទួលយក**អាតៅ**ជាបុត្រហើយធ្វើជាខឹងទម្លាក់**អាតៅ**ទៅលើដី ហើយថា ព្រោះតែអាចង្រៃឯងមួយ បានជា**ជូឡុង**ទាហានឯករបស់អញទៀបនឹងថ្លោះការដោយសឹកសត្រូវ។ **ជូឡុង**ឃើញដូច្នោះភ័យណាស់ ក្រោកចូលទៅរហ័សប្រញាប់ចាប់លើកព**អាតៅ**ដាក់លើភ្លៅ ហើយលុតជង្គង់ចុះគំនាប់**ឡៅពី**ថា សូមលោកកុំប្រកាន់ខឹងនឹងបុត្ររបស់លោកឡើយ ខ្លួនខ្ញុំបាទនេះហើយ ទោះបីនឹងស្លាប់ជីវិត ខ្ញុំសូមយកលោហិតក្រាលផែនដីទុកជាប្រាកដ ជាទីតបស្នងសងគុណលោក។

ឯ**ប៊ុនផេង**លើកទាហានដេញដិតតាមជូឡុងដល់ស្ពានទៀងប៉ាន់កៀវ ឃើញ**តៀវហ៊ុយ**កាន់លំពែងឈរស្ទាក់លើស្ពាន ក្រឡេកទៅឃើញកណ្ដាលផ្លាធូលីហុយទ្រលោមតាមជើងសេះ ដែលទាហាន**តៀវហ៊ុយ**វាយឲ្យបោលផុសឡើងពេញក្នុងព្រៃ ក៏សម្គាល់ថា មានទាហានពួនបង្កប់នៅជាច្រើន ឯសេះនោះក៏មិនបានឲ្យបរចេញមក។ ទទួល**ចោយិន, លីទៀន, ម៉ាអៀន, ង៉ាក់ជិន, តៀវលៀវ, ទៀវខាប់** និង**ខៅធូ** ទាំងប្រាំបីនេះនាំទាហានលើកតាមមកទាន់ ក្រឡេកឃើញដូច្នោះក៏គិតថា **ខុងបេង** ប្រើកលឧបាយបង្កប់ទាហានទុកនៅទីនោះហើយ ក៏នាំគ្នាឈប់បង្អង់នៅទីនោះទាំងអស់ ទើបប្រើបម្រើឲ្យទៅជម្រាប**ចូឆូ** ៗដឹងដូច្នោះក៏លើកទ័ពស្រូតមកថែមទៀត។

**តៀវហ៊ុយ**ក្រឡេកទៅ ឃើញទាហានលើកមកជាច្រើន ឃើញសប្បធន់បាំងមកពីក្រោយក៏ដឹងថា **ចូឆូ**លើកតាមមកផង ទើបស្រែកគំហកយ៉ាងខ្លាំងថា ខ្លួនអញឈ្មោះ **តៀវហ៊ុយ** នរណាដែលមានថ្វីដៃខ្លាំងពូកែ ឲ្យចេញមកតស៊ូគ្នាល្បងកម្លាំងមើលចុះ ឲ្យឃើញចាញ់ឈ្នះ។ ទាហាន**ចូឆូ**ឮសំឡេង**តៀវហ៊ុយ**ក៏ភ័យស្លុតទាំងអស់គ្នាស្រឡាំងកាំងមិនបានចូលច្បាំង។ **តៀវហ៊ុយ**ក៏ឲ្យទាហានស្រាយមែកឈើពីកន្ទុយសេះចេញអស់ ហើយក៏ឲ្យទាញក្តារស្ពានទាំងអស់ចេញ រួចនាំទាហានទាំងនោះត្រឡប់ទៅរក**ឡៅពី** ទើបពណ៌នារឿងរ៉ាវឲ្យ**ឡៅពី**ស្តាប់គ្រប់ប្រការ។ **ឡៅពី**តបថា ខ្លួនចៅនេះមានថ្វីដៃខ្លាំងពូកែក៏ពិតមែន តែថានឹកស្តាយព្រោះធ្វើឧបាយមិនបានរហូត ដោយចៅទៅទាញក្តារស្ពានចេញអស់ បីដូចនឹងប្រាប់ហេតុឲ្យ**ចូឆូ**ដឹងថា មនុស្សខាងយើងតិច ឲ្យលើកតាមមកទៀត បើចៅមិនទាញស្ពានចេញទេ **ចូឆូ**ក៏នឹងសម្គាល់ថា យើងបង្កប់មនុស្សទុកក្នុងព្រៃជាច្រើន ក៏នឹងញញើតខ្លាច លុះនិយាយហើយក៏នាំទាហានងាកចុះផ្លូវនឹងតម្រង់ទៅកំពង់ហាន់ជិន។

ឯ**តៀវលៀវ, ទៀវខាប់** និង**ខៅធូ**ឃើញ**តៀវហ៊ុយ**រត់ទៅហើយ ក៏ត្រឡប់ទៅប្រាប់**ចូឆូ**ថា ឥឡូវ**តៀវហ៊ុយ**ទាញក្តារស្ពានចេញអស់រត់ទៅ **ចូឆូ**ឮដូច្នោះក៏ថា **តៀវហ៊ុយ**នោះមានតែខ្លួនម្នាក់ឯង គ្មានទាហានទេ បានជាទាញស្ពានទម្លាក់អស់រត់ទៅ ព្រោះខ្លាចយើងលើកទ័ពតាម ហើយទើបកេណ្ឌទាហានបានបីពាន់ ឲ្យទៅធ្វើស្ពានជាថ្មីវែងបីសិន (១២០ម) កំណត់ឲ្យហើយតែក្នុងវេលាមួយថ្ងៃ នឹងអាលលើកទាហានឆ្លង។ **លីទៀន**និយាយនឹង**ចូឆូ**ថា ដែលលោកនឹងបង្ខំលើកទ័ពតាម**ឡៅពី**ទៅនោះ ខ្ញុំបាទគិតក្រែងខ្លាចជាកលឧបាយរបស់**ខុងបេង** ឯ**តៀវហ៊ុយ**នឹងមានតម្រិះប្រាជ្ញាធ្វើឧបាយដល់ប៉ុណ្ណោះមិនមែនទេ សូមឲ្យលោកកុំអាលលើកទ័ពប្រញាប់ទៅឡើយ។ **ចូឆូ**ថា ឧបាយកលតែប៉ុណ្ណោះនឹងខ្លាចអ្វី ទោះបីលើសជាងនេះ ក៏មិនត្រូវកោតខ្លាចដែរ។ **ចូឆូ**ក៏ស្រូតលើកទ័ពឆ្លងស្ពានតាមទៅ។

**ឡៅពី**បានឮសំឡេងទាហានហ៊ោកញ្ជ្រៀវពីខាងក្រោយ ដូចជានឹងភ្លូកក្រឡាប់ផែនដី មើលទៅឃើញផង់ធូលីហុយទ្រលោមទៅលើអាកាសក៏និយាយថា

យើងនឹងទៅវេលានេះ ក៏នៅមានទន្លេនៅខាងមុខ ពីខាងក្រោយក៏មានកងទ័ពលើកគ្រលុកតាមមក តើយើងនឹងត្រូវគិតយ៉ាងណាទៅអេះ? ទើបប្រើ**ជូឡុង**ត្រៀមពលយោធានាំមកការពារពីខាងក្រោយចាំរងកងទ័ព**ចូឆូ**ដែលលើកតាមមកនោះ។

ខណៈនោះ**ចូឆូ**និយាយនឹងទាហានទាំងពួងថា **ឡៅពី**គ្រានេះដូចត្រីខាំងនៅក្នុងស៊ង ដូចខ្លាដំបងខាំងនៅក្នុងទ្រុង បើនឹងលះបង់ទុកឲ្យយូរក៏នឹងរត់រួចទៅបាន បីដូចត្រីរួចទៅក្នុងទឹក ខ្លារួចទៅក្នុងព្រៃ ទាហានយើងទាំងអស់គ្នាចូរជួយខ្មីឃ្មាតសង្វាតតាមចាប់ខ្លួន**ឡៅពី**ឲ្យបានចុះ។ ខណៈនោះពួកទាហានក៏ខំស្រូតប្រជ្រៀតគ្នាលើកតាមទៅ។

ឯ**គួនអ៊ូ**ដែលទៅស្រុកកាំងហែបានទាហានមួយម៉ឺន ចុះទូកលើកត្រឡប់មកដល់ពាក់កណ្ដាលផ្លូវដឹងដំណឹងថា **ឡៅពី**បែកទ័ពរត់មកដល់ស្ពានទៀងប៉ាន់កៀវ ក៏ឲ្យទាហានចូលចតទូកត្រង់កំពង់ហាន់ជិន ហើយលើកទាហានឡើងគោកមកស្កាត់ទទួល**ឡៅពី**។ ទទួល**ឡៅពី**កាត់ស្រូតទៅដល់ជួបប្រទះគ្នាត្រង់ភ្នំមួយអន្លើ ក៏ជួបនឹងកងទ័ព**ចូឆូ**ទៀតលើកជាប់ជិតដោយពីក្រោយ**ឡៅពី**មកតាមផ្លូវធំ។ **គួនអ៊ូ**ក៏បរសេះជញ្ជ្រាំដេញទាហានឲ្យស្រែកហ៊ោឡើងពីមាត់កំពង់មក។ **ចូឆូ**ឃើញដូច្នោះក៏នឹកឃើញដល់ពាក្យ**លីទៀន**ហាមមិនឲ្យលើកទ័ពមក ឃើញត្រូវដូចពាក្យថា គឺជាកលឧបាយ**ខុងបេង**ពិត។ **ចូឆូ**ក៏បង្គាប់ទាហានឲ្យថយត្រឡប់មកវិញ។ **គួនអ៊ូ**ក៏ដេញចូលតយុទ្ធសង្កុញទៅតាមចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម) ឃើញទាហាន**ចូឆូ**ថយទៅមិនទាន់បានតទល់ **គួនអ៊ូ**ក៏រាថយត្រឡប់ទៅមុខវិញតាមផ្លូវកាត់ប្រទះនឹង**ឡៅពី**ក៏មានអំណរណាស់ ទើបនាំទៅចុះទូកហើយសួរថា នាង**ប៊ីហ៊ូយិន**បងថ្លៃខ្ញុំបាទនៅឯណាក៏មិនឃើញ? **ឡៅពី**ក៏អធិប្បាយរឿងតាមដែលបានតតាំងច្បាំងនឹង**ចូឆូ**នោះឲ្យ**គួនអ៊ូ**ស្ដាប់ ហើយថានាង**ប៊ីហ៊ូយិន**លោតសម្លាប់ខ្លួនក្នុងអណ្ដូងទឹកទៅហើយ **ជូឡុង**យកបានតែ**អាតៅ**មកឲ្យបង។ **គួនអ៊ូ**បានឮដូច្នោះ ក៏អង្គុយចុះទះទ្រូងយំអាឡោះអាល័យ ហើយថា កាលថ្ងៃទៅតាមហែស្ដេចព្រះរាជដំណើរចេញ

ទៅប្រពាតព្រៃ កាលនោះបើបងកុំឃាត់ហាមខ្ញុំបាទ កាលណានឹងបានមកលំបាកតោកយ៉ាកយ៉ាងនេះ។

**ឡៅពី**ថា គ្រានោះខ្លួនបងក៏អនាថា រកទីពឹងដែលនឹងតាំងខ្លួន និងភូមិដ្ឋានមិនបានឲ្យល្អមជាទីទុកចិត្ត គិតទៅឃើញថា ខ្លួនបងដូចជាជ្រូកជាប់ទ្រុង ក្រែងធ្វើការនោះមិនរហូត បានជាឃាត់ហាមប្អូនដូច្នោះ។ កាល**ឡៅពី**និយាយនឹង**គួនអ៊្វ**ដូច្នោះ ទទួល**ឡៅគី**លើកទ័ពទូកមកដល់ត្រើយខាងលិច។ **ឡៅពី**ឮសំឡេងហ៊ោក៏ភ័យស្លុតស្មារតី ក្រឡេកទៅឃើញនាយទូកតែងខ្លួនពាក់អាវសំពត់ស ក៏សង្កេតស្គាល់បានជា**ឡៅគី**។ **ឡៅពី**ក៏ឲ្យទាហានទាំងពួងសំងំនៅស្ងៀម។ លុះ**ឡៅគី**មកដល់ក៏ចតទូកចូលទៅគំនាប់**ឡៅពី**ហើយយំថា ឥឡូវខ្ញុំបាទដឹងថា លោកបានថ្លោះការនឹង**ចូវអ្វ**បែកទ័ពរត់មក ខ្ញុំបាទក៏បានរិះរកកេណ្ឌទាហានឲ្យបានលើកមក ប្រាថ្នានឹងជួយលោកមា។

**ឡៅពី**ឮដូច្នោះក៏ត្រេកអរណាស់ ទើបអធិប្បាយរឿងតាំងពីដើមដល់ចប់ប្រាប់**ឡៅគី**ជាក្មួយឲ្យស្ដាប់គ្រប់ប្រការ ហើយឲ្យបន្ថយទូកចេញពីមាត់កំពង់ ទទួលក្រឡេកទៅឃើញទូកចម្បាំងមួយបើកក្ដោងមកពីទិសខាងលិច។ **ឡៅគី**ប្លែកក្នុងចិត្តក៏សួរ**ឡៅពី**ថា ខ្ញុំបាទកេណ្ឌទាហានលើកមកគ្រានេះក៏អស់រលីង ស្រុកកាំងហែក៏មានមនុស្សស្ដួចស្ដើងណាស់ ឥឡូវមានទូកចម្បាំងបើកក្ដោងមកជាច្រើន ប្រហែលជាទាហាន**ចូវអ្វ**ទេឬ? បើមិនដូច្នោះមុខជាទាហាន**ជីវយី**ឲ្យលើកមកធ្វើអន្តរាយជាប្រាកដ តើនឹងគិតយ៉ាងម្ដេច? លុះទូកចម្បាំងនោះចូលមកជិត **ឡៅពី**ក្រឡេកឃើញ**ខុងបេង**អង្គុយខាងក្បាលទូក **ស៊ុនខៀន**អង្គុយខាងកន្សៃ ក៏មានសេចក្ដីអំណរណាស់ ទើបឲ្យទាហានស្រែកហៅឲ្យចូលមកហើយសួរថា ហេតុម្ដេចក៏លោកនៅបង្អែបង្អង់ដូច្នេះ? **ខុងបេង**គំនាប់ហើយឆ្លើយថា ដែលខ្ញុំបាទលង់នៅដូច្នេះ ព្រោះខ្ញុំបាទទៅកេណ្ឌមនុស្សមកទៀតបានជាយឺតយូរ។ **ឡៅពី**បានស្ដាប់ដូច្នោះក៏ឲ្យបើកក្ដោងទូកជិតមក ហើយប្រឹក្សានឹង**ខុងបេង**ដើម្បីនឹងគិតរកឧបាយច្បាំងតនឹង**ចូវអ្វ**ទៅ។

**ខុងបេង**ឆ្លើយថា អាណាខេត្តក្បែរមាត់ទឹកដែលនៅជិតស្រុកកាំងហែនោះ មានទីបន្ទាយគួស្នាមភ្លោះមាំមួនល្មមនឹងតាំងនៅតស៊ូនឹង**ចូឆូ**បាន សុំឲ្យលើកទ័ពទៅតាំងនៅស្រុកហែខៅមាត់កំពង់ស្រុកកាំងហែចុះ ចំណីត្រីសាច់និងស្រូវអង្ករស្បៀងអាហារក៏បរិបូរមិនខ្វះខាត ហើយក៏ប្រាប់**ឡៅគី**ថា អ្នកចូរស្រូតត្រឡប់ទៅស្រុកកាំងហែឲ្យឆាប់ ដើម្បីនឹងត្រៀមពលទាហានទាំងពួងឲ្យព្រមទុកជួយការពារធ្វើការទៅខាងមុខ។ **ឡៅគី**ឆ្លើយថា ដែលនឹងឲ្យត្រឡប់ទៅប្រមូលពលទាហានត្រៀមបម្រុងការទុកនោះ ក៏គួរហើយ តែខ្ញុំបាទគិតថានឹងចង់អញ្ជើញលោកទៅផង ឲ្យជួយចាត់ចែងទាហានទាំងពួង កាលណាស្រេចហើយសឹមត្រឡប់ទៅនៅស្រុកហែខៅតែម្តងចុះ។ **ខុងបេង**យល់ឃើញត្រូវ ទើបឲ្យ**គួនអ៊ូ**នាំទាហានប្រាំពាន់ទៅនៅរក្សាស្រុកហែខៅ ហើយក៏នាំ**ឡៅពី**ទៅស្រុកកាំងហែជាមួយនឹង**ឡៅគី**។

ឯ**ចូឆូ**ដែលបានទៅប្រទះទ័ព**គួនអ៊ូ**នៅកណ្តាលផ្លូវនោះ ក៏សម្គាល់ថាជាកលឧបាយ**ខុងបេង**ទើបមិនអាចនឹងតាម**ឡៅពី**ទៅ ក៏នាំពលរថត្រឡប់មកវិញគិតថា **ឡៅពី**រត់ទៅគ្រានេះមុខជានឹងស្រូតរូតទៅវាយយកស្រុកកាំងឡេងជាប្រាកដ បើ**ឡៅពី**បានស្រុកកាំងឡេងហើយក៏នឹងតាំងខ្លួនជាមាំមួនបាន មុខជានឹងធ្វើការដោយកម្រណាស់។ គិតហើយក៏លើកទាហានវិលមកវិញ នឹងទៅវាយយកស្រុកកាំងឡេង។

ខណៈនោះ**តុងឃី**ដែលនៅរក្សាស្រុកកេងជីវ ដឹងថា ស្រុកសុងយ៉ុងនោះឡើងដល់**ចូឆូ**ហើយ លុះដឹងថា**ចូឆូ**លើកមកដល់ដែនស្រុកកេងជីវក៏នឹកខ្លាច ឃើញថានឹងតស៊ូមិនបាន ក៏នាំអាណាប្រជានុរាស្ត្រទាំងពួងចេញមកគំនាប់**ចូឆូ** ហើយឲ្យអញ្ជើញ**ចូឆូ**ចូលទៅក្នុងស្រុក។ **ចូឆូ**ក៏ចាត់ចែងរៀបចំអាណាប្រជានុរាស្ត្រទាំងពួង ឲ្យនៅជាសុខតាមប្រក្រតី ហើយពិគ្រោះប្រឹក្សានឹងសេនាទាហានទាំងពួងថា ឥឡូវ**ឡៅពី**ទៅតាំងនៅស្រុកកាំងហែហើយ យូរទៅខាងមុខឃើញថា ជាចិត្តគំនិតមួយគ្នានឹងស្រុកតងង៉ដូចស្មៅក្រវាញជ្រូក បើនឹងមិនជម្រះដកឲ្យអស់ឫសគល់ចេញទេ ក៏នឹងលូតលាស់ដុះឡើងវិញលើសដើម ហើយជាប់ជាពូជតៗគ្នាទៅទៀតនឹងគិតប្រការម្តេចទើបនឹងកម្ចាត់**ឡៅពី**ចេញបាន?

**ស៊ុនហ៊ីវ**ឆ្លើយថា ដែលមហាឧបរាជលើកទ័ពមកគ្រានេះ ក៏ឃើញថាជាការធំពន្លឹកណាស់ ប្រាកដទៅគ្រប់តំបន់ សូមឲ្យលោកមានសំបុត្រទៅដល់**ស៊ុនគួន**បបួលមកដើរលេងព្រៃក្នុងស្រុកកាំងហែ ហើយចូរគិតគូរបបួលចាប់**ឡៅពី**ឲ្យបាន បើបាន**ឡៅពី**ហើយនឹងបែងស្រុកកេងជីវឲ្យ**ស៊ុនគួន**ពាក់កណ្ដាល ហើយនឹងស្បថស្បែតគ្នាជាបងប្អូន មិនបានគិតប្រទូសរ៉ាយគ្នានឹងគ្នាតទៅ បើ**ស៊ុនគួន**ឃើញសំបុត្រក៏នឹងមានសេចក្ដីកោតញញើតបុណ្យ និងប្រាជ្ញាមហាឧបរាជ ខូចជាក៏នឹងមករកលោក។ **ចូឆ្វ**យល់ឃើញត្រូវ ទើបតែងសំបុត្រប្រើឲ្យមនុស្សកាន់ទៅស្រុកកាំងតាំង ហើយទើបឲ្យប្រុងប្រៀបរៀបចំបម្រុងទាហានទ័ពគោកទ័ពទឹក ទុកស្រេចហើយ ថែមឲ្យដំណឹងប្រាកដព្យូរន្ទីទៅថា ទាហានមហាឧបរាជលើកមកគ្រានេះពលមួយរយម៉ឺន និងទូកចម្បាំងដែលចតនៅជាយទន្លេនោះ បីដូចជានឹងពេញទៅទាំងផ្ទៃសមុទ្រ ខាងទ័ពគោកនោះ ក៏ឲ្យធ្វើបន្ទាយរាយតគ្នាចេញទៅ តាមរយៈផ្លូវដល់បីពាន់សិន (១២០ គ.ម)។

ឯ**ស៊ុនគួន**លុះដឹងថា**ចូឆ្វ**លើកទ័ពហ្លួងកន្លងមកដល់ស្រុកសុងយ៉ុង **ឡៅចង**ចេញទៅគំនាប់លើកស្រុកសុងយ៉ុងឲ្យ**ចូឆ្វ**ហើយ ឥឡូវនឹងលើកទៅច្បាំងយកស្រុកកាំងឡេងទៀត **ស៊ុនគួន**គិតខ្លាច**ចូឆ្វ**នឹងមកដល់ស្រុកទើបប្រឹក្សានឹងខ្ញុំរាជការទាំងពួងថា **ចូឆ្វ**លើកទ័ពមកនឹងវាយយកស្រុកកាំងឡេងមុខជាមិនឈប់តែប៉ុណ្ណោះទេ នឹងឆ្លងរំលងមកដល់ស្រុកយើង ៗនឹងគិតប្រការម្ដេច? **ឡោសុក**ឆ្លើយថា ដែលនឹងការពារមិនឲ្យសឹកសត្រូវឆ្លងមកដល់ស្រុកនោះ ខ្ញុំបាទឃើញថាស្រុកកេងជីវនេះជាស្រុកធំ ពួកអ្នកស្រុកក៏ស្រុះស្រួលព្រមគ្រប់គ្នាបរិបូរ បើយើងនឹងលើកទ័ពទៅវាយយកស្រុកកេងជីវ បានតាំងនៅឲ្យខ្ជាប់ខ្ជួនមាំមួនហើយនឹងបារម្ភអ្វីនឹងកងទ័ព**ចូឆ្វ**ប៉ុណ្ណោះ ទោះលើសជាងនេះក៏នឹងការពារទុកមិនឲ្យសឹកសត្រូវចូលដល់ស្រុកបាន មួយទៀតបើបានស្រុកកេងជីវហើយឃើញថា នឹងតាំងខ្លួនជាធំបាន។ ឥឡូវ**ឡៅពៀវ**ក៏ស្លាប់ទៅហើយ **ឡៅពី**សោតក៏បែកខ្ញែកតាំងខ្លួនមិនទាន់បាន បែកទៅនៅនឹង**ឡៅគី**ឯស្រុកកាំងហែ ខ្ញុំបាទនឹងសុំយកអាសាធ្វើឧបាយតែងគ្រឿងសែន ធ្វើជាគំនាប់សព

**ឡៅពៀរ** ហើយនឹងនិយាយល្បួងលួងលោមពួកអ្នកស្រុក និងទាហានស្រុកកេងជីវ ហើយនឹង**ឡៅពី**ឲ្យចុះចិត្តព្រមគ្នា ហើយក៏ឃើញថា នឹងធ្វើការកម្ចាត់**ចូឆ្វ**ចេញបានដោយងាយ។ **ស៊ុនគួន**ឃើញត្រូវដូចចិត្ត ក៏ចាត់ចែងរបស់ទ្រព្យប្រគល់ឲ្យ**ឡោសុក**ទៅស្រុកកាំងហែ។

ឯ**ឡៅពី**ក៏ប្រឹក្សានឹង**ខុងបេង**ថា **ចូឆ្វ**លើកទ័ពមកគ្រានេះធំពន្លឹកណាស់ ខ្លាចក្រែងនឹងលើកតាមមកទៀត យើងនឹងរិះគិតប្រការម្ដេច? **ខុងបេង**ឆ្លើយថា ដែលនឹងនៅក្នុងស្រុកកាំងហែនេះ ឃើញថាទីចង្អៀតចង្អល់ណាស់ បើ**ចូឆ្វ**លើកមកក៏នឹងការពារពុំបានមាំមួន ឃើញថានឹងថ្លោះការទៀត សូមឲ្យលោកលើកទៅនៅស្រុកកាំងតាំងអាស្រ័យ**ស៊ុនគួន**សិនចុះ បើសិនជា**ចូឆ្វ**ដឹងថាលោកទៅនៅនឹង**ស៊ុនគួន**ហើយ ក៏គង់នឹងលើកតាមទៅ ខូចជា**ចូឆ្វ**នឹង**ស៊ុនគួន**ក៏គង់នឹងខុសចិត្តគ្នាឡើង យើងក៏នឹងនៅជាកណ្ដាល បើនរណាភ្លាត់ចំណាប់ សឹមយើងប្រញាប់ព្រួតដៃបន្ថែមយកឲ្យបានចុងដៃ ឃើញថានឹងបានជ័យជម្នះដោយងាយ។ **ឡៅពី**ឆ្លើយថា ដែលលោកគិតនេះត្រូវណាស់ តែថា**ស៊ុនគួន**នោះមានមនុស្សប្រកបទៅដោយតម្រិះប្រាជ្ញា ជួយគាំពារទំនុកបម្រុងច្រើនណាស់ ខ្លាចក្រែងមិនព្រមឲ្យយើងនៅក៏នឹងអប្បយសខ្មាសគេ។ **ខុងបេង**សើចហើយឆ្លើយថា **ចូឆ្វ**លើកទ័ពមកគ្រានេះសន្ធឹកសន្ធាប់ខ្លាំងណាស់ ដូចជានឹងក្រឡាប់ស្រុតផែនដី មុខជា**ស៊ុនគួន**នឹងតក់ស្លុតភ័យខ្លាច នឹងប្រើមនុស្សស៊ើបការណ៍មកខាងយើង បើសិនជាឃើញនរណាមកដល់លោកហើយ ខ្ញុំនឹងសុំអាស្រ័យយកតែទូកតូចមួយទៅជាមួយនឹងអណ្ដាតបីធ្នាប់ ទៅធ្វើឲ្យ**ស៊ុនគួន**ខុសចិត្តគ្នានឹង**ចូឆ្វ**ឲ្យបាន បើ**ចូឆ្វ**ចាញ់ក៏នឹងចូលជួយខាង**ស៊ុនគួន** បើឃើញថា**ស៊ុនគួន**ត្រឡប់ជាចាញ់គេ យើងក៏នឹងគិតកែខៃដណ្ដើមយកស្រុកកាំងតាំងទុកវិញ។

**ឡៅពី**ឆ្លើយថា ឯគំនិតដែលលោករិះគិតដូច្នេះ ក៏ឃើញថាត្រូវ តែថាបើនរណានឹងមករកយើងនោះក៏នៅមិនទាន់ឃើញឡើយ។ កាល**ឡៅពី**កំពុងនិយាយគ្នានឹង**ខុងបេង**មិនទាន់ផុតមាត់ ទាហានរត់ចូលមកប្រាប់ថា ឥឡូវ**ស៊ុនគួន**ប្រើ**ឡោសុក**យកគ្រឿងសែនមកពីស្រុកកាំងតាំង នឹងមកគំនាប់សព**ឡៅពៀរ**។ **ខុងបេង**ឮហើយ

ក៏ទះដៃអស់សំណើចហើយសួរ**ឡៅគី**ថា កាលគ្រា**ស៊ុនគៀន**បិតា**ស៊ុនគួន**ស្លាប់នោះ អ្នកធ្លាប់បាននាំរបស់ទៅគំនាប់សពដែរឬ? **ឡៅគី**ឆ្លើយថា ឯស្រុកកាំងតាំង និងស្រុកកេងជីវជាហារិនឹងគ្នា ព្រោះបិតាខ្ញុំបាទសម្លាប់បិតាគេ នឹងត្រឡប់ទៅគំនាប់សពដូចម្ដេចបាន។ **ខុងបេង**ឆ្លើយថា បើដូច្នោះដែល**ឡោសុក**មកគ្រានេះឃើញថាមិនមែនមកគំនាប់សពដោយសុចរិតទេ ប្រហែលជាមកស៊ើបការណ៍ស្រុកទេសជាប្រាកដ ទើប**ខុងបេង**និយាយនឹង**ឡៅពី**ថា បើ**ឡោសុក**មកជួបនឹងលោក នឹងនិយាយការអ្វីដល់**ចូឆូ**ប្រការម្ដេច លោកចូរនិយាយបដិសេធថាមិនដឹងអ្វីសោះ ទោះបីនឹងជជីកសួរតទៅ ត្រូវផ្ដេកតម្រូវថាឲ្យទៅសួរ**ខុងបេង**វិញចុះ។ **ឡៅពី, ឡៅគី**ក៏ឲ្យបម្រើទៅទទួល**ឡោសុក**នាំឡើងមក ហើយក៏រៀបតុលៀងអាហារឲ្យ**ឡោសុក**បរិភោគតាមប្រវេណី។

កាល**ឡោសុក**កំពុងបរិភោគ ក៏សួរ**ឡៅពី**ថា ខ្ញុំបាទឮដំណឹងថា លោកមានតម្រិះប្រាជ្ញា ទាំងចិត្តក៏ល្អត្រឹមត្រូវណាស់ ជាទីសរសើរដល់មនុស្សទាំងពួង។ ខ្ញុំនេះជាមនុស្សបុណ្យតិច មិនបានជួបប្រទះឃើញលោកឡើយ ទើបមកជួបឃើញមុខក្នុងថ្ងៃនេះ ហើយក៏ជាបុណ្យភ័ព្វរបស់ខ្ញុំខ្លាំងណាស់។ ឥឡូវខ្ញុំបាទបានឮដំណឹងមកទៀតថា លោកនិង**ចូឆូ**ច្បាំងគ្នាជាពន្លឹក តើជាពិតមែនឬ? **ចូឆូ**នោះនឹងមានសេនាទាហានតិចច្រើនប៉ុន្មានលោកជ្រាបប្រាកដឬទេ?

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡោសុក**ទៅសួរ**ឡៅពី**, **ខុងបេង** ដល់ដំណឹងកងទ័ព**ចូឆូ** នាំ**ខុងបេង**ទៅស្រុកកាំងតាំង បានតបពាក្យគ្នានឹងពួកនាហ្មឺនស្រុកកាំងតាំង និង**ស៊ុនគួន** លុះ**ស៊ុនគួន**ប្រាប់សេចក្ដីដល់ម្ដាយចុង។)*

**ឡៅពី**ឆ្លើយថា ឯមនុស្សទាំងពួងរាប់អានសរសើរថា ខ្ញុំមានចិត្តល្អត្រឹមត្រូវនោះក៏មែនហើយ តែថាខ្ញុំមានគំនិតរិះគិតនោះមិនជាប្រមាណទេ ទាំងរេហ៍ពលតិចណាស់ ដែលរូតរះតស៊ូនឹង**ចូឆូ**ក៏មិនបាន បើសិនណាដឹងថា**ចូឆូ**លើកទ័ពមកហើយខ្ញុំក៏ត្រូវតែវេះគេចរត់យកតែខ្លួនឲ្យរួចទៅ មិនហ៊ាននៅជិតទេ ហើយកម្រដែលនឹងឃើញថា ទាហាន**ចូឆូ**ច្រើនឬតិចប៉ុន្មាន ដែលអ្នកមកសួរដូច្នេះខ្ញុំក៏ទាល់ប្រាប់ណាស់មិនដឹងឆ្លើយថាម្ដេចទេ។ **ឡោសុក**ថា ខ្ញុំបាទឮដំណឹងថាលោកបានច្បាំងនឹង**ចូឆូ** **ខុងបេង**បានប្រើកលឧបាយដុតកងទ័ព**ចូឆូ**ខូចខាតដល់ពីរដង ឯ**ចូឆូ**តក់ស្លុតភ័យខ្លាច ហេតុម្ដេចលោកថាមិនដឹង? **ឡៅពី**ថា បើអ្នកចង់ដឹងឲ្យជាក់ច្បាស់ត្រូវទៅសួរ**ខុងបេង**ចុះ ដែលនឹងសួរយើងនេះក៏ដូចជាសួរទទេ។ **ឡោសុក**ថា ឥឡូវ**ខុងបេង**នៅឯណា? សូមឲ្យខ្ញុំបាទឃើញមុខនឹងសន្ទនាគ្នាបន្តិចផង។

**ឡៅពី**ក៏អញ្ជើញ**ខុងបេង**ឲ្យចេញមកជួបនឹង**ឡោសុក** ទាំងសងខាងក៏គំនាប់គ្នាទៅវិញទៅមក។ **ឡោសុក**សួរ**ខុងបេង**ថា ខ្ញុំបាទឮគេសរសើរតម្រិះប្រាជ្ញាលោកកក្រើករំពើកខ្លាំងណាស់ ដែលខ្ញុំបានមកជួបនឹងលោកថ្ងៃនេះ ជាវាសនានឹងរកទីបំផុតមិនបាន ខ្ញុំនឹងសុំសួរលោកបន្តិច ដែលលោកបានធ្វើការសង្គ្រាមនឹង**ចូឆូ**នោះលោករិះគិតប្រើឧបាយដូចម្ដេច? **ខុងបេង**ឆ្លើយថា ឯ**ចូឆូ**នោះប្រកបទៅដោយតម្រិះប្រាជ្ញា និងគំនិតឃើញច្រើន ខ្លួនខ្ញុំមិនអាចនឹងធ្វើការតទល់នឹង**ចូឆូ**បានទេ ព្រោះកម្លាំងទាហានក៏តិច ឧស្សាហ៍វេះគេចរត់មកយកតែខ្លួនឲ្យរួច។ **ឡោសុក**ថា បើខ្លួន

លោកនឹង**ឡៅពី**តស៊ូនឹង**ចូឆ្ង**មិនបាន នាំគ្នាវេះវត់មកនឹងឈប់នៅប៉ុណ្ណេះឬ ៗនឹងរិះគិតតទៅទៀត?

**ខុងបេង**ថា **អាវស៊ីវ**ចៅហ្វាយស្រុកសាំងង៉ាវ ជាមនុស្សរាប់អាននឹង**ឡៅពី**ចៅហ្វាយខ្ញុំ ឥឡូវ**ឡៅពី**គិតចង់ប្រែប្រួលទៅសុំពំនាក់អាស្រ័យនៅផង។ **ឡោសុក**ថាឯស្រុកសាំងង៉ាវនោះមនុស្សម្នានិងស្បៀងអាហារក៏តិច តែខ្លួន**អាវស៊ីវ**នៅរក្សាឲ្យសុខមិនបាន កាលណានឹងអាចប៉ានការពាររក្សាអ្នកដទៃបានទៀត? **ខុងបេង**ថាដែលអ្នកមានប្រសាសន៍នោះក៏ត្រូវហើយ តែថាឥឡូវទាល់ទីនឹងជ្រកហើយ ត្រូវតែទៅពឹងអាស្រ័យនៅសិន ទម្រាំតាំងខ្លួនបាន ទើបរិះគិតការតទៅទៀត។ **ឡោសុក**ថាលោកនឹងទៅទីពឹងពំនាក់នៅក្នុងស្រុកកាំងតាំងមិនល្អឬ? ព្រោះ**ស៊ុនគួន**ចៅហ្វាយខ្ញុំក៏មានចិត្តថ្លើមល្អត្រឹមត្រូវ រាប់អានទូទៅគ្រប់បណ្ដារាស្ត្រដោយស្និទ្ធ សឹងតែចូលចិត្តស្រឡាញ់ជាច្រើន ហើយស្រុកនោះក៏បរិបូរចំណីត្រីសាច់ និងស្រូវអង្ករស្បៀងអាហារ សុំលោកឲ្យបម្រើទៅនិយាយនឹង**ស៊ុនគួន**លមើលជាផ្លូវល្បួងលួងលោម ឲ្យបានជាចិត្តគំនិតមួយ ជួយគ្នារិះគិតកម្ចាត់**ចូឆ្ង**ចេញ ឃើញថានឹងបានសម្រេចដូចសេចក្ដីប្រាថ្នារបស់លោក។

**ខុងបេង**ឆ្លើយថា អ្នកមានប្រសាសន៍នេះត្រូវក្រៃពេក ខ្ញុំមានអំណរគុណជាអនេកណាស់ តែថា**ឡៅពី**និង**ស៊ុនគួន**មិនធ្លាប់រាប់អានគ្នាមកពីដើម ទោះបីនឹងឲ្យទៅនិយាយក៏ក្រែងថា**ស៊ុនគួន**នឹងមិនប្រែប្រួល បណ្ដាលចិត្តឲ្យអាណិតអាសូរករុណា ក៏នឹងព្រួយការទៅទទេ មួយទៀត នឹងរកមនុស្សចេះនិយាយឲ្យទៅជំនួសជាភ្នែកច្រមុះនោះក៏កម្រ។ **ឡោសុក**ថា សព្វថ្ងៃ**ជូកាត់កិន**បងលោកក៏ទៅនៅស្រុកកាំងតាំង ជាទីប្រឹក្សាធំរបស់**ស៊ុនគួន**ដែរ ចេះតែបន់ស្រន់ចង់ឲ្យជួបនឹងលោកជាដរាប ធុរៈនេះខ្ញុំនឹងសុំទទួលធានានាំលោកទៅឲ្យដល់**ស៊ុនគួន**ចរចាឲ្យត្រាតែបាន។ **ឡៅពី**ឮ**ឡោសុក**និយាយដូច្នោះក៏ឆ្លើយថា ឯ**ខុងបេង**នេះជាអាចារ្យរបស់ខ្ញុំ ប្រៀបដូចថ្លើមប្រមាត់ បើឃ្លាតបាត់ពីខ្ញុំតែមួយស្របក់ក៏មិនបាន ធ្វើម្ដេចខ្ញុំនឹងប៉ានឲ្យទៅដល់ស្រុកកាំងតាំងនោះឡើយ? **ឡោសុក**ក៏អង្វរលន់តួថា សូមឲ្យ**ខុងបេង**ទៅជួបគ្នា

នឹងចៅហ្វាយខ្ញុំបាទម្ដងចុះ។ **ឡៅពី**ក៏ធ្វើព្រងើយបែបមិនយល់ **ខុងបេង**ក៏ធ្វើជានិយាយនឹង**ឡៅពី**ថា ការគ្រានេះក៏ជួនជាប្រទាល់តួនឹងខ្លួនយើងណាស់មកហើយ នឹងស្ងៀមព្រងើយមិនកើតទេ សុំលោកឲ្យខ្ញុំទៅបន្តិចចុះ នឹងបានដឹងការធ្ងន់ស្រាលគិតកែប្រែរក្សាខ្លួនទៅខាងមុខ។ **ឡៅពី**ថា បើដូច្នោះលោកនឹងទៅក៏ទៅចុះ។ **ឡោសុក**ឮហើយក៏ត្រេកអរសាទរ ទើបគំនាប់លា**ឡៅពី** ហើយក៏នាំ**ខុងបេង**ទៅចុះទូកហើយថា បើលោកទៅជួបនឹង**ស៊ុនគួន**ហើយ កុំប្រាប់ថា**ចូឆូ**មានទាហានច្រើន ត្រូវប្រាប់ជាពាក្យភូតថា មានទាហានតិចទេ។ **ខុងបេង**ថា ខត្រង់នេះអ្នកកុំព្រួយឡើយ ទុកជាភ្នាក់ងារខ្ញុំចុះ។

លុះ**ឡោសុក**និង**ខុងបេង**ទៅដល់ស្រុកកាំងតាំង ក៏ចាត់ចែងទីសំណាក់ឲ្យ**ខុងបេង**នៅដោយសមគួរ ហើយក៏ចូលទៅជម្រាប**ស៊ុនគួន** ៗក៏សួរថា អ្នកទៅស៊ើបស្ដាប់កិច្ចការឯស្រុកកាំងហែនោះ ដឹងការយ៉ាងម្ដេចខ្លះ? **ឡោសុក**ឆ្លើយថា ខ្ញុំបាទទៅស៊ើបស្ដាប់ការណ៍នោះក៏បានសេចក្ដីមកហើយ តែថាជម្រាបលោកឥឡូវនេះមិនទាន់ស្រួលទេ។ **ស៊ុនគួន**ឮដូច្នោះទើបយកសំបុត្រដែល**ចូឆូ**ឲ្យទៅនោះ ហុចទៅឲ្យ**ឡោសុក**មើលទាំងស្រោម។ **ឡោសុក**ទទួលហើយក៏ថា ដែល**ចូឆូ**ឲ្យសំបុត្រមកនេះប្រាថ្នានឹងល្បួងលួងលោមឲ្យជាចិត្តមួយ ប្រយោជន៍នឹងបានគិតការតទៅមុខ ឃើញថាសេចក្ដីនេះមិនមែនមកដោយសុចរិតនឹងយើងទេ និយាយហើយក៏ហែកស្រោមចេញ មើលឲ្យ**ស៊ុនគួន**ស្ដាប់សេចក្ដីថា “ព្រះចៅ**ហៀនតេ**ឲ្យយើងលើកទ័ពហាសិបម៉ឺនមកកម្ចាត់**ឡៅចង**ចេញ ឥឡូវលើកមកក៏បានស្រុកសុងយ៉ុង និងអាណាខេត្តស្រុកកេងជីវហើយ អាណាប្រជានុរាស្ត្រទាំងពួងមានសេចក្ដីត្រេកអរជាច្រើន យើងក៏កំពុងប្រមូលទាហានថែមទៀតបានដល់មួយរយម៉ឺន នាយទាហានមួយពាន់ តែមានចិត្តគិតដល់អ្នកនឹងចង់ជួបឃើញមុខគ្នាម្ដង សុំឲ្យអ្នកចេញមកដើរលេងព្រៃក្នុងស្រុកកាំងហែ នឹងបានជួបគ្នារិះគិតកម្ចាត់**ឡៅពី**ចេញ ព្រោះជាសត្រូវផែនដី បើសម្រេចហើយយើងនឹងបែងរំលែកស្រុកកេងជីវឲ្យអ្នកពាក់កណ្ដាល ហើយយើង

ស្បថស្បែទុកគ្នាជាចិត្តមួយផ្តើមមួយតទៅ បើអ្នកឃើញប្រការម្តេច នឹងឲ្យមានសំបុត្រតបទៅវិញឲ្យដឹងផង”។

**ឡោសុក**មើលសំបុត្រចប់ក៏សួរទៅ**ស៊ុនគួន**ថា ចិត្តរបស់លោកនឹងគិតប្រការម្តេចសោត? **ស៊ុនគួន**តបថាយើងនៅមិនទាន់បានគិតគូរទេ។ **ទៀវចៀវ**ឆ្លើយថា ឥឡូវ**ចូឆូ**បានប្រមូលទាហានដល់មួយរយម៉ឺន យកព្រះតម្រាស់ព្រះចៅ**ហៀនតេ**មកនិយាយទាំងម៉្លេះ ប្រាថ្នានឹងដើរកម្ចាត់អាណាខេត្តទាំងអស់ឲ្យនៅក្នុងអំណាចខ្លួនទាំងអស់ ដែលលោកនឹងរិះគិតតស៊ូនឹង**ចូឆូ**នោះឥតអំពើទេ នឹងអាស្រ័យបានក៏ត្រឹមតែក្បែរដោយទន្លេជារបាំង ឥឡូវបាន**ចូឆូ**បានស្រុកកេងជីវហើយ ទាហានក្នុងស្រុកនោះក៏ប៉ិនប្រសប់ក្នុងជើងទឹកដូចគ្នានឹងស្រុកយើង ប្រសិន**ចូឆូ**លើកទ័ពប្រទូសរ៉ាយស្រុកយើងៗក៏នឹងថ្លោះការ។ សូមឲ្យលោករិះគិតដោយប្រាជ្ញាទៅលន់តួ**ចូឆូ**ដោយល្អចុះ អាណាប្រជានុរាស្ត្រទាំងពួងក៏នឹងបានសេចក្តីសុខតទៅ។ បណ្តាទីប្រឹក្សាទាំងពួងបានឮ**ទៀវចៀវ**និយាយដូច្នោះ ក៏ឆ្លើយឡើងថា ដែល**ទៀវចៀវ**និយាយដូច្នោះឃើញត្រឹមត្រូវតាមប្រវេណីប្រាកដ។ **ស៊ុនគួន**ក៏នៅស្ងៀមមិនឆ្លើយថាប្រការម្តេច។ **ទៀវចៀវ**ក៏ថែមនិយាយឡើងទៀតថា លោកកុំវិតក្កព្រួយឡើយ ចូរខំរិះគិតចេញទៅគំនាប់**ចូឆូ**ចុះ ទើបបានសេចក្តីសុខ។ **ស៊ុនគួន**គ្រវីក្បាលហើយក៏នៅស្ងៀមមួយស្របក់ ទើបក្រោកឡើងចេញពីទីជំនុំ ហើយដើរចូលទៅខាងក្នុង។ **ឡោសុក**ក៏ដើរតាមទៅ **ស៊ុនគួន**ចាប់ដៃ**ឡោសុក**ចូលទៅហើយនិយាយថា ដែលទីប្រឹក្សាទាំងពួងឃើញដូចពាក្យ**ទៀវចៀវ**ដូច្នោះ អ្នកនឹងគិតប្រការម្តេច?

**ឡោសុក**ឆ្លើយថា ដែលអស់អ្នកទាំងពួងយល់ឃើញព្រមគ្នានឹងឲ្យលោកទៅគំនាប់**ចូឆូ** ប្រយោជន៍ឃើញតែសេចក្តីសុខប៉ុណ្ណោះ ដូចជាឲ្យបានទុក្ខទៅមុខវិញ ខ្ញុំបាទម្នាក់ឯងមិនយល់ឃើញផងទេ សូមកុំឲ្យលោកចេញទៅគំនាប់ឡើយ។ **ស៊ុនគួន**ថា ដែលអ្នកមិនពេញចិត្តនឹងឲ្យយើងចេញទៅគំនាប់**ចូឆូ**នោះត្រូវណាស់ តែសេចក្តីរិះគិតរបស់អ្នកនឹងឃើញប្រការម្តេចខ្លះ? **ឡោសុក**ឆ្លើយថា ខ្ញុំបាទឃើញថា**ចូឆូ**ឬនឹងចិញ្ចឹមលោកឲ្យធ្វើជាធំនោះ? ទោះបីនឹងទំនុកបម្រុងក៏គ្រាន់តែជាប្រមាណ បើ

ប្រសិនឲ្យមានបាវព្រាវដើរតាមក្រោយ យ៉ាងច្រើនណាក់ក៏ត្រឹមតែបួននាក់ប៉ុណ្ណោះ ទោះបីនឹងឲ្យមានសេះជិះក៏តែមួយ នឹងបានឲ្យដូចលោកនៅជាឯកចិត្តក្នុងស្រុកកាំងតាំងតែម្នាក់ឯងក៏ទេ ដែលលោកនឹងរិះគិតធ្វើការតស៊ូនឹង**ចូឆូ**នោះ មិនត្រូវជឿស្ដាប់ពាក្យសម្ដីរបស់អ្នកទាំងអម្បាលនោះតទៅឡើយ ចូរខំរិះគិតប្រុងប្រៀបការនឹងរក្សាខ្លួនឲ្យមាំមួនចុះ។

**ស៊ុនគួន**ដកដង្ហើមធំហើយថា ខ្លួនខ្ញុំអភ័ព្វបង់កម្លាំងនឹងខំបណ្ដុះបណ្ដាលមនុស្សអស់ទាំងនេះទុក ប្រាថ្នានឹងយកជាទីពិគ្រោះឲ្យដឹងការខុសត្រូវធ្ងន់ស្រាលជួយឈឺឆ្អាលក៏អសារទទេសោះ ឃើញតែខ្លួនអ្នកមួយមានកតញ្ញូទៀងត្រង់ស្រឡាញ់ខ្ញុំមែនៗ ឥឡូវ**ចូឆូ**ក៏បានទាហាន**អ៊្វនសៀវ**ទុកជាឈ្លើយច្រើនណាស់ រឹតតែមានចិត្តកំរើបឡើង ដែលយើងនឹងគិតធ្វើការតទល់នឹង**ចូឆូ**នោះនឹងកែប្រែយ៉ាងម្ដេចទើបបានល្អ? **ឡោសុក**ថា កាលខ្ញុំបាទទៅស៊ើបស្ដាប់ការណ៍ឯស្រុកកាំងហែនោះ ខ្ញុំបាទបាននាំខ្លួន**ខុងបេង**ប្អូនប្រុស**ជូកាត់កិន**មកជាមួយ បើលោកចង់ដឹងការរាក់ទាក់ជ្រៅធ្ងន់ស្រាលពី**ចូឆូ**ប្រការម្ដេច សូមឲ្យលោកហៅខ្លួន**ខុងបេង**មកសាកសួរលមើលចុះទើបនឹងជ្រាបច្បាស់។ **ស៊ុនគួន**ថា អាចារ្យ**ហុកឡុង**មកនៅទីនេះដែរឬ? **ឡោសុក**ថា ខ្ញុំនាំមកចាត់ចែងឲ្យសំណាក់នៅខាងក្រៅស្រុក។ **ស៊ុនគួន**ឮដូច្នោះក៏ត្រេកអរណាស់ទើបថា ថ្ងៃនេះជួនពេលយប់ទៅហើយ ចាំថ្ងៃស្អែកព្រឹក អ្នកចូរនាំ**ខុងបេង**ចូលមកជួបនឹងយើង។ **ស៊ុនគួន**ក៏ឲ្យរៀបចំទីកន្លែងដែលនឹងទទួលពួកនាហ្មឺនមុខមន្ត្រី ប្រជុំនិយាយការឲ្យជាទីរុងរឿង ប្រាថ្នានឹងបង្អួតឲ្យ**ខុងបេង**ឃើញ ហើយចាត់កំណត់ឲ្យនាហ្មឺនទាំងពួងចូលមកជួបជុំព្រមគ្នា ក្នុងវេលាព្រឹកស្អែកឲ្យអស់។

លុះវេលាព្រឹកនោះ **ឡោសុក**ក៏ទៅជួបនឹង**ខុងបេង** ជម្រាបថា **ស៊ុនគួន**ឲ្យខ្ញុំមកអញ្ជើញលោកចូលទៅ ពាក្យដែលខ្ញុំបាទចរចានឹងលោកកណ្ដាលផ្លូវនោះ លោកកុំបីភ្លេចឡើយ។ **ខុងបេង**អស់សំណើចហើយតបថា អ្នកកុំវិតក្កព្រួយឡើយ។ **ឡោសុក**ក៏នាំ**ខុងបេង**ចូលទៅកាន់ទីប្រជុំ ដើម្បីនឹងទៅគំនាប់**ស៊ុនគួន** លុះទៅដល់ទីជាន់ក្រៅ **ខុងបេង**ក្រឡេកឃើញទីប្រឹក្សាសុទ្ធតែនាហ្មឺនតែងខ្លួនពេញយស អង្គុយចុះ

នៅថែវរៀងគ្នាជាលំដាប់ ក៏ចូលទៅគំនាប់តាមប្រវេណីទាំងអស់គ្នា រួចសន្ទនាសាកសួរសុខទុក្ខទៅវិញទៅមក។ **ទៀវចៀវ**ឃើញ**ខុងបេង**រូបរាងស្អាតបាត តែងខ្លួនរមទម្យសមជាអ្នកមានសម្ដីចរចាឆ្លៀវឆ្លាត ក៏គិតប្រមាថ**ខុងបេង**នេះ ប្រហែលជាមកនិយាយបញ្ចុះបញ្ចូលមើលឡែបខាយជាប្រាកដ ត្រូវតែយើងចរចាសាកសួរតាមបទស្ដាប់កម្លាំងប្រាជ្ញា និងតម្រិះត្រិះរិះជាប្រការម្ដេច។ **ទៀវចៀវ**ក៏និយាយថា ពីដើមខ្ញុំដឹងថាអាចារ្យ**ហុកឡុង**នៅតំបន់ភ្នំងោឡាំងកាំង ឮគេនិយាយថា ប្រកបទៅដោយសតិបញ្ញាជាច្រើនដូចអាចារ្យខ្ញុំ**ខ្វាន់តុង, ង៉ាក់យេ**មែនដូច្នោះឬ? **ខុងបេង**ឆ្លើយថា ដែលគេសរសើរខ្ញុំនោះ គ្រាន់តែឃើញបញ្ញាខាងក្រៅដែលបានធ្វើការមកនោះក៏ដូចអ្នកទាំងពួងសម្គាល់ ព្រោះការនេះមិនជាក្រលំបាកណាស់ណាទេ ទោះបីនរណាៗក៏គង់ធ្វើបាន ឯបញ្ញាខាងក្នុងនោះ នរណានឹងអាចកន្លងដឹងឲ្យឃើញនោះប្រាកដគ្មានទេ។ **ទៀវចៀវ**ថា ខ្ញុំបានឮគេដំណាលថា **ឡៅពី**ឧស្សាហ៍ធ្វើសេចក្ដីព្យាយាមទៅអញ្ជើញអ្នកដល់បីដងទើបបានអ្នកមក **ឡៅពី**មានអំណរដូចត្រីបានទឹក ទើបកំរើបចិត្តនឹកធ្វើការធំទូលាយទៅមុខ ប៉ងនឹងយកស្រុកកេងជីវឲ្យបានជាប្រាកដ ទុកដូចសន្ទូតនៅក្នុងកណ្ដាប់ដៃ វិស័យដូចយកកន្ទេលមកក្រាលអង្គុយភ្លាមដោយងាយដូច្នោះ ហេតុម្ដេចស្រុកកេងជីវនោះក៏ត្រឡប់បានទៅ**ចូឆូ**វិញ គឺអ្នករិះគិតប្រការម្ដេច?

**ខុងបេង**ឮដូច្នោះក៏គិតថា **ទៀវចៀវ**នេះជាទីប្រឹក្សាធំរបស់**ស៊ុនគួន** មានប្រាជ្ញាជ្រៅទូលាយណាស់ បើអញមិនតបឆ្លើយឲ្យទាល់នឹងពាក្យប៉ុណ្ណោះ កាលណានឹងចរចាតបទៅ**ស៊ុនគួន**បានតទៅ គិតហើយក៏ឆ្លើយថា ដែលខ្ញុំនឹងគិតធ្វើការយកទីផែនដីដែនស្រុកកេងជីវនោះងាយណាស់ ក៏ដូចជាត្រឡប់បាតដៃជាខ្នងដៃភ្លាមៗ ទោះបីនឹងព្យាយាមធ្វើកាលណា នឹងបានសម្រេចកាលនោះ តែហេតុទាំងនេះ ក៏ព្រោះចៅហ្វាយខ្ញុំជាមនុស្សត្រង់ពិត កាន់សេចក្ដីសុចរិត មិនគិតប្រាថ្នាដែលនឹងដណ្ដើមយកសម្បត្តិរបស់សែជាមួយគ្នា មិនព្រមធ្វើតាមពាក្យខ្ញុំ ទើបបានសេចក្ដីព្រួយលំបាក មកនឹកតូចចិត្តដ្បិត**ឡៅចង**នៅក្មេងបៀមដៃជឿកាន់យកពាក្យសម្ដី

មនុស្សឡែបឡប លបលើកយកស្រុកសុងយ៉ុងទៅប្រគល់ឲ្យ**ចូឆ្វ** ៗទើបឡើងចិត្តគិតធ្វើការធំពន្លឹកមកដល់ម្ល៉េះ ឯ**ឡៅពី**ចៅហ្វាយខ្ញុំនេះក៏មកតាំងនៅស្រុកកាំងហែវិញ ប្រាថ្នានឹងធ្វើការឲ្យបានចំណេញធំតទៅទៀត មិនមែននឹងលាក់មុខដេកនៅស្ងៀមទេ តែថាដូចយ៉ាងតម្រិះប្រាជ្ញាអ្នកគ្រាន់តែជាការប្រមាណប៉ុណ្ណោះទោះបីនឹងខំល្វូកកេះប្រាប់ឲ្យយល់ដល់ការរាក់ជ្រៅ ក៏នៅមិនអាចដឹងដល់ស្គាល់បានសោះ ដូចជាយកកែវផ្គុះទៅបោះចោលក្នុងពាងដែលងងឹត អាចនឹងបិទបាំងរស្មីមិនឲ្យភ្លឺស្វាងសោះឡើយ។

**ទៀវចៀវ**ថា អ្នកនិយាយយ៉ាងនេះ ខ្ញុំខ្លាចមិនដូចពាក្យជាប្រាកដ គឺថាតែមាត់ក្រៅ មាត់ថាទៅខាងនេះ ជើងដើរទៅខាងនោះឲ្យខុសគ្នាទៅ ឯ**ខ្វាន់តុង, ង៉ាក់យេ**នោះបានជាទីឧបរាជ ប្រកបដោយសតិបញ្ញាអង់អាចដូចរាជសីហ៍ ជួយទំនុកបម្រុងផែនដីព្រះចៅ**ជីហ្លួនកុង**ប្រាបប្រាមសត្រូវឲ្យរាបទាប ស្រុកទេសក៏ជាសុខក្សេមក្សាន្តមែន គួរមនុស្សពីបុរាណលើកសរសើរថាមានតម្រិះប្រាជ្ញានោះពិតណាស់ យ៉ាងដូចខ្លួនអ្នកនេះ កាលនៅក្នុងទីងោឡាំងកាំងនោះ ឮល្បីល្បាញថាមានប្រាជ្ញា និងគំនិតចេះរិះគិតប្រាកដណាស់ បីដូចជាដឹងផ្គុះរហូតទៅក្នុងដែនដី ឬអាកាសទាំងអស់ កាល**ឡៅពី**មិនទាន់បានអ្នកមកទុកជាទីប្រឹក្សា ក៏រមែងគិតធ្វើការសម្រេចទៅបាន ហើយមានស្រុកទេសតាំងនៅជាសុខតាមវាសនានៃខ្លួន ឥឡូវបានអ្នកមកទុកជាទីប្រឹក្សាថាជាមាំមួន ឲ្យជួយទំនុកបម្រុងការដែលធំពន្លឹក ក៏នឹកថាបានសម្រេចទៅតាមកម្លាំងតម្រិះរិះគិតរបស់អ្នកហើយ ហេតុម្ដេចឡើយ**ឡៅពី**រឹតតែមានសេចក្ដីទុក្ខក្ដៅនៅមិនបានសុខសោះ ឃើញថាទុក្ខទាំងអស់ទ្វេលើសពីដើមទៅទៀត ចេះតែព្រួយចង្អៀតរត់ចោលទីកន្លែង ដោយ**ចូឆ្វ**ដេញមិនឈប់ មកជ្រកពួននៅដូចកណ្ដុររត់ពីអង្គប់ សូម្បីតែផែនដីជាម្ជុលប៉ុនស្លឹកពុទ្រាក៏រកនៅជារបស់ខ្លួនមិនបាន នេះហើយឬ ដែល**ឡៅពី**បានអាស្រ័យសេចក្ដីគិតរបស់អ្នកជួយឧបត្ថម្ភទំនុកបម្រុងនោះ មនុស្សទាំងពួងនាំគ្នាមកសរសើរថា អ្នកមានតម្រិះប្រាជ្ញាដូច

**ខ្វាន់តុង, ង៉ាក់យេ**នោះមិនសមសោះ។ ដែលខ្ញុំនិយាយទាំងអស់នេះតាមដោយការពិត អ្នកក៏កុំអាលតូចចិត្តល្មមរិះគិតតទៅទៀតចុះ។

**ខុងបេង**ឮដូច្នោះក៏យកដៃបិទមាត់ ហើយអស់សំណើច រួចឆ្លើយថា ធម្មតាអ្នកមានប្រាជ្ញាដែលពិស្ដារ ទោះបីនឹងគិតការអ្វីក៏ជ្រៅទូលាយដោយកលកិច្ច អ្នកមានប្រាជ្ញាតិចក៏មិនអាចនឹងដឹងរហូតទៅបាន ឧបមាដូចសត្វគ្រុឌដ៏ប្រសើរ ទោះបីនឹងហើរទៅកាន់ទិសតំបន់ណា ក៏រមែងផ្ដោះទៅលើអាកាសដ៏ខ្ពស់បំផុត បាត់ទៅនឹងស្រទាប់មេឃលើ មិនបានហើរទាបដូចសកុណាជាតិដទៃ ដែលមានកម្លាំងតិចនោះឡើយ ឯអ្នកដែលមានតម្រិះប្រាជ្ញាតិចនោះ ឧបមាដូចបក្សាទាំងពួង ដ៏មានកម្លាំងតិច មិនអាចហើរបានស្មើនឹងស្ដេចគ្រុឌនោះឡើយ មួយទៀត ការដែលគិតអ្វីៗដ៏ជាធំពន្លឹក នឹងគិតយកដោយស្រួតរូតឲ្យរហ័ស សម្រេចទាន់ចិត្តនោះមិនបាន ឧបមាដូចមនុស្សមានជំងឺឈឺធ្ងន់ទុរន់ទុរា ពេទ្យអ្នកព្យាបាលរក្សារោគត្រូវដឹងថា នឹងប្រកបថ្នាំឲ្យចាស់ក្លាលើសអាការៈជំងឺ កម្លាំងមនុស្សដែលឈឺក៏ខ្សោយ នឹងបណ្ដោយតាមកម្លាំងថ្នាំពុំបាន ត្រូវតែចាំឲ្យជំងឺនោះធូស្រាលស្រាន្តតាមពេលវេលា ព្យាយាមថែរក្សាទាល់តែអ្នកជំងឺនោះទទួលអាហារបានច្រើនមានកម្លាំងហើយ ទើបពេទ្យប្រកបថ្នាំឲ្យលេបផឹកបម្រុងរោគនោះ ឲ្យថយទៅត្រាតែសះជាស្រឡះ ដូចយ៉ាង**ឡៅពី**ចៅហ្វាយខ្ញុំ ដែលថ្លោះការណាស់នឹង**ចូឆ្វ** រត់ចេញមកពីស្រុកយីឡាំទៅនៅស្រុកស៊ិនអៀទីពឹង**ឡៅពៀវ**នោះសោត ក៏មានទាហានឯកតែបីនាក់គឺ **គួនអ៊ូ, តៀវហ៊ុយ, ជូឡុង** ប៉ុណ្ណោះ និងកូនទាហានក៏មិនដល់មួយពាន់ ដូចជាមនុស្សមានជំងឺឈឺធ្ងន់ដូច្នោះ កាលទៅនៅស្រុកស៊ិនអៀនោះ មិនមែននឹងប្រាថ្នាតាំងខ្លួនជាធំនៅទីនោះក៏ទេ គ្រាន់តែចាំចិត្តនៅ ព្រោះរកទីអាស្រ័យពុំទាន់បាន មួយទៀតទីនោះក៏ជាចុងស្រុកជនបទ មានមនុស្សក្រខ្សត់ស្ដួចស្ដើងទាំងស្បៀងអាហារក៏តិច បានជាមិនបានតាំងចិត្តនឹងសម្រេចរៀបចំស្រុកភូមិឲ្យរៀបរយ ទោះបីយ៉ាងនោះហើយក្ដី ខ្ញុំក៏បានដុតទ័ព**ចូឆ្វ**ខូចខាតនៅទីវាលកុកបេងម្ដង នៅទីទន្លេប៉ែះហោម្ដង ខ្ញុំក៏បានបង្ហូរទឹកឲ្យលិចទ័ព**ចូឆ្វ**ស្លាប់អស់ជាច្រើន ដែលអ្នកថា**ខ្វាន់តុង, ង៉ាក់យេ**ល្អនោះក៏នៅមិន

ទាន់ប្រាកដបានធ្វើកលក្នុងសង្គ្រាមនៅទីណាដូចយ៉ាងខ្ញុំ ក៏ឥតអង្គីមាន ទោះបី**ចូឆូ**យកបានស្រុកសុងយ៉ុងគ្រានេះ ក៏មិនមែនយកបានដោយសក្ដា ពីព្រោះ**ឡៅចង**គប់គិតគ្នានឹងមនុស្សអន្ធពាលលបលើកទៅឲ្យ**ចូឆូ** ឯ**ឡៅពី**ចៅហ្វាយខ្ញុំក៏មិនបានដឹងឃើញសោះ វេលានោះ បើចៅហ្វាយខ្ញុំមិនស្រឡាញ់សេចក្ដីសុចរិត ប្រហែលពួកអ្នកកាំងតាំងនោះ ក៏គង់នឹងដណ្ដើមយកទាំងស្រុកកេងជីវផងបាន កាលណានឹងមានលំបាកដល់ទីនេះ ព្រោះតែចិត្តត្រង់សុចរិតដូច្នេះ ទើបមិនបានគិតបៀតបៀនដល់ពួកសែជាមួយគ្នា ស៊ូទ្រាំឲ្យមានសេចក្ដីលំបាកវេទនាដូច្នេះ ហើយថែមទាំងម្ល៉េះទៅទៀត គឺចាំសណ្ដោងយកអស់ពួកអ្នកស្រុកដែលលើកគ្នាតាមទាំងគ្រប់គ្រួដោយសារស្រឡាញ់**ឡៅពី** ៗនឹងដោះយកតែខ្លួនក៏ជាប់ចិត្តអាណិតអាសូរ បានជា**ចូឆូ**លើកតាមទាន់បានតយុទ្ធការពារដោយលំបាក ទើបត្រឡប់ងាកទៅនៅស្រុកកាំងហែវិញ ដែលពួកតិចអាចតស៊ូនឹងពួកច្រើនបាននេះ មានតែចៅហ្វាយខ្ញុំមួយទើបហ៊ានធ្វើដូច្នេះ ក្រៅពីនេះគ្មាននរណាមួយដូចសោះ ឯការចាញ់ និងឈ្នះនៃការសឹកសង្គ្រាមនោះជាធម្មតាប្រវេណីមានមក មិនមែនថយថោកតែត្រឹមចៅហ្វាយខ្ញុំទេ កាលគ្រាព្រះចៅ**ហាន់កោចោ**ធ្វើសឹកនឹងព្រះចៅ**ឈប៉ាអង**ក៏មានចាញ់ជាច្រើនដងណាស់ លុះឯក្រោយបង្អស់ទើបព្រះចៅ**ហាន់កោចោ**មានជ័យជម្នះអស្ចារ្យ ក៏ជាក្សត្រិយ៍ដ៏ប្រសើរ ឯដំណើររឿងនេះ អ្នកក៏ល្មមនឹងជ្រាបស្រាប់ហើយ យ៉ាងដូចអ្នកឯងប្រហែលចេះតែសម្ដែងសម្ដីនិយាយគ្របសង្កត់អ្នកដទៃទេ ហើយប្រែលើកតម្កើងខ្លួនថាល្អ បើប្រសិនជាមានការកម្រមកដល់ខ្លួនក៏នឹងខ្លាចមិនអាចនឹងចេះប្រសប់ធ្វើឲ្យដូចពាក្យថា ការមួយរយ ភ្លយធ្វើបានតែមួយ ក៏ប្រហែលមិនកើតសោះ អំណឹះទៅមុខ ក៏នឹងបានសេចក្ដីអប្បយសដល់មនុស្សទាំងពួង។ **ទៀវចៀវ**បានស្ដាប់**ខុងបេង**ថាឲ្យដូច្នោះ ក៏ស្ងៀមស្ងាត់នឹងរកពាក្យតែមួយម៉ាត់ឆ្លើយតទៅទៀតពុំបាន។

ខណៈនោះ**យីហ្វួន**ឃើញ**ទៀវចៀវ**នៅស្ងៀមហើយ ក៏ឆ្លើយតបទៅ**ខុងបេង**ថាគ្រានេះ**ចូឆូ**លើកទាហានមកមួយរយម៉ឺន បីដូចរលកសមុទ្របោកជាន់សង្កត់ស្រុកកាំងហែឲ្យលិចក្នុងបាតសាគរ អ្នកនឹងគិតរិះរៃប្រាជ្ញាការពារប្រការម្ដេច? **ខុងបេង**

ឆ្លើយតបទៅ**យីហួន**វិញថា **ចូវឆ្វ**លើកមកគ្រានេះ អ្នកនឹងខ្លាចណាស់ឬ? ខ្ញុំគ្មានព្រឺព្រួយវិតក្កអ្វីសោះឡើយ ទោះបី**ចូវឆ្វ**មានទាហានមួយរយម៉ឺនក៏មែន តែថាសុទ្ធតែទាហាន**អ៊ួនសៀវ**ដែលជាជាតិអ្នកស្រែ ស្រុកព្រៃលើភ្លើទាំងអស់គ្នា **ចូវឆ្វ**នឹងប្រើការក៏មិនមែនបានមុតមាំប៉ុន្មាន យើងក៏មិនមានព្រួយបារម្ភសោះ។ **យីហួន**អស់សំណើចហើយថា អ្នកចរចាយ៉ាងនេះដូចជាលើកខ្លួនណាស់ ដែលបែកទ័ពរត់មកទាំងម្ដេះមិនពីព្រោះទាហានផ្ដេសផ្ដាសនោះទេឬ? បានជាធ្លាក់ខ្លួនមកនៅស្រុកកាំងហែ បើអង្វរឲ្យគេជួយនៅចរចាថាមិនខ្លាចទៀត នរណានឹងជឿបាន?

**ខុងបេង**ថា ដែលខ្ញុំបែកទ័ពមកនោះ ក៏ព្រោះ**ឡៅពី**ចៅហ្វាយខ្ញុំមានទាហានតិចតែបីពាន់ គឺតិចបំផុត ទើបគិតដោយល្បិចរត់មកលាក់លៀមនៅស្រុកកាំងហែសិន មិនមែននឹងខ្លាចថ្វីដៃ**ចូវឆ្វ**តែម្ដងក៏ទេ គង់នឹងរិះរេគិតធ្វើការតទល់តទៅទៀត ឯស្រុកកាំងតាំងនោះ មនុស្សចំណុះស្រុកក៏ច្រើន ទាហានក៏កើនលើសលុបប៉ិនប្រសប់ស្មើគ្នា ថែមទាំងស្បៀងអាហារទៀតក៏បរិបូរ ហើយមានទន្លេខណ្ឌជាកំណាត់នៅមាំមួនណាស់ ជាជាងស្រុកស៊ិនអៀទៅទៀត ហេតុម្ដេចក៏មកគិតធ្លាក់ឆ្អៀតតែនឹងចៅហ្វាយរបស់ខ្លួនទៅចុះចូល**ចូវឆ្វ**តែម្ដង? ដូចជាមិនមានសេចក្ដីអៀនខ្មាសសោះ ដែលអ្នកថា ចៅហ្វាយខ្ញុំខ្លាច**ចូវឆ្វ**នោះ បើនឹងពិគ្រោះមើលក៏ឃើញបីដូចជាខ្លាចតិចសមគួរ មិនស្មើនឹងពួកអ្នកឯងក្រែងខ្លាចនោះឡើយ។ **យីហួន**ស្ដាប់ហើយក៏ទាល់គំនិតប្រាជ្ញា នឹងហាមាត់ឆ្លើយទៅទៀតក៏ពុំបាន។

**ប៉ោចៅ**ឃើញ**យីហួន**នៅស្ងៀមដូច្នោះ ក៏ឆ្លើយតបទៅ**ខុងបេង**ថា អ្នកនេះបានរៀននិយាយមកពីសំណាក់**សោជិន, ទៀវយី**ឬ? អ្នកមកពោលពាក្យដូច្នេះ ប្រាថ្នានឹងបញ្ចុះបញ្ចូលពួកស្រុកកាំងតាំងឲ្យចុះចិត្តឬអ្វី? **ខុងបេង**ឆ្លើយថា អ្នកដឹងតែថា **សោជិន, ទៀវយី**នោះ ជាមនុស្សពូកែជាងសម្ដីណាស់ ឯត្រង់តម្រិះប្រាជ្ញានិងគំនិតដែលរិះគិតរបស់**សោជិន** និង**ទៀវយី** ដែលចេះជ្រៅជ្រះប្រការម្ដេចនោះ អ្នកឥតដឹងសោះ អ្នកចរចាដូច្នេះបីដូចជាមនុស្សពាក់កណ្ដាលមនុស្ស ព្រោះថាដឹងមិនរហូត ឯ**សោជិន**នោះបានធ្វើជាឧបរាជដល់ប្រាំបីខេត្ត **ទៀវយី**សោតក៏បានជាឧបរាជដល់ពីរ

ផែនដី អ្នកទាំងពីរនេះមានតម្រិះប្រាជ្ញាជ្រៅទូលាយណាស់ ជួយទំនុកបម្រុងផែនដីឱ្យរាបទាបផង មួយទៀត ជាអ្នកក្លៀវក្លាក្នុងការសង្គ្រាម ដែលអ្នកមកនិន្ទាថាជាមនុស្សពូកែខាងសម្ដីមិនគួរសោះ យ៉ាងខ្លួនឯងរាល់គ្នា គ្រាន់តែឮដំណឹងថា**ចូឆ្វ**ប៉ុណ្ណោះ ក៏ខ្លាចញ័រខ្លួនទៅណាស់ លួងលោមឱ្យចៅហ្វាយជាម្ចាស់របស់ខ្លួនចេញទៅចំណុះចុះចូលសត្រូវមិនខ្មាសមាត់ទេឬ? នៅមកតិះដៀលអ្នកដទៃវិញ។ **ប៉ោថៅ**បានឮ**ខុងបេង**ថាដូច្នោះក៏ទាល់នៅស្ងៀម។

**ស៊ីហាង**ក៏ក្រោកឡើងសួរ**ខុងបេង**ថា **ចូឆ្វ**នោះជាមនុស្សម្ដេចអ្នកស្គាល់ឬទេ? **ខុងបេង**ថា **ចូឆ្វ**នោះជាសត្រូវនឹងព្រះចៅ**ហៀនតេ** នរណាៗក៏ស្គាល់បានទាំងអស់ ហេតុម្ដេចក៏អ្នកមកសួរដូច្នេះ? **ស៊ីហាង**ឆ្លើយថា កាលព្រះចៅ**ហាន់កោចោ**បានសោយរាជសម្បត្តិជាក្សត្រាធិរាជ ដែនដីក៏អាចបានសេចក្ដីសុខមកយូរអង្វែងជាប្រាកដ ឥឡូវដល់កំណត់ដែនដីនឹងកើតចលាចលហើយ **ចូឆ្វ**ក៏ប្រាបប្រាមខេត្តខណ្ឌសីមា ឱ្យនៅក្នុងអំណាចរបស់ខ្លួនដល់ពីរបីភាគហើយ **ឡៅពី**ចៅហ្វាយអ្នកមិនបានដឹងច្បាស់លក្ខណៈការធ្ងន់ស្រាលគួរឬ មកបណ្ដាលចិត្តគិតប៉ានតស៊ូនឹង**ចូឆ្វ**ដោយរួសរាន់ ដូចយកពងមាន់ទៅជល់នឹងថ្មក៏នឹងអន្តរាយទៅឯង។ **ខុងបេង**ថា អ្នកនិយាយដូច្នោះមិនត្រូវសោះ ឯ**ឡៅពី**ចៅហ្វាយខ្ញុំនោះប្រាកដជាមនុស្សសុចរិតកតញ្ញូនឹងផែនដីពិត ដែលខ្ញុំបានរិះគិតធ្វើការទាំងម្ល៉េះក៏ឃើញថាជាមនុស្សល្អត្រង់នឹងព្រះចៅ**ហៀនតេ**ជាមហាក្សត្រ ឃើញថា**ចូឆ្វ**ជាសត្រូវរាជសម្បត្តិ ទើបបណ្ដាលចិត្តឱ្យឈឺក្ដៅនៅពុំសុខ ខ្ញុំខំមករងទុក្ខវេទនាដើម្បីនឹងតបស្នងឆ្លងព្រះតេជព្រះគុណម្ចាស់ផែនដី ដូចយ៉ាងខ្លួនអ្នក ក៏ជាមន្ត្រីខ្ញុំផែនដីក្រោមព្រះបាទព្រះចៅ**ហៀនតេ**ដូចគ្នា ហេតុអ្វីក៏មិនមានសេចក្ដីស្នេហាភក្ដីស្រឡាញ់ម្ចាស់ ក្រឡះឃើញត្រូវខាងសត្រូវផែនដីវិញ គឺជាមនុស្សអកតញ្ញូអាក្រក់ណាស់ ទើបមកផ្លាស់កាន់យកថា ការផែនដីនោះនឹងសាបសូន្យនោះជាស្រួល ពាក្យសម្ដីរបស់អ្នកពោលដូច្នោះ ខ្ញុំមិនចង់ឮចង់ស្ដាប់តទៅឡើយ។ **ស៊ីហាង**បានឮដូច្នោះហើយ ក៏អត់ទ្រាំក្នុងចិត្តហាមាត់មិនរួច។

**ឡុកចេក**ក៏ក្រោកឡើងសួរ**ខុងបេង**ថា ឯ**ចូឆ្វ**នោះទោះបីនឹងប្រព្រឹត្តអាក្រក់ អែបយកព្រះតម្រាស់ព្រះចៅ**ហៀនតេ** ដើរប្រាបប្រាមសង្កត់ខេត្តខណ្ឌទាំងពួងឲ្យផែនដីជាចលាចលក៏មែនចុះ តែព្រោះ**ចូឆ្វ**នោះជាពូជអំបូររបស់**ចូឆាំ**ដែលជាឧបរាជពីផែនដីមុនមក ឯ**ឡៅពី**វិញជាពូជក្សត្រវងឆ្មារតំណអំពីព្រះចៅ**ហៀនតេ** យ៉ាងម្ដេចយើងក៏មិនដឹង ដឹងតែថាត្រកូល**ឡៅពី**នោះជាមនុស្សអនាថា ខ្លួន**ឡៅពី**សោតក៏រកស៊ីត្បាញសំពត់លក់ជារបរតូចតាច គួរឬនឹងមកអង់អាចមិនគិតជៀមខ្លួន ហ៊ានតស៊ូនឹង**ចូឆ្វ**នោះយើងមិនឃើញផងសោះ។

**ខុងបេង**ថា អ្នកនេះឬជាឈ្មោះ**ឡុកចេក** កាលនៅក្មេងតូចលួចទំគេយកទៅឲ្យម្ដាយ? អង្គុយចុះទៅយើងនឹងនិយាយផង ដែលអ្នករាប់អានថា **ចូឆ្វ**ជាបូជអំបូរនៃ**ចូឆាំ**ក៏មែនហើយ តែ**ចូឆាំ**នោះជាមនុស្សមានកតញ្ញូនឹងម្ចាស់ប្រាកដមកពីដើម ឯ**ចូឆ្វ**នេះជាមនុស្សបង់ជាតិបង់ត្រកូលមិនបានប្រព្រឹត្តតាមប្រវេណីម៉ែឪដូនតា ធ្វើឲ្យខុសចាកចោលមេបាររបស់ខ្លួន ដែលនឹងរាប់អានថាល្អសមសួននោះ ក៏តែមនុស្សអន្ធពាលប្រហែលអ្នកឯង ឯ**ឡៅពី**ចៅហ្វាយយើងនោះ ប្រាកដជាពូជអំបូររបស់ព្រះចៅ**ហៀនតេ** ហេតុម្ដេចអ្នកឯងមកដៀលថាជាមនុស្សអនាថា ទោះបីជាអ្នកត្បាញសំពត់លក់ក្ដីណា របរនេះជាធម្មតាប្រវេណីគេតែងធ្វើមក ជាផ្លូវរកចិញ្ចឹមជីវិតមិនជាអ្វីណាស់ ឯព្រះចៅ**ហាន់កោចោ**នោះសោត ក៏មិនសុទ្ធជាពូជព្រះរាជវង្សមកពីដើម គ្រាន់តែជានាយបន្ទុកឃុំប្រកបទៅដោយសេចក្ដីព្យាយាមក៏បានជាក្សត្រដ៏ធំប្រសើរ ទើបមានដំណព្រះរាជវង្ស បានសោយរាជសម្បត្តិតៗមកដរាបដល់សព្វថ្ងៃនេះ អ្នកឯងមកមើលងាយប្រមាថ**ឡៅពី**ចៅហ្វាយយើងមិនគួរសោះ ព្រោះខ្លួនអ្នកឯងជាក្មេងនៅមិនទាន់អស់ក្លិនទឹកដោះនៅក្នុងមាត់សោះ នឹងមកអួតចេះដឹងជាងមនុស្សចាស់នោះកុំនិយាយតទៅឡើយ។ **ឡុកចេក**ឮ**ខុងបេង**ថាដូច្នោះហើយ ក៏ទាល់ប្រាជ្ញាឈប់នៅស្ងៀម។

**យៀមជុន**បានឮ**ខុងបេង**ថាដូច្នោះ ក៏ឆ្លើយឡើងថា **ខុងបេង**និយាយនេះជាវោហារទេ យើងនឹងចរចាតបផងមិនបាន ត្រូវតែយកពាក្យដែលមានទុកក្នុងច្បាប់

មកចរចាផងទើបបាន។ **ខុងបេង**ថា ដែលអ្នកឯងនឹងឲ្យស្រាវជ្រាវយកពាក្យបុរាណគាត់តែងទុកនោះ ពីរោះមែនហើយ តែបើយកមកចរចាក្នុងសម័យនេះ ក៏គ្មាននរណានឹងរាប់អាន គេថាអ្នកនោះលួចយកកាកតម្រាចាស់មកសម្ដែង ឯអ្នកមានតម្រិះប្រាជ្ញា គេរមែងរិះគិតដោយគំនិតរបស់ខ្លួន ទោះបីនឹងធ្វើការរណសង្គ្រាមយ៉ាងណាក៏ដោយ ក៏ត្រូវតែអាស្រ័យបញ្ញាជាបច្ចុប្បន្ន ទើបនឹងកែខៃយកជ័យជម្នះបាន ដែលលោកអ្នកមានសតិបញ្ញាពីដើម បានជួយទំនុកបម្រុងផែនដីនោះ មិនមែននឹងយកតម្រាមកត្រដាងមើលទេ ឯខ្លួនអ្នកឯងនេះក៏ល្អតែមានក្រដាសនិងពិតទឹកខ្មៅ មកសរសេរតាក់តែងជាពាក្យនិយាយលេងតាមសប្បាយនោះមែន។

**ធៀតុក**ក៏ស្រែកឡើងថា **ខុងបេង**នេះនិយាយខ្លាំងពេកណាស់ យើងក្រែងតែមិនមែនដូចពាក្យថា យូរទៅខាងមុខនឹងត្រឡប់ឲ្យយើងដែលថាមិនកើតជាអ្វីនោះនឹងនាំគ្នាសើចចំអកលេងទៀតទេដឹង? **ខុងបេង**ថា ឯលក្ខណៈមនុស្សដែលមិនកើតជាការមានពីរប្រការគឺ មនុស្សមិនកើតជាការតែល្អរមែងប្រកបដទៅដោយសេចក្ដីព្យាយាម ធ្វើការតបស្នងសងគុណចៅហ្វាយនាយដោយសុចរិតយុត្តិធម៌តាមតម្រិះប្រាជ្ញា ហើយក៏មធ្យ័តជៀមខ្លួនមិនបានរំលុបគុណអ្នកដទៃ ដែលយកជាការមិនបានមិនកើតជាអ្វីសោះនោះ គឺមនុស្សជាអ្នកចរចាក្រម៉ាច់ត្លុកកំប្លែងឲ្យគេសើចលេងការអ្វីនីមួយក៏ធ្វើមិនកើត មនុស្សជំពូកនេះបានឈ្មោះថាអាក្រក់ជួជាតិ ដែលអ្នកឯណេះថា ត្រូវយកពាក្យបុរាណមកចរចាជាមួយនឹងយើងនោះនឹងប្រយោជន៍អ្វី? យើងមិនត្រូវការទេ។ ទីប្រឹក្សាទាំងពួងឃើញ**ខុងបេង**ឆ្លើយតបពាក្យសម្ដីមិនបានភ្លាំងភ្លាត់ នឹងអ្នកឯណាទាំងអស់គ្នាក៏សម្លឹងមើលមុខគ្នាហើយនៅស្ងៀម។

**អ៊ុយកាយ**ស្រែកនិយាយតមកទៀតថា អ្នកទាំងអស់នេះគ្មានអធ្យាស្រ័យសោះ នឹងមកដេញដោលអ្វីតែនឹង**ខុងបេង** ដែលមានតម្រិះប្រាជ្ញានោះនឹងប្រាថ្នាប្រយោជន៍អ្វី? **ចូឆូ**លើកកងទ័ពមកនឹងធ្វើអន្តរាយដល់ស្រុកភូមិហើយ នៅមិនជួយរិះគិតគ្នាការពារភ័យអន្តរាយ ក៏មកនាំចោមនិយាយតែនឹង**ខុងបេង**ជាភ្ញៀវមកពីក្រៅជាគួរហើយឬ? ហើយក៏បែរមុខនិយាយទៅនឹង**ខុងបេង**ថា ខ្ញុំក៏ដឹងថាអ្នកមានតម្រិះ

ប្រាជ្ញាហើយ ហេតុម្តេចឡើយអ្នកមិនយកពាក្យរបស់អ្នកទៅចរចានឹងចៅហ្វាយខ្ញុំ ក៏មកច្រឡំនិយាយតែនឹងអ្នកទាំងអស់នេះ នឹងជាប្រយោជន៍អ្វី? **ខុងបេង**ឆ្លើយថា អ្នកទាំងអស់នេះមិនបានដឹងស្គាល់លក្ខណៈល្អ និងអាក្រក់សោះ បានជានាំគ្នាមកស្រុះដេញដោលសួរសាក នឹងចង់ឲ្យខ្ញុំទាល់សម្តីនឹងដោះសាមិនរួច នឹងស្ងៀមមិនឆ្លើយក៏មិនបាន ៗជាឆ្លើយតបវិញខ្លះ។

ខណៈនោះ**អ៊ុយកាយ**និង**ឡោសុក** ក៏នាំ**ខុងបេង**ដើរចេញពីល្វែងក្រៅចូលទៅរក**ស៊ុនគួន**ដល់ល្វែងជាន់កណ្តាល ទទួលជួបនឹង**ជូកាត់កិន**ជាបង។ **ខុងបេង**ក៏គំនាប់តាមប្រវេណី។ **ជូកាត់កិន**សួរថា ប្អូនមកដល់ស្រុកកាំងតាំងនេះហើយ ហេតុម្តេចទើបមិនទៅរកបង? **ខុងបេង**ថា ឥឡូវខ្ញុំបាទទៅនៅនឹង**ឡៅពី** ដែលមកគ្រានេះជាផ្លូវរាជការត្រូវការយកព័ត៌មានជាដំណឹង បើនឹងទៅរកបងក៏ដូចជារំលងផ្លូវច្បាប់ទម្លាប់ សូមកុំឲ្យប្រកាន់ទោសខ្ញុំបាទឡើយ។

**ជូកាត់កិន**តបថា បើដូច្នេះឲ្យប្អូនចូលទៅជួបនឹង**ស៊ុនគួន**ចុះ ហើយ**ជូកាត់កិន**ក៏ដើរចេញមក។ **ឡោសុក**និយាយនឹង**ខុងបេង**ថា ដែលខ្ញុំបាទនិយាយមុននឹងលោក ៗកុំភ្លេច។ **ខុងបេង**ញាក់មុខហើយដើរចូលទៅខាងក្នុង។

**ស៊ុនគួន**ក្រឡេកឃើញ**ឡោសុក** និង**អ៊ុយកាយ**នាំ**ខុងបេង**ចូលទៅ ក៏ក្រោកចេញមកទទួល**ខុងបេង** នាំចូលទៅអង្គុយជិតក្នុងចន្លោះនៃមន្ត្រីទាំងពួង។ **ខុងបេង**ក៏គំនាប់តាមប្រវេណីហើយគិតថា **ស៊ុនគួន**នេះមានលក្ខណៈស្អាតបាតណាស់ ភ្នែកក្រហម ពុកមាត់ក្រហម ជាមនុស្សមានបុណ្យ តែថាចិត្តរឹងរូស បើនឹងចរចាតាមសុភាពឃើញថាមិនត្រូវនឹងចរិត ប្រកបតែចរចាឲ្យខឹង ប្រសិនបើសាកសួរដល់រឿង**ចូឆូ** ក៏ត្រូវថាឲ្យច្រឡោតខឹងឡើងទើបបាន។ **ស៊ុនគួន**ក៏សួរ**ខុងបេង**ថា ខ្ញុំបានឮ**ឡោសុក**ដំណាលសរសើរពីឈ្មោះអ្នកប្រាប់ខ្ញុំថា អ្នកមានតម្រិះប្រាជ្ញាចេះរិះគិតប្រាកដ ថ្ងៃនេះខ្ញុំឃើញមុខមាត់អ្នកមកជួប ក៏ជាបុណ្យភ័ព្វរបស់ខ្ញុំ អ្នកចូរអនុគ្រោះជួយណែនាំពន្យល់ការអ្វីដែលត្រូវឲ្យខ្ញុំដឹងខ្លះ។

**ខុងបេង**ឆ្លើយថា ខ្ញុំបាទក៏មានសតិបញ្ញាជាប្រមាណ ដែលនឹងអង់អាចណែនាំពន្យល់លោកប្រការម្ដេចនោះក៏មិនគួរ។ **ស៊ុនគួន**ថា កាលអ្នកនៅនឹង**ឡៅពី**ក្នុងស្រុកស៊ិនអៀនោះ អ្នកក៏បានធ្វើការតតាំងច្បាំងនឹង**ចូឆូ**ជាច្រើនគ្រា កិច្ចការអ្វីក្នុងកងទ័ព**ចូឆូ**នោះអ្នកក៏រមែងដឹងទាំងអស់។ **ខុងបេង**ថា ខ្ញុំបាទបាននៅនឹង**ឡៅពី**ក្នុងស្រុកស៊ិនអៀមែន តែថាស្រុកស៊ិនអៀនេះជាស្រុកតូចមនុស្សក៏តិច ទាំងស្រូវអង្ករចំណីត្រីសាច់ក៏ស្ដួចស្ដើង ដែលនឹងតស៊ូនឹង**ចូឆូ**នោះក៏ទញ់ទាល់ មនុស្សតិចឬតស៊ូនឹងមនុស្សច្រើនបាន។

**ស៊ុនគួន**សួរថា ទាហាន**ចូឆូ**នោះមានច្រើនឬតិចប៉ុន្មាន? **ខុងបេង**ថា ទាហាន**ចូឆូ**លើកមកគ្រានេះ ទាំងទ័ពគោកទ័ពទឹកប្រហែលមួយរយម៉ឺនប្លាយ។ **ស៊ុនគួន**ថា ដែលអ្នកនិយាយនេះពិតមែនឬ? **ខុងបេង**ថា ខ្ញុំបាទជម្រាបលោកនេះនឹងវៀចក៏ទេ កាលដំបូង**ចូឆូ**វាយបានស្រុកស៊ុនជីវបានទាហានម្ភៃម៉ឺន លុះមកច្បាំងនឹង**អ៊ួនសៀវ** បានស្រុកកេងជីវបានទាហានឈ្លើយទៀតហុកសិបម៉ឺន ត្រឡប់មកនៅស្រុកហ៊ូតោបញ្ចុះបញ្ចូលបានទាហានទៀតសែសិបម៉ឺន ហើយលើកមកវាយស្រុកកេងជីវបានទាហានទៀតសាមសិបម៉ឺន រួមទាំងអស់ជាទាហានមួយរយហាសិបម៉ឺន នេះខ្ញុំបាទជម្រាបលោកថាតែទាហានមួយរយម៉ឺនប្លាយ ដើម្បីនឹងយកចិត្តអ្នកស្រុកកាំងតាំង បើនឹងថាច្រើនពេកខ្លាចទាហានស្រុកនេះភ័យតូចចិត្ត។ **ឡោសុក**ឈរនៅជិតពីក្រោយបានឮ**ខុងបេង**និយាយដូច្នោះ ក៏សម្លឹងមើលភ្នែកឲ្យដឹង។ **ខុងបេង**ក៏ក្លែងធ្វើជាមិនឃើញ។ **ស៊ុនគួន**សួរទៅទៀតថា ទាហានឯក**ចូឆូ**មានថ្វីដៃខ្លាំងពូកែនោះប្រហែលប៉ុន្មាន? **ខុងបេង**ឆ្លើយប្រាប់ទៅថា មានប្រហែលពីរពាន់នាក់។

**ស៊ុនគួន**ថា ឥឡូវ**ចូឆូ**ដើរវាតត្បាតស្រុកទេស មកដល់ស្រុកកេងជីវហើយនឹងគិតធ្វើការម្ដេចតទៅទៀត? **ខុងបេង**ថា ឯ**ចូឆូ**នោះដែលនឹងមិនរិះគិតការតទៅនោះ លោកកុំសង្ស័យឡើយ។ ឥឡូវខ្ញុំបានឮថា **ចូឆូ**ឲ្យត្រៀមទ័ពគោកទ័ពទឹកទុកបានព្រមហើយ មុខជាលើកមកវាយយកស្រុកកាំងតាំងជាប្រាកដ។ **ស៊ុនគួន**ថា បើ**ចូឆូ**លើកទ័ពមកមែនតើយើងនឹតច្បាំងល្អឬកុំច្បាំងល្អជាង? សុំអ្នកជួយរិះគិតព្រាង

បំភ្លឺផ្លូវខ្ញុំដឹងបន្តិចចុះ។ **ខុងបេង**ថា ដែលលោកសួរដូច្នេះក៏ឃើញថា លោកមានសេចក្ដីរាប់អានខ្ញុំបាទដោយស្មោះត្រង់ប្រាកដ បើខ្ញុំបាទជម្រាបលោកតាមប្រាថ្នាដែលគិតឃើញ ក៏ខ្លាចលោកមិនជឿធ្វើតាមពាក្យខ្ញុំបាទ។

**ស៊ុនគួន**ថា អ្នកកុំសង្ស័យនឹងចិត្តខ្ញុំឡើយ ប្រសិនបើអ្នកប្រាប់ខ្ញុំមកហើយផង ក៏ធ្វើតាមដែរ។ **ខុងបេង**ថា ឯ**ចូឆូ**និង**ឡៅពី**និងបិតារបស់លោក ក៏ខំប្រមូលទាហានរិះគិតធ្វើការប្រាបប្រាមស្រុកទេសដើម្បីនឹងតាំងខ្លួនធ្វើធំជាដរាបមកដូចគ្នា តែឥឡូវ**ចូឆូ**មានសេចក្ដីព្យាយាមខំធ្វើការបានស្រុកទេសជាច្រើន បានទាហានក៏បរិបូរដល់ប៉ុណ្ណោះហើយ លោកចូរប្រមាណមើលចិត្តចុះ បើឃើញថាល្មមតស៊ូនឹង**ចូឆូ**បាន ក៏ខំស្រូតរូតចាត់ចែងស្រុកទេស នឹងប្រមូលទាហានឲ្យបានត្រៀមទុកចុះ បើឃើញថាតស៊ូមិនបានទេ ក៏ចូរប្រែផ្លាស់ធ្វើតាមតម្រិះទីប្រឹក្សាលោកយល់ឃើញទៅចុះ គួរនឹងដោះក្រឹសបោះលំពែងចេញពីដៃ ចូរទៅពឹងប្រាស្រ័យខិនគំនាប់**ចូឆូ**នោះក៏តាមចិត្តលោក។ **ស៊ុនគួន**ឮដូច្នោះក៏នាំឲ្យរំជួលក្នុងចិត្តគិតមិនដាច់ស្រេចក៏នៅស្ងៀម។

**ខុងបេង**ថា ឯការខាងក្រៅ លោកនៅបានប្រឹក្សាគិតថានឹងលំអុតលំឱន**ចូឆូ**តាមប្រវេណីហើយ តែការខាងក្នុងលោកមានសេចក្ដីរង្កៀស នឹងលើកយកស្រុកទៅធ្វើជាជំនូនឲ្យ**ចូឆូ**នោះ នឹងបានសេចក្ដីអប្បយសតទៅមុខដែរឬទេ? សេចក្ដីទាំងពីរប្រការនេះជាទទឹងគ្នាក្នុងអារម្មណ៍ ចិត្តលោកមិនទាន់ដាច់ស្រេចទៅខាងណា បើលោកមិនរិះគិតពិចារណាឲ្យដាច់ស្រេចទៅខាងណាទេ ខំតែបង្អែបង្អង់នៅដូច្នេះ មុខជាមានភ័យអន្តរាយមកដល់លោកជាឆាប់ៗមិនខាន។

**ស៊ុនគួន**សួរថា អ្នកនិយាយនេះពេញចិត្តខ្ញុំខ្លាំងណាស់ ចុះ**ឡៅពី**ថៅហ្វាយអ្នកតស៊ូនឹង**ចូឆូ**មិនបាន ហេតុម្ដេចអ្នកមិនពន្យល់ឲ្យទៅគំនាប់**ចូឆូ**ទៅ? **ខុងបេង**ថា ថៅហ្វាយខ្ញុំបាទក៏ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** បណ្ដាមនុស្សម្នាមហាជនគ្រប់ស្រុកក៏ដឹងស្គាល់យល់បានថា ជាអ្នកមានតម្រិះប្រាជ្ញា ទោះបីតស៊ូនឹង**ចូឆូ**មិនបានក្ដីណា នឹងឲ្យទៅលំអុតលំឱនគំនាប់**ចូឆូ**នោះកុំគប្បីនឹកនាឡើយ ហេតុនេះហើយគឺមកពីខ្លាចមានសេចក្ដីគរហានិន្ទាតទៅមុខដល់មនុស្សទាំងពួងផង សូម្បីដូច

**ទៀនហង**ដែលជាទាហានរបស់ព្រះចៅ**ហ្លួនកុង** ក៏នៅមានសេចក្ដីមានៈមិនញញើតដល់សឹកសត្រូវស៊ូស្លាប់ក្នុងសង្គ្រាម ឯ**ឡៅពី**ចៅហ្វាយខ្ញុំបាទមានមុខប៉ុណ្ណោះហើយ នឹងមិនមានសេចក្ដីអៀនខ្មាសនោះមិនមែនទេ ធ្វើម្ដេចនឹងប្រថុយកាត់ចិត្តទៅចំណុះ**ច្វូឆ្វូ**បាន ស៊ូតែស្លាប់ទៅជាខ្មោចទុកឈ្មោះតទៅមុខជាឃើញប្រាកដ។

**ស៊ុនគួន**ឮ**ខុងបេង**ថាដូច្នោះ ក៏ឈឺចិត្តរំជួលក្ដួលក្ដៅក្រោកដើរសំដៅចូលក្នុងបាត់ ទីប្រឹក្សាទាំងពួងឃើញ**ស៊ុនគួន**ខឹងក្រោកដើរចូលទៅក្នុងដូច្នោះ ក៏នាំគ្នាសើចចំអកឲ្យ**ខុងបេង**។ **ឡោសុក**ក៏និយាយឲ្យ**ខុងបេង**ថា លោកចរចាគ្មានន័យដូច្នេះមិនគួរសោះ នេះហាក់ជាចៅហ្វាយខ្ញុំមានចិត្តនឹងនួន ទើបមិនបានយកទោសដល់លោក។ **ខុងបេង**សើចហើយថា ដែលខ្ញុំនិយាយឲ្យប៉ុណ្ណោះ ប្រាថ្នានឹងចង់ដឹងថាចៅហ្វាយនឹងស្គាល់យល់ជាក់មនុស្សល្អឬអាក្រក់ប៉ុណ្ណោះ លុះមិនបានពិគ្រោះឲ្យជាក់ជាមុនមក សុខចិត្តគិតខឹងដូច្នេះក៏ទាល់ដែរ ឯឧបាយដែលនឹងកម្ចាត់**ច្វូឆ្វូ**នោះ ខ្ញុំបានគិតទុកជាស្រេចអស់ហើយ តែថាចៅហ្វាយអ្នកមិនបានសាកសួរក៏មិនដឹង នឹងនិយាយដូចម្ដេចតទៅ។ **ឡោសុក**ថា បើលោកនិយាយឲ្យប្រាកដដូច្នោះ ខ្ញុំនឹងចូលទៅជម្រាបចៅហ្វាយខ្ញុំឲ្យជ្រាបជាម្ដងទៀត ឲ្យវិលមកចរចានឹងលោកវិញ។

**ខុងបេង**ថា ឯទាហាន**ច្វូឆ្វូ**នោះទោះបីច្រើនក៏ដូចតិច ប្រៀបដូចស្រមោច បើនឹងឈ្លីកម្ទេចចេញដោយឧបាយក៏នឹងបានដោយងាយ។ **ឡោសុក**បានឮដូច្នោះក៏ចូលទៅជម្រាប**ស៊ុនគួន**ខាងក្នុង។ **ស៊ុនគួន**កំពុងខឹងនឹង**ខុងបេង**មិនទាន់រសាយ ក្រឡេកឃើញ**ឡោសុក**ចូលទៅក៏ថា **ខុងបេង**នេះនិយាយមើលងាយយើងពន់ពេកណាស់ គ្មានសេចក្ដីក្រែងចិត្តសោះ។ **ឡោសុក**ថា ដែល**ខុងបេង**ចរចាខុសនោះ កាលលោកអញ្ជើញមកក្នុងហើយ ក្រោយនោះខ្ញុំបាទក៏បានសាកសួរ**ខុងបេង** ៗត្រឡប់សើចចំអកឲ្យខ្ញុំបាទវិញទៀតថា ចៅហ្វាយអ្នកឯងមិនស្គាល់មនុស្សល្អនិងអាក្រក់ ឯការដែលនឹងកម្ចាត់**ច្វូឆ្វូ**នោះក៏មានផ្លូវនឹងរិះគិតកម្ចាត់បានដោយងាយណាស់ បីដូចជាផ្កាប់ផ្ងារដៃក៏គិតបាន ដែល**ខុងបេង**ថាដូច្នេះ សូមឲ្យលោកអញ្ជើញចេញទៅចរចាស្ដាប់ឡែបខាយមើលម្ដងទៀតសិន។

**ស៊ុនគួន**បានឮដូច្នោះក៏អស់កំហឹងនិយាយថា ដែល**ខុងបេង**ថាដូច្នោះប្រាថ្នានឹងរំឭក តែហាក់ថាចិត្តយើងរួសរាន់រហ័សខឹង នឹងការខូចការអសាររបង់ **ស៊ុនគួន** គិតហើយក៏ត្រឡប់ចេញមកវិញ និយាយនឹង**ខុងបេង**ថា អម្បាញ់មិញនេះខ្ញុំគិតមិនទាន់ ទើបប្រកាន់ខឹងនឹងអ្នកស្ទុះចូលទៅខាងក្នុង ខ្ញុំក៏សុំអភ័យទោសចុះ។ **ខុងបេង**ថា ដែលខ្ញុំបាទបានប្រមាថចរចាភ្លាត់ភ្លាំងទៅឲ្យលោកទាស់ចិត្តនោះ ទោសខ្ញុំបាទក៏ខុសណាស់ សុំកុំឲ្យលោកប្រកាន់ឡើយ។ **ស៊ុនគួន**ក៏នាំ**ខុងបេង**ចូលទៅខាងក្នុងមួយជាន់ទៀត ដើម្បីឲ្យផុតពីទីនាហ្មឺនមន្ត្រីទាំងពួង ហើយឲ្យរៀបតុលៀងភោជនាហារឲ្យ**ខុងបេង**បរិភោគ ទើបសួរថា **ចូឆូ**នោះ មានសេចក្ដីស្អប់គុំគួនគិតប្រទូសរ៉ាយ **លីប៉ោ, ឡៅពៀវ, អ៊ួនសៀវ, អ៊ួនសុត, ឡៅពី** និងខ្ញុំ ឯអ្នកឯទៀត **ចូឆូ**ក៏កម្ចាត់អស់ហើយ នៅតែ**ឡៅពី** និងខ្ញុំដូចថៅហ្វាយអ្នក ក៏ទើបតាំងខ្លួនជាថ្មី ទាហានក៏តិចបានគេចទៅ បានជាថ្កោះការនឹង**ចូឆូ** ខាងចំណែកខ្ញុំក៏ខំប្រឹងគិតនឹងរក្សាស្រុកកាំងតាំងទុកមិនឲ្យទៅនៅក្នុងបង្គាប់**ចូឆូ**ទេ តែឥឡូវនេះមិនដឹងបើនឹងរិះគិតការពារប្រការម្ដេចឡើយ ទាល់គំនិតហើយ។

**ខុងបេង**ថា បើលោកនឹងគិតការពារ**ចូឆូ**នោះ តែចំពោះខ្លួនលោកក៏បានដែរ តែមិនសូវប្រពៃណាស់ទេ ខ្ញុំបាទនេះគិតថា**ឡៅពី**ថៅហ្វាយខ្ញុំបាទបែកទ័ពនឹង**ចូឆូ**រត់មកក៏មែន តែនៅមានទាហានឲ្យ**គួនអ៊ូ**រក្សាមួយម៉ឺនដែរ សូមឲ្យលោកនិង**ឡៅពី**ជាចិត្តគំនិតមួយនឹងគ្នា រួមពលយោធាទាំងសងខាងបញ្ចូលជួយគ្នារិះគិតកម្ចាត់**ចូឆូ**មុខជានឹងបាន ព្រោះទាហាន**ចូឆូ**សុទ្ធតែពួកអ្នកលើ ទោះបីមានពួកស្រុកកេងជីវដែលប្រសប់ខាងជើងទឹកនោះសោត ក៏សុទ្ធតែចាំចិត្តនឹងធ្វើការមិនពេញដៃ ឃើញថាល្មមតស៊ូគ្នាបាន ក៏គ្រានេះសូមឲ្យលោកខំត្រិះរិះមើលចុះ បើយើងឈ្នះក៏នឹងបានស្រុកកេងជីវទុកជាកម្លាំង។ **ស៊ុនគួន**មានសេចក្ដីត្រេកអរណាស់ និយាយថា ដែលអ្នកអធិប្បាយដូច្នេះក៏ឃើញថាមេត្តាខ្ញុំពិត បីដូចជាទាញដៃខ្ញុំចេញពីទីងងឹតមកកាន់ទីភ្លឺ ឯឧបាយរបស់អ្នកឲ្យខ្ញុំធ្វើប្រការម្ដេចនោះ ខ្ញុំក៏ខំធ្វើតាមគ្រប់ប្រការ ខ្ញុំនិង**ឡៅពី**ក៏ជាចិត្តមួយនឹងគ្នាគិតកម្ចាត់**ចូឆូ**ចេញឲ្យបាន។ និយាយហើយក៏ឲ្យ**ឡោសុក**ទៅប្រាប់

ទីប្រឹក្សាទាំងពួងថា ឥឡូវនេះយើងត្រូវគិតចាត់ចែងកងទ័ពឲ្យព្រមចុះ បើ**ចូវឆ្វ**លើកទ័ពមកក៏នឹងតស៊ូមិនត្រូវខ្លាច ហើយក៏ឲ្យ**ឡោសុក**នាំ**ខុងបេង**ចេញទៅទីសំណាក់។

ខណៈនោះ**ទៀវចៀវ**ដឹងថា **ស៊ុនគួន**និងឲ្យត្រៀមបម្រុងទាហានទាំងពួងគិតតស៊ូ**ចូវឆ្វ**ដូច្នោះ ក៏ពិគ្រោះគ្នានឹងទីប្រឹក្សាទាំងពួងថា ចៅហ្វាយយើងឥឡូវនេះ ឃើញនឹងវង្វេងទៅដោយពាក្យ**ខុងបេង**ជាប្រាកដហើយ ទើបនាំគ្នាចូលទៅគំនាប់**ស៊ុនគួន**ហើយជម្រាបថា យើងខ្ញុំរាល់គ្នាដឹងថាលោកនឹងរិះគិតធ្វើការតតាំងច្បាំងនឹង**ចូវឆ្វ**ក្នុងគ្រានេះ ក៏មានសេចក្ដីវិតក្កណាស់ សូមឲ្យលោកត្រិះរិះគិតមើលសិន យ៉ាងខ្លួនលោកនឹង**អ៊ួនសៀវ**នោះនឹងប្រៀបគ្នាបានឬ? ព្រោះកាលគ្រាមុន**ចូវឆ្វ**នៅមានទាហានតិចម្ដេចក៏បានកម្ចាត់**អ៊ួនសៀវ**យកជ័យជម្នះបាន គ្រានេះ**ចូវឆ្វ**មានទាហានច្រើនពន្លឹកដល់មួយរយម៉ឺនប្លាយ លើកមកបីដូចនឹងធ្វើផែនដីឲ្យក្រឡាប់ គួរហើយឬហ៊ានតស៊ូនឹង**ចូវឆ្វ**នោះ ឧបមាដូចមមាចសុចទៅរោមខ្លួនគជសារ ឬពុំនោះសោតទេ ដូចរែកយកចំបើងទៅគរដាក់លើភ្នក់ភ្លើង នឹងអន្តរាយព្រោះតែលោកជឿស្ដាប់ពាក្យ**ខុងបេង**។

**កោយ៉ុង**ឆ្លើយឡើងថា **ឡៅពី**តស៊ូនឹង**ចូវឆ្វ**មិនបាន រត់មករិះគិតនឹងបញ្ចុះបញ្ចូលចិត្តសុំខ្ចីដៃទាហានក្នុងស្រុកកាំងតាំងឲ្យទៅតស៊ូនឹង**ចូវឆ្វ** ហេតុម្ដេចលោកមកជឿស្ដាប់ពាក្យ**ខុងបេង**ដូច្នេះ? លោកចូរត្រិះរិះគិតតាមពាក្យ**ទៀវចៀវ**ជម្រាបសិនចុះ។

**ស៊ុនគួន**ឮទីប្រឹក្សាទាំងអស់និយាយដូច្នោះ ក៏មិនដឹងរិះគិតថាប្រការម្ដេចនៅស្ងៀមទ្រមឹងមិនឆ្លើយសោះ។ **ទៀវចៀវ** និងទីប្រឹក្សាទាំងអស់ ឃើញ**ស៊ុនគួន**ស្ងៀមនៅដូច្នោះក៏នាំគ្នាលាចេញមកវិញ។ **ឡោសុក**ក៏ចូលទៅជម្រាបសួរ**ស៊ុនគួន**ថា អម្បាញ់មិញទីប្រឹក្សាទាំងពួង និង**ទៀវចៀវ**នាំគ្នាមកឃាត់ទាស់ ហាមលោកមិនឲ្យរិះគិតធ្វើការកម្ចាត់**ចូវឆ្វ**នោះ ប្រាថ្នានឹងឲ្យលោកទៅចំណុះ**ចូវឆ្វ** ដើម្បីរក្សាគ្រប់គ្រួសាររបស់ខ្លួនឲ្យបានសេចក្ដីសុខ គ្មានចិត្តប្រាថ្នានឹងស្ដាយស្រុក និងចៅហ្វាយនាយសោះទេ ល្អតែនឹងហៅខ្យល់ឲ្យទូកលិច សូមកុំឲ្យលោកជឿស្ដាប់ពាក្យសម្ដីពួក

អ្នកអស់ទាំងនេះឡើយ។ **ស៊ុនគួន**ឮ**ឡោសុក**និយាយដូច្នោះហើយ ក៏នៅស្ងៀម។ **ឡោសុក**ថា ដែលលោកនឹងជឿស្ដាប់ពាក្យអ្នកទាំងអស់នោះ យូរទៅនឹងបានសេចក្ដីព្រួយទុក្ខ ក្ដៅក្រហាយជាច្រើន។

ក្នុងសម័យនោះ ពួកនាហ្មឺនដែលជាភ្នាក់ងារខាងសេនាទាហានក៏ឃើញតាមគំនិត**ឡោសុក** មិនព្រមនឹងឲ្យទៅចំណុះ**ចូឆូ** ថាត្រូវតែតស៊ូច្បាំង ឯភ្នាក់ងារខាងការរៀបរយក៏ស្រុះស្រួលគ្នាទៅគំនាប់**ចូឆូ** តាំងតែទទឹងទាស់អធ្យាស្រ័យគ្នាដូច្នេះក៏មិនចេះដាច់ស្រេច **ស៊ុនគួន**ក៏និយាយនឹង**ឡោសុក**ថា ឲ្យអ្នកទាំងអស់ចេញទៅក្រៅសិនចុះ យើងនឹងត្រិះរិះគិតសិន ថាហើយ**ស៊ុនគួន**ក៏ក្រោកចូលទៅក្នុង នាហ្មឺនទាំងពួងក៏ត្រឡប់ចេញទៅ។

ឯ**ស៊ុនគួន**កាលចូលទៅក្នុងនោះ ក៏មានបរិវិតក្កពន់ប្រមាណណាស់ មិនបានជាស៊ីដេកទេ ចេះតែរសាប់រសល់នៅជាយូរថ្ងៃ។

នាង**ង៉កុកថៃ**ជាម្ដាយឃើញដូច្នោះសួរថា ពីដើមមកយើងមិនធ្លាប់ឃើញកូនមានក្រវល់ក្រវាយ ឥឡូវហេតុដូចម្ដេចទើបដេកមិនបាន ស៊ីមិនបានដូច្នេះ? **ស៊ុនគួន**ឆ្លើយថា ខ្ញុំបាទមានទុក្ខក្ដៅដូច្នេះ ព្រោះដឹងដំណឹងថា **ចូឆូ**លើកកងទ័ពមកតាំងនៅជាយទន្លេនឹងមកប្រទូសរ៉ាយស្រុកយើង។ ខ្ញុំបាទក៏បានប្រឹក្សានឹងមន្ត្រីភ្នាក់ងារទាំងពួងយល់ឃើញមិនព្រមគ្នា ចេះតែបែកខ្ញែកគ្នាទៅដោយខ្លួន ខ្លះថាឲ្យទៅចំណុះចុះចូល**ចូឆូ**ក៏មាន ខ្លះថាគិតតស៊ូច្បាំងក៏មាន។ ខ្ញុំបាទមិនដឹងនឹងរិះគិតដូចម្ដេចឲ្យដាច់ស្រេច បើតស៊ូនឹង**ចូឆូ** ទាហានយើងក៏មានគ្នាតិច ក្រែងស៊ូមិនបាន បើចេញទៅចំណុះចុះចូល**ចូឆូ**ក៏មិនទុកចិត្ត សេចក្ដីទាំងពីរប្រការនេះ ទើបខ្ញុំបាទវិតក្កកើតទុក្ខមិនសប្បាយ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៩

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ជីវយី**ដឹងថា **ចូឆូ**លើកទ័ពមកក្នុងស្រុកកេងជីវ **ជីវយី**មកដល់ស្រុកកាំងតាំង សូមអាសា**ស៊ុនគួន**ឲ្យធ្វើមេទ័ពធំ លើកទៅកំពង់ស្រុកកាំងហែ **ឡៅពី**ទៅរក**ជីវយី**ដល់បន្ទាយ **ចូឆូ**មានសំបុត្រទៅដល់**ជីវយី**។)*

**នាងង៉ូកុកថៃ**និយាយថា កូនអើយ កាលបងឯងជិតនឹងមរណភាពបានផ្តាំទុកថា ការអ្វីៗខាងក្នុង បើមិនសម្រេចក៏ឲ្យប្រឹក្សាសាកសួរ**ទៀវចៀវ** ការអ្វីខាងមុខ បើមិនសម្រេចឲ្យសួរ**ជីវយី** សេចក្តីទាំងពីរនេះ កូនភ្លេចហើយឬ? **ស៊ុនគួន**ឮដូច្នោះក៏រឭកឃើញបានដូចគេស្វាងទុក្ខអស់ចេញ ប្រៀបដូចដេកលក់ហើយភ្ញាក់ឡើង មានសេចក្តីត្រេកអរណាស់រកទីបំផុតគ្មាន ទើបបង្គាប់មនុស្សបម្រើឲ្យទៅប្រាប់**ជីវយី**ឯស្រុកគួនយ៉ុង លុះបម្រើមិនទាន់ចេញទៅ ទទួល**ជីវយី**ដឹងថា **ចូឆូ**លើកកងទ័ពមកតាំងនៅជាយទន្លេស្រុកកេងជីវ បំណងនឹងមកវាយយកស្រុកកាំងតាំង **ជីវយី**ក៏ស្រូតរូតចូលមក។

**ឡោសុក**ដឹងថា **ជីវយី**មកដល់ក៏រួសរាន់ទៅសួរ ហើយប្រាប់សេចក្តីដែល**ស៊ុនគួន**ប្រឹក្សាពិគ្រោះរិះគិតតច្បាំងនឹង**ចូឆូ**នោះគ្រប់ប្រការ។ **ជីវយី**ថា ការនេះអ្នកកុំវិតក្កអ្វីឡើយ ទុកជាធុរៈលើខ្លួនខ្ញុំចុះ ខ្ញុំនឹងបានរិះគិតធ្វើការនោះ អ្នកចូរស្រូតជាប្រញាប់ទៅអញ្ជើញ**ខុងបេង**ឲ្យមកជួបនឹងខ្ញុំបន្តិចចុះ។ **ឡោសុក**ក៏ឡើងសេះប្រញាប់ទៅអញ្ជើញ**ខុងបេង**។

ខណៈនោះ**ទៀវចៀវ**, **កោះយ៉ុង**, **ទៀវហៀន**, **ប៉ោជិត** ចូលទៅសួរ**ជីវយី**គំនាប់គ្នាហើយ **ទៀវចៀវ**សួរថា អ្នកទៅធ្វើការឯស្រុកគួនយ៉ុងនោះ បានឮដំណឹង

កិច្ចការរាជការដូចម្ដេចខ្លះ? **ជីវយី**ឆ្លើយថា មិនដឹង។ **ទៀវចៀវ**ថា ឥឡូវ**ចូឆ្វ**លើកកងទ័ពមកតាំងនៅជាយទន្លេស្រុកកេងជីវ ឱ្យមានសំបុត្រមកបញ្ចុះបញ្ចូល**ស៊ុនគួន**ឱ្យចេញទៅទទួលចំណុះទើបមិនប្រទូសរ៉ាយ តែឃើញថាមិនមែនជាពាក្យសុចរិតគិតប្រទូសរ៉ាយយើងជាប្រាកដ អស់យើងខ្ញុំបានពិគ្រោះប្រឹក្សាថា ឱ្យ**ស៊ុនគួន**ចេញទៅទទួលចំណុះតាមប្រវេណី ឥឡូវ**ឡោសុក**ទៅនាំ**ខុងបេង**មកនិយាយនឹងចៅហ្វាយយើង នឹងឱ្យចេញទៅតស៊ូនឹង**ចូឆ្វ** ទាំងខ្លួន**ឡោសុក**ក៏យល់ឃើញដូច្នោះដែរ យើងខ្ញុំរាល់គ្នាមិនពេញចិត្ត ព្រោះឃើញថា**ខុងបេង**នោះខុសគ្នានឹង**ចូឆ្វ** រិះគិតនឹងសងសឹកគ្នាជាដរាប នឹងជឿកាន់យកពាក្យនោះជាពិតប្រាកដមិនទាន់បាន សេចក្ដីទាំងអម្បាលនេះក៏នៅមិនទាន់ចុះសម្រុងគ្នា ទន្ទឹងចាំតែអ្នក ឥឡូវអ្នកមកដល់ហើយ ចូរទៅប្រឹក្សាឱ្យឃើញច្បាស់លាស់ខុសនិងត្រូវចុះ។

**ជីវយី**ឮដូច្នោះក៏សួរថា អស់អ្នករាល់គ្នាប្រឹក្សាយល់ថា ឱ្យចេញទៅគំនាប់**ចូឆ្វ**នោះព្រមគ្នាហើយឬ? **ទៀវចៀវ**ថា ទីប្រឹក្សាយល់ឃើញព្រមគ្នាហើយ។ **ជីវយី**ថា ដែលនឹងទៅគំនាប់**ចូឆ្វ**នោះ ខ្ញុំក៏យល់ឃើញផង តែវេលានេះអ្នកនាំគ្នាទៅវិញសិនចុះ ចាំព្រឹកស្អែកសឹមខ្ញុំទៅជួបនឹង**ស៊ុនគួន** រួចនឹងនិយាយឱ្យចុះសម្រុងគ្នាតែម្ដង។ ទីប្រឹក្សាទាំងអស់ក៏លាទៅវិញ។ **ទៀភៅ** និង**ហាន់តុង, អ៊ុយកាយ** ខាងពួកទាហានក៏ចូលទៅរក**ជីវយី**គំនាប់ហើយនិយាយថា លោកដឹងឬទេ ស្រុកកាំងតាំងនេះជារបស់អ្នកដទៃហើយ? **ជីវយី**តបថា ខ្ញុំមិនដឹងសោះ។ **ទៀភៅ**ឆ្លើយថា យើងខ្ញុំរាល់គ្នាជាខ្ញុំរាជការរបស់បិតា**ស៊ុនគួន** មានសេចក្ដីឧស្សាហ៍តាមមក ស៊ូធ្វើការច្បាំងមួយរយគ្រា មិនបានគិតដល់ជីវិត លុះបានមកតាំងខ្លួននៅស្រុកកាំងតាំងនេះ ឥឡូវចៅហ្វាយខ្ញុំជឿស្ដាប់ពាក្យសម្ដីទីប្រឹក្សាទាំងពួង នឹងលើកយកស្រុកទៅប្រគល់ឱ្យ**ចូឆ្វ**រកសេចក្ដីអៀនខ្មាសគ្មាន យើងខ្ញុំរាល់គ្នាខំទ្រាំអត់សង្កត់ចិត្ត គិតមិនឃើញផង

សោះ គ្រានេះអ្នកក៏អញ្ជើញមកហើយ សូមឲ្យទៅនិយាយជម្រាបដល់**ស៊ុនគួន** កុំឲ្យធ្វើតាមពាក្យអ្នកទាំងអម្បាលនោះ ត្រូវតែការពារស្រុកទុក ទោះបី**ចូវឆូ**លើកមកយើងខ្ញុំរាល់គ្នានឹងយកជីវិតដាក់ជាមុខ ស៊ូច្បាំងទាល់តែស្លាប់ទៅចុះ។

**ជីវយី**សួរថា អ្នកទាំងអស់យល់ឃើញព្រមគ្នាហើយឬ? **អ៊ុយកាយ**ឮហើយ ក្រោកឡើងយកដៃចាប់ក្បាលកន្ត្រាក់សក់ហើយថា ទោះបីក្បាលនេះនឹងធ្លាក់ចេញក៏មិនទៅសុំលំអុតលំឱន**ចូវឆូ**ឡើយ។ នាយទាហានទាំងពួងក៏ស្រែកឡើងព្រមគ្នា យើងក៏ជាចិត្តមួយនឹងគ្នាទាំងអស់។ **ជីវយី**ថា អ្នករាល់គ្នាយល់ឃើញព្រមគ្នាដូចម្ដេច យើងក៏យល់ឃើញតាមដែរ តែវេលានេះឲ្យត្រឡប់ទៅវិញសិនចុះ ព្រឹកស្អែកយើងនឹងទៅជួប**ស៊ុនគួន** ទើបនិយាយឲ្យចុះសម្រុងគ្នាបាន។ **ទៀវភៅ**នូវអស់នាយទាហានក៏គំនាប់លា**ជីវយី**ចេញទៅ។

វេលាល្ងាច **ឡោសុក**ក៏នាំ**ខុងបេង**ទៅជួបនឹង**ជីវយី** ៗឲ្យអង្គុយទីសមគួរ ហើយ **ឡោសុក**ក៏សួរ**ជីវយី**ថា ឥឡូវ**ចូវឆូ**គិតនឹងប្រទូសរ៉ាយយើង ៗនឹងចេញទៅគំនាប់ដោយល្អឬនឹងធ្វើប្រការម្ដេច សូមឲ្យលោកមានប្រសាសន៍ឲ្យច្បាស់ចុះ? **ជីវយី**ថា ឯ**ចូវឆូ**គិតធ្វើការទាំងនេះ គឺកាន់យកព្រះតម្រាស់ព្រះចៅ**ហៀនតេ**ជាធំ យើងនឹងរឹងទទឹងសោតក៏ដូចជាគិតក្បត់នឹងផែនដី មួយទៀតទាហាន**ចូវឆូ**ក៏ច្រើនសុទ្ធតែមានថ្វីដៃខ្លាំងពូកែណាស់ ខាងយើងក៏មានទាហានតិចស្ដួចស្ដើង ឃើញថាតស៊ូនឹង**ចូវឆូ**មិនបាន បើប្រសិនជាចេញទៅលំអុតលំឱន**ចូវឆូ**វិញប្រហែលជាបានសេចក្ដីសុខ។ ខ្ញុំយល់ឃើញដូច្នេះជាប្រាកដ វេលាព្រឹកស្អែកនឹងចូលទៅជម្រាប**ស៊ុនគួន**ឲ្យប្រើមនុស្សចេញទៅគំនាប់តាមប្រវេណី។ **ឡោសុក**បានឮដូច្នោះខឹងណាស់ឆ្លើយថា អ្នកនិយាយនេះខុសណាស់ ឯអាណាខេត្តស្រុកកាំងតាំងនេះបាននិយាយរាជការជាតំណមកលុះដល់បីជួរមនុស្សហើយ មិនដែលទៅចំណុះចុះចូល

អ្នកឯណា គ្រានេះអ្នកលើកទៅឲ្យ**ចូឆ្ង**នោះព្រោះឃើញប្រយោជន៍អ្វី កាល**ស៊ុនសេក**នឹងដល់សេចក្តីស្លាប់នោះបានផ្តាំទុកនឹងអ្នកថា ឲ្យជួយទំនុកបម្រុង**ស៊ុនគួន**ជាប្អូន ប្រាថ្នានឹងឲ្យស្រុកកាំងតាំងនៅខ្ជាប់ខ្ជួនដូចបានបង្អែកទៅលើភ្នំ ហេតុម្តេចបើការភ័យអាសន្នមកដល់ហើយ អ្នកត្រឡប់លះបង់មិនជួយទំនុកបម្រុងវិញ បណ្តោយទៅតាមពាក្យមនុស្សប្រចុបប្រចែងផ្តេសផ្តាសដូច្នេះ? **ជីវយី**ថា ស្រុកកាំងតាំងនេះមានអាណាខេត្តឡើងដល់ប្រាំមួយមណ្ឌល មនុស្សចំណុះស្រុកក៏ច្រើន បើយើងប្រាថ្នាឲ្យតស៊ូនឹង**ចូឆ្ង**គ្រានេះ ក៏ដូចជាធ្វើឲ្យអាណាប្រជានុរាស្ត្របានសេចក្តីទុក្ខក្តៅនឹងមានពាក្យគរហានិន្ទាដល់យើងម្នាក់ឯង ហេតុដូច្នេះទើបយើងឲ្យ**ស៊ុនគួន**ចេញទៅគំនាប់**ចូឆ្ង** ប្រាថ្នានឹងឲ្យបណ្តារាស្ត្របានសេចក្តីសុខ។

**ខុងបេង**ឃើញ**ជីវយី**និង**ឡោសុក**ដេញដោលគ្នាមិនចុះរុះ ក៏អង្គុយញញឹមចាំស្តាប់។ **ជីវយី**ថា អ្នកសើចចំអកខ្ញុំឬ? **ខុងបេង**ថា ដែលខ្ញុំសើចដូច្នេះមិនមែនចំអកឲ្យអ្នកទេ ខ្ញុំអត់ញញឹមនឹង**ឡោសុក**មិនបាន ព្រោះគ្មានដឹងលក្ខណៈខុសត្រូវអ្វីសោះ មានតែមាត់និយាយហើយមកដេញដោលអ្នក។ **ឡោសុក**ថា ហេតុម្តេចបានជាលោកអាចារ្យសើចចំអកឲ្យខ្ញុំថាមិនដឹងអ្វីដូច្នេះ? **ខុងបេង**ថា ដែល**ជីវយី**និយាយនោះ គឺឲ្យទៅគំនាប់លន់តួ**ចូឆ្ង** ខ្ញុំក៏មិនឃើញដែរ។ **ឡោសុក**ថា ហេតុម្តេចបានជាលោកមកចរចាដូច្នេះវិញ? **ខុងបេង**ថា ឯ**ចូឆ្ង**នោះមានគំនិតដោយបញ្ញាយ៉ាងសុខុមជ្រៅទូលាយណាស់ ដឹងចាត់ចែងទាហានក្នុងការសង្គ្រាមថាធ្ងន់ឬស្រាល បើយើងទៅប្រឹងតស៊ូនឹង**ចូឆ្ង** ក៏រមែងដល់នូវសេចក្តីវិនាសដល់ជីវិតពុំខាន **ឡៅពី**ថៅហ្វាយខ្ញុំក៏កាន់ទិដ្ឋិមានៈប៉ានតស៊ូនឹង**ចូឆ្ង** ក៏ដល់នូវសេចក្តីព្រួយលំបាកទាល់តែភ្លាត់មកនៅស្រុកកាំងហែ ឯ**ជីវយី**ជាមនុស្សចេះគិតល្អិតល្អណាស់ ទើបអាចលះទិដ្ឋិទៅគំនាប់**ចូឆ្ង** ប្រាថ្នានឹងរក្សាបុត្រភរិយានិងអាណាប្រជានុរាស្ត្រឲ្យបានសេចក្តីសុខនោះក៏គួរ

ហើយ។ **ឡោសុក**ខឹងណាស់ថា លោកនិយាយនេះដឹកដៃខ្ញុំទៅលុតជង្គង់គំនាប់**ចូឆ្វ**អាសត្រូវរាជសម្បត្តិ គួរហើយឬ?

**ខុងបេង**ថា អ្នកកុំខឹងនឹងខ្ញុំឡើយ ដែលនឹងទៅគំនាប់**ចូឆ្វ**នោះ ខ្ញុំមិនឲ្យលំបាកទេ ចំពោះតែខ្លួនមួយត្រូវឆ្លងទឹកទន្លេទៅ បើលោកអ្នកមិនទៅក៏បានដូចគ្នា ហើយឧបាយរបស់ខ្ញុំ ៗនឹងយកតែមនុស្សពីរនាក់ ចុះទូកតូចមួយឆ្លងទៅរក**ចូឆ្វ** ៗក៏នឹងនាំទាហានមួយរយម៉ឺនលើកទ័ពត្រឡប់ទៅវិញភ្លាម។ **ជីវយី**សួរថា ដែលអ្នកនឹងឲ្យមនុស្សតែពីរនាក់ឆ្លងទៅរក**ចូឆ្វ** ក៏អាចនឹងឲ្យ**ចូឆ្វ**លើកទ័ពត្រឡប់ទៅវិញនោះដូចម្តេច? ចូរថាឲ្យច្បាស់សិន។ **ខុងបេង**ថា កាលខ្ញុំនៅឯភ្នំង៉ោឡាំងកាំងនៅឡើយនោះ ខ្ញុំដឹងថា**ចូឆ្វ**ឲ្យធ្វើប្រាសាទទុកនៅកន្លែងមួយប្របឆ្នេរសមុទ្រទៀងហោ ជាទីសប្បាយ ហើយចាត់យកស្រីដែលមានរូបល្អមកទុកជាច្រើន ព្រោះចិត្ត**ចូឆ្វ**នោះក្រាស់ក្នុងផ្លូវកាមគុណខ្លាំង ហើយដឹងថានាង**ទៀវកុកឡោ** នៅស្រុកកាំងតាំងមានបុត្រីពីរនាក់ មានរូបល្អស្អាតនឹងរកស្រីឯទៀតផ្ទឹមស្មើគ្មាន។ **ចូឆ្វ**មានចិត្តកំណាន់គួចកាន់ប្រតិព័ទ្ធ បាននិយាយទុកថា បើច្បាំងយកស្រុកកាំងតាំងបានហើយ នឹងទទួលយកស្រីទាំងពីរនាក់នោះទៅទុកជាទីបម្រើផ្ទាល់ខ្លួន ទោះបីនឹងស្លាប់ទៅក៏មិនបានវិលវល់ក្នុងសន្តានចិត្ត ដែល**ចូឆ្វ**លើកទ័ពមួយរយម៉ឺនមកនេះ ក៏ព្រោះប្រាថ្នាប្តូរយកស្រី ប្រសិនបើអ្នកយកមាសតែមួយតម្លឹងទៅជូននាង**ទៀវកុកឡោ** ទិញយកបុត្រីទាំងពីរនាក់នោះទៅជូន**ចូឆ្វ** បានដូចសេចក្តីប្រាថ្នារបស់**ចូឆ្វ**ហើយ **ចូឆ្វ**ក៏លើកទ័ពត្រឡប់ទៅវិញជាប្រាកដ សូមឲ្យអ្នកខំរិះគិតថ្នាក់ថ្នមធ្វើតាមពាក្យខ្ញុំនេះចុះ បើបានហើយមិនព្រួយជជែកគ្នាតទៅទៀតឡើយ។ **ជីវយី**ថា ដែល**ចូឆ្វ**មានសេចក្តីកំណាន់ចិត្តគិតប្រតិព័ទ្ធចំពោះស្ត្រីទាំងពីរនាក់នោះ ហេតុម្តេចបានជាអ្នកដឹងប្រាកដមានអ្វីជាភស្តុតាងនៅខ្លះ?

**ខុងបេង**ថា ឯចិត្ត**ចូឆ្វ**ស្រឡាញ់ស្រីទាំងពីរនាក់នោះ បានសរសេរជាពាក្យកាព្យឃ្លោងទុក ខ្ញុំក៏បានចាំសេចក្តីជាសំខាន់ រួច**ខុងបេង**ក៏សូត្រពាក្យឃ្លោងនោះឲ្យ**ជីវយី**ស្តាប់ថា៖

អនិច្ចាទែនទីពីរឆ្វេងស្តាំ មកចាំរៀបទុកដាក់បំណាង
មួយឈ្មោះ**យ៉ុកឡុង**មួយ**គឹមហាង** នឹងបីត្រកងឱបថើបស្រី។
គឺនាមនាង**កៀវ**ស្រៀវស្រៀបស្រស់ ទាំងពីរឲ្យអស់ចិត្តបេតី
មួយឆ្វេងមួយស្តាំលើកថ្នមបី ឲ្យប្អូនប្រិមប្រិយសុខសម្រាន្ត។

**ជីវយី**បានឮចំឈ្មោះនាង**កៀវ**ទាំងពីរដូច្នោះ ក៏ខឹងខ្លាំងណាស់ ដូចគេយកភ្លើងទៅដុតចំលើថ្លើមប្រមាត់ ក៏ស្ទុះក្រោកឡើងលើកដៃចង្អុលទៅត្រង់ទិសឯជើងចំលើស្រុកកេងជីវថា ម៉ែអាសត្រូវផែនដី ម្តេចអាឯងព្រហើនហ៊ានចរចាប្រមាថមើលងាយអញជាល្បែងលេង។ **ខុងបេង**ឃើញ**ជីវយី**ច្រឡោតខឹងដូច្នោះ ក៏ក្រោកឡើងធ្វើជាហាមឃាត់ថា ហេតុម្តេចផែនដីអ្នកមិនស្រឡាញ់ ក៏ទៅស្រឡាញ់ឯស្រីពីរនាក់នោះវិញនឹងបានប្រយោជន៍អ្វី? **ជីវយី**ថា អ្នកមិនដឹងទេឬ នាង**តៃកៀវ**ជាបងនោះ គឺជាភរិយា**ស៊ុនសេក**ចៅហ្វាយខ្ញុំ នាង**សៀវកៀវ**ជាប្អូនក៏ជាភរិយារបស់ខ្ញុំ **ចូឆ្វ**ចរចាមើលងាយយ៉ាងនេះបានជាខ្ញុំខឹងក្តៅណាស់។ **ខុងបេង**ធ្វើជាភ័យតក់ស្លុត ចុះទៅគំនាប់ហើយថា ខ្ញុំមិនដឹងសោះឡើយបានជានិយាយហួសទៅ ដូច្នេះខុសខ្លាំងណាស់ សូមឲ្យអ្នកអាណិតអត់ទោសទៅចុះ។ **ជីវយី**ថា អាសត្រូវកញ្ចាស់នោះ ខ្ញុំមិនសុំជាន់ផែនដីរួមគ្នាឡើយ។

**ខុងបេង**ថា អ្នកកុំធ្វើការដោយទោសោះដូច្នោះ ត្រូវតែគិតថ្នាក់ថ្នមឲ្យបានល្អ ដែលនឹងច្រឡោតតាមចិត្តខឹងដូច្នោះ តទៅមុខក៏នឹងថ្លោះការមិនខាន។ **ជីវយី**ថា អ្នកនិយាយនោះត្រូវហើយ ឯខ្លួនខ្ញុំក៏បានទទួលពាក្យ**ស៊ុនសេក**ពីដើមមក ដែលនឹងទៅ

លំឱន**ចូឆ្វ**នោះ ខ្ញុំស៊ូតែស្លាប់មិនព្រមទៅគំនាប់សោះឡើយ ខ្ញុំមកពីស្រុកគួនយ៉ុងក្នុងគ្រានេះ ក៏គិតថានឹងមកចាត់ចែងរៀបចំទាហានបម្រុងនឹងតស៊ូ តែថាកម្លាំងសេចក្ដីគិតរបស់ខ្ញុំតែម្នាក់ឯងឃើញមិនស្រួល សូមឲ្យអ្នកជួយអនុគ្រោះទំនុកបម្រុងផង។

**ខុងបេង**ថា បើអ្នកមិនមានសេចក្ដីវង្វៀសក្នុងចិត្តទេ នឹងឲ្យខ្ញុំជួយក៏ល្មមនឹងគិតទៅបាន បើខុសត្រូវប្រការម្ដេចទៅខាងមុខសឹមជួយដាស់តឿនតាមតម្រិះប្រាជ្ញា។ **ជីវយី**ថា អ្នកនិយាយនេះក៏ត្រូវល្អហើយ បើដូច្នោះពេលព្រឹកស្អែក ខ្ញុំនឹងចូលទៅជម្រាប**ស៊ុនគួន**នឹងនិយាយឲ្យរៀបចាត់ចែងទាហានទុកឲ្យស្រេច ដើម្បីនឹងលើកទៅកម្ចាត់**ចូឆ្វ**ឲ្យបាន។ **ខុងបេង**និង**ឡោសុក**បានស្ដាប់ហើយ ក៏គំនាប់លា**ជីវយី**មកកាន់ទីសំណាក់វិញ។

លុះពេលព្រឹក **ស៊ុនគួន**និងពួកនាហ្មឺនខាងក្រសួងរដ្ឋបាល និងពួកក្រុមព្រះនគរព្រមគ្នាទៅជួបជុំ។ **ជីវយី**ចូលទៅគំនាប់ ហើយនិយាយថា ឥឡូវនេះខ្ញុំបាទដឹងថា **ចូឆ្វ**លើកទ័ពមកធ្វើអន្តរាយដល់ស្រុកយើងនោះ តើលោកគិតប្រការម្ដេច? **ស៊ុនគួន**ឃើញ**ជីវយី**ចូលមកនិយាយដូច្នោះមានអំណរណាស់ ទើបយកសំបុត្រដែល**ចូឆ្វ**ឲ្យមកនោះហុចទៅឲ្យ**ជីវយី**មើល។ **ជីវយី**ហែកសំបុត្រមើលហើយថា អាសត្រូវផែនដីកញ្ឆាស់នោះវាគិតថា ស្រុកកាំងតាំងគ្មានមនុស្សល្អនឹងដឹងដល់វា វាប្រាថ្នានឹងបញ្ចុះបញ្ចូលឲ្យយើងស្លាប់ចិត្ត។ **ស៊ុនគួន**បានឮដូច្នោះក៏សួរថា សេចក្ដីទាំងអម្បាលនេះ អ្នកយល់ឃើញប្រការម្ដេច? **ជីវយី**ថា លោកបានប្រឹក្សានឹងអស់អ្នករាល់គ្នាហើយឬ? យល់ឃើញព្រមគ្នាប្រការម្ដេចខ្លះ?

**ស៊ុនគួន**ថា ទីប្រឹក្សាមិនទាន់ចុះរុះគ្នាសោះ ដែលនឹងឲ្យយើងទៅគំនាប់ក៏ថានឹងឲ្យតស៊ូក៏ថា សេចក្ដីទាំងពីរនេះបែកខ្ញែកគ្នាដោយខ្លួន បានជាឲ្យអញ្ជើញអ្នកមកគ្រានេះប្រាថ្នានឹងឲ្យនិយាយឲ្យដាច់ស្រេច។ **ជីវយី**សួរថា ដែលប្រឹក្សាឃើញថានឹង

ឲ្យទៅចំណុះ**ចូឆ្ន**នោះគឺនរណាខ្លះ? **ស៊ុនគួន**រាប់ប្រាប់ឈ្មោះឲ្យស្ដាប់។ **ជីវយី**ក៏សួរ**ទៀវចៀវ**ថា ដែលអ្នកនឹងឲ្យចេញទៅគំនាប់**ចូឆ្ន**នោះ ដោយយល់ឃើញប្រការម្ដេច? ចូរថាឲ្យច្បាស់មកចុះ។ **ទៀវចៀវ**ថា ខ្ញុំឃើញថា**ចូឆ្ន**មកប្រាបប្រាមស្រុកទេសទាំងអស់នោះព្រោះកាន់ព្រះតម្រាស់ព្រះចៅ**ហៀនតេ**ជាធំ មួយទៀត **ចូឆ្ន**បានស្រុកកេងជីវប្រមូលផ្ដុំទុកជាច្រើន ឃើញថាមានកម្លាំងធំទូលាយឆ្ងាយណាស់ យើងតស៊ូមិនបានទេ បានជាយល់ថាត្រូវទៅចំណុះចុះចូលតាមប្រវេណីសិន តទៅមុខសឹមគិតកែប្រែទៅតាមការ។ **ជីវយី**ថា អ្នករាល់គ្នាមកប្រឹក្សាឃើញត្រូវព្រមគ្នាដូច្នេះ សុទ្ធតែមនុស្សមិនកើតទាំងអស់ ព្រោះស្រុកកាំងតាំងនេះមានចៅហ្វាយស្រុកតគ្នាមកដល់បីជួរហើយ មិនដែលទៅចំណុះអ្នកណាសោះ ហេតុអ្វីគ្រានេះអ្នករាល់គ្នាប្រឹក្សាឲ្យលះបង់ប្រវេណីចេញដូច្នេះ នឹងជាប្រយោជន៍អ្វី?

**ស៊ុនគួន**ថា កាលពួកអ្នកទាំងនេះប្រឹក្សាយល់ដូច្នោះហើយ បើខាងអ្នកមិនយល់ឃើញតាមទេ តើនឹងឲ្យធ្វើការម្ដេចទៅវិញ? **ជីវយី**ថា **ចូឆ្ន**នោះជាមហាឧបរាជក៏មែន តែជាសត្រូវរាជសម្បត្តិរបស់ព្រះចៅ**ហៀនតេ** ឯខ្លួនលោកក៏ជាមនុស្សមានប្រាជ្ញានិងតម្រិះត្រិះរិះ ហើយប្រកបដោយសេចក្ដីកតញ្ញូសុចរិតណាស់ មិនគួរនឹងទៅចំណុះចុះចូល**ចូឆ្ន** ដែលជាមនុស្សអកតញ្ញូប្រទូសក្បត់ផែនដីនោះទេ មួយទៀតស្រុកកាំងតាំងបរិបូរដោយស្រូវ អង្ករ ត្រីសាច់ ព្រមទាំងមនុស្ស ចំណុះស្រុកក៏ច្រើន គួរតែកម្ចាត់សត្រូវផែនដីឲ្យសូន្យចេញទើបប្រពៃ ដែល**ចូឆ្ន**លើកទ័ពមកនៅទីនោះក៏យូរហើយ ខាង**ម៉ាថេង**និង**ហាន់ស៊ុយ**ក៏ជាហរិគ្នាដែរ ឃើញថាហរិរវាងគ្នាជាខាងក្រោយ ប្រការមួយទៀត ទាហាន**ចូឆ្ន**សុទ្ធតែមនុស្សពួកអ្នកលើ មិនប៉ិនប្រសប់ខាងជើងទឹកសោះ ទោះលើកមកច្បាំងក៏មិនសូវស្ទាត់ ហើយវេលានេះជារដូវប្រាំង ស្មៅនិងចំបើងទាំងពួងក៏ឃើញថាមិនមានឲ្យធួនល្មមនឹងមាត់សេះបរិ

ភោគ ឯទាហានទាំងពួងសោតក៏សុទ្ធតែមនុស្សព្រៃ នឹងស៊ីផឹកប្រើទឹកទន្លេក៏ខុសទម្លាប់ច្រើនតែឈឺថ្កាត់គ្រប់គ្នា ឃើញថាកម្លាំងកងទ័ពនឹងថយៗចុះគ្រប់វេលា ទោះបីធ្វើការតដៃជាប់គ្នា ក៏គង់នឹងចាញ់ប្រៀបខាងយើង ការសឹកសង្គ្រាមជាធំនេះខ្ញុំគ្មានវិតក្កសោះឡើយ នឹងសូមអាសាលោកលើកទ័ពទៅតាំងនៅកំពង់ស្រុកកាំងហែកម្ចាត់**ចូវឆ្វ**ចេញឲ្យបាន។

**ស៊ុនគួន**បានស្ដាប់សព្វគ្រប់មានអំណរណាស់ ទើបនិយាយថា ដែលអ្នកគិតតស៊ូនឹង**ចូវឆ្វ**នោះក៏ដូចចិត្តរបស់ខ្ញុំ។ **ជីវយី**ថា ឯខ្លួនខ្ញុំបាទនេះ ទោះបីនឹងស្លាប់ក្នុងសង្គ្រាមក៏មិនបានគិតស្ដាយជីវិតសោះ ខ្ញុំបាទមកគិតមិនអស់ចិត្តតែនឹងលោកក្រែងមិនមាំមួន។ **ស៊ុនគួន**ហូតយកគ្រប៊ីចេញមកហើយក៏កាប់ចំមុមតុប្រកាសជាអាជ្ញាសិទ្ធិទុកថា នរណានឹងមកនិយាយឲ្យយើងចេញទៅចំណុះ**ចូវឆ្វ**ម្ដងនេះទៀត នឹងត្រូវកាត់ក្បាលចេញ។ និយាយហើយក៏ហុចគ្រប៊ីនោះទៅឲ្យ**ជីវយី**កាន់ជាអាជ្ញាសិទ្ធិ ក្នុងកងទ័ពសម្រាប់មុខងាជាមេកងធំ ទ័ពហ្លួងឲ្យ**ទៀវភៅ**ជាបាឡាត់ បើអ្នកឯណាមិនបាននៅក្នុងបង្គាប់បញ្ជាទេ ត្រូវឲ្យកាត់ក្បាលអ្នកនោះចេញ។ **ជីវយី**គំនាប់ហើយ ក៏ទទួលយកគ្រប៊ីលើកប្រកាសឡើងដល់បណ្ដាទាហានទាំងពួងថា ឥឡូវយើងមានអាជ្ញាសិទ្ធិមកជាទីសម្រេចរាជការក្នុងកងទ័ពហើយ ចូរអ្នករាល់គ្នាតាំងចិត្តធ្វើការកុំបីប្រមាទ ដែលយើងលើកទ័ពទៅតតាំងច្បាំងនឹង**ចូវឆ្វ**គ្រានេះ ត្រូវទៅព្រមគ្នាឯក្បែរជាយទន្លេ បើនរណាយឺតយូរក្នុងកំណែនមិនទាន់ការរាជការ យើងនឹងឲ្យដាក់ទោសអ្នកនោះដោយរហ័ស។ និយាយហើយ ក៏លា**ស៊ុនគួន**ចេញទៅដល់ផ្ទះ ហើយឲ្យអញ្ជើញ**ខុងបេង**ចូលទៅប្រឹក្សាថា ឥឡូវចៅហ្វាយខ្ញុំព្រមឲ្យតស៊ូនឹង**ចូវឆ្វ**ហើយ សុំឲ្យអ្នកជួយគិតឧបាយដែលនឹងធ្វើការរាជការនោះផងចុះ។

**ខុងបេង**ថា ដែលអ្នកនឹងឲ្យខ្ញុំជួយគិតការនោះក៏មិនជាអ្វីទេ ល្មមនឹងជួយគិតតាមតម្រិះប្រាជ្ញាបានខ្លះដែរ តែថានៅមិនទាន់ទុកចិត្ត ដោយឃើញអារម្មណ៍ចៅហ្វាយអ្នកនៅវិលវល់ណាស់។ **ជីវយី**ថា អ្នកឃើញយ៉ាងម្ដេចបានជាថាដូច្នេះ?

**ខុងបេង**ថា ខ្ញុំឃើញចៅហ្វាយអ្នកបានឮដំណឹងថា ទាហាន**ចូឆ្វ**ច្រើនបារម្ភព្រួយថាទាហានខាងនេះតិចក្រែងតស៊ូមិនបាន សូមកុំឲ្យអ្នកភ្ញាក់ផ្អើលធ្វើអ្វី ត្រឡប់ចូលទៅនិយាយយកចិត្តថ្លើមចៅហ្វាយអ្នកកុំឲ្យភ័យតក់ស្លុតរន្ធត់ដូច្នោះ ត្រូវតែខំប្រឹងឲ្យមាំមួនទើបខ្ញុំនឹងបានគិតការស្រួល។ **ជីវយី**ថា អ្នកនិយាយនេះត្រូវណាស់ ហើយ**ជីវយី**ក៏ត្រឡប់ចូលទៅជួបនឹង**ស៊ុនគ្វន** ៗក៏សួរថា ពេលយប់ងងឹតថ្មើរនេះ អ្នកចូលមកមានកិច្ចធុរៈអ្វី? **ជីវយី**ថា ខ្ញុំបាទនឹងកេណ្ឌទាហានទាំងពួងនោះ នៅគិតធ្ងន់ក្នុងចិត្តបន្តិចទើបត្រឡប់មកជួបនឹងលោក ប្រាថ្នានឹងចង់ដឹងថា លោកមានសេចក្ដីវិតក្កអ្វីខ្លះឬគ្មានទេ? **ស៊ុនគ្វន**ថា ដែលអ្នកត្រឡប់មកសួរខ្ញុំយ៉ាងនេះត្រូវហើយ ខ្ញុំក៏នៅមានសេចក្ដីវិតក្កបន្តិចដែរ ព្រោះ**ចូឆ្វ**មានទាហានច្រើន ខាងយើងមានទាហានតិចណាស់ ក្រែងតស៊ូនឹងគេមិនបាននឹងថ្លោះការទៅ។

**ជីវយី**ថា ការនេះឯងហើយ បានជាខ្ញុំបាទចូលមកជម្រាបលោក ប្រាថ្នានឹងពន្យល់ឲ្យលោកចូលចិត្ត ព្រោះ**ចូឆ្វ**មានសំបុត្រមកថា មានទាហានមួយរយម៉ឺននោះ សេចក្ដីនេះមិនមែនទេ គឺជាកលឧបាយបញ្ឆោតទេតើ ឯទាហាន**ចូឆ្វ**នោះប្រហែលដប់ប្រាំទៅដប់ប្រាំមួយម៉ឺនប៉ុណ្ណោះ ដល់ទាហាន**អ៊ួនសៀវ**ជាមនុស្សចាំចិត្ត គិតតែនឹងដោះខ្លួនចេញពី**ចូឆ្វ**គ្រប់ពេលព្រឹកល្ងាច ទោះបីនឹងធ្វើការក៏មិនពេញដៃ មួយទៀតទាហាន**ចូឆ្វ**ក៏ដើរមកផ្លូវឆ្ងាយ សព្វសារពើអ្វីៗក៏ទញ់ទាល់ទាំងគ្រប់អស់ហើយ យើងនៅជិតស្បៀងអាហារក៏បរិបូរគ្រប់សព្វទាំងអស់ នឹងស៊ូមិនបានឬ? ទោះបីច្រើនក៏ដូចតិច លោកកុំវិតក្កឡើយ។ ខ្ញុំបាទនឹងសុំអាសាយកទាហានយើងតែប្រាំម៉ឺន

នឹងគិតធ្វើការកម្ចាត់**ចូឆ្វ**ចេញឲ្យបាន។ **ស៊ុនគួន**បានស្តាប់ដូច្នោះក៏ពេញអំណរណាស់ លើកដៃស្ទាបអង្អែលខ្នង**ជីវយី**ហើយថា ដែលអ្នកពន្យល់ឲ្យយើងអស់សង្ស័យដូច្នេះ ជាគុណច្រើនណាស់ នេះហាក់ជាបានអ្នកជួយឧបត្ថម្ភ បើត្រឹមតែលើ**ទៀវចៀវ**ខ្ញុំក៏រំពឹងមិនបាន ពីថ្ងៃនេះទៅខ្ញុំអស់សេចក្តីព្រួយវិតក្កទៀតហើយ អ្នកនិង**ទៀវភៅ**, **ឡោសុក** ចូរខំចាត់ចែងប្រមូលទាហានស្រួតលើកទៅចុះ ខ្លួនខ្ញុំនឹងលើកទាហានជូនទៅតាមក្រោយ បើខ្វះខាតប្រការម្តេចចូរប្រើបម្រើឲ្យមកប្រាប់ខ្ញុំ សឹមខ្ញុំលើកទៅតស៊ូនឹង**ចូឆ្វ**ដោយខ្លួនឯង។ **ជីវយី**ឮដូច្នោះក៏អស់សង្ស័យគំនាប់លាត្រឡប់ចេញទៅវិញ ទើបគិតថា **ខុងបេង**នេះនិយាយវាងវៃមាំមួនណាស់ ដឹងចិត្តរបស់ចៅហ្វាយយើងជាជាងយើងទៅទៀត មួយទៀតនឹងគិតការអ្វីក៏ល្អត្រឹមត្រូវដូចនឹងដើរលើក្បាលយើងបាន បើយើងស្ងៀមទុកគ្រានេះ យូរទៅក៏នឹងត្រឡប់ជាសត្រូវ ត្រូវតែគិតកម្ចាត់ចេញឲ្យបាន។ ហើយឲ្យហៅ**ឡោសុក**ចូលមក ប្រាប់សេចក្តីស្ងាត់ដែលនឹងគិតសម្លាប់**ខុងបេង**ចេញឲ្យស្តាប់គ្រប់ប្រការ។

**ឡោសុក**ថា អ្នកគិតដូច្នេះមិនត្រូវសោះ ព្រោះ**ចូឆ្វ**លើកទ័ពមកនឹងប្រទូសរ៉ាយដល់យើង តែនៅកម្ចាត់ចេញមិនទាន់បាន បើអ្នកទៅសម្លាប់**ខុងបេង**ចេញហើយ ការសឹកសង្គ្រាមក៏នឹងជាប់ដៃគ្នាតទៅថ្ងៃមុខជាអង្វែង តែខ្លួនអ្នកមួយគ្មាននរណាជួយគិតសោះ នឹងមិនធ្ងន់ក្នុងដើមទ្រូងណាស់ទៅឬ? ឯ**ខុងបេង**នោះមានតម្រិះប្រាជ្ញាគួរនឹងជួយអ្នកបាន មួយទៀត**ជូកាត់កិន**បង**ខុងបេង**ក៏នៅក្នុងស្រុកកាំងតាំងដែរ បើប្រែទៅនិយាយបបួលឲ្យចូលមកនៅជួយធ្វើរាជការខាងយើងនឹងមិនល្អទេឬ? **ជីវយី**ឮហើយក៏យល់ថាត្រូវ លុះវេលាព្រឹកក៏ឲ្យទៅហៅនាហ្មឺនមុខមន្ត្រីចូលមកព្រមគ្នាក្នុងទីប្រជុំ។ ខណៈនោះ**ទៀវភៅ**មានសេចក្តីតូចចិត្តថា ខ្លួនអញជាចាស់ជាង

អាយុ**ជីវយី** ៗនៅក្មេងឡើងអង្គុយទីខ្ពស់ នឹងឲ្យយើងជាចាស់ទាបមុខ ទៅអង្គុយប្រឹក្សាការក្នុងទីទាប ឲ្យបុត្រមកជំនួសហើយប្រាប់ថាឈឺ។

**ជីវយី**ក៏និយាយនឹងនាហ្មឺនទាំងពួងថា កងទ័ព**ចូឆូ**លើកមកគ្រានេះធំសន្ធឹកសន្ធាប់ណាស់ ឯយើងនឹងគិតធ្វើការនោះនឹងធ្វើឲ្យឡេះឡោះពុំបានទេ អ្នករាល់គ្នានឹងធ្វើការជាមួយនឹងយើង មិនត្រូវខ្ជិលច្រអូសមានពុតត្បុតគេចវេះ បើនរណាមិនពេញចិត្តប្រឹងធ្វើការទេ យើងនឹងកាត់ក្បាលចេញតាមអយ្យការសឹក។ ហើយ**ជីវយី**ក៏តាំង**អ៊ុយកាយ, ហាន់តុង** ជានាយកងទ័ពស្រួច លើកទាហានចុះទូកច្បាំងឲ្យព្រមព្រៀងគ្នា ឲ្យ**ជីវយឹម, ជីវថាយ** លើកទាហានមួយកង ឲ្យ**ឡុកសុន, តាំងស៊ិត** លើកទាហានមួយកង តាំង**លីហាង, ជូទី** លើកទាហានជាកងល្បាត។

លុះ**ជីវយី**ចាត់ចែងនាយទ័ពនាយកងសម្រេចហើយក៏បង្គាប់ថា អ្នករាល់គ្នាចូរស្រួតប្រញាប់ទៅត្រៀមប្រចាំឲ្យមូលគ្នា បើបានឫក្សពារវេលាល្អកាលណា យើងនឹងលើកទ័ពចេញទៅតាំងនៅមាត់ជ្រោយស្រុកសាំកាំង។ នាយទ័ពនាយកងទាំងពួងក៏គំនាប់លាចេញទៅចាត់ចែងទាហានត្រៀមទុកស្រេច តាមពាក្យ**ជីវយី**បង្គាប់។

ឯ**ទៀជូ**បុត្រ**ទៀភៅ** ឃើញ**ជីវយី**ចាត់ចែងទាហានព្រមទាំងទ័ពគោកទ័ពទឹកដូច្នោះក៏យកសេចក្ដីទៅជម្រាប**ទៀភៅ**ជាបិតាគ្រប់ប្រការ **ទៀភៅ**ឮដូច្នោះភ័យណាស់ យកដៃគក់ដើមទ្រូងហើយថា **ជីវយី**នេះអញគិតថាជាក្មេងមិនទាន់ដឹងអ្វីឥឡូវឃើញចេះដឹងជាងមនុស្សចាស់ទៅទៀត ត្រឡប់មានតម្រិះប្រាជ្ញាអង់អាច ដឹងរៀបចំទាហានក្នុងកងទ័ពត្រឹមត្រូវតាមក្បួនទ័ពក្នុងសង្គ្រាម ល្មមសមគួរដែលនឹងធ្វើជាមេកងធំបាន ដែលខ្លួនអញមកគិតប្រមាថមើលងាយខុសដូច្នេះមិនគួរសោះ។ **ទៀវភៅ**ក៏ទៅរក**ជីវយី**ដល់ទីលំនៅ ហើយក៏និយាយសូមទោសថា ខ្ញុំបានជាកាន់ទិដ្ឋិមានះព្រោះថាចាស់ មើលងាយអ្នកដ្បិតនៅក្មេងមិនបានមកប្រឹក្សាការរាជការ

គំនាប់អ្នកនោះខុសពេកណាស់ សុំឲ្យអ្នកអាណិតអត់ទោសខ្ញុំចុះ។ **ជីវយី**អស់សំណើចហើយថា ដែលអ្នកប្រមាថមើលងាយនោះ ខ្ញុំមិនប្រកាន់ទោសទេ កុំឲ្យព្រួយ។ **ទៀភៅ**បានឱកាសដូច្នោះហើយក៏លាត្រឡប់ទៅវិញ។

លុះវេលាព្រឹក **ជីវយី**ក៏ហៅ**ជូកាត់កិន**ចូលមកនិយាយថា **ខុងបេង**ប្អូនអ្នកជាមនុស្សមានតម្រិះប្រាជ្ញា ហេតុអ្វីទៅផ្ញើខ្លួននឹង**ឡៅពី**ដូច្នោះ មិនសមសោះ គួរតែនឹងមកនៅនឹង**ស៊ុនគួន**ចៅហ្វាយយើង ក៏នឹងមានយសសក្តិជាសុខសាន្ត។ អ្នកចូរទៅនិយាយល្បួងលួងលោម**ខុងបេង**ប្អូនអ្នកឲ្យចោល**ឡៅពី**ទៅ មកនៅធ្វើរាជការរួមផែនដីជាមួយគ្នានឹងយើង ព្រោះខ្លួនអ្នកនៅទីនេះដែរ បងប្អូននឹងបានឃើញមុខគ្នាព្រឹកល្ងាចនឹងមិនល្អឬ? **ជូកាត់កិន**ថា ខ្ញុំមកនៅនឹង**ស៊ុនគួន**នេះ ក៏មិនទាន់មានសេចក្តីគាប់ប្រសើរអ្វីសោះ បើដូច្នោះខ្ញុំនឹងទៅនិយាយនឹងប្អូនខ្ញុំមើល បើព្រមមកនៅនឹងអ្នកជាសេចក្តីគាប់ប្រសើររបស់ខ្ញុំស្រាប់។ **ជូកាត់កិន**គំនាប់ហើយក៏ឡើងសេះស្រូតរូតទៅជួបនឹង**ខុងបេង**ដល់ទីសំណាក់។ **ខុងបេង**ឃើញ**ជូកាត់កិន**ជាបងមកដូច្នោះក៏មានអំណរណាស់ ចេញមកគំនាប់ហើយនាំចូលទៅក្នុង។ អ្នកទាំងពីរក៏យំរឭកគ្នាព្រោះឃ្លាតចាកមកយូរ។

**ជូកាត់កិន**ក៏និយាយនឹង**ខុងបេង**ថា **ប៉ែះអ៊ី, សុកថៃ** ពីដើមនោះដឹងឬទេ? **ខុងបេង**បានឮសម្តីដូច្នោះក៏ដឹងថា **ជីវយី**ប្រើឧបាយឲ្យមកនិយាយបញ្ចុះបញ្ចូលទើបឆ្លើយថា **ប៉ែះអ៊ី, សុកថៃ** ជាមនុស្សជាន់បុរាណ ត្រូវការអ្វីកុំមកនិយាយឡើយ។ **ជូកាត់កិន**ថា ប្អូននិយាយនេះដូចជារកគិតបងប្អូនគ្មានសោះឡើយ ឯ**ប៉ែះអ៊ី, សុកថៃ** បងប្អូនពីរនាក់កើតផ្ទៃជាមួយ ផឹកទឹកដោះគោជាមួយគ្នា ព្រោះមានសេចក្តីស្រឡាញ់ដូចប្អូន និងបង កើតរួមឧទរជាមួយគ្នា បៅដោះជាមួយគ្នា ទោះនឹងធ្វើការអ្វីៗ នៅទីណាក៏ត្រូវតែទៅជាមួយគ្នា ទោះនឹងស្លាប់វេលាណាក៏ត្រូវតែស្លាប់ជាមួយ

គ្នាដែរ។ ដោយហេតុសេចក្ដីស្រឡាញ់ បើប្អូននិងបងកើតមកជាមួយគ្នា ហើយទៅធ្វើរាជការនៅទីទៃៗពីគ្នា មិនបានឃើញមុខគ្នាព្រឹកល្ងាចដូច្នេះ ក៏មិនដូចប្រវេណីបងប្អូនគេពីដើម នឹងមិនមានសេចក្ដីអប្បយសដល់គេទាំងពួងឬ?

**ខុងបេង**ថា ដែលបងមានប្រសាសន៍នោះ ខ្ញុំបាទមិនទាន់ឃើញផងសោះ ព្រោះយើងបងប្អូនកើតក្នុងផែនដីព្រះចៅ**ហៀនតេ** គួរណាស់តែកាន់ចិត្តកតញ្ញូនឹងផែនដី ហេតុដូច្នេះបានជាខ្ញុំបាទ ស៊ូទៅនៅនឹង**ឡៅពី** ព្រោះឃើញថាជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ដើម្បីមិនឲ្យបង់ប្រវេណីបុរាណ ហេតុម្ដេចបានជាបងលះបង់ចោលផែនដីព្រះចៅ**ហៀនតេ**ស្រឡះ ស្វះស្វែងមកនៅក្នុងស្រុកកាំងតាំងឲ្យរឹតតែឆ្ងាយបងប្អូនទៅទៀត ដូចជាគ្មានចិត្តគិតឆ្ងៀតរឭកអាល័យសោះឡើយ។ ពេលនេះឃើញគួរតែបងលះបង់ចោលស្រុកកាំងតាំងចេញ វិលទៅនៅធ្វើរាជការនឹងខ្ញុំបាទវិញ ឲ្យបានឃើញមុខគ្នាយប់ព្រឹកទើបគួរ។ **ជូកាត់កិន**បានស្ដាប់ដូច្នោះក៏គិតថា ខ្លួនអញសុំអាសាមកល្បងលួងលោម**ខុងបេង** ឥឡូវ**ខុងបេង**ត្រឡប់ល្បងលួងលោមឯងវិញដូច្នេះ ក៏ទាល់គំនិតមិនដឹងបើនឹងគិតនិយាយដូចម្ដេចទៅទៀត **ជូកាត់កិន**ក៏លា**ខុងបេង**ត្រឡប់ទៅប្រាប់**ជីវយី**គ្រប់ប្រការ។

**ជីវយី**ឮហើយក៏មិនបានថាប្រការម្ដេច ក៏ចេញទៅលា**ស៊ុនគួន**ហើយនិយាយថា ខ្ញុំនឹងសុំអាសាលើកទ័ពទៅច្បាំងនឹង**ចូឆូ**។

**ស៊ុនគួន**ថា អ្នកចូរស្រួតរូតលើកទ័ពឲ្យព្រមគ្នាចេញទៅចុះ ខ្ញុំនឹងលើកទ័ពជូនទៅជាខាងក្រោយ។ **ជីវយី**ក៏គំនាប់លា**ស៊ុនគួន**ចេញមកចាត់ចែងទាហាន ហើយបបួល**ខុងបេង**ថា ទ័ព**ចូឆូ**លើកមកគ្រានេះច្រើនសន្ធឹកសន្ធាប់ពេកណាស់ ខ្ញុំនឹងចង់បបួលអ្នកទៅផង។ **ខុងបេង**ឮដូច្នោះក៏មានអំណរណាស់ ឆ្លើយទទួលថា ខ្ញុំព្រមទៅជាមួយនឹងអ្នក។ **ជីវយី**ក៏នាំ**ខុងបេង**ចុះទូកចម្បាំងមួយទៅជាមួយគ្នា។ ឯ**ទៀវភៅ**

និង**ឡោសុក**ឲ្យធ្វើជាបាឡាត់កងលើកទាហានជាច្រើន នាំផ្លូវជ្រោយទៅដល់មាត់កំពង់ស្រុកកាំងហែ ចម្ងាយផ្លូវពីមាត់កំពង់ស្រុកសាំកាំងប្រាំមួយរយសិន (២៤គ.ម) **ជីវយី**ឲ្យឈប់កងទ័ពទូកបោះយុថ្កា ហើយឲ្យទាហានឡើងគោកតាំងបន្ទាយវាយគ្នាទៅតាមផ្លូវត្រង់ទៅទិសបស្ចិម។ ឯ**ខុងបេង**ក៏ចុះទូកតូចទៅបោះយុថ្កានៅប្របទូកមេទ័ព។

**ជីវយី**ឲ្យហៅ**ខុងបេង**ឡើងមកលើទូកចម្បាំងធំ ហើយក្លែងប្រឹក្សាប្រាថ្នាប្រើ**ខុងបេង**ទៅឲ្យ**ចូឆ្វ**សម្លាប់ចេញ ហើយថា កាល**ចូឆ្វ**ច្បាំងនឹង**អ៊្វនសៀវ**នោះ **ចូឆ្វ**មានទាហានតិចជាង**អ៊្វនសៀវ**ណាស់ **ចូឆ្វ**ក៏ធ្វើសង្គ្រាមមានជ័យជម្នះ**អ៊្វនសៀវ**បាន ព្រោះបានស្ដាប់ពាក្យ**ខៅហ៊ីវ**ពន្យល់ឲ្យទៅវាយស្បៀងនៅតំបន់គួចៅបាន គ្រានេះ**ចូឆ្វ**លើកមកទាហានច្រើនដល់មួយរយម៉ឺនប្លាយ ឯទាហានយើងលើកមកក៏តិចបានតែប្រាំម៉ឺនប្លាយ ឃើញថានឹងច្បាំងយកជ័យជម្នះបានដោយកម្រណាស់ ត្រូវតែរិះគិតចាត់ទាហានទៅកាត់ស្បៀង**ចូឆ្វ**ឲ្យបានជាមុនសិន ទើបនឹងធ្វើការចម្បាំងនឹង**ចូឆ្វ**បាន ឥឡូវ**ចូឆ្វ**ប្រមូលទាហានស្បៀងទុកនៅភ្នំគីសាន់ ដែនស្រុកសុងយ៉ុង ឯខ្លួនអ្នកក៏នៅក្នុងដែនស្រុកសុងយ៉ុងដែរ ឃើញថាចំណានខាងផ្លូវព្រៃនិងភ្នំគ្រប់តំបន់ ការសង្គ្រាមគ្រានេះសោត ក៏មិនមែនតែជារបស់**ស៊ុនគួន**ចៅហ្វាយខ្ញុំតែម្នាក់ឯងទេ គឺរបស់**ឡៅពី**ចៅហ្វាយរបស់អ្នកផងដែរ ខ្ញុំនឹងប្រគល់ទាហានឲ្យអ្នកមួយពាន់ស្រួតរួតលើកត្រឡប់ទៅប្រាប់**ឡៅពី** សុំយក**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង** ឲ្យលើកចេញទៅកាត់ស្បៀង**ចូឆ្វ**ចេញឲ្យបាន ខ្ញុំនឹងរិះគិតការតស៊ូច្បាំងឲ្យបានស្រួល។

**ខុងបេង**បានស្ដាប់ក៏គិតថា ដែល**ជីវយី**ឲ្យមកល្បួងលួងលោមអញមិនបានដូចប្រាថ្នា ទើបក្លែងឲ្យអញទៅធ្វើការនេះ ប្រាថ្នានឹងឲ្យ**ចូឆ្វ**ចាប់អញសម្លាប់ បើអញមិនស្ដាប់ ធ្វើព្រងើយកន្តើយមិនទៅគ្រានេះ **ជីវយី**ក៏ដំនៀលអញថាខ្លាច**ចូឆ្វ** បើ

អញនឹងទៅតាមបង្គាប់ **ជីវយី**ក៏នឹងសើចចំអកថា អញដឹងមិនដល់គំនិត បើដូច្នេះអញត្រូវគិតទទួលទៅចុះ តែចាំរកឧបាយកែខ្លួនឲ្យបាន លុះគិតស្រេចក៏ឆ្លើយទទួលពាក្យ ហើយលាចុះទៅទូកតូចវិញ។

**ឡោសុក**ក៏សួរ**ជីវយី**ថា ដែលលោកប្រើ**ខុងបេង**ទៅវាយស្បៀង**ចូឆូ**នោះ លោកគិតឃើញបានការយ៉ាងម្ដេច? **ជីវយី**ថា យើងគិតនឹងសម្លាប់**ខុងបេង**ចេញក៏ខ្លាចគេគរហានិន្ទា បានជាក្លែងប្រើ**ខុងបេង**ទៅវាយស្បៀងនោះ ដោយប្រាថ្នានឹងខ្ចីអាវុធ**ចូឆូ**សម្លាប់វិញ តទៅមុខទើបយើងផុតភ័យអន្តរាយ ហើយមនុស្សទាំងឡាយក៏មិនតិះដៀលយើងបាន។ **ឡោសុក**ថា ខ្ញុំនឹងសុំទៅមើលកលការកិរិយា**ខុងបេង**ជានឹងដឹងខ្លួនឬទេ? ហើយក៏ចុះទៅទូក**ខុងបេង** ឃើញទឹកមុខ**ខុងបេង**គ្មានភិតភ័យអ្វីសោះ រៀបចាត់ចែងមនុស្សម្នាដែលនឹងទៅនោះបែបធម្មតាព្រងើយ។ **ឡោសុក**មានសេចក្ដីអាណិត**ខុងបេង**ណាស់ក៏សួរថា ដែល**ជីវយី**ប្រើលោកឲ្យទៅវាយស្បៀង**ចូឆូ**នោះ លោកយល់ឃើញថាបានការដូចម្ដេចខ្លះ?

**ខុងបេង**ក៏អស់សំណើចហើយថា យ៉ាងខ្លួនខ្ញុំនេះចំណានក្នុងការសង្គ្រាមទាំងផ្លូវគោកផ្លូវទឹក ព្រមទាំងក្បួនសេះក្បួនរថថ្មើរជើងទាំងបួនយ៉ាងស្ទាត់ទាំងអស់ ទើបបានឈ្មោះថាជាប្រាជ្ញក្នុងចតុរង្គសង្គ្រាម ឯក្នុងស្រុកកាំងតាំងនេះ នឹងរកមនុស្សចំណានស្ទាត់ក្នុងចម្បាំងផ្លូវគោកដូចជាគ្មានឃើញ ចំណានតែខាងផ្លូវទឹក ទោះបីខ្លួន**ជីវយី**ឯងក៏ដូចគ្នា។ **ឡោសុក**ថា ហេតុម្ដេចបានជាលោកថា**ជីវយី**ចំណានតែផ្លូវទឹក? **ខុងបេង**ថា ខ្ញុំបានឮក្មេងក្នុងស្រុកកាំងតាំងធ្វើភ្លេងច្រៀងទំនុកថា៖

ធម្មជាតិមេទ័ពគ្រប់រូបអង្គ ត្រូវចេះចតុរង្គក្នុងសង្គ្រាម
ទើបឈ្មោះមេទ័ពគ្រប់រូបនាម កុំធ្វើរីមរាមដូច**ជីវយី**។
ស្ទាត់តែចម្បាំងខាងជើងទឹក ជើងគោកវវើកភ្លឹកភ្លេចទី

នេះហៅទាហានគ្មានសំភី តាមប្រវេណីមិនស៊ីសួរ។

**ឡោសុក**ក៏កំណត់ចាំពាក្យ ដែល**ខុងបេង**អធិប្បាយនោះទៅប្រាប់**ជីវយី**គ្រប់ប្រការ។ ឯ**ជីវយី**ឮដូច្នោះខឹងណាស់និយាយថា **ខុងបេង**នេះចរចាមើលងាយប្រមាថយើងថាមិនចំណានខាងផ្លូវគោក បើយើងមិនទៅក្នុងគ្រានេះ **ខុងបេង**ក៏នឹងថែមតិះដៀលយើងទៀត បើដូច្នោះយើងមិនឲ្យ**ខុងបេង**ទៅឡើយ យើងនឹងលើកទាហានមួយម៉ឺនទៅខ្លួនឯងចុះ ប្រយោជន៍នឹងកាត់យកស្បៀង**ចូឆូ**ឲ្យបាន។ **ឡោសុក**ឮដូច្នោះក៏ត្រឡប់ទៅប្រាប់**ខុងបេង**តាមពាក្យ**ជីវយី**និយាយគ្រប់ប្រការ។

**ខុងបេង**ក៏អស់សំណើចហើយថា ឯសេចក្ដីរិះគិត**ជីវយី**នោះ នឹងប្រើខ្ញុំដោយសុចរិតក៏ទេ គឺក្លែងឲ្យខ្ញុំទៅស្លាប់ដោយថ្វីដៃនិងសេចក្ដីគិតរបស់**ចូឆូ**ពិត ដែលខ្ញុំថា**ជីវយី**មិនស្ទាត់ក្នុងសង្គ្រាមខាងផ្លូវគោកនោះ ព្រោះខ្ញុំក្លែងញុះចិត្ត**ជីវយី**ល្បងមើលប្រាជ្ញានឹងឲ្យយល់ថា ខ្ញុំក៏អាចដឹងដល់គំនិត**ជីវយី**ដែរ។ គ្រានេះខ្ញុំក៏ត្រូវគិតឲ្យ**ស៊ុនគួន** និង**ឡៅពី**រួមគំនិតគិតធ្វើការជាចិត្តមួយនឹងគ្នា ដើម្បីនឹងកម្ចាត់រាជសត្រូវចេញប៉ុណ្ណោះ យើងទាំងអស់គ្នាជាបាវព្រាវក៏ត្រូវតែតាំងចិត្តជួយគ្នា ជួយគិតការឲ្យបានសម្រេច ហេតុម្ដេច**ជីវយី**មកគិតមិត្តទ្រូសនឹងខ្ញុំវិញ? បើដូច្នោះការរបស់ចៅហ្វាយនាយនឹងមិនអន្តរាយទៅទេឬ? ប្រការមួយទៀត ឯគំនិតរបស់**ចូឆូ**នោះចំណានក្នុងការសង្គ្រាមណាស់ រមែងធ្វើកលសឹកផ្សេងៗតែងតែកាត់ស្បៀងអាហារជាដើម ដែល**ចូឆូ**លើកទ័ពមកគ្រានេះ នឹងរិះគិតការពារស្បៀងអាហារឲ្យមាំមួន បើ**ជីវយី**នឹងលើកទៅខាងណោះមុខជាថ្លោះការរបស់**ចូឆូ**ជាប្រាកដ ចូរអ្នកទៅនិយាយនឹង**ជីវយី**ឲ្យខំអត់នៅរិះគិតច្បាំងតទល់តែខាងជើងទឹកទៅចុះ ព្រោះទាហាន**ចូឆូ**នោះស្ទាត់តែខាងផ្លូវគោក មិនសូវប្រសប់ខាងផ្លូវជើងទឹកទេ ប្រសិនបើកងទ័ពយើងតទល់ច្បាំងខាងផ្លូវទឹក ឲ្យទាហាន**ចូឆូ**ថ្លោះការរបស់យើងឲ្យបាន។ **ឡោសុក**ឮដូច្នោះ

ក៏សរសើរតម្រិះប្រាជ្ញា**ខុងបេង**ថា ដឹងយល់ស្គាល់ការជ្រៅទូលាយនឹងរកអ្នកឯណាមួយផ្ទឹមស្មើគ្មាន។

លុះវេលាយប់ **ឡោសុក**ក៏នាំយកសេចក្ដីនោះទៅប្រាប់**ជីវយី**គ្រប់ប្រការ។ **ជីវយី**ដឹងដូច្នោះ ក៏គ្រវីក្បាលហើយថា គំនិតរបស់**ខុងបេង**នោះជ្រៅទូលាយវៃវាងលើសជាងខ្ញុំដប់ភាគ បើប្រសិនខ្ញុំមិនគិតយកគំនិតនឹងកម្ចាត់ចេញឲ្យបាន តទៅមុខក៏នឹងជាសត្រូវដល់ខ្លួនខ្ញុំជាយ៉ាងខ្លាំង។ **ឡោសុក**ក៏លួងលោមចិត្ត**ជីវយី**ថា គ្រានេះការសង្គ្រាមក៏បង្កើតមាន លោកនឹងមកធ្វើដូច្នេះមិនគួរទេ បើសិនណាជា**ខុងបេង**ភ្ញាក់ផ្អើលឡើង គំនិតនិងកម្លាំងរបស់យើងក៏នឹងថយចុះវិញ ឃើញថាស្រុកកាំងតាំងនឹងវិនាសអន្តរាយ ការនេះយើងត្រូវតែគិតច្បាំងឲ្យបានជ័យជម្នះ**ចូឆូ**សិន តទៅមុខសឹមគិតធ្វើប្រការម្ដេចនឹងបានដោយងាយ។ **ជីវយី**យល់ឃើញត្រូវ ក៏ឲ្យតាំងទ័ពទឹកទុកឲ្យខ្ជាប់ខ្ជួន។

ឯទូកកងក្រវែលស្រុកកាំងហែ ក៏នាំយកសេចក្ដីទៅប្រាប់**ឡៅពី**ឲ្យដឹង។ **ឡៅពី**បានស្ដាប់ក៏គិតថា កងទ័ពស្រុកកាំងតាំងលើកមកនឹងធ្វើសង្គ្រាមនឹង**ចូឆូ**។ **ឡៅពី**ក៏ចាត់ចែងទាហានក្នុងស្រុកកាំងហែនោះប្រមូលយកទាំងអស់ ហើយលើកចេញចាកស្រុកកាំងហែទៅតាំងនៅតំបន់ហែខៅ ហើយប្រឹក្សានឹងទាហានទាំងពួងថា **ខុងបេង**ទៅស្រុកកាំងតាំងយើងក៏មិនបានដឹងដំណឹងថាល្អ ឬអាក្រក់ប្រការម្ដេច ឥឡូវកងទ័ពទូកស្រុកកាំងតាំងលើកមកចតនៅកំពង់ស្រុកនេះ នរណានឹងអាចលុះលះទៅស្ដាប់ដំណឹង**ខុងបេង**ឲ្យដឹងជាកាចប្រការម្ដេចបាន? **ប៊ីតុក**ថា ខ្ញុំបាទនឹងសូមអាសាចេញទៅ។ **ឡៅពី**ក៏ចាត់ចែងរបស់ទៅគំនាប់**ជីវយី** ប្រាថ្នានឹងបានស្ដាប់ដំណឹង**ខុងបេង**ផង។ **ប៊ីតុក**ទទួលរបស់ហើយក៏ចុះទូកទៅដល់កងទ័ពចម្បាំងទូក ក៏ឡើងទៅគំនាប់**ជីវយី**ហើយជម្រាបថា របស់ទាំងនេះ**ឡៅពី**ឲ្យខ្ញុំបាទនាំមកជូនលោក

ទុកចែកទាហាន។ **ជីវយី**ក៏ទទួលអំណរសាទរណាស់ ទទួលយករបស់ទាំងនោះទុក។ **ប៊ីតុក**ក៏ជម្រាបថា ដ្បិត**ឡៅពី**បានផ្ដាំមកថា **ខុងបេង**មកទីនេះក៏យូរហើយ នឹងឲ្យទទួលត្រឡប់ទៅវិញ។ **ជីវយី**ថា ការសង្គ្រាមកំពុងតែរៀបចំ ដែល**ខុងបេង**មកនៅផងក៏ស្រួល ព្រោះនឹងបានជួយចាត់ការតតាំងច្បាំងនឹង**ចូឆូ** ដែល**ឡៅពី**នឹងឲ្យ**ខុងបេង**ត្រឡប់ទៅវិញនោះ កុំអាលសិនចុះ ឯខ្លួនយើងសោតក៏មានចិត្តនឹករឭកដល់**ឡៅពី**ណាស់ដែរ បើយើងនឹងទៅក៏ពុំបានព្រោះជាមេទ័ពនឹងព្រួយការខាងត្រួតបង្គាប់ទាហាន អ្នកចូរស្រូតត្រឡប់ទៅជម្រាប**ឡៅពី**ឲ្យអញ្ជើញមករកយើង នឹងបានប្រឹក្សាការសង្គ្រាមផង។ **ប៊ីតុក**ទទួលគំនាប់ហើយក៏លាត្រឡប់ទៅវិញ។

**ឡោសុក**ក៏សួរ**ជីវយី**ថា លោកនឹងឲ្យ**ឡៅពី**មកជួបនោះតើនឹងប្រយោជន៍អ្វី? **ជីវយី**ថា ឯចិត្ត**ឡៅពី**នោះជាអ្នកមិនសូវដឹងគុណគេសោះ ប្រសិននឹងស្ម័គ្រសមាគមនឹង**ឡៅពី**យូរទៅ ក៏នឹងធ្វើអន្តរាយដល់យើងវិញ។ បើសម្លាប់**ឡៅពី**បាន ទ្រព្យយើងទើបនឹងគង់នៅ។ ហើយ**ជីវយី**ក៏ឡើងទៅលើបន្ទាយ ហើយលបចាត់ទាហានដែលមានថ្វីដៃហាសិបនាក់ ឲ្យកាន់អាវុធបង្កប់នៅក្នុងឆាកហើយផ្ដាំថា កាលណាបើឃើញ**ឡៅពី**មកស៊ីលៀងនឹងយើង ហើយអ្នករាល់គ្នាឃើញយើងចោលពែងស្រាចុះកាលណា ក៏ឲ្យស្រុះគ្នាចេញមកចាប់**ឡៅពី**សម្លាប់ចេញ។ ឯ**ប៊ីតុក**កាលត្រឡប់ទៅដល់ក៏ប្រាប់**ឡៅពី**តាមរឿងសព្វគ្រប់ហើយថា **ជីវយី**ផ្ដាំថាឲ្យអញ្ជើញទៅជួបនឹងបានប្រឹក្សាការរាជការ។ **ឡៅពី**ឮហើយក៏រៀបចំទាហានដែលនឹងចុះទូកទៅរក**ជីវយី**។ **គួនអ៊ូ**ក៏និយាយនឹង**ឡៅពី**ថា ដែលលោកនឹងទៅរក**ជីវយី**នោះមិនស្រួលទេ ព្រោះ**ជីវយី**ជាមនុស្សពូកែសម្ដីវៃគំនិតណាស់ ខ្លាចក្រែងគេគិតប្រទូសរ៉ាយលោកទេដឹង? មួយទៀត**ខុងបេង**ក៏មិនមានដំណឹងឲ្យលោកអញ្ជើញទៅជាល្អឬអាក្រក់ សូមឲ្យលោកអែអង់រង់ចាំស្ដាប់ការសិន។

**ឡៅពី**ថា យើងនឹង**ស៊ុនគួន**ជាក៏ជាចិត្តមួយជាមួយគ្នា នឹងរិះគិតកម្ចាត់**ចូឆូ**ចេញ ឥឡូវ**ជីវយី**ធ្វើមេទ័ពឲ្យមកអញ្ជើញយើងចូលទៅប្រឹក្សាការរាជការផង បើយើងនឹងមិនទៅតែម្តង ក្រែង**ស៊ុនគួន**សន្និះចិត្តនឹងយើងថាដូច្នេះដូច្នោះ ឯការដែលរួមគិតមកហើយនោះក៏នឹងខូចទៅ។ **គួនអ៊ូ**ថា ប្រសិនបើលោកមិនព្រមស្តាប់នឹងប្រញាប់ទៅឲ្យបាន ខ្ញុំបាទក៏សូមយកទាហានទៅជាមួយនឹងលោកខ្លះ ដើម្បីនឹងជួយការពារអន្តរាយផ្សេងៗ។ **ឡៅពី**ក៏បង្គាប់ឲ្យ**តៀវហ៊ុយ**និង**ជូឡុង**នៅរក្សាបន្ទាយ ហើយនាំយក**គួនអ៊ូ**និងកូនទាហានដប់ពីរនាក់ចុះទូកទៅដល់កងទ័ព**ជីវយី**។ **ឡៅពី**ឃើញទូកចម្បាំង និងបន្ទាយរាយជាក្បួនពិជ័យសង្គ្រាមត្រឹមត្រូវក៏មានសេចក្តីត្រេកអរណាស់។ ទាហានល្បាតក៏នាំយកសេចក្តីទៅប្រាប់**ជីវយី**ថា **ឡៅពី**មកដល់ហើយៗ**ជីវយី**ក៏សួរថា **ឡៅពី**មកនេះមានទាហានតិចច្រើនប៉ុន្មាន? ទាហានប្រាប់ថា **ឡៅពី**ចុះទូកតូចមកនឹងទាហានប្រហែលម្ភៃនាក់។ **ជីវយី**ឮដូច្នោះក៏អស់សំណើចហើយគិតថា គ្រានេះ**ឡៅពី**នឹងដល់នូវសេចក្តីស្លាប់ព្រោះគំនិតអញគិតក្នុងថ្ងៃនេះហើយ ទើបឲ្យចាត់ចែងទាហានដែលបង្កប់ទុកនោះ ព្រមគ្នាហើយក៏លើកគ្នាមកទទួល**ឡៅពី**ឯក្រៅបន្ទាយ។ គំនាប់គ្នាតាមប្រវេណី **ជីវយី**ក៏នាំ**ឡៅពី**, **គួនអ៊ូ** និងទាហាននោះចូលទៅក្នុងបន្ទាយ ហើយអញ្ជើញ**ឡៅពី**ឲ្យបរិភោគអាហារ។ **ឡៅពី**ក៏និយាយនឹង**ជីវយី**ថា ខ្លួនអ្នកនេះ មនុស្សទាំងអស់នាំគ្នានិយាយសរសើរឮទូទៅថា អ្នកមានសេចក្តីរិះគិតល្អិតជ្រៅទូលាយណាស់ ទាំងបានធ្វើជាមេទ័ព ហើយមករាប់ខ្ញុំជាមនុស្សបុណ្យតិចនេះមិនសមគួរទេ។

ខណៈនោះទទួល**ខុងបេង**ដើរមកដល់ក្បែរបន្ទាយ ក៏ដឹងថា**ឡៅពី**មកជួបនឹង**ជីវយី**បរិភោគអាហារជាមួយគ្នាក្នុងបន្ទាយដូច្នោះក៏នឹកភ័យណាស់ **ខុងបេង**ក៏ចូលទៅលបមើល ឃើញមុខ**ជីវយី**នោះមាំដូចជាខឹង ហើយទាហានក្នុងឆាកនោះខ្សឹប

ខៀវគ្នា ក៏រឹតតែស្កុតចិត្តជាខ្លាំង តែឃើញកិរិយា**ឡៅពី**និយាយស្តីយ៉ាងព្រងើយកន្តើយ ហើយឃើញទាំង**គួនអ៊ូ**ឈរពីក្រោយកាន់គ្រប៊ីយ៉ាងអង់អាច។ **ខុងបេង**ក៏អស់ភ័យខ្លាចគិតឃើញថា **ឡៅពី**នឹងមិនអន្តរាយទេ។ ហើយក៏ត្រឡប់ទៅចាំ**ឡៅពី**នៅក្បែរមាត់ទឹក។

ខណៈកាល**ជីវយី**ផឹកស្រានឹង**ឡៅពី**នោះ ក្រឡេកទៅឃើញ**គួនអ៊ូ**ឈរកាន់គ្រប៊ីពីក្រោយ**ឡៅពី**។ **ជីវយី**ក៏សួរថា អ្នកនោះទាហានពីណា? **ឡៅពី**ក៏ប្រាប់ថា **គួនអ៊ូ**ជាប្អូនខ្ញុំ។ **ជីវយី**សួរថា អ្នកនេះឬដែលទៅនៅនឹង**ចូអូ** បានយកអាសាទៅសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ** ជាទាហានឯករបស់**អ៊ួនសៀវ**នោះ? **ឡៅពី**ក៏ទទួលថា នេះឯងហើយ។ **ជីវយី**ឮដូច្នោះក៏តក់ស្លុតក្នុងចិត្ត ចេញញើសហូរជ្រួតជ្រាបសព្វសព៌ាង្គកាយ ហើយក៏ចាក់ស្រាហុចទៅឲ្យ**គួនអ៊ូ**ផឹក។ ទទួល**ឡោសុក**ចូលមក **ឡៅពី**ក៏សួរថា **ខុងបេង**នៅឯណា? សុំឲ្យអ្នកប្រាប់ឲ្យមកជួបនឹងខ្ញុំបន្តិចបានសន្ទនាគ្នា។

**ជីវយី**ឮដូច្នោះក៏ថា នឹងអស់ថ្ងៃទៅហើយឬ បើសម្រេចការសង្គ្រាមហើយសឹមត្រូវការជួបគ្នាចុះ។ **ឡៅពី**មិនបានតបថាប្រការម្តេច **គួនអ៊ូ**បានឮដូច្នោះក៏ចោលចុងភ្នែកទៅឲ្យ**ឡៅពី**ដឹង **ឡៅពី**ក្រឡេកទៅប្រទះភ្នែក**គួនអ៊ូ**ក៏យល់អធ្យាស្រ័យជាមិនស្រួល ទើបក្រោកឡើងគំនាប់**ជីវយី**ហើយថា ខ្ញុំសុំលាទៅសិនចុះ បើស្រេចការសង្គ្រាមវេលាណាសឹមមកជួបសន្ទនាគ្នាទៀត ហើយ**ឡៅពី**ក៏នាំ**គួនអ៊ូ**និងទាហានចេញពីបន្ទាយ លុះទៅដល់ទូកក៏ក្រឡេកឃើញ**ខុងបេង**ចូលទៅនិយាយគ្នាក្នុងទូក។

**ខុងបេង**ឃើញ**ឡៅពី**ចេញមកក៏មានអំណរណាស់និយាយថា ដែលលោកមករក**ជីវយី**វេលានេះ កុំតែបាន**គួនអ៊ូ**មកផង កុំអី**ជីវយី**នឹងប្រទូសរ៉ាយលោកឲ្យអន្តរាយជីវិត។ **ឡៅពី**ថា ដែល**ជីវយី**នឹងគិតគំនិតអាក្រក់ដូចម្តេចនោះខ្ញុំឥតដឹងសោះ ដែលខ្ញុំមកវេលានេះ ប្រាថ្នានឹងទទួលលោកយកទៅទុកក្នុងបន្ទាយហៃខៅវិញប៉ុណ្ណោះ។

**ខុងបេង**តបថា លោកកុំព្រួយនឹងខ្ញុំឲ្យសោះ ទោះបីខ្លួនខ្ញុំបាទនឹងមកចូលនៅក្នុងមាត់ខ្លាមាត់ក្រពើក្តី ក៏នៅតែមានសេចក្តីសប្បាយជាជាងនៅក្នុងបន្ទាយទៅទៀត។ លោកចូរស្រួតរូតទៅចាត់ចែងទាហានទូកចម្បាំងទុកឲ្យព្រម នឹងបានធ្វើការស្រួល បើដល់ខែបុស្សប្រាំកើតវេលាណា ឲ្យលោកប្រើ**ជូឡុង**យកទូកតូចមកចាំទទួលខ្ញុំបាទនៅត្រើយទន្លេ ខាងទិសទក្សិណកុំខាន។ **ឡៅពី**សួរថា គំនិតរបស់លោកឃើញប្រការម្តេច បានជាផ្តាំទុកដូច្នេះ។ **ខុងបេង**ឆ្លើយថា លោកចាំតែមើលទៅចុះ បើឃើញខ្យល់ជំនោរបក់មកពីទិសអគ្នេយ៍វេលាណា ខ្ញុំបាទនឹងទៅជួបនឹងលោកវេលានោះ ហើយ**ខុងបេង**ក៏លា**ឡៅពី**ទៅទូកតូច។ **ឡៅពី**ក៏ត្រឡប់ទៅវិញជួបនឹង**តៀវហ៊ុយ**នាំទូកចម្បាំងហាសិបមកតាម ក៏នាំគ្នាចូលទៅក្នុងបន្ទាយហែខៅ។

ឯ**ឡោសុក**លុះ**ឡៅពី**វិលទៅវិញហើយ ក៏ចូលទៅសួរ**ជីវយី** ៗថា ខ្ញុំបាទឮគេនិយាយថា **គួនអ៊ូ**នោះមានថ្វីដៃខ្លាំងពូកែណាស់ ដូចទាហានខ្លា មកជាមួយនឹង**ឡៅពី** បើយើងនឹងចុះដៃធ្វើអន្តរាយ**ឡៅពី** **គួនអ៊ូ**ដែលឈរជិតនឹងធ្វើអន្តរាយដល់យើងវិញ។ **ឡោសុក**យល់ឃើញផង។ ខណៈនោះទទួលមានបម្រើ**ចូឆូ**នាំសំបុត្រមកឲ្យ**ជីវយី** ៗទទួលយកសំបុត្រនោះមកមើលឃើញការខ្ទងថា មហាឧបរាជព្រះចៅ**ហៀនតេ**ឲ្យមកដល់**ជីវយី**ជាមេទ័ព។ **ជីវយី**ឃើញដូច្នោះក៏ខឹងណាស់ ល្មីហែកសំបុត្រនោះខ្ទេចខ្ទីអស់ទៅ ហើយបង្គាប់ឲ្យចាប់ខ្លួនអ្នកកាន់សំបុត្រទៅសម្លាប់ចេញ។

**ឡោសុក**ថា ពាក្យបុរាណពោលទុកថា ទោះបីស្រុកណាជាសឹកសត្រូវនឹងគ្នាក្តីលោកមិនឲ្យធ្វើអន្តរាយដល់អ្នកកាន់សំបុត្រ ឬមនុស្សបម្រើទៅមកក្រៅពីមនុស្សប្លែកប្លមនោះជាដាច់ខាតតែម្តង ហេតុម្តេចលោកក៏មកសម្លាប់អ្នកកាន់សំបុត្រចេញដូច្នេះ? **ជីវយី**តបថា ដែលខ្ញុំឲ្យសម្លាប់អ្នកកាន់សំបុត្រនោះ ព្រោះហេតុថា នឹងឲ្យដឹងដល់**ចូឆូ**ថា យើងមិនបានញញើតខ្លាច ទោះបីបើនឹងសម្លាប់វាចេញ ព្រោះគិត

ខ្លាច មនុស្សទាំងពួងនឹងត្រឡប់ថា ឲ្យចៅហ្វាយយើងទៅសុំចំណុះដល់សឹកសត្រូវ សំបុត្រប្រគល់ឲ្យមនុស្សដែលមកជាមួយ ឥឡូវខ្ញុំតាំងចិត្តធ្វើរាជការនឹងកម្ចាត់**ចូវឆ្វ** ចេញឲ្យបាន ទើបខ្ញុំឲ្យសម្លាប់អ្នកកាន់សំបុត្រប្រគល់ឲ្យមនុស្សដែលមកជាមួយនាំក្បាលត្រឡប់ទៅឲ្យ**ចូវឆ្វ**វិញ។ ហើយ**ជីវយី**ឲ្យចាត់ចែងទ័ពទូក ប្រើ**កាំឡេង**ជាទ័ពស្រួច **ជៀវឃីម**ជាប៉ែកឆ្វេង ខ្លួន**ជីវយី**ជាមេកងធំក្នុងទ័ពហ្លួង។ លុះវេលាព្រឹកឡើងក៏នឹងលើកចេញទៅវាយទ័ព**ចូវឆ្វ**។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤០

**ចារឹកឡើងវិញដោយ ៖ ឈុល ដាក៉**

*(តាំងពី**ចូឆូ**ប្រើ**ឈ្លួម៉** និង**ទៀវអ៊ុន**លើកទ័ពទូកទៅច្បាំងនឹង**កាំឡេង** ៗចាញ់ **ឈ្លួហ៊ុន**ស្លាប់ **ជៀវកាន**មកបញ្ចុះបញ្ចូល**ជីវយី** ៗគ្រួតកល**ចូឆូ** ៗសម្លាប់**ឈ្លួម៉**, **ទៀវអ៊ុន**។ **ខុងបេង**ទទួលអាសាធ្វើព្រួញ **ជីវយី**វាយ**អ៊ុយកាយ**បែកខ្នង។)*

**ឯមនុស្ស**បម្រើក៏នាំក្បាលអ្នកកាន់សំបុត្រទៅឲ្យ**ចូឆូ** ហើយប្រាប់សេចក្តីដល់**ចូឆូ**គ្រប់ប្រការ។ **ចូឆូ**បានស្តាប់ក៏ខឹងពេញកម្លាំង ទើបប្រើ**ឈ្លួម៉** និង**ទៀវអ៊ុន**លើកទាហានស្រុកកេងជីវ ស្រុកសៀងជីវជាទ័ពទូក ចេញទៅជាទ័ពស្រួច **ចូឆូ**ជាទ័ពហ្លួងលើកទៅដល់តំបន់សាំកាំង ឃើញ**កាំឡេង**ជាទ័ពទូកចេញទៅជាទ័ពមុខ លើកទ័ពទូកមកជាច្រើន។ **កាំឡេង**ក៏ស្រែកសួរថា ទ័ពនរណាអាចស៊ូនឹងយើង? **ឈ្លួម៉**និង**ទៀវអ៊ុន**ក៏ឆ្លើយថា យើងឈ្មោះ**ឈ្លួម៉**, **ទៀវអ៊ុន** ជាកងមុខមហាឧបរាជ លើកមកតច្បាំងនឹងអ្នកជាមុន ហើយ**ឈ្លួម៉**ក៏ឲ្យ**ឈ្លួហ៊ុន**ជាប្អូនមកអង្គុយក្បាលទូក ដេញទាហានឲ្យចែវទូកទៅ។ **កាំឡេង**ក៏យកធ្នូបាញ់ត្រូវ**ឈ្លួហ៊ុន**ស្លាប់។

ក្នុងខណៈនោះទាហានកងមុខ និងប៉ែកខាងឆ្វេងស្តាំ**កាំឡេង**ក៏បង្ខំទូកចូលទៅ ហើយបាញ់ចម្រុះព្រួញទៅដូចគ្រាប់ភ្លៀង។ កងទ័ព**ឈ្លួម៉**, **ទៀវអ៊ុន**ក៏បែកខ្ចាត់ខ្ចាយទៅប្រទះនឹងទ័ព**ចូឆូ**។ **កាំឡេង** និង**ហាន់តុង**, **ជៀវឃីម** ក៏បង្ខំទូកចម្បាំងដេញចូលទៅចាក់កាប់សម្លាប់ទាហាន**ចូឆូ**ជាច្រើនទាល់តែថ្ងៃត្រង់។ **ជីវយី**ឃើញដូច្នោះក៏វាយគងឃ្មោះឲ្យទាហានវិលត្រឡប់មកវិញ។ **កាំឡេង**ក៏សួរ**ជីវយី**ថា ទ័ព**ចូឆូ**បែកទាហាន យើងបានកលការដេញតាមទៅ ហេតុម្តេចបានជាលោកវាយឃ្មោះឲ្យត្រឡប់មកវិញ? **ជីវយី**ថា ទាហានយើងតិចជាងទាហាន**ចូឆូ**បើនឹងបណ្តោយឲ្យ

តាមទៅ ក្រែងចូឆ្វូនឹងបង្កប់ទូកចម្បាំងនៅកៀនជ្រោយ យើងនឹងថ្លោះការ បានជាវាយឃ្មោះឲ្យត្រឡប់មកវិញប្រាថ្នានឹងយកឫក្សជ័យជម្នះទុក ហើយក៏ឲ្យទូកចម្បាំងទាំងពួងចតនៅតាមរបៀប។

ឯ**ចូឆ្វូ** លុះបែកទ័ពត្រឡប់មកក៏ឡើងទៅក្នុងបន្ទាយ ហើយនិយាយនឹង**ឈួម៉, ទៀវអ៊ុន**ថា ទាហានស្រុកកាំងតាំងតិចជាងយើង ហេតុម្តេចក៏បែកមក? ឬខ្លួនអ្នកទាំងពីរមិនបានតាំងចិត្តធ្វើរាជការដោយសុចរិត ក្លែងឲ្យចាញ់មកទេឬ? **ឈួម៉**ថា ទាហានស្រុកកេងជីវក៏មិនបានហ្វឹកហាត់ ចោលបំបាត់ជាយូរហើយ។ ប្រការមួយសោត ទាហានរបស់លោកក៏សុទ្ធតែជាពួកអ្នកលើមិនប៉ិនប្រសប់ខាងជើងទឹក បានជាថ្លោះការនឹង**ជីវយី** ព្រោះហេតុដូច្នេះ សុំឲ្យលោករិះគិតយកទូកមកចតតគ្នាជាទ័ពជាបន្ទាយទុកកណ្តាលទឹក រួចឲ្យទាហានស្រុកឈីជីវ ស្រុកឆៀងជីវចូលទៅខាងក្នុង ឲ្យទាហានស្រុកកេងជីវនៅពីក្រៅ ហ្វឹកហាត់ឲ្យស្ទាញស្ទាត់ក្នុងការចម្បាំងជើងទឹកឲ្យបាន រួចសឹមគិតការធ្វើសឹកសង្គ្រាមនឹង**ជីវយី**តទៅ។

**ចូឆ្វូ**បានស្តាប់ដូច្នោះក៏ថា ខ្លួនអ្នកទាំងពីរក៏ចំណានក្នុងការសង្គ្រាមទាំងទ័ពគោក ទ័ពទឹក យើងក៏ទុកចិត្តាំងឲ្យធ្វើមេទ័ពធំ ហើយទោះបីអ្នកយល់ឃើញការល្អប្រពៃប្រការយ៉ាងណា ក៏ចូរហ្វឹកហាត់ឲ្យបានប្រាកដទៅចុះ។ **ឈួម៉** និង**ទៀវអ៊ុន** បានឮដូច្នោះ ក៏លា**ចូឆ្វូ**ចេញទៅ ឲ្យយកទូកធំទៅចតវង់ជាបន្ទាយរៀងតាមជាយទន្លេ ទុកប្រឡោះសម្រាប់នឹងចូលចេញម្ភៃបួនទ្វារ ហើយចាត់ទាហានឲ្យចុះទូកចម្បាំង ចែវរត់ដេញចេញទូកបង្ហាត់ឲ្យព្រម ប្រាថ្នានឹងឲ្យរហ័សចំណានក្នុងទីចម្បាំងនោះ។ លុះវេលាកណ្តាលយប់ ទាហានក្នុងទ័ពទឹកទ័ពគោកខាង**ចូឆ្វូ**ក៏ដុតគប់ភ្លើងភ្លឺស្វាងរុងរឿងដូចជាពេលថ្ងៃ ឯបន្ទាយគោកនោះ**ចូឆ្វូ**ឲ្យទាហានតាំងរាយគ្នារៀងទៅ ចម្ងាយផ្លូវប្រហែលបីពាន់សិន (១២០ គ.ម)។

ឯ**ជីវយី**លុះបានជ័យជម្នះត្រឡប់មកដល់បន្ទាយ ក៏ឲ្យបំណាច់រង្វាន់ដល់ទាហានធំតូចទាំងពួង ហើយធ្វើសំបុត្រជាផ្លូវការទៅដល់**ស៊ុនគួន** តាមដែលបានតតាំងច្បាំងឈ្នះគ្រប់ប្រការ។ ក្នុងពេលយប់នោះ **ជីវយី**ក្រឡេកឃើញពន្លឺភ្លើងខាងទិសបស្ចិមជាច្រើន ក៏សួរទាំហានទាំងពួងថា ពន្លឺភ្លើងអ្វី? ទាហានប្រាប់ថា ពន្លឺភ្លើងនោះគឺបន្ទាយ**ចូឆូ**។ **ជីវយី**ឮដូច្នោះក៏ភ័យស្លុតចិត្ត លុះព្រឹកឡើង**ជីវយី**ក៏ចាត់ទាហានដែលមានថ្វីដៃ និងគ្រឿងភ្លេងមួយវង់ គឺចាប៉ី ប៉ី ទ្រ គ្រប់ប្រដាប់ ចុះទូកមួយចែវទៅជិតកងទ័ព**ចូឆូ** ហើយក៏ឲ្យធ្វើភ្លេងមហោរី ចែវបន្លំនឹងពួកអ្នកលក់ទំនិញវិលទៅវិលមក ឃើញទាហាន**ចូឆូ**តាំងក្បួនទ័ពទូក **ឈួម៉** និង**ទៀវអ៊ុន**ជាមេបង្គាត់ទាហានទាំងពួង **ជីវយី**ឃើញដូច្នោះក៏ភ័យស្លុតចិត្ត ទើបសួរទាហានទៅជាមួយនោះថា នរណាជាមេបង្គាត់ប្រិតប្រៀនខាងទ័ពទឹក**ចូឆូ**នោះ? ទាហានដែលស្គាល់ច្បាស់ក៏ឆ្លើយថា ឯមេទ័ពទូក**ចូឆូ**នោះគឺឈ្មោះ**ឈួម៉, ទៀវអ៊ុន**ជាអ្នកបង្ហាត់ទាហានទាំងពួង។ **ជីវយី**ឮដូច្នោះក៏គិតថា **ឈួម៉** និង**ទៀវអ៊ុន**នោះពីដើមជាពួកអ្នកស្រុកកាំងតាំង ចំណានក្នុងការចម្បាំងជើងទឹកណាស់ ចាំនឹងគិតកលឧបាយកម្ចាត់**ឈួម៉** និង**ទៀវអ៊ុន**ចេញឲ្យបាន ទើបយើងនឹងបានធ្វើសង្គ្រាមនឹង**ចូឆូ**ទៅខាងមុខ មិនព្រួយលំបាក។

ក្នុងខណៈនោះទាហាន**ចូឆូ**ឃើញ ក៏យកសេចក្តីទៅប្រាប់**ចូឆូ**ថា **ជីវយី**លបមកមើលទាហានយើងដែលកំពុងហ្វឹកហាត់នោះ **ចូឆូ**ក៏ប្រើទាហានទាំងពួងស្រូតរូតចែវទូកទៅនឹងចាប់**ជីវយី** ៗក្រឡេកឃើញទូកចម្លែកចែវចេញមក ក៏ឲ្យទាហានទាំងពួងខំចែវរត់ត្រឡប់ទៅចូលបន្ទាយ។ ទាហាន**ចូឆូ**ឃើញ**ជីវយី**ចែវរត់ទៅឆ្ងាយប្រហែលមួយរយសិន (៤ គ.ម) នឹងដេញតាមមិនទាន់ ក៏ត្រឡប់វិលទៅប្រាប់**ចូឆូ** ៗក៏ប្រឹក្សានឹងទាហានទាំងពួងថា គ្រាមុនយើងក៏បែកនឹង**ជីវយី**រត់មក លុះយើងនឹងឲ្យហ្វឹកហាត់ទាហាន **ជីវយី**ក៏កាន់តែកំរើបចិត្តលបមកមើលទ័ពយើងទៀត គ្រានេះ

យើងក៏បានសេចក្ដីអប្បយសណាស់ អ្នករាល់គ្នានឹងយល់ឃើញប្រការម្ដេច ទើបនឹងបានសងសឹក**ជីវយី**ឲ្យបាន?

**ជៀវកាន**ទីប្រឹក្សានិយាយថា ខ្ញុំបាទនិង**ជីវយី**នោះកាលនៅពីតូចនៅឡើយបានរៀនសំបុត្រគ្រូជាមួយគ្នា ហើយក៏មានចិត្តស្ម័គ្រស្រឡាញ់រាប់អានគ្នាជាច្រើន ខ្ញុំបាទនឹងសុំអាសាចេញទៅបញ្ចុះបញ្ចូល**ជីវយី**ឲ្យស្ម័គ្រនៅនឹងលោក។ **ចូឆ្វ**បានឮដូច្នោះក៏ពេញចិត្តណាស់និយាយថា ដែលអ្នកនឹងទៅនោះមុខជានឹងបានការឬ? **ជៀវកាន**ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាទៅបញ្ចុះបញ្ចូល**ជីវយី**ឲ្យខាងតែបាន។ **ចូឆ្វ**ថា ដែលអ្នកនឹងទៅនោះនឹងត្រូវការអ្វីខ្លះ? **ជៀវកាន**ថា ខ្ញុំបាទសូមតែមនុស្សពីរនាក់ឲ្យល្មមតែចែវទូកទៅបាន ហើយនិងក្មេងម្នាក់តាមក្រោយទៅផង។ **ចូឆ្វ**ក៏ឲ្យចាត់ទូកនិងមនុស្សបានគ្រប់គ្រាន់ហើយ **ជៀវកាន**ក៏លា**ចូឆ្វ**ទៅដល់បន្ទាយ**ជីវយី** ហើយប្រាប់ទាហានយាមថា យើងជាភឿនសម្លាញ់**ជីវយី** ឥឡូវរឭកនឹកដល់**ជីវយី**ទើបមកសួរ ឲ្យអ្នកឯងចូលទៅជម្រាប**ជីវយី**ឲ្យដឹង។ ទាហាននោះក៏ចូលទៅជម្រាប**ជីវយី**តាមការ។

**ជីវយី**ឮដូច្នោះក៏ប្រាប់ទាហានទាំងពួងថា ដែល**ជៀវកាន**មករកយើងនេះប្រាថ្នានឹងបញ្ចុះបញ្ចូលយើង **ជីវយី**ឱនខ្សិបបង្គាប់ទាហានជាការស្ងាត់ទុកជាច្រើនខរួច**ជីវយី**ក៏ចេញទៅទទួល**ជៀវកាន**នាំចូលមកក្នុងបន្ទាយ ទាំងសងខាងក៏គំនាប់ប្រាស្រ័យទៅវិញទៅមក **ជីវយី**ក៏សួរ**ជៀវកាន**ថា ខ្លួនអ្នកនៅនឹង**ចូឆ្វ**ជាសត្រូវរបស់យើង ដែលអ្នកមកគ្រានេះនឹងមកបញ្ចុះបញ្ចូលយើងឬ? **ជៀវកាន**ឮដូច្នោះក៏ស្ដុតស្លុងក្នុងចិត្តទើបឆ្លើយតបថា ខ្ញុំមកនេះនឹងបានមកបញ្ចុះបញ្ចូលអ្នកក៏ទេ តែខ្ញុំនឹងអ្នកប្រាសនិរាសគ្នាមកយូរហើយ ខ្ញុំមានចិត្តរឭកនឹកដល់រឿងកម្សត់ ដឹងថាអ្នកមកនៅធ្វើការក្នុងទីនេះ បានជាខ្ញុំមកប្រាថ្នានឹងសួរសុខទុក្ខប៉ុណ្ណោះ បើអ្នកសង្ស័យ

ដូច្នោះខ្ញុំក៏សូមលាអ្នកទៅវិញឥឡូវនេះ។ **ជីវយី**ចាប់ទាញដៃ**ជៀវកាន**ទុកហើយនិយាយថា ខ្ញុំគិតថាអ្នកទទួលអាសា**ចូឆ្វ**មកបញ្ចុះបញ្ចូលខ្ញុំទេតើ បើអ្នកមកសួរសុខទុក្ខតាមធម្មតាទេ នឹងប្រញាប់វិលទៅថ្វី។

**ជីវយី**ធ្វើជារួសរាយហើយដឹកដៃ**ជៀវកាន**ចូលទៅក្នុង អញ្ជើញឲ្យបរិភោគអាហារ ហើយប្រាប់ទាហានទាំងពួងថា **ជៀវកាន**នេះជាភឿនសម្លាញ់ស្និទ្ធរបស់យើង បានរៀនសំបុត្រគ្រូជាមួយគ្នាពីក្មេង អ្នករាល់គ្នាមិនត្រូវសន្ទិះសង្ស័យនឹង**ជៀវកាន**ដោយប្រការអ្វីនីមួយឡើយ។ ខណៈកាល**ជីវយី** និង**ជៀវកាន**កំពុងផឹកស្រាស្រវឹងនោះ **ជីវយី**ក៏ហូតគ្របីដែលស្ពាយនោះ បង្គាប់ឲ្យ**ថៃស៊ូជូ**យកទៅកាន់ហើយថា **ជៀវកាន**ភឿនសម្លាញ់យើងមកសួរយើងផឹកស្រាលេងឲ្យសប្បាយចិត្តម្តងចុះ បើបានឮនរណានិយាយសេចក្តីចេញឈ្មោះដល់**ចូឆ្វ**ក្តី **ស៊ុនគួន**ក្តី ឲ្យយកគ្របីនេះកាត់ក្បាលចេញកុំឲ្យកោតញញើតឡើយ។ **ថៃស៊ូជូ**ក៏ទទួលយកគ្របីនោះឈរចាំនៅទីនោះ។

**ជៀវកាន**ឮដូច្នោះក៏ខ្លាចមិនបាននិយាយចេញសេចក្តីអ្វី។ **ជីវយី**ក៏ក្លែងនិយាយនឹង**ជៀវកាន**ថា ខ្លួនខ្ញុំតាំងពីត្រឹមបានជាមេទ័ពមកគ្រានេះ ស្រាសូម្បីតែមួយតំណក់ក៏មិនចូលក្នុងបំពង់កសោះ ទើបតែថ្ងៃអ្នកជាមិត្តសម្លាញ់មកសួរខ្ញុំ ៗក៏បានផឹកស្រាលេងបន្តិច ហើយ**ជីវយី**ក៏ដឹកដៃ**ជៀវកាន**ចេញទៅដល់មុខទ័ព ឃើញទាហានទាំងពួងពាក់ក្រោះកាន់អាវុធផ្សេងៗ ឈរនៅជាជួររៀងគ្នា ទើបសួរ**ជៀវកាន**ថា ទាហានរបស់យើងនេះ អ្នកឃើញបែបយ៉ាងដូចម្តេចខ្លះ? **ជៀវកាន**តបថា ខ្ញុំបាទបានឮដំណឹងគេនិយាយថា ទាហានស្រុកកាំងតាំងនេះល្អច្រើនណាស់ ហើយប្រកបដោយថ្វីដៃខ្លាំងពូកែក្នុងការសង្គ្រាម។ ខ្ញុំមកឃើញថ្ងៃនេះក៏ឃើញស្នាញស្នាត់បីដូចជាទាហានខ្លា សមនឹងពាក្យដែលល្បីឮជាប្រាកដណាស់ គួរនឹងធ្វើសង្គ្រាមតទៅ។

**ជីវយី**ក៏នាំ**ជៀវកាន**ទៅខាងក្រោយបន្ទាយ ហើយចង្អុលឲ្យមើលដោកជង្រុកស្រូវដែលដាក់ស្បៀងអាហារថា អ្នកឃើញប្រការម្ដេច? **ជៀវកាន**ថា អ្នកទុកស្បៀងអាហារនោះ ឃើញថាបរិបូរមាំមួនណាស់ សមគួរជាមេទ័ពមេកងណាស់។ **ជីវយី**ក្អែងថា ខ្លួនខ្ញុំនេះពីគ្រាដែលនៅរៀនសំបុត្រជាមួយនឹងអ្នកនោះមិនបានគិតឡើយថា ខ្លួននឹងតាំងបានជាធំដល់ប៉ុណ្ណេះ។ **ជៀវកាន**តបថា ឯតម្រិះប្រាជ្ញារបស់អ្នកនោះមានច្រើនណាស់ ដែលបានជាទីនាយទាហាននេះក៏គួរសមណាស់ហើយ។

**ជីវយី**ឮដូច្នោះក៏ដឹកដៃ**ជៀវកាន**ដើរចូលទៅ ហើយនិយាយនឹង**ជៀវកាន**ថា ឯពាក្យបុរាណបានពោលទុកថា ធម្មតាកើតមកជាប្រុសប្រសិននឹងស្វែងរកចៅហ្វាយនាយដែលនឹងយកជាទីពឹងនោះ ក៏ត្រូវឲ្យពិគ្រោះមើលចិត្តថ្លើម ជាអ្នកមានអធ្យាស្រ័យប្រណីអ្នកតូច ហើយទៀងត្រង់ជាសច្ចធម៌ប្រាកដ ទើបលោកឲ្យចូលទៅនៅផង ហើយឲ្យតាំងចិត្តធ្វើរាជការដោយសុចរិតពិតត្រង់ ឲ្យឃើញស្នាដៃជាគុណគាប់ប្រសើរ ទើបនឹងបានសេចក្ដីសុខតទៅ ប្រការមួយ ឲ្យមានចិត្តមេត្រីដល់ញាតិបងប្អូនភឿនសម្លាញ់ចាស់ថ្មីកុំឲ្យដាច់ ប្រសិនបើនឹងមានភ័យអ្វីមកដល់ខ្លួន ក៏នឹងបណ្ដាលឲ្យមានអ្នកមកជួយឈឺឆ្អាល កែខៃឲ្យរួចបាត់ភ័យអន្តរាយបាន បើនឹងគិតការអ្វីជាលំអានក៏នឹងបានសម្រេចតាមប្រាថ្នា ហើយ**ជីវយី**ក៏អស់សំណើច។ **ជៀវកាន**បានឮ**ជីវយី**និយាយជាពាក្យវាំងរាដូច្នោះ ក៏គិតថា នឹងបញ្ចុះបញ្ចូល**ជីវយី**នោះមិនសម្រេច ឲ្យមានចិត្តនោះមិនដាច់ស្រេចនឹងនិយាយ រឹតតែមិនសប្បាយក្រហល់ក្រហាយក្នុងចិត្តណាស់។ **ជីវយី**នាំ**ជៀវកាន**ចូលទៅបរិភោគអាហារ ហើយអួតថា ទីប្រឹក្សានិងទាហានក្នុងស្រុកកាំងតាំងនេះមានគំនិតរិះគិតការវាងវៃ ប្រកបទាំងថ្វីដៃក៏ខ្លាំងពូកែជាច្រើន។

លុះដល់ពេលព្រលប់ **ជីវយី**ក៏អុជទៀនជាច្រើនដួង ហើយក្លែងធ្វើជារាំគ្រប៊ីធ្វើភ្លេងថា៖

ធម្មជាតិកើតមកជាប្រុសប្រាជ្ញ ត្រូវធ្វើអង់អាចកុំខ្លាចស្លាប់
ឧស្សាហ៍រៀនរិះចេះចាំចាប់ ក្បួនច្បាប់សឹកសាមសង្គ្រាមជ័យ។
ទើបមានយសសាបណ្តាស័ក្តិ ឯកអគ្គជាធំមាំប្រពៃ
វិជ្ជាដែលចេះឲ្យរិះលៃ វាងវៃសម្តែងថ្លែងបដិហារ្យ។
ឲ្យអស់មនុស្សម្នាមហាជន គយគន់ឃើញឫទ្ធិសិទ្ធិសក្កា
មួយឲ្យសម្តែងថែងប្រាជ្ញា វោហារដោះស្រាយឧបាយគិត។
ខ្លួនយើងទំនើងនឹងចេះដឹង ថ្វីបើស្រវឹងគង់ដឹងមិត្ត
ដឹងមើលយល់មិនភ័ន្តភាំងគិត តាំងចិត្តធ្វើភ្លេងលេងសប្បាយ។

ទីប្រឹក្សាទាំងពួងឃើញ**ជីវយី**រាំភ្លេងគ្រប៊ីពោលដូច្នោះ ក៏នាំគ្នាបិទមាត់សើច។ **ជៀវកាន**និយាយថា ខ្លួនខ្ញុំកម្លាំងខ្សោយ ផឹកស្រាទៀតមិនបានទេ ទីប្រឹក្សានិងទាហានទាំងពួងក៏លាចេញទៅក្រៅអស់។

ខណៈកាល**ជីវយី**ស្រវឹងស្រា តែនៅមានស្មារតីមាំមួនណាស់ ទើបក្លែងបបួល**ជៀវកាន**ថា អ្នកនិងខ្ញុំមិនបានដេកជាមួយគ្នាមកយូរហើយ ថ្ងៃនេះចូរអ្នកទៅដេកនឹងខ្ញុំមួយយប់ចុះ ហើយក៏ដឹកដៃ**ជៀវកាន**ចូលទៅដេកជាមួយគ្នា។ ក្នុងខណៈនោះ **ជីវយី**ក៏ក្អួតចេញមកពេញខ្នើយនិងពូកកន្ទេល ហើយក្លែងធ្វើជាដេកលក់ទៅវិញ។ **ជៀវកាន**ដេកមិនលក់សោះ ព្រោះជាទុក្ខនឹងទទួលពាក្យ**ចូឆូ**មកថា នឹងបញ្ចុះបញ្ចូល**ជីវយី**ក៏មិនសមដូចសេចក្តីប្រាថ្នា កាលបើឃើញ**ជីវយី**ដេកលក់សន្លប់សន្លិនហើយ **ជៀវកាន**ក៏គិតថា **ជីវយី**អស់ដឹងខ្លួនហើយ ក៏ក្រោកទៅជក់បារីនៅចង្កៀងប្របគ្រែដេក ឃើញសំបុត្រមួយច្បាប់បិទស្រោម ការខ្ទង់សេចក្តីថា "ខ្ញុំបាទ**ឈ្វម៉**,

**ទៀវអ៊ុន**” ហើយ**ជៀវកាន**ក៏ហែកស្រោមចេញ ដកយកមកមើលឃើញសេចក្តីថា “**ឈួម៉, ទៀវអ៊ុន** គំនាប់មកដល់**ជីវយី** ដ្បិតខ្ញុំបាទមកនៅនឹង**ចូឆូ**នេះព្រោះសេចក្តីថា ចិត្តតែគិតខឹងមិនរសាយ បើបានឱកាសវេលាណា ខ្ញុំបាទនឹងកាត់ក្បាលមកជូនលោក បើមិនសមដូចបំណងដែលគិតនោះទេ ខ្ញុំបាទនឹងឲ្យមនុស្សលបចេញទៅជម្រាបលោករឿយៗ” លុះឃើញសំបុត្រដូច្នោះហើយក៏ដឹងថា **ឈួម៉**និង**ទៀវអ៊ុន**ប្រែចិត្តចេញពី**ចូឆូ** ក៏យកសំបុត្រនោះលាក់ទុកក្នុងដៃអាវ លុះឃើញ**ជីវយី**ប្រែខ្លួន **ជៀវកាន**ក៏លត់ចង្កៀងចេញ ហើយក្លែងចូលទៅដេកធ្វើជាលក់ស្និទ្ធលើគ្រែ។ ឯ**ជីវយី**ធ្វើជាមមើរវើរវាយនិយាយថា នៅប្អូនប្រាំថ្ងៃទៀត **ជៀវកាន**ចូលមកយកក្បាល**ចូឆូ**ក្នុងបន្ទាយយើងចុះ។ **ជៀវកាន**ក៏សួរបញ្ជាក់ដើម្បីឲ្យដឹងច្បាស់។ **ជីវយី**ក៏ធ្វើជាលក់ស្និទ្ធទៅវិញ។ លុះវេលាប្រហែលជាយាមពីរប្លាយ ទាហានចូលមកស្រែកហៅ**ជីវយី** ៗធ្វើជាភ្ញាក់ឡើង ហើយក្លែងសួរថា នរណាហៅអី? ក្រឡេកទៅម្ខាងឃើញ**ជៀវកាន**ដេកនៅនោះក៏ថា នរណាមកដេកលើគ្រែនេះជាមួយនឹងអញ? **ជៀវកាន**ក៏ធ្វើជាលក់ស្និទ្ធនៅស្ងៀម។ ទាហានដែលហៅ**ជីវយី**ជម្រាបថា **ជៀវកាន**ភឿនសម្លាញ់លោកមកដេកជាមួយ លោកភ្លេចទៅហើយឬ?

**ជីវយី**ក៏ធ្វើជាភ្ញាក់ខ្លួនគិតហើយថា យូរមកហើយ យើងមិនដែលផឹកស្រាសោះ ថ្ងៃនេះផឹកច្រើនលើសលុបត្រឡប់ស្រវឹងវង្វេង និយាយផ្តេសផ្តាស ប្រហែលជាការអាថ៌កំបាំងទាំងប៉ុន្មានបាននិយាយអស់ទៅក៏មិនដឹងឡើយ។ ទាហាននោះក៏ប្រាប់**ជីវយី**ថា ឥឡូវមានមនុស្សចម្លែកមករកលោក ឮថាពួកទាហាន**ចូឆូ**។ **ជីវយី**ក៏ធ្វើជាទៅហៅដាស់**ជៀវកាន** ៗក៏ធ្វើជាមិនដឹងខ្លួនសោះ **ជីវយី**ក៏ចេញទៅដល់ក្រៅទ្វារបន្ទាយ **ជៀវកាន**ក៏ប្រឹងលបស្តាប់ក៏ឮទាហានប្រាប់**ជីវយី**ថា **ឈួម៉, ទៀវអ៊ុន**ឲ្យបម្រើលបមកជម្រាបលោក ពីកិច្ចការដែលគិតធ្វើនោះ នៅមិនទាន់បានសម្រេច

តាមគំនិតគិតទេ **ជីវយី**ក៏ចូលមកដាស់**ជៀវកាន** ៗក៏ធ្វើជាដេកលក់ **ជីវយី**ក៏ក្លែងដេកលក់ទៅវិញ ប្រាថ្នានឹងឲ្យ**ជៀវកាន**រត់ចេញទៅ។

**ជៀវកាន**ក៏គិតក្នុងចិត្តថា **ជីវយី**នេះមានតម្រិះប្រាជ្ញាជ្រៅទូលាយណាស់ បើនឹងរង់ចាំនៅឲ្យដល់ព្រឹក មុខជា**ជីវយី**នឹងស្រាវជ្រាវរកសំបុត្រ បើមិនឃើញនឹងបៀតបៀនដល់ខ្លួនអញមិនខាន។ គិតហើយក៏ប្រុងស្មារតី លុះដល់ពេលយាមបីប្លាយ **ជៀវកាន**ក៏ប្រែកាយដោះឡើងស្លៀកពាក់រួច ហើយលបបើកទ្វារវេះគេចរត់ពីក្នុងបន្ទាយចេញទៅ។

ទាហាន**ទៀវយី**ដែលយាមផ្លូវឃើញ**ជៀវកាន**ក៏ធ្វើជាសួរថា លោកទៅណាភ្លាម? **ជៀវកាន**ប្រាប់ថា បើនឹងនៅដល់ព្រឹកព្រហាមក្រែងនាំឲ្យ**ជីវយី**ព្រួយរវល់មិនបានចាត់ចែងការសង្គ្រាមដោយស្រួល ពេលនេះមានទំនួលគួរហើយ យើងសុំលាទៅខាងណោះវិញ ទាហានក៏បើកឲ្យទៅ។

**ជៀវកាន**ដើរចេញទៅដល់ទូកក៏ចែវចេញទៅ កាល**ជៀវកាន**ទៅដល់បន្ទាយ **ចូឆ្វ**ក៏ល្មមពេលថ្ងៃរះ **ចូឆ្វ**ក្រឡេកឃើញ**ជៀវកាន**ដើរឡើងបែបរូតរះចូលមកក៏សួរថា ដែលអ្នកទទួលអាសាទៅគិតការនោះបានដូចបំណងដែរឬទេ? **ជៀវកាន**ក៏ឆ្លើយថា ឯ**ជីវយី**នេះមានតម្រិះប្រាជ្ញាឆ្លាតណាស់ បាននិយាយល្បួងលួងលោមមិនសមប្រកបតាមគំនិតសោះ។ **ចូឆ្វ**ឮដូច្នោះក៏ខឹងច្រឡោតស្រែកថា ទទួលអាសាទៅគ្មានបានប្រយោជន៍អ្វីសោះ បើម្ល៉ឹង**ជីវយី**មិនសើចឲ្យយើងអប្បយសទៀតទេឬ? **ជៀវកាន**ថា ខ្ញុំបាទក៏នឹកឈឺក្នុងចិត្តណាស់ដែរ តែថាបើទៅបញ្ចុះបញ្ចូល**ជីវយី**មិនបានសមដូចគិត ខ្ញុំបាទក៏មានគំនិតយកការណ៍មួយបានមកដែរ គឺជាការធំចម្លែកណាស់ បើនឹងជម្រាបលោកឲ្យជ្រាបច្បាស់ក្នុងគ្រានេះក៏មិនគួរ។

**ចូឆូ**ក៏ដេញទាហាននិងមនុស្សម្នាក្នុងទីនោះចេញអស់។ **ជៀវកាន**ក៏ហូតយកសំបុត្រ**ឈួម៉, ទៀវអ៊ុន**ជូនទៅ**ចូឆូ**មើល។ **ចូឆ**ក៏ទទួលមើលដឹងសេចក្ដីហើយខឹងខ្លាំងណាស់ថា យើ! **ឈួម៉, ទៀវអ៊ុន**ប៊ានគិតធ្វើកាចនឹងអញដល់ទីនេះម្ដឹងឬ? **ចូឆូ**ឈឺចិត្តខ្លាំងណាស់ ឲ្យហៅ**ឈួម៉, ទៀវអ៊ុន**ចូលមកហើយសួរថា យើងនឹងឲ្យខ្លួនទាំងពីរនាក់លើកកងទ័ពទូកទៅច្បាំងនឹង**ជីវយី**វេលានេះ។ **ឈួម៉** និង**ទៀវអ៊ុន**ឆ្លើយថា ទាហានទាំងពួងដែលខ្ញុំបាទបានប្រៀនបង្ហាត់នោះនៅមិនទាន់ស្ទាញស្ទាត់សោះ សូមលោកអនុគ្រោះបង្អង់ឈប់បន្តិចសិន នឹងបានខំប្រឹងបង្ហាត់ឲ្យប្រសប់ខាងទូក ទើបនឹងលើកទៅធ្វើការសង្គ្រាមបាន។ **ចូឆូ**បានឮដូច្នោះក៏រឹតតែមានសេចក្ដីក្រេវក្រោធជាខ្លាំងណាស់ ហើយថា ដែលខ្លួននឹងឲ្យបង្អង់ទុកទម្រាំទាហានបានចេះស្ទាត់ក្នុងក្បួនទូកនោះ ក្បាលអញនឹងមិនទៅនៅក្នុងបន្ទាយ**ជីវយី**ទេឬ? **ឈួម៉** និង**ទៀវអ៊ុន**មិនបានដឹងសេចក្ដីអ្វីសោះ ក៏នៅស្ងៀមមិនឆ្លើយតបដូចម្ដេច **ចូឆូ**ឲ្យចាប់ខ្លួន**ឈួម៉**និង**ទៀវអ៊ុន**ទៅប្រហារជីវិតមួយរំពេច។ ទាហានក៏នាំទៅសម្រេចហើយកាត់យកក្បាលមកជូន**ចូឆូ** ៗក្រឡេកឃើញក្បាលនាយទាហានទាំងពីរ ក៏មានសតិនឹករឭកឃើញបានថា យើងចាញ់កលឧបាយ**ជីវយី**ព្រោះមិនទាន់ត្រិះរិះ ក៏ឲ្យសម្លាប់**ឈួម៉, ទៀវអ៊ុន**ចេញ នោះជាខុសទទេសោះ។ លុះនឹងហាមាត់និយាយឲ្យដឹងថាគិតខុស ក៏ខ្លាចអាក្រក់ឈ្មោះដល់ពួកទាហានក្រោមបង្គាប់ នឹងមិនកោតក្រែងតទៅ។

ទីប្រឹក្សានឹងទាហានទាំងពួង ឃើញ**ចូឆូ**ឲ្យសម្លាប់នាយទាហានទាំងពីរដូច្នោះ ក៏មានសេចក្ដីសង្ស័យ ទើបនាំគ្នាចូលទៅជម្រាប**ចូឆូ**ថា **ឈួម៉, ទៀវអ៊ុន**ខុសពីអ្វីបានជាលោកឲ្យប្រហារជីវិតដូច្នេះ? **ចូឆូ**ឮដូច្នោះក៏ក្លែងឆ្លើយថា **ឈួម៉, ទៀវអ៊ុន**ជាមនុស្សខ្ជិលច្រអូសប្រើការមិនកើត បានជាឲ្យសម្លាប់ចោលទៅ។ ទាហានទាំងពួងឮដូច្នោះក៏ដកដង្ហើមធំរាល់គ្នាហើយគិតថា អម្បាល**ឈួម៉, ទៀវអ៊ុន**ឧស្សាហ៍ធ្វើ

ការរាជការទាំងម្ល៉េះ មេចក៏គង់នៅខ្ជិលច្រអូសទៀត? ចំណង់បើរូបយើងរាល់គ្នាដឹងជាយ៉ាងម្ដេច? ទាហានទាំងពួងក៏នៅស្ងៀមមិនបានថាប្រការម្ដេច។ **ចូឆូ**ក៏តាំងឲ្យ**អ៊ីគឹម** និង**ម៉ាកាយ**ជានាយទាហានទូកឲ្យប្រៀនបង្ហាត់កូនទាហានតមក។

ឯបម្រើដែលយាមល្បាត លុះដឹងដំណឹងថា **ចូឆូ**សម្លាប់**ឈួម៉, ទៀវអ៊ុន**ហើយក៏យកសេចក្ដីនោះទៅជម្រាប**ជីវយី**គ្រប់ប្រការ **ជីវយី**ដឹងការដូច្នោះក៏មានសោមនស្សត្រេកអរណាស់អស់ព្រួយវិតក្ក។ ទទួល**ឡោសុក**ចូលទៅសួរ**ជីវយី**ថា គំនិតប្រាជ្ញារបស់លោកដែលគិតធ្វើកលឧបាយបានយ៉ាងនេះ នឹងញញើតខ្លាចអ្វីដល់ថ្វីដៃរបស់**ចូឆូ**នោះ។ **ជីវយី**ថា ដែលខ្ញុំគិតធ្វើកលគ្រានេះ បណ្ដាទាហានពួកយើងគ្មាននរណាអាចដឹងដល់ទេ ខ្លាចមួយតែ**ខុងបេង**ម្នាក់ ក្រែងនឹងចេះគិតគំនិតល្អជាងយើងបាន ហើយបង្គាប់**ឡោសុក**ឲ្យទៅនាំនិយាយមើលកលការ**ខុងបេង** នឹងអាចកន្លងដឹងកលការដែលយើងគិតនេះដែរឬទេ? **ឡោសុក**ទទួលពាក្យហើយក៏លាទៅជួបនឹង**ខុងបេង**ក្នុងទូកតូចហើយថា ខ្ញុំនឹងមកសួរលោកក៏មិនចេះទំនេរ ព្រោះមានការចែកចាយស្បៀងអាហារឲ្យទាហានជានិច្ច។ **ខុងបេង**ថា គ្រានេះ**ជីវយី**ធ្វើការមានគាប់ប្រសើរ ខ្ញុំក៏បណ្ដោយពេញចិត្តណាស់ តែនៅមិនទាន់បាននៅគំនាប់**ជីវយី**ទទួលអំណរ។ **ឡោសុក**សួរថា លោកត្រេកអរថា **ជីវយី**មានសេចក្ដីគាប់ប្រសើរនោះដោយហេតុអ្វី? **ខុងបេង**ថា **ជីវយី**ប្រើអ្នកមកសង្កេតស្ដាប់ខ្ញុំថាដែលគិតធ្វើការនោះខ្ញុំនឹងដឹងដែរឬទេ ខ្លួនខ្ញុំដឹងអស់ហើយ បានជាមានសេចក្ដីត្រេកអរផង។ **ឡោសុក**ដឹងសេចក្ដីដូច្នោះ ក៏តក់ស្លុតក្នុងចិត្តមុខនោះជ្រីវស្វិតទៅហើយសួរថា ហេតុម្ដេចបានជាលោកដឹងសេចក្ដីដូច្នេះ? **ខុងបេង**តបថា គំនិតរិះគិតរបស់**ជីវយី**នោះកន្លងបានតែយ៉ាង**ជៀវកាន** ១ទៅប្រាប់**ចូឆូ** ១មិនទាន់គិតក៏សម្លាប់**ឈួម៉, ទៀវអ៊ុន**ទៅ លុះ**ចូឆូ**គិតឃើញជាក្រោយក៏មានមានះមិនបានហើបហាមាត់និយាយថាខ្លួនធ្វើ

ខុស ឯដែល**ឈ្លូម៉, ទៀវអ៊ុន**ស្លាប់នោះ គឺជាភ័ព្វរបស់ស្រុកកាំងតាំងនឹងមិនអន្តរាយបានជាខ្ញុំព្រមគ្រេកអរផង ដោយហេតុនេះ។ ឥឡូវ**ចូឆូ**ប្រើ**អ៊ីគឹម, ម៉កាយ**ជានាយទ័ពទូករិញនោះ យើញថានឹងនាំឲ្យទាហានទាំងឡាយមកអន្តរាយស្លាប់ទាំងអស់ព្រោះ**អ៊ីគឹម** និង**ម៉កាយ**នោះមិនចំណានក្នុងទ័ពទូកសោះឡើយ។ **ឡោសុក**ឮហើយក៏គ្រវីក្បាលមិនឆ្លើយថាប្រការម្ដេចសោះ។

**ខុងបេង**ក៏ក្លែងជាហាម**ឡោសុក**ថា ពាក្យដែលខ្ញុំនិយាយទាំងនេះ អ្នកកុំនាំទៅប្រាប់**ជីវយី**ឡើយ ព្រោះចិត្តថ្លើម**ជីវយី**នោះជាមនុស្សឫស្យា គិតតែប្រហារជីវិតខ្ញុំមិនឈប់។ **ឡោសុក**ទទួលពាក្យហើយលា**ខុងបេង**ទៅ ក៏នាំយកសេចក្ដីនេះទៅអធិប្បាយប្រាប់**ជីវយី**គ្រប់ប្រការ តែខដែល**ខុងបេង**ថាចិត្ត**ជីវយី**ឫស្យាគិតប្រទូសរ៉ាយ**ខុងបេង**នោះ **ឡោសុក**មិននិយាយ **ជីវយី**ឮពាក្យអភិប្រាយដែល**ឡោសុក**ប្រាប់ដូច្នោះ ក៏ស្ដុតក្នុងចិត្ត ហើយថា គំនិតគិតរបស់**ខុងបេង**នេះជ្រៅទូលាយឆ្ងាយណាស់ ត្រូវតែខំរិះគិតសម្លាប់ចេញឲ្យបាន ទើបនឹងអស់ចម្រូងចម្រាសក្នុងចិត្តទៅ។ **ឡោសុក**ថា **ខុងបេង**នេះគ្មានសេចក្ដីខុសអ្វីសោះ លោកនឹងសម្លាប់**ខុងបេង**នោះគំនិតរបស់លោកគិតយ៉ាងម្ដេច? **ជីវយី**ថា អ្នកកុំបាច់សួរតម្រិះគិតរបស់ខ្ញុំឡើយចាំតែមើលទៅមុខចុះ។

លុះវេលាព្រឹកឡើង **ជីវយី**ក៏ឲ្យប្រមូលនាយទាហានទាំងពួងចូលទៅព្រមគ្នាហើយឲ្យអញ្ជើញ**ខុងបេង**ទៅជំនុំគិតការរាជការផែនដី។ **ខុងបេង**ដឹងដូច្នោះក៏មានសេចក្ដីសោមនស្សណាស់ ចូលទៅក្នុងបន្ទាយ។ **ជីវយី**ក៏សួរ**ខុងបេង**ថា ដែលយើងនឹងធ្វើសង្គ្រាមជើងទឹកតនឹងទ័ព**ចូឆូ**គ្រានេះ ត្រូវយកអាវុធអ្វីជាប្រធាន? **ខុងបេង**ថា បើចម្បាំងជើងទឹកត្រូវដាក់ទាហានឲ្យកាន់ធ្នូគ្រប់ដៃ **ជីវយី**ក៏ធ្វើជាត្រេកអរប្រាស្រ័យទៅទៀតថា អ្នកនិយាយនេះត្រូវនឹងគំនិតខ្ញុំគិត តែថាក្នុងកងទ័ពយើងនេះមានព្រួញ

ក៏តិចណាស់ ការទាំងអម្បាលនេះសឹងជាធុរៈរបស់ចៅហ្វាយយើងទាំងសងខាងដូចគ្នា អ្នកចូរជួយរិះគិតធ្វើជានាយកងកេណ្ឌឲ្យជាងធ្វើព្រួញឲ្យទាន់ក្នុងរវាងដប់ថ្ងៃឲ្យបានចំនួនដប់ម៉ឺន។ **ខុងបេង**ឮដូច្នោះក៏ដឹងដល់ក្នុងយោបល់របស់**ជីវយី** ទើបឆ្លើយថា លោកនឹងយកព្រួញដប់ម៉ឺនក្នុងរវាងដប់ថ្ងៃនោះយូរណាស់។

**ជីវយី**ឆ្លើយថា ការសឹកមកប្រទាល់តួដូច្នេះ អ្នកមកនិយាយជាល្បែងលែងមិនគួរ ការចៅហ្វាយយើងនឹងខូចទៅ។ **ខុងបេង**ថា ខ្ញុំនិយាយនេះជាពាក្យពិត ព្រោះថាដប់ថ្ងៃនោះយូរណាស់ កងទ័ព**ចូឆូ**ក៏មកតាំងជិតគ្នានៅនេះខ្លាចនឹងលើកមកច្បាំងឆាប់ ព្រួញក៏គ្មានស្រាប់ នឹងថ្ពោះការទេឬ? ខ្ញុំនឹងគិតឲ្យបានព្រួញតែត្រឹមរវាងបីថ្ងៃ ចូរឲ្យលោកប្រើមនុស្សឲ្យទៅចាំទទួលយកចុះ។ **ជីវយី**ថា បើមិនបានក្នុងដប់ថ្ងៃ អ្នកនឹងឲ្យធ្វើម្ដេច? **ខុងបេង**ក៏ឲ្យសញ្ញាទុកជាបន្ទាល់ថា បើប្រសិនក្នុងបីថ្ងៃមិនបានព្រួញដប់ម៉ឺនទេ សូមឲ្យលោកសម្លាប់ខ្ញុំចេញចុះ តែថាបើខ្ញុំខ្វះខាតអ្វីនីមួយនឹងត្រូវការមករកលោកមិនជួប ខ្ញុំនឹងប្រាប់ត្រឹម**ឡោសុក** សូមឲ្យលោកព្រមអនុញ្ញាតផង។ **ជីវយី**ឮដូច្នោះក៏ទទួលពាក្យ ទើបផ្ដាំទុកដាក់ឲ្យ**ឡោសុក**ដឹងហើយក៏ឲ្យចុះពាក្យជាកំណត់កត់សម្ដី**ខុងបេង**ជាសម្គាល់។ **ជីវយី**ក៏នាំ**ខុងបេង**ផឹកស្រាហើយថា ការទាំងអម្បាលនេះ បើបានសម្រេចហើយអ្នកក៏នឹងបានសេចក្ដីគាប់ប្រសើរប្រពៃណាស់។

លុះ**ខុងបេង**បរិភោគហើយក៏លា**ជីវយី**ចុះទូកទៅ។ **ឡោសុក**ក៏សួរ**ជីវយី**ថា ដែល**ខុងបេង**ទទួលនឹងធ្វើព្រួញដប់ម៉ឺនឲ្យទាន់ក្នុងបីថ្ងៃនោះ ខ្ញុំឃើញថាមុខជាមិនទាន់។ **ជីវយី**ថា **ខុងបេង**ទទួលអាសាខ្លួនឯង បើមិនបានដូចពាក្យថា យើងក៏ត្រូវសម្លាប់ចេញ មនុស្សទាំងពួងក៏រកផ្លូវគរហានិន្ទាគ្មានសោះ គ្រានេះមុខជា**ខុងបេង**នឹងអស់អាយុហើយ ទោះបីមានស្លាបហើរក៏មិនផុតពីដៃយើងបាន។ ហើយ**ជីវយី**បង្គាប់ទាហានឲ្យស្រូតទៅប្រាប់ជាងដែលធ្វើព្រួញ ឲ្យក្លែងធ្វើជាយឺតយូរកុំឲ្យទាន់

ក្នុងបីថ្ងៃ យើងនឹងចង់ដឹងមើល ប្រាជ្ញា**ខុងបេង**នឹងគិតយ៉ាងម៉េច ហើយ**ជីវយី**ប្រើ**ឡោសុក**ទៅស្តាប់ការ តើ**ខុងបេង**នឹងរិះគិតដូចម្តេចខ្លះ?

**ឡោសុក**ក៏ទៅជួបនឹង**ខុងបេង** ៗឃើញហើយក៏និយាយថា ខ្ញុំបានហាមប្រាមអ្នកថា កុំឲ្យយកសេចក្តីដែលនិយាយគ្នានោះ ទៅស្រាយប្រាប់**ជីវយី**ឲ្យសោះ អ្នកក៏មិនស្តាប់ ឥឡូវ**ជីវយី**ក្លែងគិតសម្លាប់ខ្ញុំចេញ បានជាឲ្យខ្ញុំនេះ ធ្វើជានាយកងសាងព្រួញដប់ម៉ឺនឲ្យទាន់ក្នុងបីថ្ងៃ ឯការនេះមុខជាធ្វើមិនទាន់ទេ មុខជាខ្ញុំនឹងមានទោសហើយ អ្នកចូរជួយគិតដោះសារធ្វើម្តេចឲ្យខ្ញុំបានរួចពីទោសនេះផងចុះ។ **ឡោសុក**ថា ចិត្តរបស់ខ្ញុំជាមនុស្សទៀងត្រង់ បាននាំរឿងទៅប្រាប់**ជីវយី**នោះ វាខុសណាស់ទៅហើយ តែថាពីដើម**ជីវយី**ឲ្យធ្វើព្រួញឲ្យបានក្នុងដប់ថ្ងៃ លោកទទួលកាត់ស្រួតឲ្យតិចថ្ងៃទៅវិញ មិនតែប៉ុណ្ណោះថែមចុះសញ្ញាថានឹងធ្វើឲ្យបានក្នុងរវាងបីថ្ងៃ ដែលថាឲ្យខ្ញុំជួយកែខៃនោះឃើញថាទញ់ទាល់ពេកណាស់។ **ខុងបេង**ថា បើអ្នកមិនអាសូរករុណាក៏ទាល់គំនិតនឹងគិតហើយ តែនៅមួយខទៀត សុំឲ្យអ្នកអាណិតរកចំបើងឲ្យបានច្រើន និងសំពត់ខ្មៅឲ្យបានច្រើនផាប់ ហើយនិងខ្លាញ់សម្រាប់ដុសលាងជួតព្រួញ រួចសុំឲ្យរកទូកម្ភៃ និងមនុស្សចំណុះទូកសាមឬសែសិបនាក់ក្នុងទូកមួយ ដើម្បីនឹងបានជួយផ្ទុកព្រួញនាំទៅឲ្យ**ជីវយី**ចុះ។

**ឡោសុក**បានស្តាប់ក៏ទទួលពាក្យ តែនៅមានសេចក្តីសង្ស័យមិនស្រឡះក្នុងចិត្តសោះ ព្រោះមិនបានដឹងតម្រិះប្រាជ្ញា**ខុងបេង**នឹងធ្វើយ៉ាងម្តេច ហើយក៏លា**ខុងបេង**ទៅប្រាប់**ជីវយី**ថា មិនបានឃើញ**ខុងបេង**ចាត់ចែងឲ្យធ្វើព្រួញទេ តែ**ខុងបេង**សុំឲ្យយកទូកទៅផ្ទុកដឹកយកព្រួញមកជូនលោកឲ្យទាន់ពេលវេលា។ **ជីវយី**ឮដូច្នោះក៏អរណាស់ថា **ខុងបេង**គ្រានេះមិនរួចពីស្លាប់។ ហើយក៏បង្គាប់**ឡោសុក**ថា **ខុងបេង**ត្រូវការយករបស់អ្វីក៏ឲ្យយកទៅឲ្យចុះ។ **ឡោសុក**ក៏ចេញទៅចាត់ចែងរកទូកបានម្ភៃ

និងទាហាននូវរបស់ទាំងពួងត្រៀមទុក។ លុះគម្រប់ថ្ងៃក៏មិនឃើញ**ខុងបេង**នឹងធ្វើអ្វីសោះ **ឡោសុក**ក៏រឹតតែមានសេចក្ដីសង្ស័យខ្លាំងណាស់ លុះពេលកណ្ដាលយប់ក្នុងថ្ងៃនោះ **ខុងបេង**ក៏ឲ្យទៅអញ្ជើញ**ឡោសុក**មកហើយនិយាយថា ព្រួញនោះខ្ញុំធ្វើទុកបានគ្រប់ចំនួនហើយ ឲ្យយករបស់ដែលខ្ញុំបង្គាប់នោះមកឲ្យឆាប់ នឹងបានធ្វើការទាំងទូកនិងមនុស្សជញ្ជូនព្រួញយកទៅចុះ។ **ឡោសុក**ឆ្លើយថា លោកកុំរិតក្ដឡើយ ការទាំងអស់ខ្ញុំបានត្រៀមទុកជាស្រេចហើយ។

**ឡោសុក**ក៏ឲ្យទូកមក។ **ខុងបេង**ចុះទូកហើយក៏បបួល**ឡោសុក**ថា អ្នកចូរទៅជាមួយនឹងខ្ញុំចុះ ដើម្បីទៅទទួលយកព្រួញឲ្យ**ជីវយី**។ **ឡោសុក**ក៏សួរថា លោកនឹងទៅយកព្រួញនៅឯណា? **ខុងបេង**ថា អ្នកកុំបាច់សួរខ្ញុំឡើយ ចូរទៅជាមួយគ្នាចុះ ទើបនឹងដឹង។ ហើយ**ខុងបេង**ក៏ថយទូកចម្បាំងនោះទៅ ទើបឲ្យចងចំបើង និងស្មៅភ្ជាប់រៀងគ្នាតាមគែមទូកទាំងសងខាង ហើយយកសំពត់ខ្មៅរុំបាច់ចំបើងនិងបាច់ស្មៅទាំងម្ភៃទូក ដូចជារូបមនុស្សអង្គុយតាមគែមទូកជិតគ្នា លុះរៀបចំស្រេចកាលណា ក៏ឲ្យយកពួរចងសណ្ដោងភ្ជាប់ទូកទាំងអស់ ហើយចែវឡើងទៅដល់កងទ័ព**ចូឆូ**វេលាប្រហែលយាមបីប្លាយ។

សម័យនោះ ជាខែកត្តិកខាងរនោច មេឃងងឹតពពកចុះអ័ព្ទ **ខុងបេង**ក៏ឲ្យទាហានកងទ័ពទាំងពួងវាយគងស្គរ ស្រែកហ៊ោអឺងកងឡើង។ **ឡោសុក**ឃើញដូច្នោះក៏តក់ស្លុតស្មារតីញ័រអស់ទាំងខ្លួន បីដូចគេអង្គុយក្នុងគំនរភ្លើង ព្រោះមិនទាន់ដឹងហេតុផលជាប្រការម្ដេច ទើបសួរ**ខុងបេង**ថា ទាហានយើងមកនេះតិចណាស់ បើប្រសិន**ចូឆូ**លើកទ័ពទូកមកច្បាំងលោកនឹងគិតតាំងយ៉ាងម្ដេច? **ខុងបេង**អស់សំណើចហើយថា វេលានេះមេឃចុះអ័ព្ទងងឹតណាស់ កាលណា**ចូឆូ**នឹងអាចលើក

ទ័ពទូកចេញមក អ្នកនិងខ្ញុំត្រូវនាំងគ្នាផឹកស្រាឲ្យសប្បាយចិតទម្រាំតែភ្លឺស្វាង សឹមយើងថយទូកបណ្តែតត្រឡប់មកវិញ។

ឯ**ចូឆ្វ**លុះឮសំឡេងហ៊ោកញ្ជ្រៀវអឺងកងដូច្នោះ ក៏ដឹងថាទាហាន**ជីវយី**លើកមកលុកកងទ័ព នឹងឲ្យទូកចម្បាំងចេញទៅតយុទ្ធប្រញាប់ ព្រោះមេឃងងឹតណាស់មើលមិនឃើញច្បាស់ ក្រែង**ជីវយី**ឲ្យទាហានពួកបង្កប់នៅខាងណាក៏មិនដឹង ទើបប្រើ**អ៊ុគឹម** និង**ម៉ាកាយ**យកទូកចម្បាំងចតទុកឲ្យជាប់ ឲ្យតែទាហានទាំងពួងបាញ់ធ្នូចម្រុះទៅ ហើយឲ្យ**ទៀវលៀវ, ស៊ីឡុង** លើកទាហានជាច្រើនចុះទៅបាញ់ទាហានទូក**ជីវយី**តាមច្រាំងទន្លេ ឯទាហានជើងគោកនិងទឹកទាំងពីរកង ឃើញតែទូករៀងគ្នាហែៗមក មិនបានឃើញទាហានជាច្រើនឬតិច ក៏ឲ្យទាហានបាញ់ព្រួញចម្រុះសំដៅទៅទូកចម្បាំងនោះដូចគ្រាប់ភ្លៀង។ **ខុងបេង**ឲ្យទាហានក្រាបបំបាំងនឹងរូបចំបើងស្មៅមិនឲ្យត្រូវនឹងព្រួញសោះ លុះឃើញព្រួញដែលបាញ់ធ្លាក់មកជាប់នឹងរូបចំបើងរូបស្មៅជាច្រើនហើយ ក៏ឲ្យបង្អង់ឈប់វាយស្គរទៅវិញ ហើយឲ្យត្រឡប់បង្វិលទូកពីម្ខាងដើម្បីនឹងទទួលព្រួញម្ខាងទៀត ហើយឲ្យវាយគងស្គរអឺងកងឡើងឃើញព្រួញចាប់ច្រើនហើយទទួលភ្លឺស្រាង។

**ខុងបេង**ក៏បង្គាប់ទាហានឲ្យស្រែកចំអកថា សូមអរគុណនឹងមហាឧបរាជដែលបានឲ្យព្រួញមកយើងជាច្រើន ឯព្រួញនេះក៏គង់នឹងត្រឡប់វិលទៅតបគុណវិញទេ ហើយក៏ស្រួតថែវទូកត្រឡប់ឡើងទៅវិញ។ ឯទាហាន**ចូឆ្វ**ឃើញទូកចម្បាំង**ជីវយី**ត្រឡប់ទៅវិញដូច្នោះ ក៏យកសេចក្តីទៅប្តឹង**ចូឆ្វ**គ្រប់ប្រការ។ **ចូឆ្វ**ក៏ប្រើទាហានចុះទូកតូចស្រួតតាមទៅមើល ចម្ងាយផ្លូវប្រហែលពីររយសិន (៨ គ.ម) ក៏មិនទាន់។

ខណៈនោះ**ចូឆ្វ**នឹកតូចចិត្តថា ចាញ់សេចក្តីគិតរបស់សត្រូវបានសេចក្តីអប្បយសណាស់។ ឯ**ខុងបេង**កាលបណ្តោយទូកមកវិញ ក៏និយាយនឹង**ឡោសុក**ថា ខ្ញុំរិះ

គិតការនេះមិនបានឲ្យខូចទាហានដល់ម្នាក់ និងព្រួយការជាងធ្វើ ឯទូកម្ភៃនេះបានព្រួញក្នុងទូកមួយប្រហែលប្រាំពាន់ទៅប្រាំមួយពាន់ ទាំងម្ភៃទូក គិតជាព្រួញប្រហែលជាងដប់ម៉ឺនទៅទៀត។ **ឡោសុក**បានឃើញដូច្នោះ ក៏លើកដៃឡើងគំនាប់ ហើយសរសើរ **ខុងបេង**ថា មានតម្រិះប្រាជ្ញាដូចទេវតាតាមបញ្ចូលចិត្ត ឲ្យដឹងថាថ្ងៃនេះពពកនឹងចុះអ័ព្ទប្លែកមេឃងងឹត ទើបរិះគិតធ្វើការដូច្នេះបាន។

**ខុងបេង**ថា ធម្មតាជាជាតិទាហាន បើមិនដឹងគ្នេរការឃើញឫក្សថោកខ្ពស់ និងទាបហើយ ក៏មិនត្រូវហៅថាជាអ្នកមានតម្រិះប្រាជ្ញា ដែលខ្ញុំមកធ្វើការនេះ ព្រោះដឹងថាថ្ងៃនេះមេឃងងឹតខ្លាំង ខ្ញុំក៏តាំងចុះសញ្ញាទទួលខុសត្រូវនឹង**ជីវយី**មិនមានបារម្ភ។ **ជីវយី**ប្រើខ្ញុំជានាយកងធ្វើព្រួញក្នុងរវាងដប់ថ្ងៃឲ្យបានដប់ម៉ឺននោះ ទោះបីនឹងជ្រើសរើសឲ្យជាងធ្វើដូចម្តេចក៏មិនស្រេចទាន់ការ ហេតុទាំងនេះក៏ព្រោះ**ជីវយី**ឫស្យា គិតនឹងប្រហារជីវិតខ្ញុំចេញ តែហាក់មានទេវតាចុះមកជួយខ្ញុំមិញ ខ្ញុំក៏ដឹងថាថ្ងៃនេះមេឃនឹងងងឹត ខ្ញុំក៏អាចគិតបន្ថយមកឲ្យត្រូវនឹងបីថ្ងៃ។ ឥឡូវសំណាងខ្ញុំថ្លៃបានជារួចខ្លួនតាមសញ្ញា។ **ឡោសុក**ក៏សរសើរតម្រិះប្រាជ្ញាដែល**ខុងបេង**រិះគិតនោះជាអនេកកប្បការ។ លុះទូកទាំងអស់លឿនមកដល់បន្ទាយកាលណា **ឡោសុក**ក៏ឡើងទៅអធិប្បាយប្រាប់**ជីវយី**តាមដំណើរសព្វគ្រប់ ហើយថា ព្រួញនេះបានគ្រប់អស់ហើយ ឲ្យទាហានចុះទៅជញ្ជូនពីទូកយកមកចុះ។ **ជីវយី**ក៏ប្រើទាហានស្រូតស្រុះចុះទៅជញ្ជូនព្រួញឡើងមក ហើយឲ្យរាប់ត្រួតមើល ក៏ឃើញច្រើនជាងដប់ម៉ឺនទៅទៀត។

**ឡោសុក**ក៏ពណ៌នាសេចក្ដីដែល**ខុងបេង**ប្រើឧបាយកល ឲ្យ**ជីវយី**ស្តាប់គ្រប់ប្រការ។ **ជីវយី**ដឹងដូច្នោះក៏គ្រវីក្បាលដកដង្ហើមធំហើយថា គំនិតរបស់**ខុងបេង**នេះជ្រៅទូលាយលើសហួសខ្ញុំច្រើនណាស់។ ទទួលឃើញ**ខុងបេង**ដើរចូលមក **ជីវយី**ក៏

ក្រោកចេញទៅទទួលឲ្យអង្គុយក្នុងទីសមគួរហើយទើបសរសើរថា តម្រិះប្រាជ្ញារបស់អ្នកទៅធ្វើការទាំងអម្បាលនេះ នឹងរកអ្នកឯណាស្មើក៏ពុំបាន។ **ខុងបេង**តបថា គំនិតដែលគិតអានត្រឹមប៉ុណ្ណោះនឹងរាប់ថាចេះជ្រៅជ្រះនោះមិនបានទេ។ **ជីវយី**ក៏បបួល**ខុងបេង**ផឹកស្រាហើយប្រាប់ថា ពេលថ្ងៃម្សិលមិញមានសំបុត្រ**ស៊ុនគួន**មកដល់ខ្ញុំថា ឲ្យខ្ញុំរិះគិតយកជ័យជម្នះ**ចូឆូ**ឲ្យបាន។ ចុះអ្នកចូរឃើញដល់កិច្ចរាជការជួយរិះគិតចាត់ការនឹងទៅច្បាំងឲ្យបានជ័យជម្នះចុះ។ **ខុងបេង**ក្លែងតបថា ដ្បិតតម្រិះប្រាជ្ញាខ្ញុំនេះតិចណាស់ ដែលនឹងឲ្យជួយរិះគិតការសង្គ្រាមនោះ ខ្លាចក្រែងមិនផ្គុះផ្គាយការសម្លាយខូចអសារទៅ។

**ជីវយី**ថា ឯកងទ័ព**ចូឆូ**គ្រានេះ ធំសន្ធឹកសន្ធាប់ណាស់ បើនឹងចូលកាច់កិនប៉ះច្បាំងតទល់មុខគ្នានោះ ឃើញថាកម្រក្រក្រៃណាស់ ខ្ញុំបានគិតឃើញកលឧបាយច្បាស់មួយយ៉ាង អ្នកនឹងឃើញដូចខ្ញុំដែរឬប្រការម្ដេច? **ខុងបេង**ថា ខ្ញុំនឹងសុំគិតល្បងមើល លោកនិងខ្ញុំចូរសរសេរអក្សរតាមគំនិតដែលគិតនោះ ដាក់ក្នុងបាតដៃ ហើយបែរចេញមកមើលឲ្យព្រមគ្នា នឹងត្រូវដូចគ្នាឬទេ? **ជីវយី**យល់ឃើញត្រូវ ទាំងពីរនាក់ក៏សរសេរអក្សរមួយតួចុះក្នុងបាតដៃថា “ភ្លើង” ហើយបែរត្រឡប់ផ្ងាដៃទល់គ្នាមើលឃើញត្រូវគ្នា **ជីវយី**និង**ខុងបេង**ក៏អស់សំណើចទាំងពីរនាក់។ **ជីវយី**ថា យើងទាំងពីរនាក់គិតត្រូវគ្នាណាស់ អ្នកកុំឲ្យខ្ចរខ្ចាយសេចក្ដីនេះទៅឲ្យខូចការឡើយ។ **ខុងបេង**ថា លោកកុំវិតក្កឡើយ ខ្ញុំមិនឲ្យសេចក្ដីនេះបែកសារទៅឯណាទេ លោកចូរខំរិះគិតធ្វើឲ្យឆាប់ទៅចុះ។ ហើយ**ខុងបេង**ក៏លាត្រឡប់ចុះទៅវិញ។

ឯ**ចូឆូ**ខូចសេចក្ដីគិត ខាតបង់ទាំងព្រួញជាច្រើនដូច្នោះ ក៏មានសេចក្ដីអប្បយសមិនសប្បាយ។ **ស៊ុនហ៊ីវ**ក៏និយាយនឹង**ចូឆូ**ថា ឥឡូវ**ជីវយី**និង**ខុងបេង**មានតម្រិះប្រាជ្ញាជាច្រើន ជួយរិះគិតគ្នាធ្វើការសង្គ្រាម ហើយយើងនឹងច្បាំងយកជ័យជម្នះ ក៏

ឃើញថាកម្រក្រៃក្រៃណាស់ សូមឲ្យលោកប្រើទាហានធ្វើជារត់ទៅចុះចូលនៅក្នុងកងទ័ព**ជីវយី**ឲ្យរិះគិតជាកលសឹក ទើបយើងនឹងធ្វើការសង្គ្រាមបានមាំ។ **ចូឆ្វ**យល់ឃើញត្រូវផង ទើបនិយាយថា អ្នកឃើញមាននរណាដែលល្មមនឹងយកអាសាទៅធ្វើការទាំងនេះបាន? **ស៊ុនហ៊ីវ**ក៏និយាយថា ឥឡូវលោកឲ្យសម្លាប់**ឈួម៉**ស្លាប់ទៅហើយ នៅតែ**ឈួតុង, ឈួហោ**ជាប្អូន ដែលជាពលទាហាន លោកចូរយកខ្លួនមកនិយាយពន្យល់ឲ្យចូល ហើយឲ្យធ្វើជារត់ទៅចុះចូលនៅនឹង**ជីវយី**សិន ឃើញថា**ជីវយី**ក៏នឹងមិនមានសេចក្ដីសង្ស័យ ដោយឃើញថា**ឈួតុង, ឈួហោ**មានចិត្តឈឺចាប់ថា លោកសម្លាប់**ឈួម៉**ជាបង។ **ចូឆ្វ**យល់ឃើញត្រូវក៏ហៅ**ឈួតុង, ឈួហោ**ចូលមក ហើយតាំងឲ្យធ្វើជានាយទាហាន ឲ្យមានប្រាក់គ្រឿងសម្លៀកបំពាក់តាមសមគួរ។

លុះកន្លងមកថ្ងៃមួយនោះ **ចូឆ្វ**ក៏និយាយនឹង**ឈួតុង, ឈួហោ**ថា អ្នកចូរតាំងចិត្តគិតធ្វើរាជការនឹងយើងដោយសុចរិត កុំគិតឈឺចិត្តឆ្អិតឆ្អើមថាយើងសម្លាប់បងអ្នកស្លាប់។ ឥឡូវយើងចាត់ចែងទាហានឲ្យអ្នកធ្វើជារត់ទៅនៅនឹង**ជីវយី** បើប្រសិន**ជីវយី**គិតកលសឹកយ៉ាងណា អ្នកចូរឲ្យដំណឹងយ៉ាងស្ងាត់មកឲ្យយើងដឹងផង បើការសម្រេចហើយ យើងនឹងចិញ្ចឹមអ្នកដល់ខ្មាត។ **ឈួតុង, ឈួហោ**ឆ្លើយថា មហាឧបរាជកុំបីគិតសង្ស័យឆ្ងល់នឹងយើងខ្ញុំឡើយ ឯបុត្រភរិយារបស់យើងខ្ញុំក៏នៅក្នុងស្រុកកេងជីវទាំងអស់ បីដូចនៅក្នុងកណ្ដាប់ដៃលោក ទោះបីយើងខ្ញុំគិតធ្វើការជាចិត្តពីរ ក៏ឲ្យសម្លាប់បុត្រភរិយាយើងខ្ញុំទាំងអស់ទៅចុះ ខ្ញុំសូមតាំងចិត្តនឹងយកអាសាចេញទៅធ្វើរាជការ យកក្បាល**ជីវយី**និង**ខុងបេង**មកជូនលោកឲ្យបាន។ **ចូឆ្វ**មានសេចក្ដីត្រេកអរពន់ប្រមាណ ទើបចាត់ចែងទាហានស្រុកកេងជីវប្រាំរយនិងទូកចម្បាំងប្រាំឲ្យ**ឈួតុង, ឈួហោ**។ លុះពេលកណ្ដាលយប់ស្ងាត់ **ឈួតុង, ឈួហោ**ចុះទូកហើយបើកក្ដោងតាមខ្យល់ចុះទៅដល់បន្ទាយ**ជីវយី**។

ក្នុងខណៈនោះ **ជីវយី**កំពុងប្រឹក្សាការសង្គ្រាមនឹងទាហានទាំងពួង ទទួលទាហានយាមចូលមកប្រាប់សេចក្ដីថា ដ្បិតឃើញ**ឈ្មូតុង**, **ឈ្មូហោ**ប្អូន**ឈ្មូម៉**នាំទាហានប្រហែលប្រាំរយរត់ពី**ចូឆ្វ**មក សូមមកនៅធ្វើរាជការនឹងលោក។ **ជីវយី**ឮដូច្នោះក៏ប្រើទាហានចេញទៅទទួល**ឈ្មូតុង**, **ឈ្មូហោ**ឲ្យចូលមកក្នុងបន្ទាយ អ្នកទាំងពីរក៏គំនាប់**ជីវយី**ហើយយំជម្រាបថា **ឈ្មូម៉**បងខ្ញុំបាទទាំងពីរនាក់ គ្មានទោសខុសពីអ្វីសោះ ស្រាប់តែ**ចូឆ្វ**ឲ្យសម្លាប់ចេញ។ ខ្ញុំបាទមានសេចក្ដីឈឺចិត្តគិតព្យាបាទ**ចូឆ្វ**មិនភ្លេច តែមិនដឹងធ្វើម្ដេចនឹងសម្លាប់**ចូឆ្វ**បាន ទាល់គំនិតនឹងគិតអានមិនសម្រេចតាមប្រាថ្នា ទើបនាំគ្នារត់មកជ្រកបុណ្យលោក ប្រាថ្នានឹងយកជាទីពឹងធ្វើរាជការតទៅ ប្រសិនបើលោកនឹងលើកទ័ពចេញទៅច្បាំងវេលាណា ខ្ញុំបាទទាំងពីរនឹងសូមយកអាសាចេញទៅជាទ័ពស្រួច។ **ជីវយី**ដឹងសម្ដីក៏នឹកព្រួចដឹងកលឧបាយ ក៏ធ្វើជារួសរាយត្រេកអរហើយថ្លែងថា ដែលចិត្តអ្នកស្មោះសរមកនៅនឹងយើងព្រោះមានកំហឹងនឹង**ចូឆ្វ**នោះ យើងក៏គាប់ចិត្តណាស់ហើយ រួច**ជីវយី**ក៏យកមាសប្រាក់គ្រឿងសម្លៀកបំពាក់ឲ្យ**ឈ្មូតុង**, **ឈ្មូហោ**តាមសមគួរ រួចចាត់ឲ្យ**ឈ្មូតុង**, **ឈ្មូហោ**ទៅនៅក្នុងកងទ័ពស្រួច**កាំឡេង**។ **ឈ្មូតុង**, **ឈ្មូហោ**ក៏នាំទាហានរបស់ខ្លួនទៅនៅក្រោមបង្គាប់**កាំឡេង** ហើយគិតតែក្នុងចិត្តថា គ្រានេះយើងយកអាសា**ចូឆ្វ**មកមុខជានឹងបានសមប្រកបនឹងគំនិតគិតជាប្រាកដហើយ។

ឯ**ជីវយី**ក៏ឲ្យហៅខ្លួន**កាំឡេង**ទៅជួប ហើយខិនខ្សឹបប្រាប់ថា ដែល**ឈ្មូតុង**, **ឈ្មូហោ**មកនៅនឹងយើងនេះ មិនមែននឹងពិតត្រង់ដូចមាត់និយាយនោះទេ ព្រោះមិនបានយកគ្រួសារមកផង ឯពាក្យដែលវានិយាយទាំងអស់នោះ ជាកលឧបាយ**ចូឆ្វ**ប្រើមក ត្រូវយើងគិតកលត្រួតលើកកល**ចូឆ្វ** យកខ្លួន**ឈ្មូតុង**, **ឈ្មូហោ**ទុកឲ្យត្រឡប់ទៅបញ្ឆោត**ចូឆ្វ**វិញដោយមិនដឹងខ្លួន ទើបយើងនឹងធ្វើការបានមាំ។ ដែលយើងឲ្យ

**ឈ្លូតុង**, **ឈ្លូហោ**ទៅនៅនឹងអ្នកនោះ អ្នកត្រូវតែជួយទំនុកបម្រុងកុំឲ្យមន្ទិលចិត្តទាស់ចិត្តឡើយ ហើយឲ្យរវាំងគយគន់ហេតុការណ៍ទម្រាំយើងរិះគិតឲ្យបានចម្លោះយកជ័យជម្នះ**ចូឆ្វូ**វិញ រួចសឹមយើងកាត់ក្បាល**ឈ្លូតុង**, **ឈ្លូហោ**សែនទង់ជ័យ។ **កាំឡេង**ទទួលពាក្យហើយក៏ត្រឡប់ទៅបន្ទាយវិញ។

**ឡោសុក**ក៏ជម្រាបសួរ**ជីវយី**ថា **ឈ្លូតុង** , **ឈ្លូហោ**មកនៅនឹងលោកនេះ ជាកលឧបាយទេ កុំឲ្យលោកយកទុកឡើយ។ **ជីវយី**ឮហើយក៏ខឹងណាស់ស្រែកគំហកឲ្យ**ឡោសុក**ថា ពីដើម**ឈ្លូម៉**ជាបងគេគ្មានទោសខុសអ្វីសោះ **ចូឆ្វូ**ឲ្យសម្លាប់បង់ទៅ ឥឡូវ**ឈ្លូតុង**, **ឈ្លូហោ**មានសេចក្តីតូចចិត្តរត់មកនៅនឹងយើង ប៉ងនឹងសងសឹក**ចូឆ្វូ**វិញ ហេតុម្តេចខ្លួនអ្នកមកមន្ទិលសង្ស័យនឹងគេដូច្នេះ យូរទៅមានអ្នកណាដែលមានគំនិតនិងថ្វីដៃនឹងអាចនឹងហ៊ានចូលមកនៅនឹងយើងបានទៀត? ហើយធ្វើជាក្រោកដើរចូលទៅក្នុង។

**ឡោសុក**ក៏នាំយករឿងរ៉ាវដែល**ជីវយី**និយាយនោះ ទៅដំណាលឲ្យ**ខុងបេង**ស្តាប់គ្រប់ប្រការ។ **ខុងបេង**ឮហើយក៏អស់សំណើច មិននិយាយថាអ្វីសោះ។ **ឡោសុក**ឃើញដូច្នោះក៏សួរថា ហេតុម្តេចបានជាលោកសើច? **ខុងបេង**តបថា ខ្លួនអ្នកត្រង់ពេកណាស់ មិនចេះរិះគិតឲ្យឃើញគំនិត**ជីវយី**សោះ ឥឡូវ**ជីវយី**ដឹងក្នុងកលឧបាយ**ចូឆ្វូ** ដែលចាត់ប្រើ**ឈ្លូតុង**, **ឈ្លូហោ**មកស្ម័គ្រនៅផងនោះ ព្រោះហេតុថា កងទ័ព**ជីវយី**និង**ចូឆ្វូ**តាំងនៅទីនេះ ជាជាយទន្លេពិបាកនឹងប្រើមនុស្សទៅមកតាមល្បាតស៊ើបការណ៍ បានជា**ចូឆ្វូ**ក្លែងឲ្យ**ឈ្លូតុង**, **ឈ្លូហោ**ធ្វើជារត់មកនៅនឹង**ជីវយី**ប្រាថ្នានឹងបានដំណឹងការទៅ**ចូឆ្វូ** ឯ**ជីវយី**បានជាយកទុកនោះ ព្រោះនឹងគិតកលត្រួតលើកល**ចូឆ្វូ**វិញ ដែលអ្នកទៅនិយាយហាមរំឭក**ជីវយី**មិនឲ្យទទួលយក**ឈ្លូតុង**, **ឈ្លូហោ**ទុកនោះ **ជីវយី**ក៏ក្លែងធ្វើជាខឹងសម្បារប្រាថ្នាមិនឲ្យអ្នកយល់ទេ។ **ឡោសុក**ថា កាល

**ជីវយី**ខឹងនោះ ខ្ញុំក៏មិនទាន់បានដឹងយោបល់សោះ លុះតែលោកមានប្រសាសន៍បំភ្លឺ ទើបគិតទៅឃើញគំនិត**ជីវយី**តាមលោកហើយ។ **ឡោសុក**ក៏លា**ខុងបេង**ទៅកាន់ទីកន្លែង។

លុះពេលកណ្ដាលយប់ **ជីវយី**ចេញមកអង្គុយគិតរាជការ ទទួលឃើញ **អ៊ុយកាយ**ដើរចូលមក **ជីវយី**សួរថា អ្នកចូលមកនឹងដាស់តឿនស្មារតីយើងឬប្រការម្ដេច? **អ៊ុយកាយ**ថា បណ្ដាទាហាន**ចូឆ្វ**ដែលលើកមកធ្វើសង្គ្រាមគ្រានេះច្រើនជាងយើងណាស់ បើជាលោកនឹងតាំងនៅឲ្យយូរ មិនគិតទម្លុះទម្លាយរកឧបាយនឹងច្បាំងជាប្រញាប់ទេ ខ្ញុំបាទឃើញថានឹងថ្លោះការរបស់សត្រូវជាប្រាកដមិនខាន ហេតុម្ដេចលោកមិនគិតអានយកភ្លើងដុតទ័ព**ចូឆ្វ**ឲ្យឆាប់ទៅ?

**ជីវយី**ឮដូច្នោះក៏សួរថា យោបល់ដែលអ្នកគិតដូច្នេះ តើនរណាប្រាប់អ្នកឲ្យមកនិយាយ? **អ៊ុយកាយ**ឆ្លើយថា សេចក្ដីនេះខ្ញុំបាទគិតឃើញខ្លួនឯងគ្មាននរណាមកពន្យល់ទេ។ **ជីវយី**ឮដូច្នោះក៏គិតថា យោបល់របស់អ្នកនេះត្រូវនឹងគំនិតយើង ហើយថា យើងក៏គិតឃើញដូចអ្នកដែរ តែថានៅមិនទាន់មានឱកាសល្អមនឹងធ្វើបាន ឥឡូវ **ឈួតុង, ឈួហោ**មកនៅនឹងយើងហើយ គឺជាកលល្បិចរបស់**ចូឆ្វ** ប្រាថ្នាចង់ដឹងហេតុការណ៍ក្នុងកងទ័ពយើង ដែលយើងទទួល**ឈួតុង, ឈួហោ**នៅនោះ ព្រោះចង់ធ្វើកលត្រួតលើកល**ចូឆ្វ**។ **អ៊ុយកាយ**ថា លោកកុំវិតក្កឡើយ បើលោកនឹងប្រើខ្ញុំបាទៗក៏សូមទទួលអាសា។ **ជីវយី**ថា បើអ្នកព្រមទទួលយកអាសាហើយ ត្រូវតែអត់ធន់អាជ្ញារបស់យើងឲ្យជាយ៉ាងរហ័ស ទើបការទាំងពួងនឹងសមតាមគំនិតបាន ព្រោះដ្បិត**ចូឆ្វ**ក៏មិនមានមន្ទិលសង្ស័យ។ **អ៊ុយកាយ**ថា **ស៊ុនគួន**មានឧបការគុណជាទម្ងន់លើខ្លួនខ្ញុំបាទ ព្រោះលោកឧបត្ថម្ភទំនុកបម្រុងផ្គងផ្គើមឲ្យជាសុខរៀងរាបដរាបមក។ ខ្ញុំបាទក៏នៅមិនទាន់បានធ្វើគុណបំណាច់អ្វីជាទីតបស្នងសងគុណលោកសោះ

គ្រានេះទោះបីបើលោកនឹងត្រូវការឲ្យខ្ញុំបាទយកអាយុជីវិតទៅប្តូរ ខ្ញុំបាទក៏សូមស៊ូ ដោយអង់អាចពុំខ្លាចស្លាប់ ហេតុនេះសូមឲ្យលោកចាត់ប្រើខ្ញុំបាទចុះ ខ្ញុំបាទនឹងប្រាកដកេរ្តិ៍ឈ្មោះចំពោះទៅខាងមុខ។ **ជីវយី**ឮដូច្នោះក៏សោមនស្សសាទរក្រោកឡើងឈរ ហើយលុតជង្គង់ចុះគំនាប់**អ៊ុយកាយ**និយាយថា បើអ្នកតាំងចិត្តធ្វើការដោយសុចរិតប្រាកដ យើងក៏ឃើញថាការសឹកសង្គ្រាមគ្រានេះ អាចសន្មតបានថានឹងមានជ័យជម្នះ ព្រោះខ្លួនអ្នកជាបឋម។ អ្នកគប្បីខំផ្តាច់ចិត្តគិតប្រថុយខ្លួនប្រាណតាមដែលយើងត្រូវធ្វើក្នុងគ្រានេះចុះ។ លុះនិយាយហើយក៏ចុះសញ្ញាទុកជាទីសំខាន់។ **អ៊ុយកាយ**ក៏ទទួលប្រកាន់តាមពាក្យសម្តីស្រេច ក៏លា**ជីវយី**ទៅកាន់ទីសំណាក់វិញ។

លុះពេលព្រឹកឡើង **ជីវយី**ក៏ចេញនិយាយរាជការ ទីប្រឹក្សានិងសេនាទាហានទាំងពួងក៏ទៅជួបជុំព្រមគ្នា ហើយអញ្ជើញ**ខុងបេង**ចូលទៅប្រឹក្សាផង។ **ជីវយី**ក្លែងនិយាយថា **ចូវឆូ**លើកទ័ពមកគ្រានេះ មានទាហានប្រមាណមួយរយម៉ឺនប្លាយ រៀបតាំងបន្ទាយរៀងគ្នាជាលំដាប់ប្រហែលបីពាន់សិន (១២០ គ.ម) ឯទាហានយើងមានតិចជាងគេណាស់ ដែលនឹងរិះគិតច្បាំងឲ្យរហ័សនោះ មិនបានសម្រេចទុកក្នុងមួយថ្ងៃទេ យើងនឹងចែកស្បៀងអាហារឲ្យបណ្តាទាហានគ្រប់នាយទ័ពនាយកងទាំងពួង ឲ្យលើសកំណត់ក្នុងកំណត់បីខែ ទើបនឹងកែប្រែលើកទៅច្បាំងបានស្រួល។ **អ៊ុយកាយ**ឮដូច្នោះក៏ក្លែងឆ្លើយថា កុំថាលោកចែកស្បៀងឲ្យតែត្រឹមបីខែប៉ុណ្ណោះ ទោះបីលោកគ្មេរគិតចែករំលែកឲ្យលើសគម្រប់ដល់សាមសិបខែទៀតក៏ដោយ ក៏គង់នឹងធ្វើការសឹកសង្គ្រាមពុំសម្រេច គំនិតរបស់ខ្ញុំបាទបានគិតទុករួចជាស្រេចហើយថា ត្រូវតែចែកឲ្យអស់ក្នុងមួយខែ ទើបនឹងខំគិតកែខៃតតាំងច្បាំងនឹងកងទ័ព**ចូវឆូ**ឲ្យបរាជ័យបាន បើមិនដូចគំនិតដែលគិតអានដូច្នេះទេ ត្រូវតែកែប្រែធ្វើតាម

ពាក្យ**ទៀវចៀវ**និយាយ អស់យើងខ្ញុំទាំងឡាយក៏ត្រូវដោះក្រោះបោះអាវុធពីដៃ នាំគ្នាទៅពឹងអាស្រ័យចំណុះចុះចូលនឹង**ចូឆ្វ**តែម្ដងទៅ នឹងនៅឲ្យអំពល់វវល់ធ្វើអ្វីទៀត?

**ជីវយី**ឮដូច្នោះក៏ក្លែងធ្វើជាខឹងខ្លាំងណាស់ ដើម្បីមិនឲ្យមនុស្សទាំងអស់មន្ទិលសង្ស័យ និយាយថា សព្វថ្ងៃ**ស៊ុនគួន**ឲ្យយើងកាន់អាជ្ញាសិទ្ធិ លើកទាហានមកធ្វើមេកងទ័ព អាចនឹងប្រើបង្គាប់ចាត់ការក្នុងការសង្គ្រាមតនឹង**ចូឆ្វ** បើមានអ្នកណារឹងទទឹងពាលាត្រូវតែប្រហារជីវិតតាមអាជ្ញាសិទ្ធិស្រេចលើយើង។ ឥឡូវយើងនិយាយជាការរាជការដោយយល់ឃើញត្រឹមត្រូវដូច្នេះ ហេតុអ្វី**អ៊ុយកាយ**នេះអង់អាច មិនបានកោតខ្លាចយើងជាមេទ័ព មកនិយាយពន្យល់បង្អាប់យើងកណ្ដាលទីប្រជុំ ដើម្បីឲ្យពលទាហានតូចធំមានសេចក្ដីរួញរាញញ៉ើតនឹងធ្វើការ បើតាមសម្ដីរោហារដែលពោលនេះ ហាក់បីដូចជាណែនាំពន្យល់ឲ្យរេហ៍ពល ប្រែខ្វៃចិត្តមិនហ៊ានគិតតច្បាំងហើយជាទីញ៉ាំងសត្រូវឲ្យដឹងការណ៍ អាចនឹងក្លៀវក្លាលើកទ័ពមកសង្កត់សង្កិនយើងដោយពលាការ។ **ជីវយី**ក៏ស្ទុះផ្ដាទៅបង្គាប់ទាហានឲ្យចោមចាប់ខ្លួន**អ៊ុយកាយ**ទៅប្រហារជីវិត។

**អ៊ុយកាយ**ឮដូច្នោះក៏ក្លែងធ្វើជាខឹងតបយ៉ាងខ្លាំងស្រែកថា ខ្លួនអញក៏បានតាំងចិត្តគិតធ្វើការយកអាសាក្នុងសឹកសង្គ្រាម តាំងពីគ្រា**ស៊ុនគៀន**ជាបិតា**ស៊ុនគួន**ផ្ទួនជាប់មកបីតហើយ ទាល់តែស្រុកកាំងតាំងតាំងទីខ្ជាប់ខ្ជួន លុះ**ស៊ុនគៀន**ស្លាប់ទៅអញក៏មកនៅនឹង**ស៊ុនសេក**រហូតមកដល់**ស៊ុនគួន** គ្រានេះមកប្រជួនឲ្យអភ័ព្វធ្លាក់មកនៅក្រោមបង្គាប់**ជីវយី**ជាមនុស្សថ្មី មានសេចក្ដីរំលោភគ្របសង្កត់និយាយឲ្យឯងបាត់មាត់កុំឲ្យឆ្លើយបាន បើត្រូវស្លាប់ អញក៏មិនខ្ចីស្ដាប់នឹងខ្លាចប៉ុន្មាន កើតមករមែងស្លាប់មិនខានតាមយថាកម្មទៅចុះ។ **ជីវយី**ឮដូច្នោះក៏រឹងរឹតតែធ្វើជាខឹងពន់ប្រមាណណាស់ បង្គាប់ទាហានឲ្យរហ័សយកខ្លួន**អ៊ុយកាយ**ទៅសម្លាប់។

**កាំឡេង**ក៏និយាយឃាត់ថា **អ៊ុយកាយ**នេះជាខ្ញុំរាជការចាស់មកយូរហើយ វេលានេះបាននិយាយដោយពាក្យល្មើសលើសលោះ ខ្ញុំសូមឲ្យលោកអនុគ្រោះលើកទោសចោលម្តងទៅចុះ ឯកំហុសនោះព្រោះវិស័យមនុស្សចាស់ រមែងមានយ៉ាងនេះឯងជាធម្មតា។ **ជីវយី**បានស្តាប់ក៏ឆ្លើយថា ដែលអ្នកមកសូមទោស**អ៊ុយកាយ**នេះ ដូចជានាំឲ្យមនុស្សទាំងពួងរឹតតែមានចិត្តគិតមើលងាយយើងតទៅមុខទៀត ហើយក៏បង្គាប់ឲ្យទាហានបណ្តេញ**កាំឡេង**ចេញទៅ។ ទីប្រឹក្សានិងសេនាទាហានទាំងពួងក៏នាំគ្នាគំនាប់**ជីវយី**ហើយជម្រាបថា ដែល**អ៊ុយកាយ**បានជានិយាយដូច្នេះ ក៏ឃើញថាជាពាក្យទ្រគោះផរុសវាចាទៅហើយ យើងខ្ញុំសូមឲ្យរួចអាយុជីវិតម្តងចុះ បើលោកនឹងសម្លាប់តាមទោសកំហុសក៏សឹងតែបាន តែថាគ្រានេះជាពេលនៅក្នុងរវាងកងទ័ព ក្រែងនឹងកើតអពមង្គលដល់ការដែលកំពុងធ្វើ បើកាលណាយើងបានកម្ចាត់**ចូឆ្វ**ស្រេចហើយ សឹមលោកសម្លាប់**អ៊ុយកាយ**ចេញចុះ។

**ជីវយី**តបថា អស់អ្នករាល់គ្នានិយាយនេះក៏គួរហើយ តែបើយើងនឹងលើកទោស**អ៊ុយកាយ**ឲ្យរួចតែម្តង តទៅមុខមនុស្សផងក៏នឹងកំរើបរឹងទទឹងទៀត ថាទោសដែលត្រូវសម្លាប់នោះ ក៏យើងអនុញ្ញាតទុកមួយអន្លើសិនចុះ ហើយបង្គាប់ទាហានឲ្យយក**អ៊ុយកាយ**ទៅវាយមួយរយខ្វាប់។ ទាហានក៏ចាប់ទៅចងវាយបានហាសិបខ្វាប់ឈប់មួយលើក ទីប្រឹក្សាទាំងពួងក៏ចេះតែអង្វរសុំទោស។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤១

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ជីវយី**ចាប់**អ៊ុយកាយ**ទៅវាយហាសិបខ្វាប់ **ខុងបេង**ឃើញក៏មិនស្តី ព្រោះដឹងថា**ជីវយី**ធ្វើកលឧបាយ រហូតដល់**ចូឆ្វូ**និងទីប្រឹក្សាសេនាទាហានប្រជុំគ្នាស៊ីផឹកក្នុងដែនទ័ព រឹតជាសប្បាយក្នុងវេលាយប់។)*

**ជីវយី**ក៏ក្រោកឡើងជេរ**អ៊ុយកាយ**ជាពាក្យអសុរោះផ្សេងៗ ហើយថា គ្រានេះអញឲ្យវាយតែហាសិបខ្វាប់ តទៅមុខបើឯងនៅមិនរាងចាលអាចរឹងទទឹងម្តងទៀត អញនឹងឲ្យកាត់ក្បាលឯងដោតផ្គាល ហើយក៏ដើរចូលទៅខាងក្នុង។ ទីប្រឹក្សានិងសេនាទាហានទាំងពួងក៏នាំគ្នាចូលទៅគ្រាប់**អ៊ុយកាយ**នាំទៅទីកន្លែងដែលនៅ។ ឯរបួសដែលវាយនោះក៏បែករលុះរលួយហូរឈាមពេញអស់ទាំងខ្លួន **អ៊ុយកាយ**ក៏សន្លប់បាត់ស្មារតីដល់ពីរបីដង។ មនុស្សទាំងពួងក៏មានសេចក្តីអាណិតអានាថទាំងអស់គ្នា ហើយនាំគ្នាចាប់រឹតរួតទាល់តែដឹងខ្លួនឡើងវិញ។ ឯ**ខុងបេង**ឃើញដូច្នោះ ក៏មិនបាននិយាយថាដូចម្តេច ត្រឡប់ចុះទៅទូកវិញ។ **ឡោសុក**ក៏ចុះតាម**ខុងបេង**ដល់ទូកហើយសួរថា ខ្លួនខ្ញុំនៅក្រោមបង្គាប់**ជីវយី** ឃើញ**ជីវយី**ឲ្យវាយ**អ៊ុយកាយ** ក៏មានសេចក្តីអាណិតខ្លោចចិត្ត តែនឹងនិយាយសុំទោសក៏នឹកបារម្ភខ្លាច លោកជាភ្ញៀវមកពីចម្ងាយ ហេតុម្តេចមិនជួយសុំទោស**អ៊ុយកាយ**ផង បានជានៅស្ងៀម?

**ខុងបេង**ស្តាប់ហើយក៏អស់សំណើចថា ខ្លួនអ្នកគិតថាយើងមិនដឹងដល់ឬ បានជាមកនិយាយមើលងាយយើងដូច្នេះ? **ឡោសុក**តបថា តាំងពីខ្ញុំទៅនាំលោកមកនៅក្នុងស្រុកកាំងតាំង រហូតមកដល់ធ្វើការទ័ពច្បាំងនេះ ខ្ញុំបាទក៏មិនដែលនិយាយមើលងាយប្រមាថលោកឲ្យទាស់ចិត្តពីរឿងអ្វីសោះ ហេតុម្តេចបានជាលោកមាន

ប្រសាសន៍ថា ខ្ញុំមើលងាយលោកដូច្នោះ? **ខុងបេង**ថា កាល**ជីវយី**ឲ្យវាយ**អ៊ុយកាយ**នោះ គឺជាឧបាយកលរបស់**ជីវយី**គិតត្រួតលើកល**ចូឆ្វ** បានជាខ្ញុំនៅស្ងៀមមិនបាននិយាយសុំទោស**អ៊ុយកាយ** ដែល**ជីវយី**ប្រើឧបាយដូច្នោះ ប្រាថ្នានឹងឲ្យ**ឈូតុង, ឈូហោ**ឃើញពិត នឹងបានប្រើល្បិចទៅប្រាប់**ចូឆ្វ**ឲ្យដឹង ហើយនឹងឲ្យ**អ៊ុយកាយ**ធ្វើជាទៅចំណុះចុះចូលនឹង**ចូឆ្វ**។ ប្រសិនបើជាអ្នកនឹងទៅជួបនឹង**ជីវយី** កុំបីប្រាប់**ជីវយី**ថាខ្ញុំដឹងដល់កលទាំងនេះឡើយ ចូរប្រាប់ថា ខ្ញុំឃើញ**ជីវយី**ឲ្យវាយ**អ៊ុយកាយ**នោះ ខ្ញុំមានសេចក្ដីតូចចិត្តណាស់ ព្រោះ**ជីវយី**មិនបានរាប់អានស្រឡាញ់ទាហាន។

**ឡោសុក**ក៏ឆ្លើយទទួលពាក្យ ហើយលា**ខុងបេង**ត្រឡប់ទៅជួបនឹង**ជីវយី** ៗក៏នាំ**ឡោសុក**ចូលទៅខាងក្នុង **ឡោសុក**ក្លែងសួរ**ជីវយី**ថា **អ៊ុយកាយ**ជាខ្ញុំរាជការជាន់ចាស់ បានជានិយាយភ្លាំងភ្លាត់ទៅប៉ុណ្ណោះ ហេតុម្ដេចលោកមិនអធ្យាស្រ័យក៏ឲ្យធ្វើទោសដល់ទីនេះ? **ជីវយី**ត្រឡប់សួរ**ឡោសុក**វិញថា ដែលខ្ញុំឲ្យវាយ**អ៊ុយកាយ**នោះ អ្នកមានឮមនុស្សទាំងអស់គ្នានិយាយថាម្ដេចខ្លះ? **ឡោសុក**ថា ខ្ញុំបានឮគេរាល់គ្នានិយាយថា គួរឲ្យអាណិត**អ៊ុយកាយ**ណាស់ ដោយហេតុថា លោកធ្វើទោស**អ៊ុយកាយ**វាយដំជាដំណាំគ្រាំគ្រា។ **ជីវយី**សួរថា អ្នកបានឮ**ខុងបេង**និយាយដូចម្ដេចខ្លះដែរឬទេ? **ឡោសុក**ថា **ខុងបេង**មានសេចក្ដីតូចចិត្តច្រើន ពីព្រោះថាលោកមិនមានអាណិតមេត្តាទាហាន។ **ជីវយី**ឮដូច្នោះក៏ទះដៃអស់សំណើចហើយថា ខ្ញុំធ្វើកលគ្រានេះ**ខុងបេង**គ្មានដឹងអ្វីសោះ។ **ឡោសុក**ថា លោកមានប្រសាសន៍ថា**ខុងបេង**មិនដឹងនោះ គឺលោកធ្វើយ៉ាងម្ដេច?

**ជីវយី**ថា ដែល**ខុងបេង**មិនដឹងកលឧបាយយើង ៗគិតធ្វើទោស**អ៊ុយកាយ**នោះ ព្រោះហេតុថានឹងត្រួតកល**ចូឆ្វ** ដើម្បីឲ្យ**អ៊ុយកាយ**ទៅចុះចូលនឹង**ចូឆ្វ** ឯឧបាយដែលខ្ញុំគិតនេះ **ឈូតុង, ឈូហោ** ដឹងក៏ដឹងលបទៅប្រាប់**ចូឆ្វ** ៗក៏គង់យល់ថាពិត ខ្ញុំ

នឹងយកភ្លើងដុតទ័ព**ចូវឆ្វ**ឲ្យមានជ័យជម្នះ។ **ឡោសុក**បានឮដូច្នោះក៏នឹកតែក្នុងចិត្តថា ឯតម្រិះប្រាជ្ញា**ខុងបេង**នោះជ្រៅឆ្ងាយទូលាយយ៉ាងវិសេស លើស**ជីវយី**ទៅទៀត ដែល**ខុងបេង**ផ្តាំនោះ **ឡោសុក**ក៏មិនបាននិយាយឲ្យ**ជីវយី**ដឹងការណ៍សោះ ហើយលាទៅវិញ។

ឯ**អ៊ុយកាយ**ដែលត្រូវគេវាយរបួសដំណំគ្រាំគ្រា ក៏ដេកឈឺនៅក្នុងបន្ទាយ មនុស្សទាំងឡាយក៏នាំគ្នាទៅសួរជាច្រើន **អ៊ុយកាយ**ក៏មិនបានសាស្រាយដោយកិច្ចការអ្វី ធ្វើជាខាំធ្មេញមុខមាត់បែបខឹងប្រាកដនឹង**ជីវយី**ធ្វើបាបខ្លួននោះ។

ក្នុងខណៈនោះ **ងាំតេក**ដែលជាទីប្រឹក្សា**ជីវយី** ជាភឿនសម្លាញ់នឹង**អ៊ុយកាយ** **ងាំតេក**ជាមនុស្សទៀងត្រង់សុចរិតណាស់ មានវោហារចេះនិយាយចេញទៅអស់ ក៏ចូលទៅជួបនឹង**អ៊ុយកាយ** ៗក៏បណ្តេញបាវព្រាវរបស់ខ្លួនឲ្យចេញអស់ទៅ ហើយហៅ**ងាំតេក**ចូលទៅជិត។ **ងាំតេក**ក៏សួរសាកថា ពីដើមរៀងមកខ្លួននិង**ជីវយី**មានសាហេតុអ្វីនឹងគ្នាដែរឬទេ បានជា**ជីវយី**ឲ្យធ្វើទោសទណ្ឌកម្មអ្នកដល់ម្ល៉េះ? **អ៊ុយកាយ**ឆ្លើយថា គ្មានសាហេតុអ្វីនឹងគ្នាទេ។ **ងាំតេក**ថា បើគ្មានទោសហេតុព្យាបាទគ្នាទេ ដែល**ជីវយី**ឲ្យធ្វើទោសអ្នកជាសហ័សដូច្នេះ គឺជាឧបាយឬ? **អ៊ុយកាយ**ថា អ្នកបានដឹងឬ? **ងាំតេក**ថា ដែល**ជីវយី**ធ្វើទោសអ្នកដូច្នេះ ខ្ញុំយល់ឃើញថាផ្លូវដប់ចំណែក តែខ្ញុំដឹងដល់តែពាក់កណ្តាល មិនដឹងដល់ពាក់កណ្តាល។

**អ៊ុយកាយ**ថា ពីដើម**ចូវឆ្វ**គិតកលឧបាយឲ្យ**ឈួតុង**, **ឈួហោ**មកនៅនឹង**ជីវយី** ៗក៏ប្រឹក្សានឹងខ្ញុំថា នឹងគិតត្រួតកល**ចូវឆ្វ** ឯខ្លួនខ្ញុំនេះគឺ**ស៊ុនគៀន**, **ស៊ុនសេក**, **ស៊ុនគួន** ក៏បានចិញ្ចឹមរក្សាតមកទៀត គុណឧបការក៏មានជាទម្ងន់ ខ្ញុំមិនទាន់មានគុណបំណាច់អ្វីសោះ បានជាយកខ្លួនស៊ូប្តូរជីវិតតបគុណ ទទួលអាសាធ្វើការជាកលឧបាយ ប៉ងនឹងឲ្យកងទ័ព**ចូវឆ្វ**បរាជ័យ ខ្ញុំក៏ស៊ូតទ្រាំលំបាករូបកាយឲ្យឈឺដំណំគ្រាំ

គ្រាជាសហ័ស គ្រានេះខ្ញុំក៏ពិគ្រោះឃើញថា បណ្ដាទាហានដែលមានក្នុងកងទ័ពយើង គ្មាននរណាល្អមនឹងទុកចិត្តបានឡើយ ខ្ញុំគិតទៅហើយឃើញតែអ្នកមួយ នឹងជួយធុរៈដោយសុចរិតប្រាកដនឹងនាយចៅហ្វាយ ខ្ញុំក៏សុំនិយាយប្រាប់ការអាថ៌កំបាំងនេះឲ្យអ្នកជ្រាបទៅចុះ គ្រានេះបើអ្នកទទួលជួយយកអាសាបាន ខ្ញុំក៏នឹងបានប្រាប់ឲ្យអស់សេចក្ដី។

**ង៉ាំតេក**ថា ដែលអ្នកមានប្រសាសន៍នោះ នឹងចង់ឲ្យខ្ញុំទៅល្បួងបញ្ឆោត**ចូឆ្វ**ឬ? **អ៊ុយកាយ**តបថា ប្រសាសន៍នេះត្រូវនឹងគំនិតដែលខ្ញុំគិតនោះឯង តែថាចិត្តអ្នកនឹងយល់ព្រមតាមឬដូចម្ដេច? **ង៉ាំតេក**ថា ចៅហ្វាយនាយមានឧបការគុណមកហើយ មានតែផ្លូវជួយ តែថាខ្លួនខ្ញុំសព្វថ្ងៃមានតែរូបនិងចិត្តវិញ្ញាណ បើត្រូវការយ៉ាងណា ខ្ញុំក៏អាចហ៊ានស៊ូប្ដូរឲ្យមានកេរ្តិ៍ឈ្មោះទុកក្នុងផែនដី ដើម្បីនឹងទទួលអាសាទៅល្បួងបញ្ឆោត**ចូឆ្វ**តាមការ បើប្រសិនណា**ចូឆ្វ**នឹងដឹងដល់កលដែលគិត នឹងប្រហារផ្ដាញជីវិតក៏តាមការចុះ ខ្ញុំមិនទញ់តុះនិងញញើតខ្លាចទេ សូមតែឲ្យមានកេរ្តិ៍ឈ្មោះប្រាកដទុក។

**អ៊ុយកាយ**ឮដូច្នោះក៏រសាយជំងឺក្នុងខ្លួន ខំផ្ទប់ខ្លួនក្រោកឡើងអង្គុយ ឱនគំនាប់**ង៉ាំតេក**ហើយថា ដែលអ្នកទទួលសារភាពជួយទំនុកបម្រុងការទាំងអម្បាលនេះ ខ្លួនអ្នកមិនបង់កម្លាំងដែលបានតាំងខ្លួនមកធ្វើជាទាហានទេ។ **ង៉ាំតេក**ថា ការនេះនឹងបង្អង់ឲ្យយូរមិនបាន បើអ្នកមានកិច្ចត្រូវពន្យល់បំភ្លឺយ៉ាងម្ដេច ក៏ឲ្យប្រញាប់ប្រាប់ឬធ្វើជាសំបុត្រចុតហ្មាយឲ្យមកចុះ ខ្ញុំនឹងអាលទៅរិះគិតឲ្យបានប្រយោជន៍ក្នុងរាជការរបស់នាយចៅហ្វាយយើង។ **អ៊ុយកាយ**ក៏ខំប្រឹងសរសេរសំបុត្រហើយបិទស្រោម ហុចទៅឲ្យ**ង៉ាំតេក**ហើយប្រាប់ថា ចូរអ្នកខំទៅគិតឲ្យបានសម្រេចការរាជការរបស់នាយចៅហ្វាយយើងចុះ។ **ង៉ាំតេក**ទទួលសំបុត្រហើយក៏លាទៅកាន់ទី

សំណាក់។ លុះវេលាយប់ក៏តែងខ្លួនស្លៀកពាក់បន្លំជាព្រានប្រម៉ង់ ចុះទូកចែវតម្រង់ទៅជិតបន្ទាយ**ចូឆូ**។

ខណៈនោះ ទទួលពួកទាហានយាមល្បាតកងទ័ព**ចូឆូ**ឃើញមនុស្សប្លែកឆ្វែលទូកតូចចូលទៅ ក៏ចាប់យកខ្លួនទៅសាកសួរ ហើយចូលប្ដឹងដល់**ចូឆូ**តាមការថា យើងខ្ញុំចាប់បានមនុស្សបង់ត្រីបានម្នាក់ បានសួរបញ្ជាក់ថាឈ្មោះ**ដាំតេក**ទីប្រឹក្សា**ស៊ុនគួន** នឹងចង់ចូលមកជម្រាបការអាថ៌កំបាំងដល់លោក។ **ចូឆូ**ឮដូច្នោះក៏ថា **ដាំតេក**មកនោះប្រាថ្នានឹងស៊ើបការណ៍ក្នុងកងទ័ពយើង ទើបឱ្យយកខ្លួន**ដាំតេក**ទៅក្នុងបន្ទាយ ប្រហែលយាមបីប្ដាយសួរថា ខ្លួនអ្នកមកក្នុងទីនេះដោយហេតុអ្វី? **ដាំតេក**ឆ្លើយថា ខ្ញុំបាទបានឮគេនិយាយជាច្រើនគ្នាថា មហាឧបរាជនេះមានតម្រិះប្រាជ្ញាជ្រៅទូលាយណាស់ ប្រកបទាំងចិត្តក៏សុចរិតល្អ មានអធ្យាស្រ័យសុភាពរៀបរយគួរសមនឹងខ្ញុំរាជការតូចធំមិនរើសមុខ ខ្ញុំបានដឹងទំនុកដូច្នេះបានជាចូលមកដល់លោក ឧបមាដូចមនុស្សទញ់ទាល់ដើរផ្លូវហើយស្រេកទឹកណាស់ លុះបានទៅប្រទះឃើញស្រះមានទឹករងថ្លា ក៏ប្រាថ្នានឹងដងទទួលទានដោយអំណរ នេះដូចខ្ញុំបាទបានមកឃើញមុខមហាឧបរាជដ៏ល្អប្រកបដោយអំណាច ខ្ញុំឃើញថា ជាអ្នកប្រកាន់ទិដ្ឋិមានៈ មិនបានស្គាល់ច្បាស់ជាមនុស្សល្អនិងអាក្រក់សោះ ដែលគំនិត**អ៊ុយកាយ**និងខ្ញុំបាទបានរិះគិតចាត់ប្រើឱ្យខ្ញុំបាទមកនេះ ក៏ព្រួយការអសារប្រយោជន៍ទៅទទេ។

**ចូឆូ**ឮដូច្នោះក៏សួរថា យើងនិង**ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំង ក៏ជាខ្មាំងសត្រូវធ្វើសឹកសង្គ្រាមនឹងគ្នា ខ្លួនអ្នកឯងក៏ជាទីប្រឹក្សារបស់**ស៊ុនគួន**ដូចជាសត្រូវនឹងយើងដែរ ដែលអ្នកឯងមកនេះ ហេតុម្ដេចក៏មិនសាកសួរឱ្យដឹងសេចក្ដីក្រៅឱ្យច្បាស់ថាចូលមកនេះនឹងល្អឬអាក្រក់ជាមុនសិន ឬនឹងមកសង្កត់សង្កិនបង្ខំឱ្យយើងរត់ចុះទៅទទួលអ្នកឯងនោះ ជាគួរសមនឹងអធ្យាស្រ័យនៃមេទ័ពជាធំហើយឬ? **ដាំតេក**ឮ

ដូច្នោះក៏ធ្វើជាសរសើរ**ចូឆូ**ថា លោកមានប្រសាសន៍នេះត្រូវណាស់ ហើយថា **អ៊ុយកាយ**នោះបាននៅធ្វើរាជការតាំងពីគ្រា**ស៊ុនគៀន** និង**ស៊ុនសេក**រហូតដល់**ស៊ុនគួន** ត្រឹមអំណាច**ស៊ុនគួន**ក៏នៅមិនដែលមានចាប់ទោសខ្លួនពីអ្វីសោះ ឥឡូវធ្លាក់មកដល់មុខងារ**ជីវយី**បានធ្វើជាមេទ័ពប៉ុណ្ណោះ ដោយ**ស៊ុនគួន**លើកមុខរាប់ថាមានតម្រិះប្រាជ្ញា **ជីវយី**ក៏ក្តៀវក្តាកំរើបចិត្តឥតកោតក្រែង តាំងតែបញ្ចេញវោហារកំហែងប្រើបង្គាប់**អ៊ុយកាយ**ដែលជាខ្ញុំរាជការចាស់ ឲ្យលុះក្នុងអំណាចខ្លួនបានសេចក្តីអប្បយសផ្សេងៗ ទាល់តែបណ្តាលចិត្តវង្វេងឲ្យជាប់អាឃាតព្យាបាទ**ជីវយី**វិញ ឯ**អ៊ុយកាយ**និងខ្ញុំបាទនោះ គឺជាភឿនសម្លាញ់គ្នាដ៏ស្និទ្ធ ធ្លាប់ស្គាល់ចិត្តរាក់ជ្រៅនៅនឹងគ្នាដូចបងប្អូនបង្កើតមកយូរហើយ គ្រានេះ**អ៊ុយកាយ**ក៏មានទុក្ខទោមនស្ស លុះនឹងលបរត់មកនៅជ្រកកោននឹងលោក ក៏ពុំអាចដឹងថាចិត្តលោកមានសេចក្តីអាណិតអាសូរករុណាដែរឬយ៉ាងម្តេច ទាល់គំនិតគិតមិនដាច់ស្រេច ព្រោះត្រូវទណ្ឌកម្មដោយអាជ្ញា**ជីវយី**វាយដំគ្រាំគ្រាជាទម្ងន់ណាស់ ចេះតែគិតមិនស្រេចស្រឡះជាយូរថ្ងៃណាស់មកហើយ ទើបវេលានេះក៏ប្រថុយប្រើខ្ញុំបាទឲ្យមកជំនួស មានទាំងសំបុត្រមួយច្បាប់មកផង ដើម្បីនឹងគំនាប់ជូនលោក។

**ចូឆូ**ឮដូច្នោះសួរថា សំបុត្រ**អ៊ុយកាយ**ដែលឲ្យមកនោះឥឡូវនៅឯណា? **ងាំតេក**ក៏ដកជូនទៅ**ចូឆូ** ៗទទួលហើយក៏ហែកស្រោមលាមើលឃើញសេចក្តីថា៖

“ខ្ញុំបាទ**អ៊ុយកាយ** សូមគំនាប់មកដល់មហាឧបរាជជ្រាប ព្រោះខ្ញុំបាទបាននៅធ្វើរាជការតាំងពី**ស៊ុនគៀន** និង**ស៊ុនសេក** រហូតមកដល់**ស៊ុនគួន** បីចៅហ្វាយនាយនេះហើយ មិនដែលបានទទួលនូវទុក្ខភ័យអន្តរាយអ្វីសោះ គុណរបស់**សៃស៊ុន**ជាទម្ងន់រកអ្វីប្រៀបពុំបាន ខ្ញុំបាទតាំងចិត្តនឹងគិតធ្វើរាជការតបស្នងសងគុណគេជានិច្ច ដែលលោកលើកកងទ័ពមកគ្រានេះ មានទាហានជាងរយម៉ឺន តម្រិះប្រាជ្ញាលោក

ក៏ជ្រៅទូលាយ ឧបមាដូចដុំសិលាដ៏ធំមិនរលំកម្រើក ឯទាហានក្នុងស្រុកកាំងតាំងក៏មានតិច ឧបមាដូចពងមាន់ដ៏តូច។

អ្នកដែលមានប្រាជ្ញាខ្លះ គេគិតថាស៊ូច្បាំងនឹងកងទ័ពលោកតទៅ ដែលគិតដូច្នេះ ដូចគេយកពងមាន់ទៅជល់នឹងថ្ម មុខជានឹងបែកខ្ទេចខ្ទីអស់ ទើបប្រឹក្សាព្រមគ្នាថា នឹងចេញមុខមកសុំចំណុំចុះចូលលោកយកសេចក្ដីសុខតទៅ នៅតែ**ជីវយី**មួយមានចិត្តអង់អាចមិនខ្លាចក្រែង គិតសុំទាហាន**ស៊ុនគួន**លើកមកធ្វើសង្គ្រាមនឹងលោក។ **ជីវយី**នោះជាមនុស្សភ្លើនចិត្តគិតតែតាំងខ្លួនហ៊ឺហា ថាមានប្រាជ្ញាស្មារតីនឹងរកអ្នកឯណាត្រឹមស្មើគ្មាន តាំងតែបង្គាប់បញ្ជាការសង្គ្រាមទៅតាមអំពើចិត្ត។ ខ្ញុំបាទគ្មានទោសអ្វីសោះ ក៏ចុះទណ្ឌកម្មវាយដំទាល់តែគ្រាំគ្រាជាទម្ងន់។ ឥឡូវខ្ញុំបាទនឹងធន់ទ្រាំតទៅទៀតពុំបាន ព្រោះមានសេចក្ដីក្ដៅរំជួលឈ្ងួលឆេះស្មើរប្រេះទ្រូងស្លាប់ បានឮកិត្តិស័ព្ទថា លោកមានចិត្តអាសូរករុណាដល់សត្វ ឧបមាដូចញាតិសន្ដានបងប្អូន មនុស្សទាំងឡាយតែងចូលមកជ្រកកោនពឹងបុណ្យលោកនៅជាសុខក្សេមក្សាន្ត បីដូចជាគ្រាប់ភ្លៀងធ្លាក់មកលើឋានមនុស្សលោក ជោកត្រជាក់ព្រៃព្រឹក្សាលតាវល្លិ៍ទាំងពួងដូច្នោះ។ គ្រានេះខ្លួនខ្ញុំបាទនឹងមកសុំចំណុះចុះចូលនៅនឹងលោកតទៅ តែថាគ្រានេះនឹងមកពុំទាន់បាន ព្រោះមានរបួសរលុះរលួយអស់ទាំងខ្លួនដោយ**ជីវយី**ឲ្យវាយ បើរបួសទាំងឡាយសះជាគ្រាន់បើថ្ងៃណា ខ្ញុំបាទនឹងនាំយកស្បៀងអាហារផ្ទុកទូកលបរត់មកចូលនឹងលោកឲ្យបាន កុំឲ្យលោកមានមន្ទិលសង្ស័យនឹងខ្ញុំបាទឡើយ”។

លុះមើលសំបុត្រចប់ហើយ **ចូឆូ**ខឹងណាស់ គិតត្រឡប់ទៅត្រឡប់មកប្រហែលបួនដប់សា ក៏ស្រែកគំហកហើយថា **ជីវយី**គិតកលឧបាយឲ្យ**អ៊ុយកាយ**ធ្វើជាសំបុត្រប្រើខ្លួនឲ្យកាន់មកនេះជាទីឡកចំអកឲ្យយើង ហើយបង្គាប់ទាហានឲ្យ

ចាប់ខ្លួន**ងាំតេក**ទៅសម្លាប់។ ខណៈនោះទាហានក៏ចូលទៅចាប់**ងាំតេក** ៗក៏មិនបានកោតញញើត ធ្វើអាការជាងើយមុខឡើងមើលទៅលើអាកាស ហើយអស់សំណើចនិយាយថា **អ៊ុយកាយ**មិនចេះមើលមនុស្សល្អអាក្រក់ ចេះឬល្ងង់សោះ។ **ចូឆូ**ឃើញដូច្នោះក៏សង្ស័យ ទើបហៅទាហានឲ្យយកខ្លួន**ងាំតេក**មកវិញ ហើយគំរាមសួរថា យើងដឹងថា **ជីវយី**និង**អ៊ុយកាយ**រួមគំនិតគ្នា ក្លែងធ្វើកលឧបាយមកបញ្ឆោតយើង ៗត្រូវតែសម្លាប់ខ្លួនចេញ ហេតុម្តេចបានជាថា **អ៊ុយកាយ**មិនមែនស្គាល់មនុស្សចេះល្ងង់ និងល្អ អាក្រក់ដូច្នោះ? **ងាំតេក**ឆ្លើយថា លោកកុំបាច់សួរជជីកឲ្យយូរការធ្វើអ្វី នឹងសម្លាប់ខ្ញុំបាទក៏សម្លាប់ឲ្យឆាប់ទៅចុះ។

**ចូឆូ**ថា ខ្លួនយើងរៀនពិជ័យសង្គ្រាមជំនាញមកតាំងពីក្មេងច្រើនណាស់ ឥឡូវយើងក៏ដឹងក្នុងការសឹកផ្សេងៗ បានជាធ្វើធំជាមេគេដល់ទីនេះ ដែលខ្លួនមករិះគិតកលឧបាយបញ្ឆោតយើង ៗក៏អាចដឹងលើសគំនិតខ្លួនទៅទៀត បើខ្លួននឹងគិតលេងដូច្នោះ ចូរទៅល្បួងបញ្ឆោតក្មេងគង្វាលគោទៅចុះ។ **ងាំតេក**ឆ្លើយថា លោកក៏មានតម្រិះប្រាជ្ញាជាចម្បងលើមនុស្សទាំងអស់ ដែល**អ៊ុយកាយ**ឲ្យសំបុត្រមកនោះ លោកពិគ្រោះឃើញថាជាយ៉ាងម្តេច បើថាមិនពិតនោះចូរលោកមានប្រសាសន៍ទៅចុះ។ **ចូឆូ**ថា បើយើងនឹងមិនប្រាប់វេលានេះឲ្យអស់ ហើយស្រាប់តែសម្លាប់ខ្លួនជាមុនទៅ ខ្លួនក៏នៅគិតតូចចិត្តថាយើងមិនបានពន្យល់បំភ្លឺឲ្យឃើញទោសកំហុស ឯសំបុត្រដែលឲ្យមកនោះ បើ**អ៊ុយកាយ**និងខ្លួនមានចិត្តស្ម័គ្រមកសុំនៅនឹងយើងដោយសុចរិតមែនៗ គង់មានកំណត់ពេលយប់ថ្ងៃខែឆ្នាំ ដែលនឹងនាំគ្រួសារនូវសារពើទ្រព្យជាតឹកតាង នេះមិនឃើញមានថាផងសោះ បានជាយើងយល់ថា **អ៊ុយកាយ**និងខ្លួននោះបញ្ឆោតយើង។ **ងាំតេក**ឮដូច្នោះ ក៏អស់សំណើចម្តងទៀត ហើយថា ដែលលោកអួតខ្លួនលោកថា បានចេះដឹងតម្រាពិជ័យសង្គ្រាមស្ទាត់ជំនាញនោះ ខ្ញុំបាទក៏ឃើញថា

លោកចេះតែមាត់ខាងក្រៅទេ ខ្ញុំបាទនឹកស្ដាយណាស់ ព្រោះលោកបានធ្វើជាមហាឧបរាជហើយ នៅមិនដឹងទីបង់ទីបាន ខ្ញុំបាទនឹងជួយដាស់តឿនស្មារតីលោកទុក សុំឲ្យលោកលើកទ័ពត្រឡប់ទៅវិញ បើលោកមិនស្ដាប់ពាក្យខ្ញុំបាទទេ **ជីវយី**នឹងចាប់ខ្លួនលោកបានជាប្រាកដ ឯខ្លួនខ្ញុំបាទជាមនុស្សឆោតខ្លៅ ទោះបីនឹងស្លាប់ទៅដោយអាជ្ញារបស់លោក ក៏គ្មានល្បីឈ្មោះជាអ្វីប៉ុន្មាន។ **ចូឆ្វ**តបថា ហេតុម្ដេចបានជាខ្លួនមកមើលងាយយើងដូច្នេះ? **ង៉ាំតេក**ថា លោកមិនចេះគិតអ្វីសោះបានជាមិនដឹងកិច្ចការល្អិតល្អន់ក្នុងកិច្ចកលសឹកសង្គ្រាមទាំងពួង គឺមិនដឹងរបៀបរៀចនិងត្រង់ពិត នឹងគ្នេរចិត្តគំនិតមនុស្សថាជាពិតឬត្រង់។

**ចូឆ្វ**សួរថា ដែលថាយើងមិនដឹងការនោះយ៉ាងម្ដេច? **ង៉ាំតេក**ថា លោកជាទីមហាឧបរាជ មនុស្សល្អមានតម្រិះប្រាជ្ញាមករកលោកក៏មិនបានរាប់អានស្រឡាញ់ ខ្ញុំបាទនឹងថាតទៅធ្វើអ្វីឲ្យព្រួយការ ព្រោះខ្លួនខ្ញុំបាទក៏ត្រូវស្លាប់ទៅហើយ។ **ចូឆ្វ**តបថា ដែលខ្លួនអ្នកថាមានតម្រិះប្រាជ្ញានោះ ចូរនិយាយឲ្យអស់សេចក្ដីដើម្បីនឹងឲ្យឃើញច្បាស់យ៉ាងម្ដេច យើងនឹងបានស្រឡាញ់រាប់អានខ្លួនតទៅ? **ង៉ាំតេក**ថា លោកមិនជ្រាបទេឬ ធម្មតាមនុស្សដែលនឹងរត់ចោលចៅហ្វាយនាយទៅនៅទីឯទៀត យកអ្នកដទៃជាទីពឹងនោះ នរណានឹងចេះទៅកំណត់ពេលថ្ងៃខែឆ្នាំបាន? គ្មានទំនៀមទម្លាប់សោះឡើយ បើសិនណានឹងឲ្យកំណត់ថ្ងៃឬយប់នឹងមក ក៏ក្រែងគ្មានចន្លោះឱកាស បើថាទៅហើយលុះដល់កំហិតសញ្ញាត្រឡប់ជាមិនបានមកវិញ អ្នកដែលចាំមើលផ្លូវនោះនឹងមិនខាតពេលវេលាទេឬ? សូម្បីទាំងអ្នកដែលទទួលសំបុត្រចុតហ្មាយសោត ក៏គង់ត្រឡប់ទៅជាខុសអស់ទៅ។ **ចូឆ្វ**ឮដូច្នោះក៏យល់ឃើញត្រូវ រសាយសេចក្ដីខឹងបន្តិចទៅវិញ ទើបក្រោកទៅដឹកដៃ**ង៉ាំតេក**ឲ្យចូលទៅអង្គុយទីសមគួរហើយសូមខមាទោសថា ដែលយើងបានប្រមាថភ្លាំងភ្លាត់ទៅហើយនោះ អ្នកកុំបី

គិតតូចចិត្តខឹងនឹងយើងឡើយ អត់ទោសយើងចុះ។ **ងាំតេក**ថា ឯចិត្ត**អ៊ុយកាយ**និងខ្ញុំបាទនោះឧបមាដូចទារកស្រេកទឹកដោះ ឯខ្លួនលោកដូចជាមាតា **អ៊ុយកាយ**និងខ្ញុំបាទដែលតាំងចិត្តគិតប្រាថ្នាមកជ្រកនៅនឹងលោកនោះ ដូចទារកមានចិត្តអំណរនឹងចង់បៅដោះមាតាដូចម្ដេចមិញ ក៏ឧបមាដូច្នោះ **អ៊ុយកាយ**និងខ្ញុំបាទនោះនឹងបានគិតជាកលឧបាយដូចម្ដេចក៏ទេ។

**ចូឆ្ង**ឮដូច្នោះក៏អស់សង្ស័យហើយថា ដែល**អ៊ុយកាយ**និងអ្នកឯងបានតាំងចិត្តសុចរិតមកជ្រកនៅធ្វើរាជការនឹងយើងនោះ បើបានសម្រេចការសឹកវេលាណា យើងនឹងទំនុកបម្រុងអ្នកទាំងពីរជាធំជាងទាហានទាំងពួង។ **ងាំតេក**ថា ឯខ្លួនខ្ញុំបាទដែលរិះគិតប្រុងនឹងមកជ្រកនៅនឹងលោកនោះ មិនមែនប្រាថ្នាតែត្រឹមយសសក្តិប៉ុណ្ណោះទេ ព្រោះឃើញថា ការផែនដីសព្វថ្ងៃនេះនឹងរៀវរោយអស់ហើយ ហាក់បានលោកមកទំនុកបម្រុងអាណាប្រជានុរាស្ត្រ ទើបបានស្ថិតនៅដល់ប៉ុណ្ណោះ ខ្ញុំបាទតាំងចិត្តរិះគិតថា នឹងមកប្រាថ្នាតែជ្រកកោនផ្ញើខ្លួននឹងលោកឲ្យបានសេចក្ដីសុខប៉ុណ្ណោះទេ។

**ចូឆ្ង**ឮដូច្នោះក៏សោមនស្សត្រេកអរ ហៅ**ងាំតេក**ឲ្យចូលបរិភោគអាហារជាមួយ។ ទទួលមានមនុស្សបម្រើស្និទ្ធចូលមកខ្សឹបប្រាប់**ចូឆ្ង**ថា ឥឡូវ**ឈួតុង, ឈួហោ**ប្រើឲ្យនាំព័ត៌មានជាអាថ៌កំបាំងមកដល់លោក ហើយយកសំបុត្រហុចទៅឲ្យ**ចូឆ្ង** ៗមើលមិនឲ្យ**ងាំតេក**ឃើញ។ ក្នុងសំបុត្រនោះសេចក្ដីថា **ឈួតុង, ឈួហោ**សូមប្ដឹងពីកិច្ចការកងទ័ព**ជីវយី**មកជូនមហាឧបរាជជ្រាប ព្រោះ**ជីវយី**ធ្វើទោស**អ៊ុយកាយ**វាយដំមានរបួសជាដំណំគ្រាំគ្រា។ **ចូឆ្ង**ឃើញដូច្នោះក៏គិតថា សមប្រកបនឹងពាក្យ**ងាំតេក**និយាយ **ចូឆ្ង**ក៏រឹតតែរួសរាយរីកមុខជ្រះថ្លា។ **ងាំតេក**ឃើញកិរិយា**ចូឆ្ង**ត្រេកអរសប្បាយ ក៏គិតឃើញថា សំបុត្រនេះប្រហែលជារបស់**ឈួតុង, ឈួហោ**បកប្ដឹងមក

អំពី**ជីវយី**ធ្វើទោស**អ៊ុយកាយ**ជាប្រាកដ ឃើញថាសំបុត្រនេះត្រូវនឹងពាក្យយើង ការទាំងពួងដែលគិតទុកមុខជានឹងសម្រេចមិនខាន។

**ចូឆ្វូ**ក៏និយាយនឹង**ឃាំតេក**ថា ចូរអ្នកវិលត្រឡប់ទៅប្រាប់**អ៊ុយកាយ**ឲ្យរំសាយទុក្ខក្តៅក្រហាយចុះ ហើយឲ្យ**អ៊ុយកាយ**សប្បាយចិត្តខំគិតរកពេលដែលនឹងលបរត់មកនោះ ជាយប់ឬថ្ងៃណាបានហើយ ឲ្យដំណឹងមកយើង ៗនឹងឲ្យពួកទាហាននាំគ្នាទៅទទួល។ **ឃាំតេក**ថ្លែងតបថា ខ្ញុំបាទគិតនឹងនៅក្នុងទីនេះមិនចង់ត្រឡប់ទៅវិញទេ ព្រោះការដែលទៅមកនោះមានសេចក្តីលំបាកណាស់ បើទៅមកញឹកញយដូចគេនាំឲ្យ**ជីវយី**ដឹង ការទាំងពួងក៏នឹងបែកទៅជាអសារឥតការ។ សុំលោកប្រើទាហានក្នុងកងទ័ពនេះ លបទៅយកកំណត់**អ៊ុយកាយ**វិញស្រួលល្អជាង។

**ចូឆ្វូ**ថា ទាហានរបស់យើងច្រើនតែពួកអ្នកលើ បើនឹងប្រើទៅមកក្រែង**ជីវយី**ដឹង ព្រោះឃើញចម្លែកនឹងបែកការ បើអ្នកឯងទៅវិញនឹងបានជាការស្រួល។ **ឃាំតេក**ធ្វើបែបជាព្រងើយកន្តើយឲ្យយូរហើយថា បើលោកនឹងឲ្យខ្ញុំទៅក៏ត្រូវប្រញាប់កុំឲ្យបង្អង់។ **ចូឆ្វូ**ឮដូច្នោះក៏ត្រេកអរណាស់ ទើបចាត់យកព្រែយ៉ាងល្អ និងមាសប្រាក់ឲ្យជារង្វាន់**ឃាំតេក** ៗក៏ថា ដែលមហាឧបរាជឲ្យបំណាច់រង្វាន់ខ្ញុំបាទទាំងអស់នេះ ព្រះគុណជាទម្ងន់ខ្លាំងណាស់ លុះខ្ញុំបាទនឹងទទួលយកទៅឥឡូវនេះក៏ឃើញថាមិនស្រួល ព្រោះការជាប្រញាប់នឹងរៀបត្រឡប់វិលមកវិញ ក្រែងមនុស្សទាំងពួងឃើញនឹងសង្ស័យ។ **ឃាំតេក**ក៏បង្វិលរបស់ទាំងនោះឲ្យ**ចូឆ្វូ**វិញ ហើយក៏លាចុះទូកទៅរក**អ៊ុយកាយ**ក្នុងបន្ទាយ**ជីវយី**។ **ឃាំតេក**ក៏និយាយរ៉ាយរ៉ាប់រឿងដែលបានដោះស្រាយនឹង**ចូឆ្វូ**នោះឲ្យ**អ៊ុយកាយ**ស្តាប់គ្រប់ប្រការ។ **អ៊ុយកាយ**ឮដូច្នោះក៏សោមនស្សណាស់ និយាយនឹង**ឃាំតេក**ថា គ្រានេះបើកុំតែបានអ្នកមកជួយជាធុរៈ ខ្ញុំក៏បានចំណេញតែឈឺសាច់ទៅទទេ។ **ឃាំតេក**ថា ខ្ញុំនឹងលាទៅបន្ទាយ**កាំឡេង**មើល

កិរិយា**ឈ្លូតុង, ឈ្លូហោ** តើនឹងរិះគិតប្រការដូចម្ដេចខ្លះ? **អ៊ុយកាយ**យល់ឃើញផង។ **ងាំតេក**ក៏ចុះទៅឯបន្ទាយ**កាំឡេង** ហើយក្លែងនិយាយនឹង**កាំឡេង**ប្រាថ្នានឹងឲ្យ**ឈ្លូតុង, ឈ្លូហោ**ដឹងថា កាល**ជីវយី**ធ្វើទោសទណ្ឌកម្ម**អ៊ុយកាយ**នោះគឺមិនមានសេចក្ដីខុសអ្វីសោះ អស់លោកមុខមន្ត្រីឃើញសេចក្ដីមិនគាប់ក៏បបួលគ្នាគំនាប់សុំទោស **ជីវយី**ត្រឡប់ខឹងស្រែកគំហកឲ្យលោកវិញ ហើយនិយាយជាពាក្យទ្រគោះមើលងាយឲ្យលោកមានសេចក្ដីឈឺចិត្តថ្លើមថែមទៀត ខ្ញុំបាទក៏នឹកខឹងណាស់ទៅដែរ។

**កាំឡេង**ឮដូច្នោះក៏អស់សំណើច មិនទាន់នឹងឆ្លើយថាប្រការម្ដេច ទទួល**ឈ្លូតុង, ឈ្លូហោ**ដើរចូលមក។ **ងាំតេក**ក៏មិចភ្នែកឲ្យ**កាំឡេង**ដឹងកល **ងាំតេក**ក៏ធ្វើជានិយាយថា **ជីវយី**នោះជាមនុស្សអួតចេះ អួតដឹង និងអួតថា ខ្លួនមានប្រាជ្ញាមិនមានអ្នកឯណាស្មើ ហើយក៏មិនបានស្រឡាញ់រាប់អានយើងជាមនុស្សខ្ញុំរាជការចាស់ រមែងពោលពាក្យទ្រគោះមើលងាយឲ្យយើងបានសេចក្ដីអៀនខ្មាសដល់មន្ត្រីទាំងពួង ហើយ**កាំឡេង**ក៏ធ្វើជាសង្កៀតធ្មេញថា មិនប៉ុន្មានទេ។ **ងាំតេក**ក្លែងធ្វើជាខ្សឹបផ្ទាប់ត្រចៀក**កាំឡេង**បីដូចនឹងហាមប្រាមថាកុំឲ្យនិយាយ ក្រែងសេចក្ដីនោះនឹងលាន់ឮរន្ទឺទៅ។ **កាំឡេង**ក៏ធ្វើជាងក់ក្បាលទទួល ហើយសង្កៀតធ្មេញ។ **ឈ្លូតុង, ឈ្លូហោ**ឃើញកិរិយា**ងាំតេក**ចេញមកដូច្នោះក៏គិតថា ប្រហែលអ្នកទាំងនេះប្រែចិត្តគិតដោះចេញពី**ជីវយី**ដោយកំហឹងខឹងគុំគួនហើយបានជានិយាយគ្នាយ៉ាងនេះ ក៏ក្លែងល្បួងសួរថា ខ្ញុំឃើញលោកទាំងពីរមិនសប្បាយដោយទុក្ខធុរៈក្នុងចិត្តយ៉ាងម្ដេចខ្លះ? **ងាំតេក**ឆ្លើយថា យើងមានសេចក្ដីខឹងដុះនៅក្នុងចិត្ត ដែលអ្នកនឹងមកចង់ដឹងនោះមិនត្រូវទេ។ **ឈ្លូតុង, ឈ្លូហោ**ថា យើងដឹងអស់ហើយថាលោកទាំងពីរនាក់នេះគិតស្ម័គ្រទៅនៅនឹង**ចូអ្វូ**ជាមហាឧបរាជ តែគិតមិនសមតាមប្រាថ្នាទើបមិនសប្បាយ យើងនឹងនាំរឿងនេះទៅជម្រាប**ជីវយី**ឲ្យជ្រាប។

**ងាំតេក**ឮដូច្នោះក៏ធ្វើជាតក់ស្លុតភ័យស្លក់មុខ សម្លឹងមើលមុខ**កាំឡេង**ធ្មឹងនៅនោះ **កាំឡេង**ក៏ធ្វើជាខឹងហូតគ្រប៉ីចេញហើយថា ការរបស់យើងគិតទុកជាអាថ៌កំបាំង ហេតុម្តេចមកនាំឲ្យបែកសាយសុសទៅដូច្នេះ? បើនឹងសំងំទុកឲ្យយូរ វាក៏នឹងយកព័ត៌មានទៅប្រាប់**ជីវយី**មែន យើងក៏នឹងដល់នូវសេចក្តីស្លាប់ ហេតុនេះ ត្រូវតែយើងសម្លាប់វាចេញសិន ហើយក៏ធ្វើជាស្ទុះទៅគំរាមនឹងកាប់**ឈ្មួតុង, ឈ្មួហោ** ៗភ័យតក់ស្លុតក៏ស្ទុះរត់ចេញ ហើយថាលោកកុំអាលខឹង ខ្ញុំនឹងជម្រាបការពិតឲ្យជ្រាប។ **កាំឡេង**ថា សេចក្តីពិតរបស់អ្នកទាំងពីរដូចម្តេចខ្លះ ឲ្យឆ្លើយមកឆាប់ បើមិនឆ្លើយទេ យើងនឹងសម្លាប់ឥឡូវនេះ។ **ឈ្មួតុង, ឈ្មួហោ**ថា ដែលខ្ញុំស្ម័គ្រមកនៅនឹង**ជីវយី**នេះ មិនមែននឹងតាំងចិត្តមកនៅដោយសុចរិតទេ មហាឧបរាជប្រើកលឧបាយឲ្យធ្វើជារត់មកចុះចូលនៅនឹង**ជីវយី** ប្រាថ្នានឹងយកការណ៍រាក់ជ្រៅនិងធ្ងន់ស្រាលក្នុងកងទ័ព**ជីវយី** លបទៅប្រាប់ខាងនោះឲ្យដឹងនឹងគិតការតទៅ បើលោកនឹងស្ម័គ្រទៅនៅនឹងមហាឧបរាជមែន យើងខ្ញុំនឹងនាំទៅ។ **កាំឡេង**សួរថា ដែលអ្នកនិយាយនេះជាសេចក្តីពិតត្រង់ឬ? **ឈ្មួតុង, ឈ្មួហោ**ក៏ទទួលស្បថស្បែថា មែនណាស់។ **កាំឡេង, ងាំតេក**ធ្វើជាទទួលអំណរក្រោកឈរគំនាប់**ឈ្មួតុង, ឈ្មួហោ** ហើយឱបរឹតជិតខ្លួនទៅវិញទៅមក ហើយថា ដែលអ្នកទាំងពីរនិយាយនេះ ឧបមាដូចទេព្តាមកបញ្ចូលចិត្តឲ្យជួយយើង គ្រានេះយើងក៏អស់កំហឹងខឹងនឹងអ្នកហើយ ឯសេចក្តីដែល**ជីវយី**ធ្វើទោស**អ៊ុយកាយ** យើងក៏ឲ្យលបទៅជម្រាបមហាឧបរាជហើយ។ **ងាំតេក**ថា ខ្លួនខ្ញុំឯងជាអ្នកបានទៅដល់មហាឧបរាជ ៗឲ្យខ្ញុំវិលត្រឡប់មកឲ្យកំណត់ពេលយប់ថ្ងៃដែល**អ៊ុយកាយ**នឹងចូលទៅនៅខាងនោះ ឥឡូវ**អ៊ុយកាយ**ឲ្យខ្ញុំមកបបួល**កាំឡេង**។

**កាំឡេង**, **ងាំតេក**ក៏បបួល**ឈ្មួតុង**, **ឈ្មួហោ**បរិភោគអាហារ ទាំងអស់គ្នាក៏ប្រឹក្សាទៅវិញទៅមក។ លុះបរិភោគរួចហើយ **ឈ្មួតុង**, **ឈ្មួហោ**ក៏លាទៅកាន់ទីសំណាក់វិញ ហើយតែងជាសំបុត្រសម្ងាត់ប្រើមនុស្សស្និទ្ធលបចេញទៅប្រាប់**ចូឆូ**ថា ខ្ញុំបាទ**ឈ្មួតុង**, **ឈ្មួហោ**ដែលទៅនៅក្នុងកងទ័ព**ជីវយី** បានបញ្ចុះបញ្ចូល**កាំឡេង**ដែលជាមេទ័ពស្រួចមានចិត្តកំហឹង**ជីវយី**ផ្សេងៗ **កាំឡេង**ទទួលធ្វើជាកលសឹកខាងក្នុង បើមហាឧបរាជនឹងលើកកងទ័ពទៅច្បាំងនឹង**ជីវយី**វេលាណា **កាំឡេង**ក៏នឹងលើកទាហានចេញវាយខ្នប់**ជីវយី**។ ឯ**ងាំតេក**ក៏តែងសំបុត្រប្រើទាហានយកទៅដល់**ចូឆូ**សេចក្ដីថា ខ្ញុំបាទ**ងាំតេក** និង**អ៊ុយកាយ**នឹងចាត់ចែងទូកផ្ទុកស្បៀងអាហារចូលមកដល់បន្ទាយមហាឧបរាជឲ្យចាំមើលសម្គាល់ បើឃើញទង់ក្អែបខៀវដោតមកនឹងក្បាលទូក គឺជាទូកខ្ញុំបាទហើយ សូមឲ្យលោកចាត់ទាហានទៅទទួលចុះ។

ឯ**ចូឆូ**ដឹងតាមសំបុត្រទាំងពីរច្បាប់ដូច្នោះ ក៏ប្រឹក្សានឹងមុខមន្ត្រីទាំងពួងថា គ្រានេះ**ឈ្មួតុង**, **ឈ្មួហោ**បកសំបុត្រមកដល់យើងថា **កាំឡេង**ជាមេទ័ពស្រួច នឹងទទួលជាកលសឹកក្នុងទ័ព**ជីវយី** មួយទៀត**អ៊ុយកាយ**ឲ្យ**ងាំតេក**មកដល់យើងថា **អ៊ុយកាយ**នឹងមកចុះចូលនៅនឹងយើង។ ឥឡូវ**ងាំតេក**ក៏ឲ្យសំបុត្រមកថា **អ៊ុយកាយ** និង**ងាំតេក**កំពុងរៀបទូកផ្ទុកស្បៀងអាហារ ដោតទង់ក្អែបខៀវជាសម្គាល់នៅក្បាលទូកចេញមក ជាសម្គាល់ឲ្យយើងចាំទទួល តើសេចក្ដីទាំងពីរប្រការនេះយ៉ាងម្ដេច? យើងនៅមន្ទិលសង្ស័យណាស់ បើអ្នកឯណាដែលមានតម្រិះប្រាជ្ញាអាចហ៊ានបន្លំចូលទៅស្ដាប់ដំណឹងមើល ជារៀចឬត្រង់ក្នុងកងទ័ព**ជីវយី**បាន។ **ជៀវកាន**ឆ្លើយថា កាលមុនខ្ញុំបាទបានទទួលអាសាទៅនិយាយបញ្ចុះបញ្ចូល**ជីវយី**ក៏មិនបានសម្រេចដូចប្រាថ្នា ដែលលោកមិនយកទោសនោះក៏ល្អហើយ តែខ្ញុំបាទនៅមានវិតក្កព្រួយក្នុង

ចិត្តខ្លាំងណាស់ គ្រានេះខ្ញុំបាទសុំយកអាសាកែខ្លួនទៅស៊ើបយកការណ៍មកឲ្យបានច្បាស់។

**ចូឆ្វ**ឮដូច្នោះត្រេកអរណាស់ ទើបចាត់ចែងទូកតូចរហ័សឲ្យ**ជៀវកាន** ៗក៏ចុះទូកនោះទៅដល់ក្នុងកងទ័ព**ជីវយី** ហើយប្រាប់ទាហានថា យើងសុំចូលទៅជួបនឹង**ជីវយី**មេទ័ព។ ទាហានក៏ចូលទៅប្រាប់សព្វសេចក្ដី ឥឡូវ**ជៀវកាន**ចូលមករកលោកទៀត។ **ជីវយី**ឮដូច្នោះក៏ត្រេកអរ តែគិតក្នុងចិត្តថា ដែល**ជៀវកាន**មានការមកម្ដងទៀតឃើញថា ការរបស់យើងដែលគិតធ្វើមកនោះក៏នឹងបានសម្រេច ព្រោះ**ជៀវកាន**នេះឯង។ **ជីវយី**ក៏ប្រើទាហានត្រឡប់ទៅប្រាប់**ជៀវកាន**ថា យើងនៅដេក។ ទាហានក៏ទៅប្រាប់**ជៀវកាន**តាមពាក្យដែល**ជីវយី**បង្គាប់។ **ជៀវកាន**ក៏ចេញទៅនៅក្រៅបន្ទាយ។

ក្នុងខណៈកងទ័ព**ចូឆ្វ** លើកចុះមកដល់ដែនស្រុកកេងជីវនោះ **បាំងថង**ខ្លាចទាហាន**ចូឆ្វ**ធ្វើអន្តរាយ ក៏រត់ចេញទៅនៅក្នុងស្រុកកាំងតាំង។ **ឡោសុក**បានទៅសួរ**បាំងថង**ថា នឹងរិះគិតតាំងច្បាំងនឹង**ចូឆ្វ**យ៉ាងម្ដេច ទើបនឹងបានជ័យជម្នះ**ចូឆ្វ**? **បាំងថង**ថា ឲ្យយកច្រវាក់លាមចាក់សោទូកចម្បាំង**ចូឆ្វ**ភ្ជាប់គ្នា ហើយយកពួរចងទូកឲ្យនឹងគ្រប់ទូក ហើយឲ្យយកភ្លើងដុតបំផ្លាញទើប**ចូឆ្វ**នឹងបែក។ សេចក្ដីទាំងនេះ**ឡោសុក**ក៏បានទៅប្រាប់**ជីវយី** ៗក៏សរសើរថា **បាំងថង**មានតម្រិះប្រាជ្ញា **ជីវយី**ក៏រាប់អាន**បាំងថង**ថាចេះដឹងយ៉ាងវិសេស លុះ**ជីវយី**លើកកងទ័ពមកគ្រានេះ **បាំងថង**ក៏រៀបចំចងទូកនៅជាមួយនឹង**ជីវយី**។

កាល**ជៀវកាន**ទៅរក**ជីវយី**នោះ **ជីវយី**ក៏ប្រើទាហានទៅប្រាប់**ជៀវកាន**ថា **ជីវយី**នៅដេកមិនទាន់ភ្ញាក់ **ជៀវកាន**ក៏នៅចាំខាងក្រៅបន្ទាយ។ **ជីវយី**ក៏ឲ្យហៅ**ឡោសុក**មកជួប ហើយបង្គាប់ថា ឥឡូវ**ជៀវកាន**មកបញ្ឆោតទៀតហើយ គឺមក

មើលហេតុភេទធូន់ស្រាលក្នុងកងទ័ពយើង ៗនឹងក្លែងឲ្យយកខ្លួន**ជៀវកាន**ទៅបង្ខាំងទុក ចូរអ្នកទៅនិយាយអង្វរ**បាំងថង**ឲ្យនិយាយនឹង**ជៀវកាន**ជាមេត្រីគ្នា បើឃើញ**ជៀវកាន**នាំ**បាំងថង**រត់ទៅចូល**ចូឆូ**ក្នុងបន្ទាយ ឲ្យ**បាំងថង**គិតឧបាយបញ្ឆោត**ចូឆូ**ឲ្យយកច្រវាក់វាយចងភ្ជាប់ទូកចាក់សោឲ្យជាប់គ្នាទាំងអស់ យើងនឹងបានយកភ្លើងដុតឲ្យឆេះទូកក្នុងកងទ័ពឲ្យអស់កុំឲ្យសល់។ **ឡោសុក**ក៏ចេញទៅទទួល**ជៀវកាន**។

**ជៀវកាន**ក៏គិតឃើញថា ចិត្ត**ជីវយី**មិនបានជាប្រក្រតីដូចពីដើម ទើបឲ្យទាហានដែលជូនទូកមកនោះ នាំទូកទៅចតផុតកងទ័ព**ជីវយី** ហើយ**ជៀវកាន**ក៏ដើរចូលទៅក្នុងបន្ទាយ ឃើញមុខ**ជីវយី**បែបក្រញ៉ូវ។ ឯ**ជីវយី**ក៏ធ្វើជាខឹងហើយនិយាយនឹង**ជៀវកាន**ថា អ្នកឯងគ្មានគិតដល់ផ្លូវមេត្រីរាប់អាននឹងយើងសោះ ហ៊ានមើលងាយយើង។ **ជៀវកាន**ឮដូច្នោះក៏អស់សំណើច ហើយតបថា ខ្លួនខ្ញុំនិងលោកប្រាកដជាភឿនសម្លាញ់គ្នាមកពីក្មេង គ្រានេះខ្ញុំនៅចាំចិត្តស្រឡាញ់ពេញពោះទុកដូចប្អូនបង្កើត បានជាឧស្សាហ៍ទៅមកបានសួរសុខទុក្ខ ដែលលោកថាខ្ញុំបង្អាប់មើលងាយប្រមាថនោះគឺយ៉ាងម្ដេច? **ជីវយី**ថា កាលអ្នកឯងមកពីថ្ងៃមុន ខ្ញុំក៏ដឹងន័យថា **ចូឆូ**ឲ្យមកបញ្ចុះបញ្ចូលខ្ញុំ ឯគំនិតរបស់ខ្ញុំនេះ ក្រែងតែទឹកក្នុងមហាសមុទ្ររីងស្ងួត ទើបខ្ញុំព្រមទៅចុះចូល**ចូឆូ** តែថាខ្ញុំគិតអាណិតអ្នកព្រោះជាភឿនសម្លាញ់ បានជាខ្ញុំហាមប្រាមអ្នកមិនឲ្យអ្នកយកឈ្មោះ**ចូឆូ**មកនិយាយ ប្រយោជន៍នឹងកាត់បំបិទផ្លូវសេចក្ដីដែលអ្នកប្រុងនឹងនិយាយបញ្ចុះបញ្ចូលខ្ញុំនោះ ខ្ញុំក៏បបួលអ្នកផឹកស្រាហើយនាំគ្នាចូលទៅដេកលើគ្រែជាមួយ កាលដែលនឹងទៅក៏មិនបានលាខ្ញុំសោះ លបរត់ទៅក្នុងពេលអាធ្រាត្រស្ងាត់ ហើយយកសំបុត្រនោះទៅឲ្យ**ចូឆូ** ៗក៏សម្លាប់**ឈួម៉**, **ទៀវអ៊ុន**ខូចអសារ ការធំរបស់ខ្ញុំដែលគិតគ្នាទុកក៏ខូចទាំងអស់ព្រោះតែខ្លួនអ្នកមួយ។ ឥឡូវខ្លួនគិតមកនឹងធ្វើប្រទូសរ៉ាយយើងទៀតឬ? បើយើងគិតមិនដល់ថាខ្លួនជាភឿនសម្លាញ់

មកពីដើម ក៏នឹងឲ្យកាត់ក្បាលផ្គាលទុកនៅមុខបន្ទាយ បើនឹងបណ្ដោយទៅដោយយោគយល់ ខ្លួនក៏នាំយកសេចក្ដីទៅប្ដឹងផ្ដល់ឲ្យ**ចូឆូ**ដឹងក្នុងកងទ័ពយើងទាំងអស់ យើងនឹងធ្វើសឹកតទៅក៏គ្មានចន្លោះនឹងយកការណ៍ឲ្យបាន។ ហើយបង្គាប់ទាហានឲ្យយកខ្លួន**ជៀវកាន**ទៅឃុំទុកប្រាប់ថា បើកាលណាវាយទ័ព**ចូឆូ**បែក ទើបបើកលែងខ្លួនកាលណោះ។ **ជីវយី**ក៏ដើរចូលទៅខាងក្នុង។ ឯទាហានពីរនាក់ក៏នាំខ្លួន**ជៀវកាន**ទៅឃុំទុកក្នុងវត្តលើកំពូលភ្នំ។

ខណៈនោះ**ជៀវកាន**ក៏មានទុក្ខព្រួយស៊ីមិនបានដេកមិនលក់ លុះដល់កណ្ដាលយប់ស្ងាត់ឃើញខែភ្លឺ ក៏ដើរចេញទៅលេងខាងក្រោយវត្តប្រាថ្នានឹងឲ្យស្វាងទុក្ខព្រួយបន្តិច ទទួលឮសំឡេងមនុស្សក្នុងខ្ទមប្របនោះ ដេកមើលក្បួនពិជ័យសង្គ្រាមដ៏ជ្រៅទូលាយ ហើយអធិប្បាយចេញទៅជាច្រើន ខ។ **ជៀវកាន**ផ្ទៀងស្ដាប់ក៏ចាប់ចិត្តគិតថា អ្នកមើលតម្រានេះមានតម្រិះប្រាជ្ញាច្រើនណាស់ ក៏ដើរចូលទៅគោះទ្វារប្រាថ្នានឹងចូលទៅសន្ទនាផង។ ឯ**បាំងថង**បានឮសូរគោះទ្វារក៏មិ្ទម្នាសួរថា នរណាមានការអ្វី? **ជៀវកាន**ឆ្លើយថា ខ្ញុំឈ្មោះ**ជៀវកាន**មានការមករកអ្នក។ **បាំងថង**ក៏បើកទ្វារហៅឲ្យចូលទៅ។ **ជៀវកាន**ឱនគំនាប់ហើយសួរថា អ្នកឈ្មោះអ្វី? **បាំងថង**ឆ្លើយថា ខ្ញុំឈ្មោះ**បាំងថង**។ **ជៀវកាន**សួរថា អ្នកនេះឬដែលគេហៅថាអាចារ្យ “ហងស៊ូ” នោះ? **បាំងថង**ថា ខ្ញុំនេះឯង។ **ជៀវកាន**ថា មនុស្សច្រើនគ្នាឮល្បីកេរ្តិ៍ឈ្មោះអ្នកថាមានតម្រិះប្រាជ្ញាច្រើនណាស់ ហេតុម្ដេចអ្នកមកនៅទីមិនសមគួរដូច្នេះ? **បាំងថង**ថា **ជីវយី**នោះជាមនុស្សកាន់ខ្លួនអួតចេះអួតដឹងនឹងរកនរណាស្មើគ្មាន ហើយមើលងាយប្រមាថមនុស្សទាំងពួង បានជាខ្ញុំលបគេចមកលាក់ខ្លួនពួនក្នុងទីនេះ ប្រាថ្នាឲ្យបានសេចក្ដីសប្បាយ។

**ជៀវកាន**ថា ខ្លួនអ្នកមានតម្រិះប្រាជ្ញា ហើយចំណានក្នុងពិជ័យសង្គ្រាម ដែលមកស្វែងនៅដូច្នេះ ក៏ដូចជាអប្បឥតប្រាជ្ញាសោះ ឯចិត្ត**ចូវឆ្វ**នោះស្រឡាញ់អ្នកមានតម្រិះប្រាជ្ញាណាស់ នឹងចង់សន្ទនាផង ប្រសិនបើអ្នកទៅនៅនឹង**ចូវឆ្វ**ហើយគង់នឹងបានសេចក្តីសុខ។ ខ្ញុំនឹងនាំអ្នកយកទៅ ហើយនឹងស្នើសេចក្តីគាប់ប្រសើរឲ្យអ្នកទៀត។ **បាំងថង**ក្លែងតបថា ខ្ញុំក៏គិតនៅជាដរាបថា នឹងគេចវេះចេញទៅឲ្យផុតដែនស្រុកកាំងតាំង តែមិនមាននរណានឹងជួយណែនាំទៅបាន ឥឡូវបើអ្នកមកទទួលធុរៈពិតហើយ ខ្ញុំក៏ទទួលអំណរជាទីបំផុត បើនឹងបង្អង់ឲ្យយូរខ្លាចក្រែង**ជីវយី**ដឹងការណ៍នឹងធ្វើឲ្យអន្តរាយយើងទាំងពីរមានសេចក្តីលំបាក។ **ជៀវកាន**ថា អ្នកកុំព្រួយឡើយ ហើយក៏នាំ**បាំងថង**លបរត់ចេញទៅចុះទូក ស្រូតចែវទៅដល់បន្ទាយ**ចូវឆ្វ**។ **ជៀវកាន**ក៏ចូលទៅថ្លែងព័ត៌មានប្រាប់**ចូវឆ្វ**ដែលបានតបឆ្លើយគ្នានឹង**ជីវយី** ហើយនិយាយពីបានបញ្ចុះបញ្ចូល**បាំងថង**នាំមកផងនោះឲ្យ**ចូវឆ្វ**ស្តាប់។

**ចូវឆ្វ**ឮហើយក៏ពេញអំណរណាស់ ទើបចេញមកគំនាប់ទទួល**បាំងថង**នាំចូលទៅអង្គុយទីសមគួរ ហើយថា អាយុ**ជីវយី**ក៏នៅក្មេងណាស់ តែចិត្តទាហានអង់អាចមិនខ្លាចអ្វីសោះ លើកតម្កើងខ្លួនថាមានតម្រិះប្រាជ្ញាតែម្នាក់ឯង មិនបានយកគំនិតប្រឹក្សាអ្នកដែលមានតម្រិះប្រាជ្ញាសោះ។ ឥឡូវខ្លួនអ្នកបានមកដល់ខ្ញុំហើយ ចូរអាណិតចុះ ការអ្វីដែលខ្ញុំធ្វើបើឃើញត្រូវខុសក៏ឲ្យអ្នកដាស់តឿនប្រាប់។ **បាំងថង**ថា ខ្ញុំបាទបានឮកិត្តិស័ព្ទដោយគេនិយាយឮល្បីថា មហាឧបរាជមានតម្រិះប្រាជ្ញាស្មារតីវាងវៃក្នុងការសង្គ្រាម ខ្ញុំបាទមកឥឡូវនេះ ក៏នៅមិនទាន់បានឃើញច្បាស់ដូចពាក្យគេនិយាយ បើបានឃើញរបៀបបន្ទាយហើយទើបអាចថាខុសនិងត្រូវបាន។

**ចូវឆ្វ**ក៏ឲ្យរៀបចងសេះមួយគូឲ្យ**បាំងថង**ជិះមួយ ជិះខ្លួនឯងមួយ ហើយនាំបរឡើងទៅមើលលើកំពូកភ្នំ។ **បាំងថង**ពិគ្រោះមើលហើយ ក៏ក្លែងសរសើរថា ដែល

មហាឧបរាជតាំងបន្ទាយនេះ ជាជាន់ជើងបន្ទាយរាយអែបនឹងមាត់ព្រៃ យកជើងភ្នំជាទីពឹងគ្រប់បន្ទាយ ហើយមានទ្វារចេញចូលរហូតដល់គ្នាយ៉ាងស្រួល ឯក្បួនទ័ពដែលតាំងបន្ទាយនេះ មាំមួនជាងលើសគ្រា**ស៊ុនប៊ិន**តាំងក្បួនទ័ពដូច្នោះ នឹងរកអ្នកឯណាស្មើគ្មាន ទោះបី**ស៊ុនប៊ិន**នោះនឹងមានជីវិតរស់ឡើងវិញ ហើយមកធ្វើការតនឹងលោកគ្រានេះ ក៏មិនឈ្នះលោកឡើយ។ **ចូឆ្វូ**តបថា អ្នកកុំលើកបញ្ចោរខ្ញុំហួសពេក បើឃើញទាស់ខុសត្រង់កន្លែងណា ត្រូវតែអ្នកជួយណែនាំរំឭក ខ្ញុំនឹងសុំយកតម្រិះប្រាជ្ញាអ្នកតទៅ ហើយ**ចូឆ្វូ**ក៏នាំ**បាំងថង**ចុះមើលទ័ពទឹកទៀត។ **បាំងថង**ក្រឡេកឃើញទូកចម្បាំងធំៗ ចេញទៅចតជាបន្ទាយរាយជាប់គ្នាពីខាងក្រៅ ទុកចន្លោះទ្វារម្ភៃអន្លើ ឯទូកតូចៗក៏ចតពេញពីខាងក្នុង មានទូកឃាមល្បាតសម្រាប់ប្រើប្រាស់ជាការរហ័សនោះច្រើន។ **បាំងថង**ក៏អស់សំណើចហើយថា ដែលមហាឧបរាជចាត់របៀបបន្ទាយទ័ពគោក ទ័ពទឹកនេះ ត្រឹមត្រូវនឹងក្បួនពេញខ្នាតទាំងអស់ សមដូចពាក្យមនុស្សនិយាយសរសើរឲ្យឮល្បីចេញទៅប្រាកដមែន។ **ជីវយី**គ្រានេះ មុខជានឹងស្លាប់នៅក្នុងកណ្ដាប់ដៃរបស់មហាឧបរាជប្រាកដមិនខាន។ **ចូឆ្វូ**បានឮដូច្នោះក៏មានសេចក្ដីត្រេកអរពន់ប្រមាណ ទើបនាំ**បាំងថង**ចូលទៅក្នុងបន្ទាយបរិភោគអាហារ ហើយ**ចូឆ្វូ**ក្លែងដេញដោល**បាំងថង**ក្នុងការសង្គ្រាមច្រើនណាស់។ **បាំងថង**ក៏អធិប្បាយកែខៃពន្យល់បំភ្លឺឲ្យចូលចិត្តគ្រប់ប្រការ មិនបានឆ្លើយឲ្យទាស់អធ្យាស្រ័យអ្វីមួយសោះ។ **ចូឆ្វូ**ក៏រឹតតែមានចិត្តត្រេកអរណាស់ទៅទៀត រាប់អាន**បាំងថង**បីដូចគ្រូអាចារ្យ។ **បាំងថង**ក៏សួរ**ចូឆ្វូ**ថា លោកលើកទ័ពមកគ្រានេះ មានពេទ្យសម្រាប់កងទ័ពដែរឬទេ? **ចូឆ្វូ**តបថា អ្នកសួររកពេទ្យនោះនឹងប្រាថ្នាប្រយោជន៍អ្វី? **បាំងថង**ថា ខ្ញុំខុសភេទគ្នា ខ្លាចក្រែងឈឺថ្កាត់គ្រុនរងា បើមានពេទ្យនឹងបានព្យាបាលរក្សា។ **ចូឆ្វូ**ឆ្លើយថា ពេទ្យនោះមានសម្រាប់ទ័ពជាច្រើនណាស់។ **បាំងថង**ក្លែងសួរ

ថា កងទ័ពគោកទ័ពទឹកដែលលោកចាត់ចែងនេះល្អត្រឹមត្រូវហើយ តែទ័ពទឹកនោះពុំបានគិតស្តាយការម្យ៉ាង លោកនៅមិនទាន់បានធ្វើផង។ **ចូឆ្វ**ក៏សួរដេញដោលដល់ពីរបីដងថា ការអ្វីដែលខ្វះ? **បាំងថង**ធ្វើជាព្រងើយកន្តើយបីដូចជារឹងទទឹងពុំបាន ក៏ឆ្លើយតបទៅវិញថា គំនិតរបស់ខ្ញុំបាទដែលឃើញនៅខ្វះនោះព្រោះទាហានទូកចម្បាំងរបស់លោកច្រើនតែពួកអ្នកព្រៃលើ មិនសូវប៉ិនប្រសប់ខាងការទន្លេ ឯការខាងទន្លេនោះសឹងប្រកបទៅដោយរលកខ្យល់ជាច្រើន ទាហានពួកនោះមិនធ្លាប់ក៏គង់នឹងមានពុលរលកបែកខ្ញែកអស់ទៅ ព្រោះទូកចម្បាំងនោះឃ្លោងផ្អៀងជាដរាប ការដែលច្បាំងនឹងប្រយុទ្ធគ្នាក៏នឹងចាត់មិនបានស្រួលរហ័ស បើប្រសិនជាយកទូកធំៗមកដាក់ផ្គុំជាប់គ្នានឹងទូកតូច ហើយគាបចងឲ្យរឹងទៅជាផែនមួយដុំសែ មួយដុំហា ហើយយកឈើមកគាបធ្វើជាក្បូន គេចងខាងក្បាលនិងកន្សៃឲ្យជាប់គ្នា ហើយយកសោច្រវាក់ចាក់ភ្ជាប់ជាលំដាប់រៀងទៅ រួចយកក្តារមកក្រាលពីលើឲ្យរហូតផុតទូកទាំងអស់ គាបឃ្នាបឲ្យរឹងណែនដូចផែនដី ទើបឲ្យតាំងបន្ទាយឡើងទុកសម្រាប់ការពារ កាលបើទូកចម្បាំងទាំងពួងនឹងណែនល្អហើយ ទាហានរបស់យើងក៏អស់ភ័យនឹងពុលរលក ទោះបីសេះឬមនុស្សក៏ដើររហូតទៅមកបាន នឹងបានជួយការពារគ្នាជាយ៉ាងចំណាប់។

**ចូឆ្វ**ឮដូច្នោះ ក៏មិនទាន់គិតរឹតតែមានសេចក្តីត្រេកអរណាស់ ក្រោកឡើងគំនាប់**បាំងថង**ហើយថា ឯតម្រិះដែលរិះគិតរបស់អ្នកនេះល្អណាស់ គ្រានេះមុខជានឹងបានស្រុកកាំងតាំង ព្រោះអ្នកប្រាប់កិច្ចកលឲ្យយើង។ ហើយបង្គាប់**អ៊ីគឹម** និង**ម៉ាកាយ**ដែលជានាយទ័ពទឹកឲ្យខំស្រូតធ្វើការទាំងពួងតាមបង្គាប់**បាំងថង** តែទូកចម្បាំងតូចៗឲ្យដកទុកប្រើប្រាស់មួយរយ ឬពីរបីរយ។ **អ៊ីគឹម, ម៉ាកាយ**ក៏បង្ខំទាហានឲ្យធ្វើការតាម**ចូឆ្វ**បង្គាប់។ **បាំងថង**ក៏ក្លែងថា ខ្ញុំបានឃើញទីប្រឹក្សានិង

សេនាទាហានទាំងពួងដែលមកក្នុងទ័ព**ជីវយី**នោះ មានសេចក្តីតូចចិត្តនឹង**ជីវយី**ជាច្រើន។ ខ្ញុំបាទនឹងសូមអាសាទៅបញ្ចុះបញ្ចូលមនុស្សទាំងអម្បាលនោះឲ្យមកនៅនឹងមហាឧបរាជ ឯ**ជីវយី**នឹងអស់តម្រិះរិះគិតចុះជាលំដាប់ លោកក៏នឹងចាប់ខ្លួនបានដោយងាយ ប្រសិនបើបានខ្លួន**ជីវយី**ហើយ ឯ**ឡៅពី**និង**ខុងបេង**ក៏ដូចជានៅក្នុងកណ្តាប់ដៃលោក។ **ចូឆូ**មិនបានដឹងកលមានចិត្តត្រេកអរហើយនិយាយថា បើអ្នកនឹងជួយភារៈគ្រានេះសម្រេចហើយ ខ្ញុំនឹងបានទូលស្នើសេចក្តីគាប់ប្រសើរឲ្យព្រះចៅ**ហៀនតេ**តាំងអ្នកជានាហ្មឺនធំ។

**បាំងថង**ឆ្លើយថា ខ្ញុំមករកលោកនេះមិនមែននឹកឃើញដល់បណ្តាស័ក្តិទេ ព្រោះអាណិតអាណាប្រជានុរាស្ត្រនឹងឲ្យជាសុខ ប្រសិនបើលោកបានស្រុកកាំងតាំងហើយ សុំកុំសម្លាប់ញាតិសន្តានបងប្អូនខ្ញុំបាទដែលនៅក្នុងស្រុកនោះឡើយ។

**ចូឆូ**ថា ខ្ញុំធ្វើការសឹកសង្គ្រាមនៅទីណាតំបន់ណាក្តី មិនមែននឹងឲ្យរាស្ត្របានសេចក្តីក្តៅក្រហាយសោះឡើយ គិតតែបម្រុងឲ្យបានសេចក្តីសុខថែមទៀត ដែលខ្ញុំកាប់សម្លាប់ខ្លះនោះ ព្រោះតែមនុស្សនោះរឹងទទឹង បើប្រសិនជាអ្នកខ្លាចក្រែងញាតិបងប្អូនអន្តរាយ ខ្ញុំនឹងធ្វើសំបុត្រទៅឃុំរក្សាទុកជាសម្គាល់។ **បាំងថង**ធ្វើជាត្រេកអរឱនគំនាប់ហើយថា បើមហាឧបរាជអាណិតមេត្តាឲ្យសំបុត្រទៅឃុំរក្សាទុក ខ្ញុំបាទក៏អស់សេចក្តីវិតក្កទុក្ខព្រួយ។ **ចូឆូ**ក៏តែងសំបុត្រឲ្យ។ **បាំងថង**ក៏ទទួលយកសំបុត្រហើយផ្តាំនឹង**ចូឆូ**ទុកថា បើខ្ញុំបាទទៅហើយឲ្យមហាឧបរាជខំប្រញាប់ចាត់ចែងកងទ័ពទៅច្បាំងនឹង**ជីវយី**ជាមុន កុំចាំឲ្យ**ជីវយី**មកទាន់ ហើយ**បាំងថង**ក៏លា**ចូឆូ**ចេញមកចុះទូក។

ខណៈនោះ**ឈីស៊ី**ដែលនៅជិតទីនោះ ក៏ស្ទុះទៅចាប់ដាយអាវ**បាំងថង**ទុកហើយឱនខ្សឹបថា ខ្លួនអ្នកនេះអង់អាចណាស់ ខ្លាចថាភ្លើងនោះឆេះមិនអស់ទាហាន

**ចូឆ្ងូ**ឬ បានជាក្លែងគិតជាកលឧបាយមកបញ្ឆោត**ចូឆ្ងូ**ឲ្យចងក្បួនទូកចម្បាំងទុកទៀត ប្រាថ្នានឹងឲ្យដុតទាហាន និងទូកចម្បាំងចេញឲ្យអស់រលីងតែម្តងឬ? ដែលតម្រិះរិះគិតរបស់អ្នកនោះនឹងមិនយល់ធ្លុះបានតែ**ចូឆ្ងូ**មួយ ឯខ្លួនខ្ញុំអាចដឹងដល់ទាំងអស់។ **បាំងថង**ឮដូច្នោះក៏តក់ស្លុតភ័យរន្ធត់ស្មារតី ក្រឡេកមើលមកក្រោយក៏ឃើញ**ឈីស៊ី**តែម្នាក់ឯង ក៏ដូចជាធូរទូលាយក្នុងចិត្ត ព្រោះ**ឈីស៊ី**ជាភឿនសម្លាញ់ស្និទ្ធនឹងគ្នាមកពីក្មេង ហើយថា ដែលខ្ញុំរិះគិតមកនិយាយនឹង**ចូឆ្ងូ**នេះ ព្រោះស្តាយស្រុកកាំងតាំងជាខេត្តឯក ហើយមានខេត្តឡើងដល់ប៉ែតសិបមួយមណ្ឌល ក្រែងមានអន្តរាយ ទាំងប្រជានុរាស្ត្រចំណុះស្រុក ក៏នឹងដល់នូវសេចក្តីស្លាប់ទាំងអស់គ្នា បានជាខ្ញុំមកបញ្ឆោត**ចូឆ្ងូ** ប្រាថ្នានឹងជួយជីវិតអ្នកស្រុកទាំងអស់ឲ្យរស់នៅ។ **ឈីស៊ី**ក៏ធ្វើជាតបថា ខ្លួនអ្នកមានចិត្តអាណិតស្តាយអ្នកស្រុកកាំងតាំងខ្លាចអន្តរាយ ទើបមកខ្វល់ខ្វាយខំរិះគិតបានការយ៉ាងនេះ ចុះទាហាន**ចូឆ្ងូ**ដល់ប៉ែតសិបបីម៉ឺននោះ អ្នកគ្មានចិត្តអាណិតថានឹងដល់នូវសេចក្តីស្លាប់ទាំងអស់ទេឬ?

**បាំងថង**ថា ការទាំងអម្បាលនេះ មិនមែនជាការរបស់**ស៊ុនគួន**តែម្នាក់ឯងទេ គឺជាការរបស់**ឡៅពី**ចៅហ្វាយចាស់អ្នកនោះដែរ ដែលអ្នកថាដូច្នេះមុខជាយកសេចក្តីដែលខ្ញុំរិះគិតនេះទៅប្រាប់**ចូឆ្ងូ**ឲ្យដឹងដល់ម្ល៉ឹងឬ? **ឈីស៊ី**តបថា ដែលខ្ញុំបានផុងខ្លួនមកនៅនឹង**ចូឆ្ងូ**ដូច្នេះ គឺមកដោយសេចក្តីថាចិត្ត លុះមាតាខ្ញុំស្លាប់ទៅ ខ្ញុំក៏មានចិត្តនឹកខឹងនឹង**ចូឆ្ងូ**ដរាបសព្វថ្ងៃនេះ ខ្ញុំក៏មានចិត្តរឮកអាល័យ**ឡៅពី**មិនភ្លេចសោះ ព្រោះគិតដល់គុណ**ឡៅពី**ដែលមានមកពីដើម កាលដែលនឹងឃ្លាតចាកមកក៏បានស្បថស្បែទុកនឹង**ឡៅពី**ថា ទោះបីមកនៅទ័ពនេះក្តី ក៏មិនបានប្រាប់កលសឹកអ្វីនីមួយឲ្យ**ចូឆ្ងូ**ដឹង ឥឡូវខ្លួនអ្នកក៏បានរិះគិតនឹងដុតទ័ព**ចូឆ្ងូ**ឲ្យអស់ ហើយនឹងចង់ដុតទាំងខ្លួនខ្ញុំផងទៀតឬ? **បាំងថង**ថា ហេតុម្តេចអ្នកមកចរចាដូច្នេះ **ឯធម្មតាអ្នកមានតម្រិះប្រាជ្ញា បើមាន**

ភ័យមកដល់ខ្លួនហើយ មិនគិតនឹងយកខ្លួនឲ្យរួច ក៏មិនហៅថាអ្នកមានប្រាជ្ញាបាន។ ហើយ**បាំងថង**ក៏លាចុះទូកទៅ។

ឯ**ឈីស៊ី** លុះ**បាំងថង**ទៅហើយក៏គិតថា បើយើងនៅក្នុងទ័ព**ចូឆ្វ**តទៅក៏គង់នឹងបានសេចក្ដីលំបាកវេទនា គួរតែម្នីម្នាប្រែប្រួលគិតឲ្យរួចភ័យ ទើបប្រើមនុស្សស្និទ្ធស្នាលឲ្យដើរទៅនិយាយឮល្បីថា មានអ្នកជំនួញមកប្រាប់ដំណឹងថា **ម៉ាថេង**និង**ហាន់ស៊ុយ**ដែលនៅស្រុកសេលៀងនោះ នឹងលើកកងទ័ពមកវាយយកស្រុកហ៊ូតោ។ បណ្ដាទាហាន**ចូឆ្វ**ដឹងឮដូច្នោះក៏ព្រួយចិត្ត ភិតភ័យគិតដល់គ្រប់គ្រួ ទើបនាំគ្នាចូលទៅប្រាប់**ចូឆ្វ**តាមកិត្តិស័ព្ទដែលបានឮនោះ។ **ចូឆ្វ**ដឹងដូច្នោះទើបប្រឹក្សាសេនាទាហានទាំងពួងថា កាលណាយើងនឹងលើកកងទ័ពមកប្រាបប្រាមអាណាខេត្តមាត់ទន្លេ ក៏គិតខ្លាចតែ**ម៉ាថេង**និង**ហាន់ស៊ុយ**ប៉ុណ្ណោះ ឥឡូវឮដំណឹងមកថា **ម៉ាថេង**និង**ហាន់ស៊ុយ**លើកកងទ័ពមកវាយស្រុកហ៊ូតោហើយ គួរនឹងឲ្យនរណាដែលមានថ្វីដៃខ្លាំងពូកែទទួលអាសាចេញទៅការពារបាន។

**ឈីស៊ី**ឆ្លើយថា ខ្ញុំបាទមកនៅនឹងលោកនេះក៏មិនទាន់បានធ្វើការអ្វីឲ្យជាគុណបំណាច់ឡើយ ឥឡូវមានសត្រូវមកប៉ងហើយ ខ្ញុំបាទនឹងសុំអាសាលើកទាហានបីពាន់ទៅចាត់ចែងដាក់គយល្បាតប្រុងប្រយ័ត្នស្កាត់តាមច្រកផ្លូវដែលទៅ ត្រូវលើស្រុកហ៊ូតោជាមុន បើសិនណាសឹកសត្រូវមកលើសលុបនឹងទប់ពុំបាន ខ្ញុំបាទនឹងមានសំបុត្រប្ដឹងមកលោកឲ្យបានជ្រាប។ **ចូឆ្វ**បានឮថា **ឈីស៊ី**សុំអាសាទៅក៏មានចិត្តត្រេកអរថា ដែលអ្នកទទួលទៅនោះយើងគាប់ចិត្តណាស់ ព្រោះទាហានខាងនេះក៏សល់នៅជាច្រើន ចូរអ្នកចាត់ចែងបែងរំលែកយកទៅចុះ ហើយក៏ប្រមូលទាហានបីពាន់ឲ្យ**ចោប៉ា**ជាទ័ពស្រួច **ឈីស៊ី**និង**ចោប៉ា**ក៏លា**ចូឆ្វ**ចេញទៅដល់ស្រុកហ៊ូតោ។

ឯ**ចូឆ្ង** លុះវេលាព្រឹកក៏ឡើងសេះនាំទាហានដើរត្រួតមើលបន្ទាយជើងគោក ឃើញមាំមួនទាំងអស់ ហើយក៏ត្រឡប់មកវិញ លុះវេលាល្ងាចក៏ចុះទូកចេញទៅត្រួតកងទ័ពទឹកដែល**អ៊ីគឹម, ម៉ាកាយ**រៀបចំឲ្យចងជាក្បួនទុកជាកងៗ ហើយបង្គាប់ទាហានឲ្យចាត់ចែងគ្រឿងសាស្ត្រាវុធ និងធ្នូទុកតាមសើនបន្ទាយ ហើយតែងតុលៀងសេនាទាហានទាំងពួង។ ក្នុងខណៈនោះព្រះចៅ**ហៀនតេ**សោយរាយសម្បត្តិបានដប់ពីរឆ្នាំ (ព.ស ៧៤៤)។ កាល**ចូឆ្ង**ចុះមកត្រួតកងទ័ពទូកជាខែបុស្សដប់ប្រាំកើត ព្រះចន្ទពេញវង់ត្រចង់ត្រចះជ្រះថ្លា វាតាក៏ស្ងប់ស្ងាត់ឈឹង សមុទ្រធំល្វឹងល្វើយគ្មានរលកសោះ ទូកខ្នានទាំងអស់នឹងដូចផែនដី ទោះបីនឹងមានរលកខ្យល់បក់បោកមកធំយ៉ាងណា បណ្ដាទូកចម្បាំងទាំងអស់នោះក៏មិនរំភើបនឹងប្រែប្រួលទៅណា ទាំងបណ្ដាទាហានក៏មិនមានពុលរលក។

ឯចៅភ្នាក់ងារគ្រឿងលេងភ្លេងតូរ្យតន្ត្រី ក៏នាំគ្នាដេញចាប៉ីក្លួតទ្រសូរទ្រហឹងអឹងអាប់។ **ចូឆ្ង**ឃើញទាហានស៊ីលៀងតាមរបៀបថែវខ្នាន់ខ្នាប់ មើលប្រហែលបីរយប្លាយ នាំគ្នានិយាយពីការសង្គ្រាមទៅវិញទៅមក ខណៈកាលដែល**ចូឆ្ង**កំពុងសេពសុរានៅកណ្ដាលទូកផែ ជាមួយសេនាទាហានទាំងពួងនោះ ក៏ក្រឡេកមើលទៅលើអាកាស ឃើញខាងស្រុកកាំងតាំងនៅទិសបូព៌ា និងស្រុកកាំងហែក្បែរមាត់ទន្លេទិសបស្ចិម មើលទៅទិសឧត្តរ ទិសទក្សិណក៏ភ្លឺដោយពន្លឺព្រះចន្ទ **ចូឆ្ង**ក៏មានសេចក្ដីសោមនស្សរីករាយ ហើយនិយាយនឹងទាហានទាំងពួងថា ពីដើមយើងគិតថា នឹងទំនុកបម្រុងផែនដីឲ្យជាសុខ យើងក៏បានធ្វើការប្រាបប្រាមសត្រូវរៀងមកជាច្រើនតំបន់ហើយ ឥឡូវនៅសល់តែស្រុកកាំងតាំងមួយខ្លាំងពូកែជាងគេ ឲ្យអ្នកទាំងពួងរួមប្រមូលឲ្យមូលចិត្តគំនិតគ្នាជួយយើងឲ្យបាន នឹងកម្ចាត់**ស៊ុនគួន, ជីវយី**ចេញ ហើយស្រុកទេសក៏នឹងនៅជាសុខ យើងទាំងឡាយក៏នឹងបានឃើញមុខគ្នាជាទី

សប្បាយ។ ទីប្រឹក្សានិងសេនាទាហានទាំងឡាយបានឮច្ចូរ្ចថាដូច្នោះ ក៏នាំគ្នាគំនាប់ហើយថា សូមឲ្យទេវតាជួយឲ្យបានសម្រេចដូចសេចក្ដីប្រាថ្នាចុះ យើងខ្ញុំទាំងឡាយនឹងបានជាទីពឹងតទៅ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤២

**ចារឹកឡើងវិញដោយ ៖ ឈុល ជាង**

*(តាំងពី**ចូឆូ**ជួបជុំនឹងសេនាទាហានស៊ីផឹកក្នុងផែទ័ពទឹក **ចូឆូ**ស្រវឹងស្រាប្រមាថគុំគួនថា **ជីវយី** និង**ឡោសុក**នឹងដល់នូវសេចក្ដីអន្តរាយ លុះដល់**អ៊ុយកាយ**ចូលទុកទៅផុត ទ័ព**ចូឆូ**ឆេះអស់។)*

**ខណៈនោះ** **ចូឆូ**ផឹកស្រាស្រវឹងជាមួយនឹងពួកមន្ត្រីខុំរាជការ លុះដល់ពេលយាមពីរយប់ **ចូឆូ**ស្រវឹងស្រាខ្លាំងណាស់ ក៏កំរើបចិត្តគិតប្រមាថ ទើបក្រោកឡើងលើកដៃចង្អុលទៅទាហានទាំងពួងថា ឯ**ជីវយី**និង**ឡោសុក**នោះ មិនបានដឹងថាអាកាសនឹងសម្ដែងហេតុឲ្យឃើញថា ខ្លួនទាំងពីរនឹងដល់នូវសេចក្ដីស្លាប់ក៏ឥតអង្គឹមាន ប្រការមួយទៀតបណ្ដាពួកកងទាហានក្នុងកងទ័ពវាក៏ប្រែចិត្តគិតតែដោះភៀសចេញមកចូលនៅខាងយើងជាច្រើនណាស់ បីដូចនឹងឃើញច្បាស់ថា ទេពតាទាំងឡាយមកបញ្ចូលចិត្តគិតនាំមក ប្រាថ្នានឹងឲ្យយើងយកនូវជ័យជម្នះលើវា។ **ស៊ុនហ៊ីវ**ក៏ឃាត់ហាម**ចូឆូ**ថា លោកកុំមានប្រសាសន៍ឲ្យឮខ្ចរខ្ចាយទៅធ្វើអ្វី ក្រែងបែកសេចក្ដីនេះដឹងទៅដល់**ជីវយី**នឹងខូចការរបស់យើង។

**ចូឆូ**តបថា បណ្ដាពួកទាហានដែលបានមកប្រជុំគ្នានៅទីនេះ ក៏សុទ្ធតែជាពួកម៉ាករបស់យើងរួមចិត្តគំនិតមួយ អ្នកកុំគប្បីព្រួយថាការនោះនឹងដឹងដល់ទៅ**ជីវយី**ឡើយ ហើយលើកដៃចង្អុលទៅត្រង់ទិសស្រុកកាំងហែថា **ឡៅពី**និង**ខុងបេង**គ្រានេះគឺមិនមែនចេះគ្នេរប្រមាណក្នុងកម្លាំងរបស់ខ្លួនសោះ ប្រៀបដូចកណ្ដៀរពូនដំបូកអាចគិតលូនទៅទម្លាយភ្នំដ៏ធំខ្ពស់ គួរនឹងទប់ទល់បានឃើញឬ ឯអាយុរបស់យើងក៏បានហាសិបឆ្នាំហើយ បើសិនណាយើងបានស្រុកកាំងតាំង ក៏នឹងមានសេចក្ដីត្រេកអរសប្បាយមួយពេល ព្រោះពីដើមយើងក៏ដឹងច្បាស់ថា នាង**កៀវកុកឡោ**មានបុត្រីសម្បុរល្អស្អាតពីរនាក់ ប្រកបដោយលក្ខណ៍ស័ក្ដិសមជាឯកលើសស្រីក្នុងផែនដីនេះ

យើងក៏បានត្រិះរិះទុកមកជាយូរហើយ តែថាជាហេតុទេពតាបណ្ដាលឲ្យព្រាត់ភ្លាត់បានទៅជាភរិយា**ស៊ុនសេក** និង**ជីវយី**ទាំងពីរនាក់ កាលយើងច្បាំងបានស្រុកកេងជីវនោះ យើងក៏បានឲ្យកសាងស្រុកជាថ្មី ធ្វើប្រាសាទកំពូលបីទុកត្រង់ឆ្នេរទន្លេជៀងហោ គ្រានេះបើយើងបានស្រុកកាំងតាំងគង់នឹងឃើញមុខកូនស្រីនាង**កៀវកុកឡោ** យើងនឹងទៅទ្របីស្ត្រីទាំងពីរ នាំទៅនៅលើប្រាសាទស្រុកកេងជីវ ឲ្យធ្វើវដ្តប្រតិបត្តិយើងតាមត្រូវការ ដើម្បីជាទីស្នេហាត្រាតែអស់ជីវិតក្នុងទីនោះ ហើយ**ចូឆ្នូ**ក៏អស់សំណើចសើចក្អាកក្អាយ ទទួលក្រឡេកទៅឃើញក្អែកមួយហ្វូង ហើរព្រាងព្រាតតម្រង់ទៅទិសទក្សិណ **ចូឆ្នូ**ក៏សួរទីប្រឹក្សាទាំងពួងថា ហេតុម្ដេចបានជាក្អែកហើរស្រែកខុសវេលាដូច្នេះ នឹងកាចឬជាប្រការម្ដេច?

ទីប្រឹក្សាទាំងពួងឆ្លើយថា ឯក្អែកដែលហើរស្រែកមកនេះ ព្រោះឃើញខែភ្លឺស្រឡះវាសម្គាល់ច្បាស់ជាជិតភ្លឺ ប្រាថ្នានឹងហើរទៅរកស៊ី ដែលលោកមកសម្គាល់ថាជាឬកាចនោះមិនត្រូវទេ។ **ចូឆ្នូ**ឮដូច្នោះក៏អស់សំណើច ហើយលើកពែងស្រាផឹកថែមទៀតពីរទៅបីពែង ស្រវឹងខ្លាំងណាស់ រឹតតែមានសេចក្ដីកំរើបឡើង ក៏កន្ត្រាក់យកលំពែងចេញទៅឈរនៅក្បាលទូក ហើយស្រែកប្រកាសទាហានទាំងពួងថា ផ្តែលំពែងនេះយើងកាន់សម្រាប់ដៃមកពីដើមកាលនៅជាកូនទាហាន ទាល់តែតាំងខ្លួនបានដល់ទីនេះ បានប្រាបប្រាមពួកចោរជូតក្បាលលឿង និង**លីប៉ោ**, **អ៊ួនសៀវ**, **អ៊ួនសុត** ហើយបានហាមប្រាមអាណាខេត្តទាំងពួងមកទៀត ក៏មិនដែលថ្លោះការកើតមកជាជាតិទាហានហើយត្រូវតែមានចិត្តក្លៀវក្លាដូច្នេះ រួច**ចូឆ្នូ**ក៏ច្រៀងភ្លេងមានទំនុកថា៖

វិស័យកំណើតកើតគួរស្ដាប់ កាលរស់គួរត្រាប់ត្រេងភិប្រាយ
ត្រូវលេងល្បែងអីឲ្យសប្បាយ សម្រាប់រូបកាយដែលត្រូវការ។
តែមកឃើញប្លែកក្អែកទាំងហ្វូង ផ្អើលហើរទៅត្បូងជាអស្ចារ្យ
សូម្បីព្រៃឈើវល្លិ៍លតា គ្មានសោះបក្សាទំមិនបាន។
បានជាហើរប្លែកបែកបាក់អស់ គួរឲ្យស្រណោះសត្វតិរច្ឆាន

ធម្មជាតិភ្នំធំដុំដែនដាន មែនមានកំពូលស្រួចខ្ពង់ខ្ពស់។
រីឯសមុទ្រជ្រៅផុតដែន ដីដែលទ្រង់ទ្រទ្រូទិសទស
ចិត្តយើងចិត្តគេគ្នេរចង់រស់ គឺមោះចៀសទុក្ខទើបសុខា។

**ឡៅហុក**ទីប្រឹក្សាឮដូច្នោះក៏និយាយថា លោកលើកទ័ពមកប្រាថ្នានឹងធ្វើការសង្គ្រាមយកជ័យជម្នះ ហេតុម្តេចបានជាពោលពាក្យថាបរាជ័យដូច្នេះ? **ចូអ្វ**ក៏សួរថា អញធ្វើភ្លេងលេង ហេតុម្តេចមកថាបរាជ័យវិញ? **ឡៅហុក**ថា ខ្ញុំបាទបានឮភ្លេងថា ហ្វូងក្អែកគ្មានសំបុក និងមែកឈើទំអាស្រ័យ នាំគ្នាហើរស្រែកទៅឲ្យខុសវេលា បានជាខ្ញុំបាទថាជាពាក្យបរាជ័យដូច្នេះ។ **ចូអ្វ**ឮដូច្នោះក៏ខឹងច្រឡោត ខ្លួនឯងនេះហ៊ាននិយាយមើលងាយប្រមាថអញ ហើយក៏យកលំពែងចាក់**ឡៅហុក**ដួលចុះដាច់ខ្យល់ស្លាប់។ ទាហានទាំងពួងឃើញដូច្នោះ ក៏តក់ស្លុតរន្ធត់ស្មារតី ទើបនាំ**ចូអ្វ**ចូលក្នុងបន្ទាយ។

លុះព្រឹកឡើង **ចូអ្វ**ស្វាងស្រវឹងស្រា ភ្ញាក់ពីដេកឡើងក៏គិតឃើញថា យប់មិញអញសម្លាប់**ឡៅហុក**ចេញនោះខុសសោះ។ ឯ**ឡៅហ៊ី**ជាកូន**ឡៅហុក**ក៏ចូលទៅស្រែកទ្រហោយំឲ្យ**ចូអ្វ**ថា បិតាខ្ញុំគ្មានទោសខុសអ្វីសោះ លោកមកសម្លាប់ចេញ។ ឥឡូវខ្ញុំបាទសូមយកសពបិតាទៅដាក់តាមទំនៀម។ **ចូអ្វ**ឮដូច្នោះក៏មានសេចក្តីអាណិតអានាថ យំស្រក់ទឹកភ្នែកហើយថា កាលពីយប់មិញយើងផឹកស្រាស្រវឹងខឹងខ្លាំងណាស់ ដែលសម្លាប់បិតាអ្នកស្លាប់នោះ គឺយើងធ្វើរំលោភបំពានទៅហើយ អ្នកកុំតូចចិត្តនឹងយើងឡើយ ចូរយកបិតាទៅរៀបចំចាត់ចែងតាមតំណែងកូនស្តេចក្នុងក្រុងហ៊ូតោចុះ ហើយក៏ចាត់ទាហានឲ្យ**ឡៅហ៊ី**ជួយនាំសពទៅជាមួយ។

លុះវេលាព្រឹកឡើង **អ៊ីគឹម**និង**ម៉ាកាយ**ដែលជានាយទ័ពទឹក ក៏ឡើងទៅជម្រាបប្តឹង**ចូអ្វ**ថា ទូកចម្បាំងទាំងធំទាំងតូច ក៏បានចាត់ចែងត្រៀមបម្រុងព្រមទាំងគ្រឿងសាស្ត្រាវុធសព្វគ្រប់ហើយ លោកនឹងលើកកងទ័ពទៅវេលាណាសុំឲ្យកំណត់ថ្ងៃចុះ ខ្ញុំបាទនឹងចាត់ចែងរៀបចំឲ្យព្រមគ្នា។ **ចូអ្វ**ឮដូច្នោះក៏ចុះទៅកាន់ទូកចម្បាំង តាំងឲ្យប្រមូលទាហានទាំងទ័ពទឹកមកបញ្ចូលគ្នា ហើយចាត់ឲ្យមានទង់ពណ៌ផ្សេងៗប្រាំ

យ៉ាង សម្រាប់កងទ័ពគោកទ័ពទឹក និងបានដោតសម្គាល់ទាំងប្រាំកង ឯទូកខ្នានមេកងធំទ័ពហ្លួងត្រូវដោតទង់ពណ៌លឿង ទូកខ្នាន**អ៊ីគឹម**និង**ម៉ាកាយ**ជានាយទ័ពស្រួចទង់ពណ៌ក្រហម ឲ្យ**លីយ៉ាយ**ជាប៉ែកស្តាំនាំទូកខ្នានដោតទង់ពណ៌ខៀវ **ប៊ុនផេង**នាំទូកខ្នានជាប៉ែកឆ្វេងដោយទង់ពណ៌ស ឲ្យ**ទៀវខាប់**នាំទូកខ្នាតជាកងទ័ពក្រោយដោតទង់ពណ៌សេត។

ឯទ័ពគោកនោះសោត ចាត់ឲ្យ**លីកង**ជានាយទ័ពស្រួចដោតទង់ពណ៌ក្រហម ឲ្យ**លីទៀន**ជាប៉ែកស្តាំដោតទង់ពណ៌ខៀវ ឲ្យ**ង៉ាក់ជិន**ជាប៉ែកឆ្វេងដោតទង់ពណ៌ស ឲ្យ**ហែហ៊ួអៀន**ជានាយកងទ័ពហ្លួងដោតទង់ពណ៌លឿង ឲ្យ**ស៊ីឡុង**ជានាយកងទ័ពក្រោយដោតទង់ពណ៌សេត ហើយឲ្យ**ហែហ៊ួទុន**និង**ចោហាង**ជាកងឈ្លូន សម្រាប់ជួយបំពេញកម្លាំងទាំងទ័ពគោកទ័ពទឹក ហើយនិងឲ្យយកដំណឹងជាផ្លូវរាជការមកប្តឹងពន្យល់គ្រប់ពេល។ ឯ**តៀវលៀវ** និង**ខៅធូ**ឲ្យកាន់អាជ្ញាសិទ្ធិជាសារវ័ត្រធំសម្រាប់ត្រួតទ័ព បណ្តាទាហានឯក ទោទាំងឡាយក៏ចាត់ឲ្យជានាយពួកនាយកងទ័ពទឹកទាំងអស់។ លុះចាត់ការស្រេចហើយ នាយទាហានទាំងអស់ក៏ទៅចាប់ស្លាកតាមកេណ្ឌទ័ពគោកទ័ពទឹក។

ក្នុងខណៈនោះទទួលផ្តាក់ខ្យល់បក់មក **ចូឆូ**ក៏ដកយុថ្កាបើក្តោងទូកខ្នានទាំងអស់ ឡើងលឿនគ្រឿនតាមមាត់ទន្លេ បណ្តាទាហានធំតូចទាំងពួងក៏រត់ទៅមកជាទីជួយគ្នាច្បាំងតយុទ្ធ នោះទូកខ្នានទាំងអស់ដែលត្រូវខ្យល់វល់និងរលក ក៏នឹងថ្កល់ដូចគេនៅលើផែនដី គ្មានផ្អៀងផ្អងឃ្លោងដល់តិចសោះ ពួកទាហានស្រុកលើក៏មិនមានពុលរលក នាំគ្នាធ្វើការជាប្រក្រតី។

**ចូឆូ**ឃើញដូច្នោះក៏មានចិត្តរំភើបថា គ្រានេះនឹងមានជ័យជម្នះសឹកសត្រូវជាប្រាកដ ហើយក៏បង្គាប់ឲ្យទូកខ្នានទាំងពួងមូរក្តោងទុក ចូលទៅចតនៅទីដដែលដូចដើម។ **ចូឆូ**ក៏ត្រឡប់ឡើងទៅលើបន្ទាយគោក ហើយនិយាយនឹងទីប្រឹក្សាទាំងពួងថា គ្រានេះទេពតាជួយយើង ទើបបណ្តាលចិត្ត**បាំងថង**មកប្រាប់ឲ្យយើងធ្វើការយកច្រវាក់វាយគាបទូកចម្បាំងចងភ្ជាប់គ្នា ជាផែខ្នានដូច្នេះ ក៏នឹងថ្កល់ដូចផែនដី នឹង

តតាំងច្បាំងគ្នាបានយ៉ាងចំណាប់ណាស់។ **ផៀយ៉ុក**ឆ្លើយថា ការដែលរៀបចំចាត់ចែងទាំងពួងនេះក៏ឃើញថាជាស្រួលមែនហើយ តែនៅបារម្ភក្រែងសឹកសត្រូវនឹងលបយកភ្លើងមកដុតឲ្យឆេះឡើង នោះឃើញថាទូកចម្បាំងទាំងពួងដែលចងភ្ជាប់គ្នានោះនឹងកែខៃថយចេញពីគ្នាមិនទាន់នឹងថ្ដោះការ។ សុំឲ្យលោករិះគិតចាត់ចែងប្រយ័ត្នខាងការពាររក្សាភ្លើងឲ្យមាំមួន ទើបនឹងមិនមានអន្តរាយ។ **ចូឆូ**អស់សំណើចហើយថា ដែលអ្នកគិតបង្ខាំងរាំងរាការពារទុកដូច្នេះក៏ល្អហើយ តែថាដូចជាមិនដឹងផ្លូវសេចក្តីបានជាបារម្ភភ័យដូច្នេះ ដែលអ្នកថាខ្លាចសត្រូវនឹងយកភ្លើងមកដុតនោះកុំព្រួយបារម្ភឡើយ ព្រោះហេតុថា ជាទេសកាលខែប្រាំង ឥឡូវនេះមានតែខ្យល់ជំនោរ និងខ្យល់បក់មកពីទិសឯលិច ឯកងទ័ពយើងនេះក៏តាំងនៅពីលើខ្យល់ ខាងទ័ព**ជីវយី**នៅពីក្រោមខ្យល់ ទោះបី**ជីវយី**ឲ្យទាហានមកលបដុតភ្លើង ខ្យល់ក៏ផាត់បក់បោកមិនឲ្យភ្លើងឆេះមកបាន គង់ត្រឡប់ឆេះឆាបតាមចុងខ្យល់បក់ច្រានទៅលើកងទ័ព**ជីវយី**វិញ។ បើជាទេសកាលខែកត្តិកខាងខ្នើត ចុងរដូវភ្លៀវក៏នឹងកើតខ្យល់ព្យុះឈ្មោះសលាត័នមកខ្លះ គ្រានេះកន្លងមកដល់ខែបុស្សហើយ ផុតទេសកាលភ្លៀងហើយ យើងក៏មិនត្រូវខ្លាចអ្វី។ ទីប្រឹក្សាទាំងពួងឮដូច្នោះក៏គ្រវីក្បាលនាំគ្នាគំនាប់**ចូឆូ**សរសើរថា តម្រិះប្រាជ្ញាជ្រៅទូលាយឆ្ងាយណាស់ ដឹងការទេសកាលភ្លៀងខ្យល់មិនសល់ត្រង់ណា។

**ចូឆូ**ក៏និយាយថា ទាហានរបស់យើងសុទ្ធតែពួកអ្នកលើក្នុងព្រៃ បើមិនបានតម្រិះរិះគិតគំនិត**បាំងថង**មកពន្យល់ឲ្យធ្វើដូច្នេះ ឃើញថាមិនបានឆ្លងកាត់ជ្រោយបណ្តោយចូលទៅក្នុងស្រុកកាំងតាំងបានឡើយ។

**ជៀវហៀ**និង**ជៀវឡាំ** ដែលជាទាហាន**អ៊ួនសៀវ**ឆ្លើយជម្រាប**ចូឆូ**ថា ខ្ញុំបាទជាពួកអ្នកលើក៏មែន តែចំណានការខាងទូកគ្រាន់បើដែរ ខ្ញុំបាទនឹងសុំទូកចម្បាំងម្តៅផ្ទុកទាហានឲ្យព្រម លើកទៅវាយកងទ័ព**ជីវយី**វេលានេះយកជ័យជម្នះជាដំបូងឲ្យប្រាកដកេរ្តិ៍ឈ្មោះ ថាជាមនុស្សអ្នកលើក៏ចំណានក្នុងការទូកក្តារ។

**ចូវអ្វូ**តបថា ដែលអ្នកទាំងពីរចំណានការទូកក៏មែន តែបានខាងឯក្នុងស្ទឹងនិងព្រែក ឯពួកស្រុកកាំងតាំងខ្លាំងពូកែខាងទូកនោះរួសរហ័សណាស់ បីដូចត្រីហែលឆ្លាស់គ្នាក្នុងទឹក អ្នកទាំងពីរកុំបីមើលងាយ ដែលនឹងអាសាទៅនោះក៏គាប់ចិត្តខ្ញុំណាស់ហើយ តែយើងនឹងឲ្យទៅនោះ បីដូចក្លែងធ្វើឲ្យអ្នកទាំងពីរស្លាប់អសារឥតការ។ **ជៀវហៀ**, **ជៀវឡាំ**ថា តែត្រឹមទូកតូចក៏បានដែរ នឹងបានធ្វើការរហ័សបើនឹងប្រោសហើយ បែងទូកឲ្យ**ជៀវឡាំ**ពាក់កណ្ដាល លើកឆ្លងទៅវាយខ្ទប់យកកងទ័ព**ជីវយី**កាត់យកក្បាល**ជីវយី**ឲ្យបាន។ **ចូវអ្វូ**ថា បើនឹងអាសាទៅក៏ទៅចុះ យើងនឹងឲ្យទាហានប្រាំរយ ហើយនិងឲ្យ**ប៊ុនផេង**នាំទូកចម្បាំងសាមសិបលើកជូនទៅក្រោយ តែអ្នកទាំងពីរធ្វើតែល្មមឲ្យឃើញថ្វីដៃ កុំរំលោភបំពានចូលទៅឲ្យថ្លោះការ។ **ជៀវហៀ**, **ជៀវឡាំ**មានសេចក្ដីត្រេកអរក៏គំនាប់លា**ចូវអ្វូ**ចេញមក ហើយចាត់ចែងទាហាន និងគ្រឿងសាស្ត្រាវុធឲ្យចុះទូកម្ភៃប្រាំលើកតម្រង់ទៅកងទ័ព**ជីវយី**។

ឯទាហាន**ជីវយី** កាលថ្ងៃដែល**ចូវអ្វូ**ឲ្យបណ្ដែតផែទូកចម្បាំងនោះ ដឹងដំណឹងហើយក៏ចូលទៅប្រាប់**ជីវយី** ៗក៏នាំទាហានឡើងទៅមើលលើកំពូលភ្នំខ្ពស់ ឃើញទាហានក្នុងកងទ័ព**ចូវអ្វូ**បណ្ដែតផែទូកចម្បាំងវាយស្គរ ស្រែកហ៊ោកញ្ជ្រៀវអឺងកងទើប**ជីវយី**ត្រឡប់មកបន្ទាយវិញ។ កាល**ជៀវហៀ**, **ជៀវឡាំ**លើកទ័ពទូកទៅនោះ ទាហានយាមល្បាតក៏ចូលទៅប្រាប់**ជីវយី** ៗក៏ប្រឹក្សានឹងទាហានទាំងពួងថា ទាហាន**ចូវអ្វូ**លើកកន្លងចូលមកដល់មុខកងទ័ពទូកយើងហើយ នរណានឹងអាចទទួលអាសាចេញទៅតនឹងសឹកសត្រូវបាន? **ហាន់តុង** និង**ជីវថាយ**ក៏លា**ជីវយី**ចេញទៅចុះទូកព្រមទាំងទាហានគ្រប់ទូកទាំងប្រាំ។

ឯ**ជៀវហៀ**, **ជៀវឡាំ** ឃើញទាហាន**ជីវយី**ចេញមកក៏ស្រែកថា អញទាំងពីរមានថ្វីដៃខ្លាំងពូកែណាស់ នរណាអាចហ៊ានមកតស៊ូនឹងអញ ក៏ចេញមុខមកចុះ។ ឯ**ជៀវហៀ**កាន់លំពែងឡើងទៅឈរខាងក្បាលទូក ឲ្យទាហានស្រូតចែវហើយឲ្យបាញ់ធ្នូចម្រុះទៅជាច្រើន ឯ**ហាន់តុង**ក៏យកខែលរងព្រួញ លុះទូកចម្បាំងចូលទៅជិតគ្នា **ហាន់តុង**ក៏យកលំពែងចាក់ត្រូវ**ជៀវហៀ**ស្លាប់ ហើយលោតឡើងលើទូកកាប់

សម្លាប់ទាហានក្នុងទូកនោះស្លាប់អស់រលីង។ **ជៀវឡាំ**ឃើញដូច្នោះ ក៏ឲ្យទាហានស្រូតចែវទូកជំនួយចូលទៅតយុទ្ធទៀត។ **ជីវថាយ**ក៏ដេញទូកទាហានចូលទៅជិតគ្នា ហើយលោតឡើងទៅលើទូក យកគ្រប៊ីកាប់**ជៀវឡាំ**ស្លាប់ ហើយកាប់ចាក់ទាហានក្នុងទូកនោះ ស្លាប់អស់គ្មានសល់ ឯទូកទាហាន**ជៀវហៀ**, **ជៀវឡាំ**ដែលសល់នោះក៏ស្រូតចែវថយរត់ទៅក្រោយវិញ **ហាន់តុង**ក៏លើកទូកដេញតាម ទទួលប្រទះនឹងទ័ពទូក**ប៊ុនផេង**លើកជាជំនួយមកតាមពីក្រោយ ក៏ចូលច្បាំងប្រយុទ្ធគ្នាជាកោលាហល។

ក្នុងខណៈ**ជីវយី**ឡើងទៅលើកំពូលភ្នំ ក្រឡេកទៅខាងជើងឃើញទូកកងទ័ព**ចូឆូ**ដោតទង់ច្រូងច្រុះជាច្រើន ហើយក្រឡេកមកត្រង់មុខបន្ទាយរបស់ខ្លួន ឃើញទង់ទូកចម្បាំង**ហាន់តុង**, **ជីវថាយ**កំពុងច្បាំងគ្នានឹង**ប៊ុនផេង**ជាសន្ធឹកណាស់ ឃើញទូកទ័ព**ប៊ុនផេង**ទប់ទល់ពុំឈ្នះក៏ថយរត់ទៅ ឃើញទូកទ័ព**ហាន់តុង**, **ជីវថាយ**នៅចែវដេញតាម **ជីវយី**បារម្ភខ្លាចក្រែងទ័ព**ចូឆូ**នឹងបង្កប់ចាំធ្វើអន្តរាយ**ហាន់តុង** និង**ជីវថាយ**ឲ្យថ្លោះការ **ជីវយី**ក៏ប្រឹក្សានឹងនាយទ័ពនាយកងទាំងពួងថា ទូកចម្បាំង**ចូឆូ**ច្រើនលើសលុបបហួសវិស័យដែលនឹងគណនារាប់ ឧបមាដូចស្លឹកឈើដែលនៅលើដើម យើងនឹងរិះគិតតតាំងច្បាំងប្រការម្ដេចទើបនឹងបានជ័យជម្នះ។

ទីប្រឹក្សានិងសេនាទាហានទាំងពួង ក៏មិនទាន់ឆ្លើយថាប្រការម្ដេច ទទួលកើតខ្យល់ព្យុះរលកបោកមកខ្លាំងណាស់ **ជីវយី**ក្រឡេកទៅឃើញទង់លឿងក្នុងកងទ័ព**ចូឆូ**បាក់ដងរលំចុះ **ជីវយី**ក៏សើចហើយថា ដែលទង់ជ័យ**ចូឆូ**បាក់ដងនោះ ជាការអពមង្គលដល់**ចូឆូ**ល្មមផុតពាក្យហើយ ចុងខ្យល់ក៏បក់បោកមកទៀត ត្រូវទង់ជ័យក្នុងកងទ័ព**ជីវយី**របូតចេញពីដង អណ្ដែតឡើងទៅធ្លាក់លើភ្នំចំពោះមុខ**ជីវយី**។

**ជីវយី**ឃើញដូច្នោះក៏ភ័យស្លុតចិត្តគិតថា ឥឡូវកងទ័ព**ចូឆូ**ជាដើមខ្យល់ ឯខាងទ័ពយើងជាចុងខ្យល់ ការដែលគិតទុកថានឹងដុតទ័ព**ចូឆូ**នោះឃើញថា មិនបានសម្រេច ព្រោះខ្យល់មិនបានបក់ត្រឡប់ទៅខាងទ័ព**ចូឆូ** តើនឹងរិះគិតប្រការម្ដេចអេះ មិនឃើញច្រកល្អកសោះដូច្នេះ មិនដឹងជាយ៉ាងណា? **ជីវយី**ក៏មានសេចក្ដីក្ដៅក្រហាយព្រួយទុក្ខទោមនស្សមិនសប្បាយ ចេះតែក្រហល់ក្រហាយញ័រអស់សព្វ

សាច់ តែគិតទៅគិតមកមិនដាច់ស្រេច រឹតតែទុក្ខខ្លាំងឡើង ទាល់តែក្អួតធ្លាក់មកសុទ្ធតែឈាម ហើយដួលសន្លប់នៅទីនោះ ទាហានទាំងអស់ក៏ភ័យស្លុតស្មារតី ជួយគ្នាគ្រាហ៍នាំខ្លួន**ជីវយី**ត្រឡប់ចុះទៅបន្ទាយ លុះរឹតរួតច្របាច់ដឹងខ្លួនហើយ ទាហានទាំងពួងក៏ប្រឹក្សាគ្នាថា គ្រានេះ**ជីវយី**ជាមេកងធំក្នុងទ័ពត្រឡប់ជាឈឺដូច្នេះ បើសិនណាជា**ចូឆូ**ដឹងក៏នឹងលើកទ័ពមកច្បាំងគ្របសង្កត់ យើងក៏នឹងបានសេចក្ដីភ្លាំងភ្លាត់បរាជ័យ ហេតុនេះត្រូវយើងនាំសេចក្ដីទៅជម្រាប**ស៊ុនគួន** សូមខ្លួនហ្មពេទ្យដែលឯកនាំមកព្យាបាលរក្សារោគ**ជីវយី**ឲ្យសះជា ទើបនឹងបានធ្វើការជាឆាប់តទៅ។

ខណៈនោះ**ឡោសុក**ឃើញ**ជីវយី**ក្រោកមិនរួចដូច្នោះ ក៏មិនមានសេចក្ដីសប្បាយទើបនាំរឿងរ៉ាវទៅប្រមាណប្រាប់**ខុងបេង**ថា **ជីវយី**ក្អួតឈាម ឥឡូវនៅដេកឈឺមិនទាន់ជា។ **ខុងបេង**ក៏ក្លែងសួរថា កាលបើ**ជីវយី**ឈឺអួលនៅដូច្នេះ តើអ្នកបានឃើញការទាំងពួងនោះនឹងជាប្រការម្ដេច? **ឡោសុក**ថា ដែល**ជីវយី**ជាមេកងធំក្នុងទ័ពបង្គាប់បញ្ជាការទាំងពួង ឥឡូវមកឈឺដូច្នេះក៏ជាបុណ្យរបស់**ចូឆូ** ជាកម្មរបស់ស្រុកកាំងតាំង។ **ខុងបេង**ឮដូច្នោះក៏អស់សំណើចហើយថា ឯរោគ**ជីវយី**នេះខ្ញុំក៏ល្មមនឹងរក្សាព្យាបាលឲ្យសះជាបាន។

**ឡោសុក**ថា បើលោករក្សារោគ**ជីវយី**ឲ្យសះជាបាន ក៏ជាបុណ្យរបស់អ្នកស្រុកកាំងតាំង ហើយ**ឡោសុក**ក៏នាំ**ខុងបេង**ចូលទៅក្នុងបន្ទាយ ឲ្យ**ខុងបេង**នៅខាងក្រៅ ខ្លួន**ឡោសុក**ឯងក៏ចូលទៅខាងក្នុង ឃើញ**ជីវយី**កំពុងដេកឈឺ **ឡោសុក**សួរថា ដែលលោកឈឺនេះបណ្ដាលមកពីរោគអ្វី? **ជីវយី**ថា រោគក្នុងខ្លួនខ្ញុំ ៗមិនដឹងប្រាប់ថាឈឺនោះយ៉ាងម្ដេចទេ តែក្នុងដើមទ្រូងត្រង់ថ្លើមប្រមាត់នោះញាប់ញ័រ ចាប់ដូចជាត្រូវអាវុធផ្សេងៗ។ **ឡោសុក**សួរថា លោកបានពិសាថ្នាំអ្វីខ្លះដែរឬទេ? **ជីវយី**ប្រាប់ថា ថ្នាំមានគ្រប់មុខ តែផឹកមិនបាន ព្រោះហេតុថាខ្យល់មកស្ទះប៉ះដរាប។ **ឡោសុក**ថា រោគដែលលោកឈឺនេះ **ខុងបេង**ថានឹងមើលឲ្យជា ឥឡូវ**ខុងបេង**មកដែរនៅខាងក្រៅ។ **ជីវយី**ក៏ឲ្យអញ្ជើញ**ខុងបេង**ចូលទៅ ហើយឲ្យមនុស្សដែលថែរោគលើកគ្រាហ៍ឲ្យអង្គុយ។ **ខុងបេង**ថា ខ្ញុំមិនបានមកសួរលោកពីរបីថ្ងៃនេះ លោកក៏បង្កើត

បច្ចុប្បន្នរោគមកភ្លាម ខ្ញុំមិនដឹងសោះ។ **ជីវយី**ថា ធម្មតាកើតមកជាមនុស្សនេះ កម្រនឹងដឹងការក្នុងអាកាស។

*បាត់ឃ្លាមួយចំនួន ក្នុងច្បាប់ដើមត្រង់ទំព័រ ៦៨៧ មិនដឹងថា តើខុងបេងនិយាយយ៉ាងណាខ្លះទៅជីវយី។*

**ជីវយី**ឮ**ខុងបេង**ថាដូច្នោះក៏នឹកខឹងណាស់ តែមិនចេញស្តីថាប្រការម្តេច ធ្វើជាស្រួល តែរោគនោះក៏រឹតតែកម្រើកខ្លាំងឡើងទៀត។ **ខុងបេង**ថា ក្នុងដើមទ្រូងលោកក៏សឹងប្រកបដោយសេចក្តីវិតក្កចេះតែប្រមូលគ្នាជាច្រើនឡើង បានជាបណ្តាលទៅជារោគដូច្នេះ ត្រូវតែប្រកបថ្នាំត្រជាក់ទើបសះជា។ **ជីវយី**ថា ថ្នាំត្រជាក់ក៏បានផឹកលេបច្រើនមុខមកហើយ រោគមិនអន់ស្រន់ចុះ។ ហើយ**ខុងបុង**សួរថា ថ្នាំត្រជាក់របស់អ្នកឈ្មោះអ្វី? ក្រែងផឹកទៅក្រកបនឹងរោគខ្ញុំ?

**ខុងបេង**ក៏បណ្តេញមនុស្សបម្រើទាំងអស់ចេញទៅ ហើយក៏យកពិតមកសរសេរអក្សរដប់ប្រាំមួយតួជាសេចក្តីថា ដែលនឹងគិតកម្ចាត់**ចូឆូ**នោះបាន ចាត់របៀបរៀបទុកជាស្រេចអស់ហើយ គឺប្រាថ្នានឹងយកភ្លើងដុតទ័ព**ចូឆូ** នៅខ្វះតែខ្យល់សលាតន់មួយមុខ ដែលមិនបានបក់មកដូចបំណងប្រាថ្នាលោក។ លុះសរសេរហើយក៏ហុចទៅឲ្យ**ជីវយី** ក៏ថា ឯរោគដែលឈឺនេះឧបមាដូចធាតុទាំងបួនក្នុងរូបកាយរបស់លោក ឯធាតុដីធាតុទឹកក៏មានជាប្រក្រតីមកហើយ នៅខ្វះតែធាតុខ្យល់និងធាតុភ្លើងនៅទន់ណាស់ បើខ្យល់បក់មកត្រូវភ្លើងកម្រើកឡើងក្លាហើយ រោគលោកក៏នឹងជាស្រឡះ។

**ជីវយី**ឃើញសំបុត្រនិងស្តាប់ពាក្យ**ខុងបេង**និយាយឧបមាដូច្នោះ ក៏តក់ស្លុតស្មារតីគិតថា **ខុងបេង**នេះកន្លងដឹងតម្រិះរិះគិតរបស់យើងដូចទេពតាមកបញ្ចូលចិត្ត **ជីវយី**ក៏សាស្រាយអធិប្បាយសេចក្តីទាំងពួង ដែលគិតនោះឲ្យ**ខុងបេង**ស្តាប់គ្រប់ប្រការ ហើយសួរ**ខុងបេង**ថា គំនិតរបស់អ្នកនឹងគិតឃើញប្រការម្តេច នឹងឲ្យកើតខ្យល់សលាតន់មកបាន? ឯ**ខុងបេង**នោះបានដឹងក្នុងតម្រាថា ដល់ថ្ងៃប្រាំរោច ខែបុស្សនោះនឹងកើតខ្យល់សលាតន់ជាប្រាកដ តែគិតថា ខ្លាចក្រែង**ជីវយី**និងយើងធ្វើ

ការជាមួយគ្នាតទៅ **ជីវយី**មិនកោតខ្លាចគំនិតដែលគិត នឹងនាំឲ្យ**ជីវយី**មើលងាយ យើងត្រូវប្រើកលឧបាយនិយាយប្រាប់ឲ្យ**ជីវយី**គិតធ្វើការ ហើយនឹងលបរត់ទៅ។

លុះគិតហើយ**ខុងបេង**ថា ខ្លួនខ្ញុំនេះមានតម្រិះប្រាជ្ញាតិច តែបានប្រទះឃើញក្បួនតម្រាអាចារ្យម្នាក់ ប្រដៅឲ្យរៀនសុំខ្យល់សុំភ្លៀង បើលោកនឹងប្រាថ្នាចង់បានខ្យល់សលាត័ន ត្រូវឲ្យចាត់សង់រានបីជាន់ កម្ពស់មួយជាន់បីហត្ថប្លាយ នៅលើកំពូលភ្នំឡាំពិនសាននេះ ហើយសូមទាហានមួយរយម្ភៃនាក់កាន់ទង់ផ្សេងៗ អង្គុយព័ទ្ធរោងពិធីជុំវិញ ដើម្បីនឹងបានបម្រុងប្រើការ។ ខ្ញុំនឹងឡើងទៅសែកគាថាមន្តតាមតម្រាគ្រប់បីថ្ងៃបីយប់ សុំឲ្យខ្យល់សលាត័នមានមកបីថ្ងៃបីយប់បាន លោកនឹងបានលើកកងទ័ពទៅបំផ្លាញទ័ពទឹក**ចូឆូ**បានយ៉ាងមាំ។ **ជីវយី**ថា អ្នកកុំបាច់ធ្វើឲ្យដល់បីថ្ងៃបីយប់ឡើយ សូម្បីតែមួយថ្ងៃ ឬមួយយប់នេះ ឬស្អែក បើបង្អង់ទុកឲ្យយូរតទៅ សេចក្ដីដែលគិតនោះក៏នឹងសាយសុសទៅដល់**ចូឆូ**។ **ខុងបេង**ថា ខ្ញុំនឹងធ្វើការហៅខ្យល់ឲ្យបានក្នុងថ្ងៃប្រាំរោចខែបុស្ស ពេលយាមមួយប្លាយ ឲ្យខ្យល់សលាត័នធ្លាក់មកជាយ៉ាងខ្លាំង លុះដល់ថ្ងៃប្រាំពីររោចទើបស្ងប់។

**ជីវយី**ឮដូច្នោះក៏មានចិត្តសោមនស្សត្រេកអរ ដូច**ខុងបេង**យកថ្នាំទិព្វមកលាយលាបឲ្យរោគដែលឈឺនោះសះជាមួយរំពេច ទើបក្រោកឡើងគំនាប់**ខុងបេង** ហើយក៏បង្គាប់ឲ្យពួកមេការទៅរៀបចំធ្វើរានពិធី ឲ្យទាហានយាមរក្សាតាមពាក្យ**ខុងបេង**បង្គាប់។ **ខុងបេង**ថា ដែលមុននឹងឲ្យទៅសុំខ្យល់នោះ ខ្ញុំត្រូវសុំអាជ្ញាសិទ្ធិទៅផង ទើបនឹងធ្វើការបានស្រួល។ **ជីវយី**មិនទាន់គិត ក៏យកគ្រប៊ីដែល**ស៊ុនគួន**បានឲ្យមកនោះ ប្រគល់ទៅ**ខុងបេង** ៗទទួលយកគ្រប៊ីហើយក៏នាំ**ឡោសុក**និងទាហានទាំងពួងឡើងលើកំពូលភ្នំឡាំពិនសាន ហើយធ្វើជាមើលភូមិឋាន ដែលនឹងឲ្យទាហានសង់រោងពិធីនោះគ្រប់បីជាន់ ក្នុងមួយជាន់កម្ពស់បីហត្ថប្លាយ ជាន់ដើមទំហំម្ភៃព្យាមបួនជ្រុង ហើយឲ្យជីកយកដីខាងទិសអាគ្នេយ៍ មកប៉ាន់ជារូបមករតម្កល់ទុកខាងទិសបូព៌ ក្នុងរានជាន់ដើមឲ្យដោតទង់ខៀវប្រាំពីររួត ប៉ាន់ជារូបទេវតា ឈ្មោះ**ហៀនប៊ូ**តម្កល់ទុកខាងទិសឧត្តរដោតទង់ខ្មៅប្រាំពីររួត ប៉ាន់ជារូបខ្លាតម្កល់ទុកខាង

ទិសបស្ចិមដោតទង់សប្រាំពីររូត ប៉ាន់ជារូបក្អែកតម្កល់ទុកខាងទិសទក្សិណដោតទង់ក្រហមប្រាំពីររូតដូចគ្នា ឯជាន់កណ្ដាលនោះមានមនុស្សកាន់ទង់លឿងប្រចាំទិសទាំងប្រាំបី ទិសនីមួយៗមានមនុស្សប្រាំបីនាក់ ជាន់លើបង្អស់មានមនុស្សប្រាំបីនាក់ ម្នាក់នៅទិសបូព៌កាន់គោមរ៉ៃយ៉ាប្រាំពីរដួង ម្នាក់នៅទិសឧត្តរកាន់ឈើចងឆ្អឹងមាន់ ម្នាក់នៅទិសបស្ចិមកាន់គ្រប៊ី ម្នាក់នៅទិសទក្សិណកាន់គោករងធូបទៀន លុះចាត់ការស្រេចហើយ **ខុងបេង**ក៏ធ្វើជានិយាយនឹង**ឡោសុក**ថា អ្នកចូរជួយត្រឡប់ទៅប្រាប់**ជីវយី**ថា ដែលខ្ញុំមកសុំខ្យល់ឲ្យនេះបើមិនបានដូចសេចក្ដីគិតទេ ក៏កុំឲ្យ**ជីវយី**យកទោសខ្ញុំឡើយ។ **ឡោសុក**ទទួលពាក្យហើយក៏លាចុះទៅ។

ឯ**ខុងបេង**នោះ កាលថ្ងៃបីរោចខែបុស្សវេលាព្រឹក ក៏តាំងទៅងូតទឹកជម្រះកាយ ហើយតែងខ្លួនស្លៀកពាក់ដណ្ដប់សំពត់ឆៀងស្មាម្ខាងរំសាយសក់ចុះ ហើយនិយាយនឹងទាហានទាំងពួងថា គ្រានេះយើងនឹងធ្វើការតាំងពិធីជាធំ ឯបណ្ដាទាហានដែលយើងបានរៀបចំចាត់ចែងទុកទាំងប៉ុន្មាន បើឃើញយើងធ្វើប្រការម្ដេចក៏កុំឲ្យនិយាយគ្នាឬដើរទៅមកចាកទីកន្លែងឡើយ ត្រូវតែនៅឲ្យស្ងៀមជាប្រក្រតីទម្រាំយើងធ្វើការឲ្យបានសម្រេច បើនរណាហើយមិនស្ដាប់ យើងនឹងយកគ្រប៊ីអាជ្ញាសិទ្ធិដែល**ជីវយី**ឲ្យមកនេះកាត់ក្បាលចេញ។ លុះផ្ដាំទាហានរួចហើយ **ខុងបេង**ក៏ឡើងទៅលើរានពិធីជាន់លើ ទើបតាំងអុជធូបទៀនបូជាទេវតា ហើយធ្វើជាអង្គុយភាវនាសែកមន្តគាថាហៅខ្យល់ លុះវេលាសមគួរហើយក៏នាំទាហានទាំងអស់ចុះមកងូតទឹកបរិភោគអាហារ ហើយក៏ត្រឡប់ឡើងទៅធ្វើការដូចដើម។

ឯ**ជីវយី**ក៏បង្គាប់ឲ្យ**ឡោសុក**និង**ទៀអៅ**ចាត់ចែងកងទ័ពទូកឲ្យព្រម បើកើតខ្យល់សលាត័នមកកាលណា ក៏ឲ្យលើកទាហានទៅធ្វើការឲ្យទាន់ពេល ហើយធ្វើសំបុត្របកទៅដល់**ស៊ុនគួន**ឲ្យលើកកងទ័ពមកជួយ។ ឯ**អ៊ុយកាយ**ក៏រៀបចាត់ចែងទូកម្ភៃ យកស្មៅនិងចំបើងផ្ទុកពេញទូកទាំងអស់ ហើយក៏យកខ្លាញ់ត្រីបាចសាចទៅលើស្មៅនិងចំបើង ឲ្យទទឹកជាប្រឆេះភ្លើង ហើយយករំសេវ និងស្ពាន់ធ័របាចសាចទៅលើស្មៅនិងចំបើងថែមទៀតគ្រប់ទាំងម្ភៃទូក ហើយយកទង់ក្អែបខៀវដោតលើ

ក្បាលទុកជាសម្គាល់ លុះត្រៀមស្រេចហើយក៏ចតទូកចាំស្ដាប់**ជីវយី**មានបង្គាប់វេលាណា ក៏នឹងបានលើកចែវទៅដោយរហ័សវេលានោះ។

កាល**កាំឡេង**និង**ដាំតេក**បានសេចក្ដីជាក់លាក់ហើយ ក៏ក្លែងរក្សា**ឈ្មួតុង, ឈ្មួហោ**ទុកជាប់នឹងខ្លួន ហើយបង្គាប់ទាហានឲ្យរវាំងមើល**ឈ្មួតុង, ឈ្មួហោ**កុំឲ្យវេះវត់រួចទៅបាន បើ**ជីវយី**លើកទ័ពចេញទៅកាលណា នឹងបានធ្វើការតាម**ជីវយី**បង្គាប់ទុក។ ឯទាហានយាមល្បាតក៏ចូលទៅជម្រាប**ជីវយី**ថា ឥឡូវ**ស៊ុនគួន**លើកកងទ័ពមកឈប់នៅចម្ងាយផ្លូវពីបន្ទាយនេះប្រហែលប្រាំបីរយសិន (៣២ គ.ម) **ជីវយី**ឮដូច្នោះក៏អរណាស់ ទើបប្រើ**ឡោសុក**ទៅប្រកាសប្រាប់ទាហានទាំងពួងថា ឲ្យរៀបចំទូកចម្បាំងទុកឲ្យព្រម បើនឹងលើកចេញទៅកាលណាឲ្យទាន់ការ បើកងណាមេណាធ្វើឲ្យយឺតយូរត្រូវប្រហារជីវិត។ **ឡោសុក**ក៏ចេញទៅប្រកាសតាមពាក្យ**ជីវយី**បង្គាប់នោះ នាយកងនាយទ័ពក៏ប្រុងប្រៀបរៀបចំព្រមស្រេច ទាំងទូកទាំងគ្រឿងសាស្ត្រាវុធតាំងពីព្រលប់ លុះដល់ភ្លឺក៏មិនបានឃើញខ្យល់ធ្លាក់មកសោះ។ **ជីវយី**ក៏និយាយនឹង**ឡោសុក**ថា **ខុងបេង**ទៅធ្វើការអស់មួយថ្ងៃមួយយប់ទៅហើយ ក៏មិនទាន់ឃើញមានខ្យល់សលាត័នធ្លាក់មកសោះ។ **ឡោសុក**ថា **ខុងបេង**ធ្វើការនោះមុខជាកើត។ លុះនិយាយគ្នាដូច្នោះហើយក៏នាំគ្នាចាំមើលពីព្រឹក លុះដល់ពេលយប់យាមពីរប្លាយក៏ឮសូរសំឡេងសន្ធឹកសន្ធាប់ពីខាងទិសអាគ្នេយ៍។ **ជីវយី**ក៏នាំ**ឡោសុក**ចេញទៅមើលកណ្ដាលវាល ក៏មិនឃើញមានខ្យល់អ្វីសោះ ស្ងប់ឈឹងទាំងអស់ លុះមួយស្របក់ក៏ធ្លាក់ខ្យល់ព្យុះសលាត័នបក់បោកមក។ **ជីវយី**ក៏មានអំណរណាស់ និយាយនឹង**ឡោសុក**ថា ឯតម្រិះប្រាជ្ញា**ខុងបេង**ដឹងតម្រាហៅខ្យល់ក្នុងអាកាសបានដូច្នេះ នឹងរកអ្នកឯណាប្រៀបផ្ទឹមឲ្យត្រឹមស្មើគ្មាន ឧបមាដូចនឹងរាប់ផ្កាយតារានៅលើអាកាសបានទាំងអស់ ពុំនោះនឹងញ៉ាំងព្រះមហាសមុទ្រដ៏ជ្រៅឲ្យមើលឃើញរបស់ទាំងពួងបាន។ បើយើងទុក**ខុងបេង**ឲ្យនៅតទៅខាងមុខ ទុក្ខក៏នឹងមានដល់ស្រុកកាំងតាំងគង់អន្តរាយ ត្រូវតែរិះរកកលឧបាយសម្លាប់**ខុងបេង**ចេញ ទើបស្រុកយើងនឹងបានសេចក្ដីសុខតទៅ។ លុះនិយាយហើយក៏បង្គាប់**តេងហង** និង**ឈីសេង**ឲ្យលើក

ទាហានម្នាក់មួយរយ ចេញទៅចាប់ខ្លួន**ខុងបេង**សម្លាប់។ ឯ**ឈីសេង**ក៏លើកទាហានស្រូតទៅចុះទូក លើកស្កាត់ខាងមាត់ទន្លេ ថាបើឃើញ**ខុងបេង**នឹងចាប់ខ្លួនសម្លាប់ចេញ។ ខណៈនោះ**ខុងបេង**ដែលបានឃើញខ្យល់សលាត័នបោកបក់មកជាខ្លាំង ក៏សម្លឹងមើលទាហានទាំងពួង ឃើញកាន់ទង់ និងគ្រឿងប្ដីការគ្រប់ដៃជាប្រក្រតីតាមបង្គាប់ **ខុងបេង**ក៏លបរត់ចុះពីលើរានពិធី ស្រូតរូតទៅកាន់កំពង់ទឹកដែលបានកំណត់ទុកឲ្យ**ជូឡុង**មកទទួលនោះ។ ទាហានទាំងអស់ក៏មិនបានសម្គាល់ជា**ខុងបេង**នឹងរត់ទេ។ លុះ**តេងហង**ទៅដល់កណ្ដាលផ្លូវ ទទួលខ្យល់សលាត័នបោកបក់មកយ៉ាងខ្លាំង **តេងហង**ក៏បង្ខំបរសេះឡើងទៅដល់ទីរានពិធី ឃើញទាហានទាំងពួងកាន់ទង់ប្រុងខ្លួនមិនកម្រើក **តេងហង**ក៏ចុះពីលើសេះកាន់គ្រប៊ីឡើងទៅលើរាន ស្រាប់តែរកខ្លួន**ខុងបេង**មិនឃើញសោះ ក៏ត្រឡប់ចុះមកសួរពួកទាហានដែលនៅក្នុងទីនោះថា **ខុងបេង**នៅឯណាទៅហើយ? ទាហានដែលកាន់ទង់ប្រាប់ថា **ខុងបេង**ចុះទៅមុនលោកអម្បាញ់មិញទៅហើយ។ **តេងហង**ក៏ចុះទៅដល់ដី ឡើងសេះបំផាយចុះមកទៀត លុះទៅដល់មាត់ទន្លេ ប្រទះនឹង**ឈីសេង**ក៏សាកសួរគ្នាទៅវិញទៅមកមិនបានសេចក្ដី ទទួលមានកូនទាហានម្នាក់មកប្រាប់ថា កាលពេលព្រលប់ខ្ញុំបាទបានឃើញទូកតូចមួយ មកចតនៅក្បាលជ្រោយត្រង់ឆ្នេរខ្សាច់មាត់ទន្លេ លុះវេលាយាមពីរប្លាយ ឃើញ**ខុងបេង**ដើរមកចុះទូកនោះ ហើយចែវលឿនទៅទិសឯជើង។ **តេងហង**និង**ឈីសេង**ក៏ចុះទូកហើយបើកក្ដោងញែកគ្នាតាមទៅ។

**ឈីសេង**ចែវតាមទៅទាន់ហើយស្រែកហៅ**ខុងបេង**ឲ្យឈប់នៅសិន ហើយប្រាប់ថា **ជីវយី**ឲ្យតាមមកអញ្ជើញទៅវិញ។ **ខុងបេង**ឮទាហានស្រែកហៅដូច្នោះ ក៏ឆ្លើយតបទៅវិញថា អ្នកឯងត្រឡប់ទៅប្រាប់**ជីវយី**វិញចុះថា ខ្យល់ដែលយើងសូត្រស្រែកហៅនោះបានធ្លាក់មកហើយ ឲ្យខំធ្វើការនឹង**ចូឆូ**ឲ្យល្អចុះ ឯខ្លួនយើងនឹងលា**ជីវយី**ត្រឡប់ទៅស្រុកកាំងហែសិន ដល់ថ្ងៃក្រោយសឹមត្រឡប់មកសួរ**ជីវយី**វិញ។ **ឈីសេង**ក៏ថែមថា ឲ្យឈប់សិន ខ្ញុំនឹងជម្រាបសេចក្ដីដែល**ជីវយី**បង្គាប់មកជាការសម្ងាត់។ **ខុងបេង**ថា ដែលអ្នកមកនេះ យើងក៏ដឹងជាមុនទៅទៀត គឺ**ជីវយី**គិតទុក

នឹងធ្វើអន្តរាយដល់យើង ៗក៏ឲ្យ**ជូឡុង**មកចាំទទួល អ្នកឯងចូរវិលត្រឡប់ទៅប្រាប់**ជីវយី**ចុះ បើមិនព្រមស្ដាប់ខំតែចូលមក នឹងរកកម្លាំងតនឹងយើងមិនបានទេ។

**ឈីសេង**ឃើញទូក**ខុងបេង**មិនបានបើកក្ដោង ក៏ឲ្យទាហានចែវស្រូតតាមទៅ។ **ជូឡុង**ឃើញ**ឈីសេង**តាមមកជិតក៏ស្រែកថា អញឈ្មោះ**ជូឡុង** បានទទួលពាក្យ**ខុងបេង**បង្គាប់ឲ្យអញឡើងមកទទួល វេលានេះ**ខុងបេង**ក៏បាននិយាយហាមប្រាមខ្លួន ៗមិនស្ដាប់ចេះតែតាមមកប្រុងនឹងធ្វើអន្តរាយ**ខុងបេង** បើយើងមិនយកធ្នូមកបាញ់ឲ្យស្លាប់ឥឡូវនេះទេ **ឡៅពី**ចៅហ្វាយយើងនិង**ស៊ុនគួន**ក៏ខឹងខុសអធ្យាស្រ័យមិនស្រួល យើងក៏បាញ់ឲ្យតែល្មមនឹងថ្វីដៃចុះ ថាហើយក៏យឹតធ្នូបាញ់ត្រូវខ្សែក្ដោងដាច់ធ្លាក់ក្ដោងចុះ ទូក**ឈីសេង**ក៏វិលត្រឡប់ស្ទើរតែនឹងភ្លូកលិច។ **ជូឡុង**ក៏ឲ្យទាហានបើក្ដោងចេញទៅ។

ឯ**ឈីសេង** លុះឃើញទូក**តេងហង**តាមទៅទាន់ ក៏ប្រាប់អាថ៌សេចក្ដីទាំងពួងឲ្យស្ដាប់ហើយថា **ជូឡុង**នោះមានថ្វីដៃខ្លាំងពូកែណាស់ កាលគ្រាច្បាំងនៅវាលប័នបោនោះ ក៏បានសម្លាប់ទាហាន**ចូឆូ**អស់ជាច្រើន ដែលយើងនឹងតាមជិតដោយទៅមុខជាតស៊ូនឹង**ជូឡុង**មិនបាន។ លុះប្រឹក្សាគ្នាហើយក៏ត្រឡប់ទៅប្រាប់**ជីវយី** តាមដំណើរដើមរហូតដល់ចប់សព្វគ្រប់ប្រការ។ **ជីវយី**បានឮដូច្នោះក៏ភ័យណាស់ហើយថា តម្រិះរិះគិតរបស់**ខុងបេង**នោះជ្រៅទូលាយឆ្ងាយណាស់ បើមិនគិតសម្លាប់ឲ្យហើយទេ ខ្លួនយើងក៏នឹងដេកធ្មេចភ្នែកមិនជិត ឧបមាដូចបន្លាមុតជាប់ក្នុងដើមទ្រូង។ **ឡោសុក**ក៏និយាយឃាត់ថា លោកកុំបង្ខំគិតឲ្យកើតវឹកវរឡើយ ចូរតាំងចិត្តខំគិតធ្វើការកម្ចាត់**ចូឆូ**ចេញឲ្យបាន ឯការខាង**ខុងបេង**នោះសឹមគិតតទៅជាងក្រោយ។

ខណៈកាលកើតខ្យល់ព្យុះសលាត័ននោះ **ជីវយី**ក៏បង្គាប់**កាំឡេង**ឲ្យលើកទាហានទៅផ្លូវគោកដល់តំបន់ប៉ូលឹម ហើយឲ្យចូលលុកដុតបន្ទាយ**ចូឆូ** កាលបានឫក្សនឹងលើកទៅឲ្យសម្លាប់**ឈួតុង**ចេញ ហើយកាត់យកក្បាលសែនទង់ជ័យ ឲ្យជាអំណាចកងទ័ព ឯខ្លួន**ឈួហោ**នោះឲ្យយកទុកប្រើធ្វើរាជការខាងទ័ពទឹកនឹងបានធ្វើការ ឲ្យ**លីបង**លើកទាហានបីពាន់ជាកងជំនួយ**កាំឡេង** ហើយ**ថៃស៊ូជូ**លើកទាហាន

បីពាន់ខាងជើងគោកទៅតំបន់ហ័បស៊ុយ ចោមវាយកាត់ទាហាន**ចូឆូ**កុំឲ្យលើកជាជំនួយមកបាន បើឃើញភ្លើងឆេះឡើងក្នុងកងទ័ពទូក**ចូឆូ** ត្រូវឲ្យមើលទង់ក្រហមជាសម្គាល់ ហើយឲ្យបង្ខំទាហានលើកមកប្រសព្វគ្នា។ **កាំឡេង, លីបង** និង**ថៃស៊ូជូ**ក៏លាទៅចាត់ចែង លុះបានឫក្សល្អក៏លើកញែកគ្នាទៅខាងមុខកងទ័ពទូក ព្រោះជាផ្លូវឆ្ងាយ។ កាល**កាំឡេង**លើកទ័ពទៅនោះ ក៏ចាប់យកខ្លួន**ឈួហោ**ទៅប្រគល់ទុកក្នុងទ័ពទូក ហើយយក**ឈួតុង**ទៅសម្លាប់ចេញ រួចកាត់ក្បាលទៅសែនទង់ជ័យទើបលើកទ័ពទៅ។

**ជីវយី**ក៏ឲ្យ**ឡេងថង**លើកទាហានបីពាន់ទៅតំបន់អ៊ីឡេង បើឃើញពន្លឺភ្លើងនោះតំបន់ហ្វ៊ីលឹមឆេះឡើង ក៏ឲ្យទាហានចាំស្កាត់វាយកងទ័ព**ចូឆូ** ហើយឲ្យ**តាំងសិត**លើកទាហានបីពាន់ទៅប្លន់បន្ទាយ**ចូឆូ**នៅតំបន់ក្បែរស្ទឹងហ័នឈួន ហើយឃើញទង់សជាសម្គាល់ត្រូវលើកទាហានទៅប្រសព្វគ្នា កងមួយឲ្យ**ភូជៀវ**លើកទាហានបីពាន់ទៅដែនស្រុកហ័នយ៉ុង ឲ្យទាហានដោតទង់សជាសម្គាល់ បើទញ់ទាល់ប្រការម្ដេចនឹងបានបំពេញជាជំនួយគ្នាទៅខាង**តាំងសិត**។ នាយទាហានទាំងបីកង ក៏លើកពលបែកញែកគ្នាទៅផ្លូវគោកតាមពាក្យ**ជីវយី**បង្គាប់។

ឯ**ជីវយី** ក៏ឲ្យ**អ៊ុយកាយ**សរសេរសំបុត្រជាកំណត់ពេលទៅដល់**ចូឆូ**សេចក្ដីថា ខ្ញុំបាទ**អ៊ុយកាយ**គិតបានឱកាសហើយ ព្រោះ**ជីវយី**ប្រើខ្ញុំបាទឲ្យទៅទទួលទូកស្បៀងឯស្រុកហ្វ៊ីនយ៉ុង ខ្ញុំបាទនឹងកាត់យកក្បាលនាយទូកដែលនាំស្បៀង និងទូកប្រចាំជូនមកជាជំនូនមហាឧបរាជ ក្នុងវេលាយប់យាមពីរក្នុងថ្ងៃនេះ សុំឲ្យមហាឧបរាជចាំទទួលចុះ។ ហើយ**ជីវយី**ឲ្យរៀបទូកចម្បាំងបួន ផ្ទុកកូនទាហានដែលមានថ្វីដៃនិងនាយទូកទាំងបួននាក់នោះឈ្មោះ **ហ័នតុង, ជីវថាយ, ជីវឃីម, តាន់ប៊ូ** ឯទាហានទាំងបួននាក់នេះ ឲ្យនាំទូកចម្បាំងម្នាក់បីរយរួមជាមួយពាន់ពីររយទូក សម្រាប់ការពារ**អ៊ុយកាយ**ចូលដុតភ្លើងនោះ បើឃើញសត្រូវមានកម្លាំងប្រការម្ដេច នឹងបានជួយច្បាំង ឲ្យ**ឡោសុក, ងាំតេក**នៅរក្សាបន្ទាយ។ **ទៀវភៅ**ឃើញ**ជីវយី**ចាត់ចែងទ័ពគោកទ័ពទឹកជាក្បួនមួនមាំដូច្នោះ ក៏គិតខ្លាច**ជីវយី**ជាច្រើន។

ខណៈនោះ មានសំបុត្រ**ស៊ុនគួន**មកដល់**ជីវយី**សេចក្ដីថា **ស៊ុនគួន**ឲ្យ**ឡុកស៊ុន**លើកទាហានជាកងមុខ ខ្លួន**ស៊ុនគួន**ជាទ័ពហ្លួង នឹងលើកជាជំនួយទៅផ្លូវអ៊ុយតេ។ **ជីវយី**ឃើញសំបុត្រ**ស៊ុនគួន**ដូច្នោះក៏ត្រេកអរណាស់ បង្គាប់ទាហានឲ្យយកផាវឡើងទៅចាំនៅលើកំពូលភ្នំឡាំពិនសាន ហើយដល់ពេលព្រលប់ឲ្យអុជផាវជាសម្គាល់កងទ័ពទូកនឹងបានលើកព្រមគ្នាចូលទៅ។

ឯ**ឡៅពី**ដែលតាំងទ័ពនៅបន្ទាយហែខៅនោះ លុះបានឃើញខ្យល់សលាត័នធ្លាក់បក់មក ក៏តាំងចិត្តគិតទន្ទឹងមើលផ្លូវ**ជូឡុង** ដែលទៅទទួល**ខុងបេង** លុះឃើញ**ឡៅគី**ក៏លើកទ័ពទូកមកដល់ ហើយឡើងទៅជួបនឹង**ឡៅពី** ៗក៏ប្រាប់ថា យើងឲ្យ**ជូឡុង**ទៅទទួល**ខុងបេង**ក៏នៅមិនទាន់ឃើញត្រឡប់មកវិញសោះ នឹងថាប្រការម្ដេចក៏ឥតដឹងដំណឹងឡើយ **ឡៅគី**មិនទាន់នឹងឆ្លើយតបថាប្រការម្ដេច។ ទទួលឃើញ**ជូឡុង**នាំ**ខុងបេង**ចូលទៅដល់។ **ឡៅពី**ក៏មានចិត្តអរណាស់ ទើបសាកសួរថា លោកទៅធ្វើការអ្វីខ្លះ? **ខុងបេង**ថា នឹងឆ្លើយជម្រាបមិនទាន់បានទេ នាំឲ្យយូរការ។ ហើយសួរ**ឡៅពី**ថា កិច្ចដែលខ្ញុំបង្គាប់ទុកនោះ បានរៀបចំជាស្រេចហើយឬម្ដេច? **ឡៅពី**ឆ្លើយថា ការទាំងអស់បានរៀបចំទុកព្រមអស់ហើយ។ **ខុងបេង**ក៏ប្រើ**ជូឡុង**លើកទាហានបីពាន់ឆ្លងទន្លេស្រូតកាត់ទៅពួនបង្កប់នៅជិតតំបន់ហ៊្លួលឹម ពេលយាមបីថ្ងៃនេះកងទ័ព**ចូឆូ**នឹងវិនាសមិនអស់ ក៏គង់ស្លាប់ប្រហែលពាក់កណ្ដាល គង់នឹងបានសេះនឹងអាវុធជាច្រើន។ **ជូឡុង**ថា តំបន់ហ៊្លួលឹមនោះជាផ្លូវបំបែកពីរអន្លើ ផ្លូវមួយទៅស្រុកឡាំគុន ផ្លូវមួយទៅស្រុកកេងជីវ ខ្ញុំបាទមិនដឹងជា**ចូឆូ**នឹងលើកទៅខាងផ្លូវណា។ **ខុងបេង**ថា ផ្លូវទៅស្រុកឡាំគុនជិតខាងកងទ័ព**ជីវយី** ទាហាន**ជីវយី**គង់នឹងដេញតាម មុខជា**ចូឆូ**នឹងបែកទៅផ្លូវស្រុកកេងជីវ អ្នកចូរទៅចាំនៅផ្លូវនោះ ហើយឲ្យ**តៀវហ៊ុយ**លើកទាហានបីពាន់ ទៅបង្កប់នឹងភ្នំក្បែរផ្លូវនឹងទៅតំបន់ហោលោកុក វេលាព្រឹកនេះភ្លៀងនឹងធ្លាក់ បើភ្លៀងរាំងហើយ **ចូឆូ**ទៅដល់តំបន់នោះ នឹងឈប់សម្រាកឲ្យទាហានដាំបាយស៊ី បើអ្នកបានឃើញផ្សែងភ្លើងកាលណា ក៏ឲ្យដេញទាហានចេញចោមរោមវាយកុំឲ្យដណ្ដាំបាយឆ្អិនទាន់ ទោះបីនឹងចាប់**ចូឆូ**មិនបាន

អ្នកក៏នឹងមានសេចក្ដីគាប់ប្រសើរ ព្រោះបានកាប់សម្លាប់ទាហាន**ចូឆូ**អស់ជាច្រើន។ **ជូឡុង** និង**តៀវហ៊ុយ**ទទួលពាក្យ**ខុងបេង**ហើយ ក៏លើកទាហានចេញទៅ។

**ខុងបេង**ក៏ប្រើ**ប៊ីតុក, ប៊ីហាង** លើកទាហានទូកទៅចាំនៅតាមមាត់ទន្លេ ចាំចាប់ទាហាន**ចូឆូ**ដែលរត់ចុះមក ហើយឲ្យ**ឡៅគី**នាំទូកចម្បាំងទៅតាំងនៅតំបន់ជូហៀង ដែលជាទីសំខាន់ បើឃើញ**ចូឆូ**បែកទៅផ្លូវនោះ ល្មមការដែលនឹងចាប់បានក៏ព្រួតចាប់ទុកមួយទៀតអ្នកនឹងបានការពារស្រុកកាំងហែផង។ **ឡៅគី**និងទាហានទាំងបីកងក៏ទទួលពាក្យ**ខុងបេង** ហើយលើកទូកចម្បាំងញែកគ្នាទៅ។ **ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា ឲ្យលោកនាំទាហានទៅចាំមើលលើកំពូលភ្នំ ពេលយប់នេះ**ជីវយី**នឹងធ្វើការបានសម្រេចហើយ។

**គួនអ៊ូ**ឃើញ**ខុងបេង**ប្រើអ្នកឯទៀតទៅធ្វើការតាមមុខងាររអស់ហើយ ក៏គិតតូចចិត្តថា **ខុងបេង**មិនបានចាត់ចែងប្រើខ្លួនទៅធ្វើការនៅទីកន្លែងណាមួយសោះ ទើបចូលទៅនិយាយនឹង**ខុងបេង**ថា ខ្លួនខ្ញុំបាទនេះបានចូលមកនៅធ្វើការនឹង**ឡៅពី**ជាបងក៏យូរហើយ ទោះបី**ឡៅពី**នឹងធ្វើការអ្វីក៏រមែងប្រើប្រាស់ខ្ញុំបាទ ឲ្យអាសាទៅធ្វើការមុនគេគ្រប់កន្លែង គ្រានេះលោកមានមន្ទិលសង្ស័យនឹងខ្ញុំបាទយ៉ាងម្ដេច បានជាមិនប្រើទៅធ្វើការដូចគេទាំងពួងផង? **ខុងបេង**ថា នៅមានទីសំខាន់មួយអន្លើ តែថាបើនឹងប្រើអ្នកឲ្យទៅធ្វើការនោះ ក៏នាំឲ្យមានមន្ទិលសង្ស័យ។ **គួនអ៊ូ**ថា លោកសង្ស័យដោយហេតុអ្វី? **ខុងបេង**ថា ដែលយើងមន្ទិលសង្ស័យនឹងអ្នកនោះ ព្រោះហេតុថាកាលពីដើមអ្នកបានទៅនៅនឹង**ចូឆូ** ៗក៏បានអាណិតស្រឡាញ់ជួយទំនុកបម្រុងអ្នកដោយអស់ពីចិត្ត ឯចិត្តរបស់អ្នកមានសេចក្ដីសត្យកតញ្ញូដឹងគុណគេ វេលាថ្ងៃនេះ**ចូឆូ**បែកទ័ពត្រឡប់រត់ទៅតាមផ្លូវហ្វ៊ាយ៉ុង បើយើងនឹងឲ្យអ្នកទៅចាំបម្រុងចាប់**ចូឆូ**នៅទីនោះ មុខជានឹងបាន បើជួបប្រទះមិនខានក៏គង់មិនសម្លាប់ ព្រោះអ្នកនឹងគិតដល់គុណដែលគេមានមកស្រាប់ ឃើញបានបំណាច់ហើយក៏ឲ្យរួចខ្លួនទៅជាអសារឥតការ។ **គួនអ៊ូ**ថា ឯតម្រិះប្រាជ្ញារបស់លោកនោះជ្រៅទូលាយមែនណាស់ហើយ តែថា**ចូឆូ**បានមានគុណូបការនឹងខ្ញុំបាទនោះ ខ្ញុំបាទក៏បានធ្វើការយក

អាសាតបគុណ**ចូផ្ទូ**រួចជាស្រេចឡះ ព្រោះខ្ញុំបាទបានសម្លាប់**ង៉ាន់លៀង** និង**ប៊ុនធីវ**ជាទីតបគុណ បើលោកឲ្យខ្ញុំបាទទៅគ្រានេះ ហើយបានជួបប្រទះនឹង**ចូផ្ទូ** ខ្ញុំបាទមិនបានកាត់ក្បាល**ចូផ្ទូ**មកជូនលោកទេ សុំឲ្យលោកកាត់ក្បាលខ្ញុំបាទជំនួសវិញចុះ តែខ្ញុំបាទក្រែង**ចូផ្ទូ**នឹងមិនរត់ទៅតាមផ្លូវស្រុកហ៊្វយ៉ុងនោះវិញ តើលោកនឹងមានប្រសាសន៍ដូចម្ដេចទៅទៀត? **ខុងបេង**ថា បើអ្នកលើកទាហានទៅហើយ មិនជួបប្រទះនឹង**ចូផ្ទូ**ទៅតាមផ្លូវនោះទេ ក៏ឲ្យប្រញាប់លើកទ័ពវិលមកវិញចុះ យើងនឹងកាត់ក្បាលរបស់យើងជាជំនួសក្បាល**ចូផ្ទូ**ឲ្យអ្នក។ លុះនិយាយហើយក៏បង្គាប់ប្រើ**គួនអ៊ូ**ឲ្យលើកទាហានប្រាំរយនាក់ ទៅចាំស្កាត់នៅផ្លូវហ៊្វយ៉ុង ព្រោះទីនោះជាផ្លូវពីររួមគ្នា នឹងទៅលើស្រុកកេងជីវ តែផ្លូវកោងឆ្ងាយជាងផ្លូវកាត់ដល់ប្រាំរយសិន ឯផ្លូវកាត់នោះឆាប់តែដើរលំបាក ព្រោះជាច្រកភ្នំ អ្នកចូរឲ្យទាហានជញ្ជូនយកចំបើងនិងអុសទៅគរជាភ្នក់ភ្លើងទុកនៅមាត់ផ្លូវកាត់ ឲ្យ**ចូផ្ទូ**ឃើញផ្សែងភ្លើងក៏នឹងរត់ទៅតាមផ្លូវកាត់ ព្រោះជាផ្លូវជិត។ **គួនអ៊ូ**សួរថា **ចូផ្ទូ**នឹងរត់ចៀសពីសេចក្ដីស្លាប់ ហេតុម្ដេចលោកត្រឡប់ថា **ចូផ្ទូ**នឹងសំដៅទៅតាមផ្សែងនោះវិញ។ **ខុងបេង**តបថា **ចូផ្ទូ**នោះជាមនុស្សឈ្លាសវៃណាស់ក្នុងការល្បួងបញ្ឆោត បើឃើញផ្សែងភ្លើងហើយក៏គង់គិតថា **ជីវយី**ក្លែងធ្វើកលឲ្យទៅគរភ្លើងទុក មុខជាពួនបង្កប់ទ័ពស្នាក់ខាងផ្លូវធំវិញ **ចូផ្ទូ**ក៏គង់ទៅខាងផ្លូវដែលមានភ្លើង អ្នកចូរចាប់សម្លាប់ចេញ ហើយកាត់យកក្បាលមក។ **គួនអ៊ូ**ទទួលពាក្យ**ខុងបេង**ហើយក៏នាំ**គួនប៉េង, ជីវឆង** និងទាហានប្រាំរយលើកចេញទៅ។

កាល**គួនអ៊ូ**ចេញទៅហើយ **ឡៅពី**ក៏សួរ**ខុងបេង**ថា ខ្លួនលោកបានជ្រាបចិត្ត**គួនអ៊ូ**ថាជាមនុស្សមានសេចក្ដីសត្យកតញ្ញូនឹងអ្នកមានគុណណាស់ ដែលលោកប្រើ**គួនអ៊ូ**ទៅគ្រានេះ ទោះបីបានជួបនឹង**ចូផ្ទូ**មែន គង់**គួនអ៊ូ**មិនធ្វើអន្តរាយ ព្រោះគិតដល់គុណូបការទាំងឡាយជាប្រាកដ ឯការដែលគិតមកហើយនឹងមិនអត់អំពើទៅឬ? **ខុងបេង**ថា ខ្ញុំបាទបានមើលផ្កាយសម្រាប់បុណ្យ**ចូផ្ទូ**ជាមហាឧបរាជ ក៏ឃើញនៅរុងរឿងជ្រះថ្លា ព្រោះជតារាសី**ចូផ្ទូ**នៅមិនទាន់ដាច់ បានជាខ្ញុំក្លែងប្រើ**គួនអ៊ូ**ទៅធ្វើការសឹកគ្រានេះ ដើម្បីនឹងឲ្យ**គួនអ៊ូ**សងគុណ**ចូផ្ទូ**ឲ្យអស់ទៅ តទៅមុខ**គួនអ៊ូ**នឹងបានធ្វើ

ការតនឹង**ចូឆ្ន**ពេញដៃពេញជើង។ **ឡៅពី**បានឮដូច្នោះ ក៏កើតសេចក្ដីជ្រះថ្លាសរសើរតម្រិះប្រាជ្ញា**ខុងបេង**ថា លោកគិតនេះហៅត្រូវពេកណាស់។ **ខុងបេង**ក៏ទុក**ស៊ុនខៀន**និង**កាន់យ៉ុង**ឲ្យនៅរក្សាបន្ទាយហែខៅ ហើយនាំ**ឡៅពី**ចុះទូកទៅចាំមើលកងទ័ព**ចូឆ្ន**នៅទន្លេហែខៅ។

ឯ**ចូឆ្ន**នោះ តាំងចិត្តទន្ទឹងគិតមើលផ្លូវ**អ៊ុយកាយ**គ្រប់វេលា។ **ឆៀយ៉ុក**ក៏និយាយនឹង**ចូឆ្ន**ថា វេលាថ្ងៃនេះខ្យល់សលាត័នបក់មកខ្លាំងណាស់ សុំឲ្យលោករិះរវាំងកងទ័ពយើងកុំឲ្យមានសេចក្ដីអន្តរាយ។ **ចូឆ្ន**តបថា អ្នកកុំវិតក្កឡើយព្រោះទេសកាលនេះ ទោះបីខ្យល់សលាត័ននឹងមានមកក៏តិចទេ បើនឹងមានហេតុភេទពុំជួកាលយ៉ាងណា ក៏ល្មមនឹងការពារបាន។

ឯមនុស្សស្និទ្ធ**អ៊ុយកាយ** លុះទៅដល់ក៏ចូលទៅក្នុងបន្ទាយ**ចូឆ្ន** ហើយជូនសំបុត្រទៅ**ចូឆ្ន** ៗទទួលយកទៅមើលដឹងសេចក្ដីហើយ ក៏នាំទាហានចុះមកនៅក្នុងទ័ពទូក ដើម្បីចាំទទួល**អ៊ុយកាយ**។

ឯ**ជីវយី** លុះវេលាល្ងាចជិតបានឫក្ស ក៏ឲ្យយកខ្លួន**ឈួហោ**មកចងហើយសួរថា ហេតុម្ដេចបានជាឯងមកបញ្ឆោតអញ ឥឡូវអញនឹងលើកទ័ពទៅនៅខ្វះគ្រឿងនឹងសែនទង់ជ័យ អញឲ្យកាត់ក្បាលឯងសែនព្លីការយកឫក្សពារជ័យជម្នះ។ **ឈួហោ**ថា ការនេះ**កាំឡេង** និង**ងាំតេក**ក៏បានរួមគំនិតជាមួយនឹងខ្ញុំបាទដែរ ហេតុម្ដេចលោកមកសម្លាប់តែខ្ញុំបាទម្នាក់ឯង មិនសម្លាប់អ្នកទាំងនោះចេញផង? **ជីវយី**ថា ឯ**កាំឡេង** និង**ងាំតេក**នោះយើងប្រើឲ្យទៅបញ្ឆោតចៅហ្វាយឯងទេតើ ខ្លួនឯងទាំងពីរទើបជារូបសេចក្ដីដែលទុច្ចរិតនឹងអញ។ លុះនិយាយហើយឲ្យសម្លាប់**ឈួហោ**ហើយកាត់យកក្បាលសែនទង់ជ័យ។ លុះវេលាព្រលប់**ជីវយី**ក៏ឲ្យ**អ៊ុយកាយ**នាំទូកម្ភៃ ដែលរៀបដោតទង់ខៀវទុកនោះឲ្យចេញទៅ។ **អ៊ុយកាយ**ក៏រៀបស្លៀកពាក់គ្រឿងប្រដាប់សម្រាប់ចម្បាំង គឺក្រឹសនិងអាវុធ ហើយចុះទូកលើកទាហានដុតភ្លើងគោមគ្រប់ទូកទាំងម្ភៃ នៅត្រង់តំបន់សេកផេក។

ខណៈនោះទទួលកើតខ្យល់ព្យុះសលាត័នខ្លាំងណាស់ ព្រះចន្ទក៏ភ្លឺច្បាស់លើវេហាស៍។ **ចូឆ្វ**ចេញទៅអង្គុយសន្ទនានៅក្បាលទូកជួបជុំសេនាទាហាន ក្រឡេកមើលទៅឃើញរលកធំៗរណ្ដំគ្នាតាមខ្យល់ **ចូឆ្វ**គ្មានពិភាល់អ្វីដោយប្រមាទថា **ជីវយី**ម្ដងនេះមុខជាមិនរួចពីដៃយើងទេ ទទួលមានទាហានម្នាក់ចូលមកប្រាប់ថា ឥឡូវ**អ៊ុយកាយ**ឲ្យទូកតូចមួយចូលមកប្ដឹងថា ខ្លួន**អ៊ុយកាយ**នាំទូកស្បៀងមកហើយ។ **ចូឆ្វ**ឮដូច្នោះក៏ត្រេកអរណាស់និយាយថា **អ៊ុយកាយ**មកគ្រានេះ គឺជាបុណ្យវាសនារបស់យើង ដោយទេពតាបញ្ចូលចិត្តនាំឲ្យមក។ ទទួលក្រឡេកឃើញទូកទាំងនោះចែវជិតមក **ធៀយ៉ុក**មើលទៅឃើញទូកទាំងនោះស្រាលអណ្តែតលើទឹក ក៏មានសេចក្ដីសង្ស័យ និយាយនឹង**ចូឆ្វ**ថា គ្រានេះខ្យល់សលាត័នក៏ធ្លាក់មកជាខ្លាំង ដែលនឹងទុកចិត្តឲ្យ**អ៊ុយកាយ**ចូលមកដល់តែម្ដងមិនបាន ខ្លាចក្រែងកលឧបាយមានរឿងហេតុនឹងកែខៃកម្រណាស់។ **ចូឆ្វ**សួរថា អ្នកឃើញហេតុយ៉ាងម្ដេច? **ធៀយ៉ុក**ថា ឯធម្មតាទូកផ្ទុករបស់ធ្ងន់មានតែពៀប ឥឡូវមើលទៅឃើញស្រាលអណ្ដែតលើកទឹកខ្ពស់ទាំងអស់ ទូក**អ៊ុយកាយ**នេះមុខជាមានហេតុហើយ បានជាខ្ញុំបាទឃាត់លោក។ **ចូឆ្វ**យល់ឃើញត្រូវ ទើបប្រើ**ប៊ុនផេង**ចេញទៅឃាត់កុំឲ្យចូលមក។ **ប៊ុនផេង**និងទាហានប្រហែលដប់បួនដប់ប្រាំនាក់ ក៏ចុះទូកតូចចេញទៅស្រែកឃាត់ថា មហាឧបរាជឲ្យមកហាមឃាត់ថា ឲ្យទូក**អ៊ុយកាយ**ចតទុកឲ្យឆ្ងាយសិន កុំអាលចូលមកព្រោះជាវេលាកណ្ដាលយប់។ លុះថាផុតពាក្យ ទាហាន**អ៊ុយកាយ**ក៏យឹតធ្នូបាញ់មក ត្រូវស្មាស្ដាំ**ប៊ុនផេង**ដួលចុះ ហើយថយទូកទៅ ក៏តាំងអុជផាវជាសញ្ញាឡើង។ **អ៊ុយកាយ**បានឮផាវអុជជាសញ្ញាដូច្នោះ ក៏ឲ្យបោកទង់ជាសញ្ញាឡើងទៀត ទទួលខ្យល់ព្យុះសលាត័នបក់មកខ្លាំង ទូកទាំងម្ភៃក៏បើកក្ដោងតាមខ្យល់ចូលទៅដុតភ្លើងឡើងហើយលៀនប៉ះទៅលើគ្នា ចូលទៅទង្គិចនឹងផែទ័ព**ចូឆ្វ**។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤៣

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**អ៊ុយកាយ**ដុតទ័ព**ចូឆូ**បែក **ចូឆូ**រត់ឡើងគោកទៅប្រទះនឹង**ជូឡុង**, **តៀវហ៊ុយ**, **គួនអ៊ូ**។ **ចូឆូ**ឲ្យ**ចោយិន**ទៅឈរស្រុកឡាំគុន **ចូឆូ**លើកទ័ពទៅស្រុកហ៊ូតោ **ចោហង**, **ចោយិន**, **ចោស៊ុន**លើកចូលស្រុកឡាំគុន)*

**ឯនាហានចូឆូ**ឃើញភ្លើងឆេះជាប់ឡើងលើទូកខ្មាន ក៏នាំគ្នាបាចសាចទឹករំលត់ភ្លើងជាជ្រួលច្របល់ តែថាខ្យល់បក់មកជាខ្លាំងណាស់ ឃើញថាទប់ទល់ពុំឈ្នះ ព្រោះជាប់សោច្រវាក់ប្រទាក់ខ្សែគាបរឹងជាផែទាំងអស់ ភ្លើងក៏ឆេះរាលដាលពេញទៅទាំងទូកផែ ឯ**អ៊ុយកាយ**ក៏នាំទាហានប្រហែលប្រាំបួននាក់ ឬដប់នាក់ចុះទូកចូលទៅ ប៉ងនឹងចាប់**ចូឆូ**សម្លាប់ចេញ។ **ចូឆូ**ក៏គ្រវីដំបងនឹងគ្រប៊ីដេញទាហានឲ្យចូលលត់ភ្លើង ៗក៏កាន់តែឆេះរាលឡើង ទាហានទាំងពួងធន់នឹងភ្លើងមិនបានក៏ស្ទុះរត់ទៅ **ចូឆូ**ស្រែកឲ្យយកទូកតូចៗចម្លងមនុស្សឡើងគោក ក្រឡេកមើលទៅបន្ទាយគោក ភ្លើងក៏ឆេះឡើងជាច្រើនអន្លើ ក៏រឹតតែភ័យខ្លាំងណាស់ លុះភ្លើងរាលឆេះទៅដល់ទូកខ្មានដែល**ចូឆូ**នៅ ទទួលឃើញ**ទៀវលៀវ**យកទូកមកទទួល**ចូឆូ** ៗក៏ចុះទូករត់ទៅឡើងលើគោក។

**អ៊ុយកាយ**កាន់គ្រប៊ីអង្គុយលើក្បាលទូក ក្រឡេកឃើញ**ចូឆូ**ពាក់អាវក្រហមរត់ចេញពីភ្លើង ចុះទូកប្រញាប់រត់ឡើងទៅលើគោក ក៏ឲ្យទាហានស្រូតទូកចូលទៅហើយស្រែកថា **អាចូឆូ**អាឯងរត់ទៅណា? **ចូឆូ**ឮដូច្នោះក៏រឹតតែស្លុតក្នុងចិត្ត **ទៀវលៀវ**ឃើញ**អ៊ុយកាយ**តាមមក ក៏យឹតធ្នូបាញ់ទៅត្រូវ**អ៊ុយកាយ**ធ្លាក់ក្នុងទឹក **ទៀវលៀវ**ក៏នាំ**ចូឆូ**ឡើងទៅដល់មាត់ច្រាំង ហើយកងទ័ពភ្ញាក់ផ្អើលជ្រួលច្របល់មិន

បានជាក្បួនទ័ព **ទៀវលៀវ**ក៏បង្គាប់ឲ្យយកសេះមួយមកឲ្យ**ចូឆ្វ**ជិះ ហើយនាំទាហានស្រូតរូតទៅ។

ឯ**ហ័នតុង**ដែលនាំទូកចម្បាំងបីរយ លុះទៅដល់ក៏ជម្រុលទូកទាំងអស់ ចូលទៅតាមចន្លោះទូកខ្មាន ទទួលបានឮសំឡេងមនុស្សនៅក្នុងទឹកស្រែកឲ្យជួយ ក៏ចាំបានជាសំឡេង**អ៊ុយកាយ** តាំងតែដេញទាហានប្រញាប់ លោតហែលទឹកទៅស្រង់គ្រាហ៍ឡើងមក ហើយទាញកន្ត្រាក់ព្រួញដកចេញពីស្មាបាន ចុងព្រួញក៏បាក់ជាប់នៅក្នុងសាច់ **ហ័នតុង**យកចុងគ្រប៊ីវះផ្តាច់ខ្វេះយកចុងព្រួញដែលបាក់នោះបាន ហើយយកព្រៃហែករុំរបួសនោះ រួច**ហ័នតុង**ក៏ដោះអាវខ្លីខ្លួនឲ្យ**អ៊ុយកាយ**ពាក់។

ខណៈកាលភ្លើងឆេះទូកខ្មាននោះ នាយទាហានដែលឃុំនាំទូកចម្បាំងម្នាក់បីរយ **ជីវឃើម**ក៏លើកទូកចម្បាំងទាំងបីរយនោះ ជាជំនួយ**ហ័នតុង**ចូលទៅទៀត ចំណែកខាង**តាន់ប៊ូ**ក៏ឃុំទូកចម្បាំងបីរយវាយប្រសព្វចូលពីទិសឯកើត។ ក្នុងខណៈនោះទូកចម្បាំង**ជីវឃើ**និង**ទៀភៅ** មាន**ឈីសេង, តេងហាង**ជាប៉ែកស្តាំនិងឆ្វេង **ជីវឃើ**ទៅដល់បន្ទាយក៏វាយប្រសព្វចូលទៅព្រមគ្នា។ ឯភ្លើងដែលឆេះនោះ បើរាលទៅដល់ទីណា ក៏ឆេះជាប់នៅទីនោះ។ ទាហាន**ជីវឃើ**តាមពីក្រោយភ្លើងចូលទៅដុតបន្ថែមឲ្យឆេះរាលតទៅទៀត ខ្យល់ព្យុះខ្លាំង ភ្លើងរឹតតែឆេះខ្លាំង ចោលអណ្តាតរាលជាប់ពេញទូកខ្មាន ទាហាន**ជីវឃើ**ក៏ចូលប្រកាប់ជាប់ក្បែរភ្លើងពីលើខ្យល់ ទាហាន**ចូឆ្វ**ក៏ជ្រួលច្របល់វាមកតដៃ ណាភ័យនឹងភ្លើងទាំងសងខាង ខ្លះក៏ត្រូវអាវុធរបួសពិការស្លាប់ ខ្លះក៏ជាប់នៅកណ្តាលភ្លើង ឆេះរោលស្លាប់លើផៃ ខ្លះក៏បែរទៅលោតទឹកធ្លាក់ស្លាប់ជាប់លើគ្នា នឹងគណនាគ្រារាប់ពុំបាន។

ឯ**កាំឡេង**មេទ័ពគោកខាង**ជីវឃើ** កាលចូលទៅដុតស្បៀងក្នុងបន្ទាយហ្ល៊ឹមឆេះអស់ហើយ **លីបង**ក្រឡេកឃើញពន្លឺភ្លើង ក៏លើកទាហានជំនួយចូលទៅដុត

បន្ទាយជាលំដាប់គ្នាទៅទៀត **កាំឡេងនិងលីបង**ក៏បានចាក់កាប់សម្លាប់កងទ័ពពេញស្លាប់ជាច្រើនណាស់។ ឯ**តាំងសិតនិងភូជៀង**ក៏ឲ្យទាហានយកភ្លើងដុតបន្ទាយទាហាន**ចូឆូ**គ្រប់ទាំងបួនទិស ពួកកងទ័ព**ចូឆូ**ក៏ស៊ូតច្បាំងទាល់តែរបួសពិការស្លាប់នឹងរាប់ពុំអស់ សល់អំពីនោះក៏រត់បែកបាក់អស់ទៅ។ **ចូឆូ**និង**ទៀវលៀវ**នៅសល់ទាហានប្រហែលមួយរយប្លាយ កាលរត់ឡើងទៅលើមាត់ច្រាំង ក៏តាំងតែខំស្រូតចូលទៅរកបន្ទាយគោក កាលបើចូលទៅដល់បន្ទាយណា ភ្លើងក៏រាលដាលទៅដល់ទីនោះឆេះឡើងជាច្រើនបន្ទាយ។ **ចូឆូ**នាំទាហានទាំងឡាយរត់ទៅចូលបន្ទាយដែលភ្លើងមិនឆេះ។

កាល**ប៊ុនផេង**ត្រូវព្រួញត្រឡប់មកវិញ បានឃើញភ្លើងឆេះបន្ទាយទ័ពទឹកគ្រប់ទូកខ្នាន **ម៉ាកាយ**រត់ចេញបានក៏ជួបនឹង**ប៊ុនផេង** ហើយនាំគ្នាឡើងទៅលើច្រាំងបានទាហានប្រហែលហាសិបនាក់ ក៏រត់ប្រពូនប្រពាក់ទៅជួបនឹង**ចូឆូ** ៗក៏សួរ**ទៀវលៀវ**ថា យើងនឹងរត់ទៅទីណា ទើបរួចពីភ័យអន្តរាយនេះ? **ទៀវលៀវ**ឆ្លើយថា ឲ្យលោករត់ទៅផ្លូវតំបន់ហ៊្វូលីមទើបនឹងរួចភ័យ។ **ចូឆូ**ក៏រៀសរវៃនាំទាហានទាំងនោះរត់ចេញទៅ លុះរៀបនឹងទៅដល់តំបន់ហ៊្វូលីម ក៏ឮសំឡេងស្រែកហ៊ោទន្ទឹមពីខាងឆ្វេងស្តាំ **ចូឆូ**ក៏ភ័យស្លុតស្មារតី។

ឯ**លីបង**លើកទ័ពទៅដល់ជិតក៏ស្រែកថា **អាចូឆូ**ឯងរត់ទៅណា? អញជាទាហាន**ស៊ុនគួន**មកពួនចាំស្កាត់នៅទីនេះ អញនឹងប្រឡេះយកក្បាលអាឯងឲ្យបាន។ **ចូឆូ**ឮដូច្នោះក៏ភ័យណាស់ ឲ្យ**ទៀវលៀវ**វាមកតទល់ពីក្រោយ ខ្លួន**ចូឆូ**ក៏ស្ទុះបណ្តោយទៅមុខ ក្រឡេកទៅឃើញភ្លើងឆេះគគឹកគគុកទទឹងផ្លូវដែលនឹងទៅនោះជាសន្ធឹកណាស់ មិនដឹងចៀសទៅខាងណា ឮសំឡេងទាហានម្នាក់ស្រែកចុះមកពីលើភ្នំថា អញឈ្មោះ**ឡេងថង**លើកកងទ័ពមកបង្កប់ចាំនៅទីនេះ ចាំយកជីវិតឯងហើយ។ **ចូឆូ**

ភ័យណាស់ ទទួល**ស៊ីឡុង**បរសេះទៅទាន់ហើយស្រែកថា មហាឧបរាជកុំខ្លាច! ហើយ**ស៊ីឡុង**ក៏បរសេះជ្រែកទៅមុខ ចូលគ្រលុកតដៃនឹង**ឡេងថង**ជាប់គ្នា មិនទាន់ចាញ់ឈ្នះ **ស៊ីឡុង**ក៏ស្ទុះបំពារនាំយក**ចូឆ្វ**ចេញទៅមុខបាន។

ឯ**ម៉ាអៀន** និង**ទៀវគី**ដែល**ចូឆ្វ**ឲ្យទៅតាំងបន្ទាយនៅតំបន់លឹមយ៉ុងនោះ ឃើញបន្ទាយ**ចូឆ្វ**ភ្លើងឆេះ ក៏លើកទាហានបីពាន់ស្រូតមកជួយ ទទួលជួបប្រទះគ្នាកណ្ដាលផ្លូវ **ចូឆ្វ**ក៏មិនសូវភ័យណាស់ បានធូរស្រឡះក្នុងចិត្ត ឲ្យ**ម៉ាអៀន**និង**ទៀវគី**នាំទាហានមួយពាន់នាំផ្លូវទៅមុខ ឯទាហានពីរពាន់ទៀត **ចូឆ្វ**ឲ្យនៅការពារពីក្រោយ។ **ម៉ាអៀន**, **ទៀវគី**ក៏នាំទាហានមួយពាន់នាំមុខ**ចូឆ្វ**ទៅចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម) បានឮសំឡេងកងទ័ពស្រែកហ៊ោសន្ធាប់ពីមុខ នាយទាហាននោះស្រែកប្រាប់មកថា ខ្លួនអញឈ្មោះ**កាំឡេង**លើកទ័ពមកចាំឯងនៅទីនេះ អញនឹងចាប់ពួកអាកំណាចទាំងអស់សម្លាប់ចេញ។

**ម៉ាអៀន**ឮហើយខឹងណាស់ បរសេះចូលទៅប្រយុទ្ធគ្នាមិនទាន់ទាំងបានប៉ះពាល់ដល់អាវុធផង **កាំឡេង**ក៏យកដាវមុខមុតកាប់**ម៉ាអៀន**ដាច់ពាក់កណ្ដាលខ្លួនធ្លាក់ពីលើសេះស្លាប់ **ទៀវគី**ស្ទុះចូលទៅប្រញាប់តនឹង**កាំឡេង**ទៀត **កាំឡេង**ក៏បរសេះចូលប្រយុទ្ធនឹង**ទៀវគី** ហើយស្រែកដោយសំឡេងសន្ធាប់យ៉ាងខ្លាំង **ទៀវគី**ក៏ភ័យស្លាំងកាំងគេចរត់មកក្រោយ **កាំឡេង**ដេញទាន់**ទៀវគី**ទឹមស្មា យារដាវឡើងកាប់ត្រូវ**ទៀវគី**ស្លាប់ធ្លាក់ចុះពីលើសេះ ទាហានទាំងអស់ក៏បែកខ្ញែករត់ព្រាត់ព្រាយវិលទៅប្រាប់**ចូឆ្វ** ៗឮហើយក៏នាំទាហានរត់វាងតម្រង់ទៅផ្លូវហាន់ហ៊ុយ។

ឯ**ស៊ុនគួន**ដែលលើកទ័ពទៅតាំងនៅតំបន់អ៊ុយតេនោះ លុះឃើញពន្លឺភ្លើងឆេះឡើងត្រង់បន្ទាយទាហាន**ចូឆ្វ** ក៏សោមនស្សណាស់គិតថា គ្រានេះ**ជីវយី**ធ្វើការបានជ័យជម្នះ**ចូឆ្វ**ហើយ ទើបប្រើ**ឡុកស៊ុន**ឲ្យអុជភ្លើងឡើងជាសម្គាល់។ លុះ**ថៃស៊ូជូ**ទៅ

ជួបនឹង**ស៊ុនគួន** ៗក៏ឲ្យ**ឡុកស៊ុន**និង**ថៃស៊ូជូ**ប្រមូលទាហានចូលគ្នា ហើយលើកស្រូតទៅជួបនឹង**ជីវយី**យកជ័យជម្នះ**ចូឆ្វ**ឲ្យបាន។ **ឡុកស៊ុន** និង**ថៃស៊ូជូ**ក៏ស្រូតទៅស្ទាក់ផ្លូវ **ចូឆ្វ** ៗឃើញកងទ័ព**ឡុកស៊ុន** និង**ថៃស៊ូជូ**លើកទៅស្ទាក់ពីមុខ ក៏នាំទាហានរត់កាត់ចៀសផ្លូវទៅត្រង់តំបន់អ៊ីឡេង ទទួលប្រទះនឹងកងទ័ព**ទៀវខាប់**។ **ចូឆ្វ**ក៏ឲ្យកងទ័ពតស៊ូពីខាងក្រោយជាមួយនឹង**ទៀវលៀវ** ហើយបរសេះរត់ចៀសវាងទៅមុខ លុះជិតភ្លឺស្រាងក្រឡេកមើលទៅក្រោយ ឃើញពន្លឺភ្លើងឆ្ងាយណាស់ ក៏ធូរស្រាលក្នុងចិត្តទើបងាកមកសួរទាហានទាំងពួងថា ទីនេះឈ្មោះតំបន់អ្វី? ទាហានឆ្លើយថា មកដល់ទីនេះជិតដល់តំបន់ហ៊្វូលីមហើយ។

**ចូឆ្វ**ឮដូច្នោះ ក៏បង្ខំសេះនាំទាហានទៅតាមផ្លូវច្រកភ្នំ ឯទីនោះជាព្រៃរហោស្ថានធំណាស់ **ចូឆ្វ**ងើបមើលលើហើយអស់សំណើចដោយសំឡេងខ្លាំង អស់ទាំងទាហានឮដូច្នោះក៏ជម្រាបសួរថា គ្រានេះបរាជ័យសឹកសង្គ្រាមរត់មក មហាឧបរាជសើចដោយហេតុអ្វី? **ចូឆ្វ**ឆ្លើយថា យើងសើចនេះព្រោះឃើញថា តម្រិះរិះគិតរបស់**ខុងបេង**និង**ជីវយី**នោះតិចពេកណាស់ មិនសមនឹងល្បីដែលឮ បើជាយើងធ្វើការដូច**ខុងបេង**និង**ជីវយី**វិញ យើងត្រូវចាត់កងទ័ពមកបង្កប់ក្នុងព្រៃនេះ កាលណាសត្រូវរត់រួចនឹងដៃយើង? នេះ**ខុងបេង, ជីវយី**មិនចេះគិតដូចយើងសោះ។ លុះថាល្មមតែផុតមាត់ ទទួលឮសូរផាវនិងសូរមនុស្សស្រែកហ៊ោអុចភ្លើងឆេះឡើងទាំងសងខាងផ្លូវ ទាហានក៏ស្ទុះស្រចេញទៅជាច្រើនណាស់ **ជូឡុង**ស្រែកមកទៀតថា ខ្លួនអញឈ្មោះ**ជូឡុង** **ខុងបេង**ប្រើឲ្យមកចាំស្កាត់ចាប់អាសត្រូវរាជសម្បត្តិសម្លាប់ចេញ។ **ចូឆ្វ**ឮដូច្នោះភ័យណាស់ ស្ទុះបរសេះថយមកក្រោយ ឲ្យ**ទៀវលៀវ, ទៀវខាប់**ចូលប្រញាប់តនឹង**ជូឡុង**។ **ចូឆ្វ**ក៏រត់លឿនស្ទុងទៅក្រោយបណ្ដោយផ្លូវទៅស្រុកកេងជីវ។

ខណៈនោះ **ចូឆ្វ**ខូចខាតទាហាននិងសេះ ហើយនិងគ្រឿងសាស្ត្រាវុធច្រើនណាស់ ខ្លះដែលរួចរស់ក៏ដោះខ្លួនរត់តាម**ចូឆ្វ**ទៅ។ ឯ**ជូឡុង**និងពលទាហានក៏ចាប់បានសេះនិងគ្រឿងសាស្ត្រាវុធទុកជាច្រើន។ កាល**ចូឆ្វ**រត់ទៅនោះ ខ្យល់សលាត័នក៏បក់បោកមកមិនឈប់ តាំងពីពេលព្រលប់ទាល់ភ្លឺស្រាង ភ្លៀងក៏ធ្លាក់យ៉ាងធំ។ លុះភ្លៀងហើយ ទាហានទាំងអស់ក៏នាំគ្នាទៅវាយដណ្ដើមយកបាយទឹកចំណីអាហាររបស់អាណាប្រជានុរាស្ត្រអ្នកស្រុកមកបរិភោគ។ **ចូឆ្វ**ក៏បានប្រទះគ្នានឹង**ខៅធូ**, **ស៊ីឡុង**នូវពួកទីប្រឹក្សាជាលំដាប់ប្រហែលប្អូនប្រាំនាក់ ក៏បានធូរស្រាលក្នុងចិត្តបាត់ព្រួយ ហើយសួរទាហានថា ព្រៃនេះឈ្មោះអ្វី? ទាហានឆ្លើយថា ដែនព្រៃតំបន់អ៊ីឡេងបែកជាពីរផ្លូវ។ **ចូឆ្វ**សួរថា យើងទៅស្រុកឡាំគុននឹងទៅតាមផ្លូវណាឲ្យរហ័សឆាប់? ទាហានឆ្លើយប្រាប់ថា ទៅផ្លូវក្រោមឆាប់ដល់ជាងផ្លូវលើ កាត់តម្រង់ចេញតាមមាត់ផ្លូវទៅតំបន់ហោលោកុក។ **ចូឆ្វ**ឮដូច្នោះក៏នាំទាហានស្រូតទៅ លុះទៅដល់តំបន់ហោលោកុក ឃើញទាហានទាំងឡាយនឿយហត់អស់កម្លាំងណាស់ ក៏ឲ្យឈប់សម្រាកកម្លាំងនឹងដាំបាយទឹកបរិភោគ ហើយឲ្យសម្លាប់សេះរះយកសាច់ចែកគ្នា។ បណ្ដាទាហានក៏ដោះអាវដោះក្រឹសគ្រឿងប្រដាប់ហាលថ្ងៃឲ្យស្ងួត ហើយក៏ចងសេះឲ្យស៊ីស្មៅ។

ខណៈនោះពួកទាហានទាំងអស់ក៏នាំគ្នាចៅរៅដាំស្ល បាយនិងសម្លមិនទាន់ឆ្អិននៅឡើយ ឯ**ចូឆ្វ**អង្គុយនៅក្រោមម្លប់ឈើ ក្រឡេកមើលលើមេឃសើចម្ដងទៀត។ ទាហានទាំងពួងក៏ឆ្ងៀតសាកសួរ ព្រោះមន្ទិលសង្ស័យថា កាលជិតភ្លឺមុននេះលោកសើចម្ដងហើយថា **ខុងបេង**និង**ជីវយី**មិនចេះគិត **ជូឡុង**ចេញពីព្រៃងងឹតមកចោមវាយទាល់តែអន្តរាយអស់ រត់ដោះខ្លួនទើបមកដល់ទីនេះ មិនទាន់អស់ហត់ផង ឥឡូវហេតុម្ដេចលោកមកសើចដល់ពីរដងដូច្នោះ? **ចូឆ្វ**ថា ដែលយើងសើចនេះ ព្រោះ

ឃើញថាគំនិតរបស់**ខុងបេង** និង**ជីវយី**នោះតិចណាស់ ធ្វើការមិនឲ្យរហូតធ្លុះធ្លាយ បើដូចខ្លួនយើងបានធ្វើការសម្មាយដូចគេវិញដូច្នេះ យើងនឹងចេះចាត់កងទ័ពមកបង្កប់ចាំនៅមាត់ផ្លូវនេះមួយក្រុម បើសត្រូវរត់មកប្រជុំតាមផ្លូវនេះ ក៏នឹងចាប់ខ្លួនបានដោយងាយ។ លុះនិយាយផុតមាត់ ទទួលឃើញភ្លើងឆេះព្រោងប្រុះគ្រប់ទិសទាំងបួន សំឡេងទាហានក៏ស្រែកហ៊ោផ្ទួនលើកចេញមកស្ទាក់មាត់ផ្លូវមួយកង ពីមុខពីក្រោយខ្នងក៏ចេញមកទៀត ព័ទ្ធជុំវិញទាំងអស់ច្រើនណាស់។ ឯ**តៀវហ៊ុយ**ក៏ស្ទុះមកស្រែកថា **អាចូឆ្វូ**ជាសត្រូវផែនដី **ខុងបេង**ឲ្យអញមកចាំស្ទាក់ផ្លូវនៅទីនេះ ម្តងនេះមុខជាអាឯងមិនរួចពីដៃអញទេ។ **ចូឆ្វូ**ក្រឡេកឃើញ**តៀវហ៊ុយ**ស្រែកដូច្នោះក៏លោះព្រលឹងស្មារតី រវៀសរវៃលោតឡើងសេះនាំទាហានបួនប្រាំនាក់ស្ទុះរត់ទៅមុន ឯទាហានក្រៅពីនោះក៏ស្ទុះរត់ទៅមុនបែកខ្ញែកគ្នានៅតែ**ខៅធូ, ទៀវលៀវ**និង**ស៊ីឡុង**តតាំងច្បាំងនឹង**តៀវហ៊ុយ**ការពារពីក្រោយ ហើយដោះរត់ទៅតាម**ចូឆ្វូ** ទាហាន**តៀវហ៊ុយ**ក៏ដេញកាប់សម្លាប់យកបានគ្រឿងអាវុធ និងសេះច្រើនណាស់ **តៀវហ៊ុយ**ក៏មិនបានដេញជិតដោយ**ចូឆ្វូ**ទៅ វិលត្រឡប់មកក្រោយវិញ។

ឯ**ចូឆ្វូ**លុះរត់ទៅឆ្ងាយហើយ ក្រឡេកឃើញទាហានរបស់ខ្លួនដែលតាមមកនោះត្រូវអាវុធរបួសពិការគ្រប់គ្នា ក៏សួរទាហានទាំងពួងថា យើងនឹងទៅស្រុកឡាំគុននោះ ទៅផ្លូវណានឹងឆាប់រហ័ស? ទាហានខ្លះឆ្លើយថា ផ្លូវកាត់នោះតូចរហ័សជាងផ្លូវធំប្រាំរយសិន តែថាផ្លូវកាត់ដើរទៅពិបាក ព្រោះជាច្រកភ្នំមានដុំថ្មថ្លុកជង្ហុកជាច្រើន។ ចាំខ្ញុំបាទស្រួតទៅមើលខាងផ្លូវកាត់សិន ទាហានម្នាក់ទៅក៏ឃើញមានភ្លើងឆេះត្រង់ផ្លូវនោះ វិលមកប្រាប់**ចូឆ្វូ**វិញ។ **ចូឆ្វូ**ក៏ប្រាប់ថា ត្រូវយើងទៅតាមផ្លូវកាត់ដែលមានភ្លើងឆេះនោះវិញ។ ទាហានថា ផ្លូវកាត់ដែលមានភ្លើងនោះ ខ្ញុំបាទ

ឃើញថាពួកសត្រូវនឹងមកបង្កប់ពួននៅទីនោះជាប្រាកដ ហេតុម្តេចបានជាលោកនឹងឲ្យទៅផ្លូវនោះវិញ?

**ចូឆ្វ**ថា យើងដឹងថាគំនិត**ខុងបេង**គិតនោះ ប្រុងនឹងបញ្ឆោតយើង ទើបក្លែងឲ្យយកភ្លើងមកគរដុតនៅមាត់ផ្លូវកាត់ ហើយយកទាហានទៅបង្កប់ទុកខាងផ្លូវធំ បំណងនឹងឲ្យយើងគិតខ្លាចខាងផ្លូវដែលមានគំនរភ្លើងនោះ នឹងមានទាហានពួនបង្កប់ តែដោយពិតនោះ ដូច្នេះទេ គឺប្រាកដជាមានទាហានបង្កប់នៅខាងផ្លូវធំ។ ទាហានពួក**ចូឆ្វ**ឮដូច្នោះ ក៏យល់ឃើញដូច**ចូឆ្វ**ថាទាំងអស់ នាំគ្នាម្នីម្នាគេចតម្រង់ទៅតាមផ្លូវកាត់ ដែលមានគំនរភ្លើងដុតនោះវិញ។

កាល**ចូឆ្វ**រត់ទៅនោះ អស់ពួកទាហានសឹងតែមានរបួសពិការដោយគ្រឿងសាស្ត្រាវុធជាច្រើន មានសេចក្ដីលំបាកណាស់ ខ្លះក៏នឿយហត់ដោយអត់បាយខំឧស្សាហ៍ដើរទៅស្ទើរមិនរួច ខ្លះក៏លួចលបឈប់ក្រោមម្លប់ឈើ ខ្លះក៏ដើរចូលជ្រកដោយច្រកភ្នំ ខ្លះក៏យំប្រចាំគ្នា **ចូឆ្វ**ងាកមកសួរថា ហេតុម្តេចទើបមិននាំគ្នាស្រូតឲ្យឆាប់? ទាហានក៏ឆ្លើយប្រាប់តៗគ្នា ព្រោះឈឺចាប់ដោយរបួសពិការ មាគ៌ាក៏ឆ្ងាយដាច់ស្រយាលណាស់ ខំស្វះស្វែងដើរកាត់ថ្លុកជង្ហុកល្បាប់សឹងតែថ្មឬសឈើតាន់តាប់មកតាមផ្លូវ ព្រោះពីព្រឹកធ្លាក់ភ្លៀងមកត្រូវផ្លូវក៏រអិលដោយរំលុងអណ្ដូងពិបាកណាស់ ទាំងសេះទាំងមនុស្សក៏ពិបាកដូចគ្នា បានជារារែកប្រកែកគ្នានៅដូច្នេះ។

**ចូឆ្វ**ឮដូច្នោះខឹងណាស់ថា កាលពីដើមយើងនឹងលើកកងទ័ពមកនោះ ទាំងអស់គ្នាសុទ្ធតែសុំយកអាសាថានឹងតស៊ូធ្វើចម្បាំង ត្រាតែអស់ជីវិត ទោះបីភ្នំនិងទឹកមកបាំងជិតនៅពីមុខ ក៏ត្រូវតែរត់ត្រសុលចូលទៅឲ្យដល់ គួរនឹងបង្អោងចងស្ពានថ្នល់ឆ្លងទៅក៏ត្រូវតែធ្វើឲ្យបាន មិនត្រូវឈប់ខានឲ្យយូរការ ឬអ្នកទាំងអស់គ្នាកោតខ្លាចញញើតណាស់ទៅហើយ? **ចូឆ្វ**និយាយហើយ ក៏ហៅមនុស្សដែលឈឺរបួសនោះ

ក្រោកដើរមកពីខាងក្រោយ ឲ្យទាហានដែលដើរមុខកាប់ឈើមកតម្រាបលើថ្លុកនិងរំលុងអណ្ដូង ឲ្យសេះទាំងហ្វូងដើរទៅជាស្រួលបាន បើអ្នកឯណាឈប់ខានមិនព្រមធ្វើតាម ត្រូវឲ្យកាត់ក្បាលទុកជាបម្រាមតទៅ ហើយឲ្យ**ខៅធូ, ស៊ីឡុង**នាំទាហានត្រួតត្រាការពារពីក្រោយ បើឃើញអ្នករបួសឯណាមិនខំដើរ បណ្ដោយឲ្យយឺតយូរក៏ត្រូវឲ្យសម្លាប់ចេញកុំឲ្យសត្រូវមកជួបប្រទះឃើញឲ្យសោះ។ ពួកទាហានអម្បាលនោះក៏សឹងតែធ្វើតាម**ចូឆូ**បង្គាប់។ **ចូឆូ**ក៏បង្ខំកងទ័ពឲ្យស្រូតដើរទៅ ខណៈនោះទាហានទាំងពួងក៏ខំស្រូតរូតដើរពារប៉ះលើគ្នា ពួកដែលរបួសពិការក៏ដួលស្លាប់ទៅខ្លះៗ ដែលខំដើរទៅមិនរួចសោះ ទាហានទាំងនោះក៏សម្លាប់ចោលទៅខ្លះ ពួករបួសក្រៅពីនោះក៏ចេះតែភ័យខ្លាច នាំគ្នាស្រែកយំរងំតាមផ្លូវទៅ។

**ចូឆូ**ឮសំឡេងយំសោកដូច្នោះ ក៏ខឹងណាស់ស្រែកថា ហេតុម្ដេចបានជានាំគ្នាយំរងំស៊ានដូច្នេះ ការដែលរស់និងស្លាប់នោះក៏ស្រេចតែបាបកម្មប្រចាំរូបកាយទាំងអស់គ្នា។ លុះយាត្រាទៅផុតច្រកភ្នំ ក៏ក្រឡេកមកក្រោយ ឃើញទាហានដែលសល់នៅជាមួយនោះប្រហែលបីរយប្លាយ **ចូឆូ**ក៏បង្ខំមេនាយស្រូតដើរទៅ។ ទាហានទាំងអស់ក៏និយាយឡើងព្រមថា សេះនិងមនុស្សក៏អស់កម្លាំងណាស់ទៅហើយ សុំឲ្យលោកបង្អង់ឈប់បន្តិចសិន រួចសឹមលើកទៅទៀត។ **ចូឆូ**ថា ឲ្យខំទៅឲ្យដល់ស្រុកកេងជីវសឹមឈប់ចុះ ហើយក៏ស្រូតបរសេះទៅពីនោះបានប្រហែលហាសិបសិន (២ គ.ម) ដល់តំបន់ហ៊្វយ៉ុង **ចូឆូ**ក៏អស់សំណើចឡើងទៀត។ ទាហានទាំងឡាយឮដូច្នោះក៏មានសេចក្ដីសង្ស័យសួរទៅ**ចូឆូ**ថា លោកសើចពីរដងមកហើយចេះតែមានហេតុឲ្យភ័យគ្រប់គ្រា ឥឡូវលោកសើចធ្វើអ្វីទៀត? **ចូឆូ**ថា យើងសើចចំអកគំនិតគិតរបស់**ខុងបេង**និង**ជីវយី** ព្រោះទីនេះចំណាប់ស្រួលណាស់ មិនគួរនឹងមិនបង្កប់ទាហានទុក បើសិនណាជាមានពួក**ខុងបេង, ជីវយី** មកចាំស្កាត់នៅត្រង់នេះ យើងក៏

នឹងបានសេចក្តីអន្តរាយជាប្រាកដ លុះនិយាយផុតមាត់ក៏ឮសំឡេងផាវ ហើយឃើញ **គួនអ៊ូ**ជិះសេះកាន់ដាវចេញមកព្រមទាំងទាហានឈរទទឹងមុខ ត្រង់ផ្លូវដែលនឹងទៅនោះ។

**ចូឆូ**ឃើញដូច្នោះ ក៏តក់ស្លុតស្មារតីភ័យណាស់ នឹងរកច្រកលុករត់ចៀសទៅខាងណាក៏មិនបាន ហើយមានចិត្តមានៈឡើងថា ឥឡូវយើងរាល់គ្នាទាល់ច្រក នឹងរត់ជ្រកទៅខាងណាក៏មិនរួច ត្រូវតែតាំងចិត្តស៊ូច្បាំងឲ្យគ្រប់គ្នាទៅខាងមុខចុះ។ ទាហានទាំងពួងនោះក៏ឆ្លើយថា ពួករបស់យើងទន់ថយកម្លាំងអស់ហើយ ទាំងសេះក៏អស់កម្លាំង ឃើញថានឹងប្រឹងទៅមិនបាន ព្រោះមិនមានកម្លាំងទាំងមនុស្សនិងទាំងសេះស្មើគ្នា។ **ផៀយ៉ុក**ឆ្លើយថា បើនឹងរត់ចៀសទៅខាងណាក៏មិនបាន ឯសន្តានចិត្តរបស់**គួនអ៊ូ**នោះជាជាតិទាហានក៏មែន តែថាបើឃើញអ្នកណាមិនហ៊ានតស៊ូនឹងចម្បាំងហើយ ក៏មិនបានធ្វើអន្តរាយដល់អ្នកនោះទេ។ ប្រការមួយទៀត **គួនអ៊ូ**ជាមនុស្សមានសេចក្តីសត្យានុសត្យ ព្រមទាំងកតញ្ញូដឹងគុណគេជាទីបំផុត ប្រសិនបើលោកនឹងចូលទៅនិយាយលួងលោមដោយលំអុតល្អសុភាព មុខជា**គួនអ៊ូ**នឹងជ្រួតជ្រាបក្នុងចិត្ត មិនបានគិតនឹងធ្វើអន្តរាយដល់លោកទេ។ **ចូឆូ**យល់ឃើញត្រូវ ក៏ញាក់សេះបរចូលទៅជិត ហើយបន្ទន់ខ្លួន ឱនគំនាប់ស្រែកសួរថា តាំងពីអ្នកឃ្លាតចាកពីយើងមក អ្នកបានប្រកបដោយសេចក្តីសុខសប្បាយទេឬ?

**គួនអ៊ូ**ឮដូច្នោះក៏បង្អោនខ្លួនគំនាប់តបហើយថា សុខនិងទុក្ខនោះក៏ជាប្រមាណតែឥឡូវ**ខុងបេង**ឲ្យខ្ញុំមកសម្លាប់មហាឧបរាជចេញ។ **ចូឆូ**ថា ដែលខ្ញុំបែកទ័ពរត់ត្រឡប់មកដល់ទីនេះ ក៏បានសេចក្តីទុក្ខលំបាកពន់ប្រមាណណាស់ អ្នកគួរឃើញផ្លូវមេត្រីរបស់ខ្ញុំ ដែលបានចងអារម្មណ៍ទុកនឹងអ្នកមកពីដើមនោះចុះ សុំឲ្យអ្នកអនុគ្រោះបើកផ្លូវឲ្យខ្ញុំទៅផង។ **គួនអ៊ូ**ថា ដែលមហាឧបរាជមានឧបការគុណដល់ខ្ញុំ

នោះ ក៏មែនណាស់ ខ្ញុំក៏ចាំច្បាស់ប្រាកដ តែថាកាលគ្រា**អ៊ួនសៀវ**លើកទ័ពទៅច្បាំងនឹងលោកនៅតំបន់ប៉េះប៉ៃនោះ ខ្ញុំក៏ទទួលអាសាចេញទៅកាប់សម្លាប់**ង៉ាន់លៀង, ប៊ុនធីវ** តបគុណលោករួចហើយ គ្រានេះ ជាការរបស់**ខុងបេង**ប្រើឲ្យខ្ញុំមក ដែលលោកនឹងឲ្យខ្ញុំបើកផ្លូវឲ្យទៅនោះ **ខុងបេង**នឹងមិនយកទោសខ្ញុំឬ?

ឯ**ចូឆ្វ**ថាដែលអ្នកថាបានតបគុណខ្ញុំគ្រានោះម្តងហើយក៏មែន តែកាលអ្នកយាមល្បាតចេញមកដល់ប្រាំតំបន់ជាលំដាប់ ហើយបានទាំងសម្លាប់គយល្បាតនិងចៅហ្វាយស្រុក នូវអស់ទាហានរបស់ខ្ញុំខូចខាតជាច្រើន ខ្ញុំក៏មិនតបដឹង ព្រោះបានដឹងដល់ពាក្យដែលអ្នកនិយាយទុកពីថ្ងៃមុនទាំងអស់ វេលានោះខ្ញុំក៏បានចេញសំបុត្រទៅដល់**ហែហ្ហូទុន** ដែលនៅឈរទីទន្លេហងហោថាឲ្យបើកអ្នកទៅ ឥឡូវខ្លួនខ្ញុំចូលមកជាប់ចំណោម បីដូចមនុស្សធ្លាក់ទឹក ហើយខ្ញុំក៏មិនបាននឹកនឹងតស៊ូនឹងអ្នកទេ គួរអ្នកឃើញសេចក្តីរបស់ខ្ញុំដែលបានអង្វរលុនតួនេះចុះ សុំឲ្យអ្នកអនុគ្រោះបើកខ្ញុំឲ្យបានរួចផុតពីភ័យអន្តរាយ។ **គួនអ៊ូ**ឮ**ចូឆ្វ**និយាយដូច្នោះ ក៏ញាក់សេះវេះចេញពីផ្លូវ នាំទាហានលើកទៅផុតពីទីនោះ។

**ចូឆ្វ**ឃើញដូច្នោះ ក៏ស្ញើយល្ហើយក្នុងចិត្ត ខំពង្រឹងពលទាហានឲ្យស្រូតរូតហួសទៅ។ ឯទាហានដែលសល់នៅប្រហែលសាមសិបនាក់ដើរពីក្រោយ។ **គួនអ៊ូ**ឃើញទាហានដើរបណ្តោយតាម**ចូឆ្វ**ក៏ស្រែកគំហកដោយសំឡេងខ្លាំងៗ ទាហានដែលជិះសេះដើរជើង បានឮដូច្នោះក៏ភ័យតក់ស្លុតលុតជង្គង់ចុះ គំនាប់**គួនអ៊ូ**ទាំងអស់គ្នា។ **គួនអ៊ូ**ឃើញទាហានទាំងនោះមិនប៉ាននាំគ្នាតដៃ ក៏មានសេចក្តីអាណិតមេត្តាមិនប៉ានថាប្រការម្តេច ទាហានទាំងនោះក៏គំនាប់លា**គួនអ៊ូ**ស្រូតតាម**ចូឆ្វ**ទៅ។

កាល**ចូឆ្វ**ទៅដល់តំបន់ហ៊ួយ៉ុងហើយ ក្រឡេកមើលក្រោយឃើញទាហានដែលតាមមកម្ភៃប្រាំពីរនាក់។ ខណៈកាលដើរផ្លូវទៅនោះ **ចូឆ្វ**ក៏សរសើរ**គួនអ៊ូ**ថា

មានសេចក្ដីសត្យកតញ្ញូណាស់។ លុះវេលាព្រលប់ **ចូឆ្វ**ក៏ឃើញកងទ័ពមួយក្រុមដុតគប់ភ្លើង លើកមកពីខាងមុខច្រើនណាស់ ក៏គិតតក់ស្លុតក្នុងចិត្តថា គ្រានេះជីវិតនឹងដល់សេចក្ដីអន្តរាយហើយ។ លុះចូលជិតមកក៏ក្រឡេកស្គាល់ច្បាស់ជា**ចោឃិន**។ **ចូឆ្វ**ធូរស្រាលភ័យភិត។ **ចោឃិន**ចូលមកគំនាប់ចូឆ្វហើយនិយាយថា ខ្ញុំបាទដឹងដំណឹងថា មហាឧបរាជបរាជ័យនឹងសឹកសត្រូវបានជាលើកទាហានកាត់ផ្លូវមកត្រង់ទីនេះ ដើម្បីនឹងចាំទទួលលោក។ **ចូឆ្វ**ក៏រៀបរាប់ប្រាប់ទុក្ខលំបាកឲ្យ**ចោឃិន**ស្ដាប់ ហើយក៏នាំទាហានចូលទៅក្នុងស្រុកឡាំគុន។ **ចោឃិន**ក៏រៀបតុលៀងអាហារអញ្ជើញ**ចូឆ្វ**និងទីប្រឹក្សាបរិភោគផឹកស្រា ប្រាថ្នានឹងឲ្យស្បើយល្ហើយទុក្ខ។

ខណៈកាលកំពុងបរិភោគអាហារនោះ **ចូឆ្វ**ក៏អង្គុយយំ។ ទីប្រឹក្សានិងទាហានទាំងពួងឃើញដូច្នោះ ក៏សង្ស័យណាស់ ទើបនាំគ្នាសួរ**ចូឆ្វ**ថា កាលបែកទ័ពមកកណ្ដាលផ្លូវមានសេចក្ដីទុក្ខលំបាកវេទនាជាច្រើនជាន់ណាស់ យើងខ្ញុំក៏ឃើញថាលោកគ្មានទ្រាន់នឹងព្រួយប៉ុន្មាន ឥឡូវនេះហួសទុក្ខ បានសេចក្ដីសុខក្សេមក្សាន្តបន្តិចមកហើយ គួរតែនឹងប្រមូលសេនាទាហានលើកទៅធ្វើការសងសឹកសត្រូវវិញឲ្យបាន ហេតុម្ដេចក៏លោកមកព្រួយរំខានយំសោកដូច្នេះ? **ចូឆ្វ**ថា ដោយយើងយំសោកដូច្នេះ ព្រោះហេតុគិតដល់**គុយកែ** បើ**គុយកែ**រស់នៅមិនស្លាប់គ្រានេះ ក៏គង់ជាប់មកជាមួយនឹងយើង យើងក៏មិនមកព្រួយលំបាកវេទនាដល់ទីនេះ ថាដូច្នោះហើយក៏យំសោករឭកអាល័យដល់**គុយកែ**។

លុះវេលាព្រឹក **ចូឆ្វ**ក៏និយាយនឹង**ចោឃិន**ថា យើងនឹងត្រឡប់ទៅស្រុកហ៊ូតោសិន ដើម្បីនឹងចាត់ចែងប្រុងប្រៀបរៀបចំបម្រុងទាហាន នឹងលើកមកវាយស្រុកកាំងតាំងឲ្យបាន។ ខ្លួនអ្នកត្រូវនៅរក្សាស្រុកឡាំគុន យើងនឹងសរសេរសំបុត្របិទស្រោមទុកឲ្យបម្រុងរក្សាខ្លួន បើជួបអាប់ចុនវេលាណា ក៏ឲ្យហែកស្រោមមើល

ហើយឲ្យធ្វើតាមសេចក្ដីពន្យល់ក្នុងសំបុត្រនោះឲ្យសព្វគ្រប់ ទើបពួកស្រុកកាំងតាំង និងមកញ៉ាំញីមិនបាន។ ហើយក៏សរសេរសំបុត្រច្រកស្រោមប្រគល់ឲ្យ**ចោយិន** ៗ ទទួលសំបុត្រហើយថា ស្រុកហ័បប៉ានោះជាដែនតដែននឹងស្រុកកាំងតាំង តើលោកនឹងឲ្យនរណាទៅឈររក្សា? **ចូឆ្វ**ថា ស្រុកកេងជីវនិងស្រុកឡាំគុននោះ ចៅចូវរក្សាទុកឲ្យមាំមួនចុះ ឯស្រុកសុងយ៉ុងនោះ យើងនឹងឲ្យ**ហែហ្ហូទុន**នៅឈររក្សា តែស្រុកហ័បប៉ាយើងត្រូវឲ្យ**ទៀវលៀវ**ធ្វើចៅហ្វាយស្រុក ឲ្យ**លីទៀន**និង**ង៉ុកជិន**ធ្វើបាល័ដ្ឋ បើមានការអ្វីជាកម្រក៏ឲ្យធ្វើសំបុត្រទៅគ្នានឹងមកជួយ។ ហើយ**ចូឆ្វ**ក៏ប្រុងប្រៀបទាហាន និងនាហ្មឺនគ្រប់ភ្នាក់ងារស្រុកកេងជីវជាស្រេច ក៏លើកទ័ពត្រឡប់ទៅស្រុកហ៊ូតោ។ **ចោយិន**ក៏ឲ្យ**ចោហាង**ជាប្អូនលើកទាហានទៅនៅរក្សាគយអ៊ីឡេង។

ឯ**គួនអ៊ូ**គ្រាដែលបើផ្លូវឲ្យ**ចូឆ្វ**ទៅហើយ ក៏លើកទាហានត្រឡប់ទៅដល់មុខបន្ទាយហែខៅ ព្រមគ្នានឹង**តៀវហ៊ុយ, ជូឡុង** ក្នុងខណៈនោះ **តៀវហ៊ុយ, ជូឡុង** បានទាហាននិងសេះនូវអស់គ្រឿងសាស្ត្រាវុធរបស់ទ្រព្យផ្សេងៗ នាំទៅជូន**ខុងបេង** ៗ លុះដឹងថា**គួនអ៊ូ**មកដល់មុខបន្ទាយ ក៏នាំ**ឡៅពី**ធ្វើជាចេញទៅទទួល ហើយនិយាយសួរ**គួនអ៊ូ**ថា យើងដឹងថាអ្នកមានចិត្តសុចរិតទំនុកបម្រុងផែនដី បានទៅកាត់សិរសីតួសឹកសត្រូវរាជសម្បត្តិមក បានជាយើងចេញមកចាំទទួលអ្នកដោយសេចក្ដីត្រេកអរដ៏ក្រៃលែង។

**គួនអ៊ូ**ឮដូច្នោះក៏ស្ងៀមមិនឆ្លើយ **ខុងបេង**ឃើញ**គួនអ៊ូ**ធ្វើធ្មឹងដូច្នោះ ក៏ក្លែងរន្ថើនសួរថា អ្នកតូចចិត្តនឹងយើង ព្រោះមិនបានចេញទៅទទួលដល់ពាក់កណ្ដាលផ្លូវឬអ្វី? ហើយងាកទៅបន្ទោសទាហានដទៃថា ហេតុម្ដេចបានជាអ្នករាល់គ្នាមិនស្រូតមកប្រាប់យើងឲ្យដឹង នឹងបានចេញមកទទួល**គួនអ៊ូ**ដូច្នោះ? គួរតែយកទោសខុសទាំងអស់គ្នា ពីព្រោះធ្វើការឲ្យ**គួនអ៊ូ**ទាស់ចិត្ត បានជាបិទមាត់មិនស្ដីនឹងយើង។ **គួនអ៊ូ**

ឮ**ខុងបេង**និយាយឲ្យដូច្នោះក៏ឆ្លើយថា ខ្ញុំបាទនឹងមកទទួលទោស។ **ខុងបេង**ក្លែងសួរទៅវិញថា អ្នកទៅធ្វើការនោះមិនជួបនឹង**ចូឆូ**ទេឬ? ឲ្យអ្នកមកកាត់យកក្បាលយើងជំនួសចុះ។ **គួនអ៊ូ**ឆ្លើយថា ខ្ញុំបាទបានទៅជួបនឹង**ចូឆូ**ដូចប្រសាសន៍លោកជាប្រាកដ តែថាខ្ញុំបាទដូចជាអត់ថ្វីដៃសោះ ឯ**ចូឆូ**ក៏ដោះរត់ទៅបាន។ **ខុងបេង**ឮហើយក៏អស់សំណើច ហើយសួរ**គួនអ៊ូ**ថា ដែល**ចូឆូ**រត់រួចខ្លួនទៅនោះ ចុះចំណែកទាហានរបស់**ចូឆូ**តើអ្នកចាប់បានមកខ្លះដែរឬទេ? **គួនអ៊ូ**ឆ្លើយថា សូម្បីទាហានរបស់**ចូឆូ**ក៏ខ្ញុំបាទចាប់ខ្លួនពុំបាន។ **ខុងបេង**ក៏ធ្វើជាខឹងហើយថា ខ្លួនអ្នកឯងបានទៅជួបប្រទះនឹង**ចូឆូ**ហើយ ម្ដេចឡើយក៏បើកឲ្យរត់រួចទៅទាំងខ្លួន**ចូឆូ**និងពួកទាហានអស់ទៅ ឬអ្នកឯងមកគិតនៅនឹករឭកគុណគេ ទើបបានជាមិនចាប់ខ្លួនកាត់យកក្បាលមកឲ្យយើង? ទោសអ្នកឯងធ្ងន់ណាស់ ដែលអ្នកបានធ្វើកតិកាសញ្ញាទុកនឹងយើងនោះ អ្នកភ្លេចអស់ហើយឬ? **គួនអ៊ូ**ឆ្លើយថា ដែលខ្ញុំបាទធ្វើសញ្ញាទុកនឹងលោកថា បើខ្ញុំបាទបានប្រទះជួបនឹង**ចូឆូ** ហើយមិនបានកាត់ក្បាលមកជូនលោកទេ ឲ្យកាត់ក្បាលខ្ញុំបាទតាមសញ្ញាវិញចុះ ហើយក៏ហូតគ្រប៉ីឡើងនឹងកាត់ក្បាលរបស់ខ្លួនជូន**ខុងបេង** ៗ ឃើញ**គួនអ៊ូ**ហូតគ្រប៉ីនឹងកាត់ក្បាលខ្លួនដូច្នោះ ក៏ស្ទុះចូលទៅដណ្ដើមយកគ្រប៉ីពីដៃចេញបាន ហើយឃាត់ហាមថា ដែលយើងព្រមប្រើអ្នកឲ្យទៅធ្វើការគ្រានេះ ប្រាថ្នានឹងឲ្យអ្នកទៅតបស្នងសងគុណ**ចូឆូ**ឲ្យរួចទេ យើងមិនបានប្រុងនឹងយកទោសអ្នកឡើយ នឹងកាត់ក្បាលឲ្យយើងតាមសញ្ញានោះក៏ត្រូវ ព្រោះជាពាក្យសត្យពិតត្រង់គួរជាជាតិទាហានឲ្យទៅចុះ។ **គួនអ៊ូ**ឮដូច្នោះ ក៏សោមនស្សត្រេកអរ សុំយកគ្រប៉ីស៊កក្នុងស្រោមវិញ។ **ខុងបេង**និង**ឡៅពី**ក៏នាំ**គួនអ៊ូ**ចូលទៅក្នុងបន្ទាយឲ្យរង្វាន់បំណាច់តាមសមគួរ។

ឯ**ជីវយី** កាលបានជ័យជម្នះឈ្នះ**ចូឆូ**ហើយ ក៏លើកកងទ័ពត្រឡប់ទៅបន្ទាយ ឲ្យចែករង្វាន់បំណាច់សេនាទាហានធំតូចទាំងពួងតាមគុណបំណាច់ ហើយក៏ឲ្យយកទូកចម្បាំងផ្ទុកទាហាន**ចូឆូ**ដែលចាប់បានជាឈ្លើយនោះ បញ្ជូនទៅឲ្យស៊ុនគួនដល់មាត់កំពង់ស្រុកកាំងតាំង ហើយ**ជីវយី**លើកកងទ័ពទៅតាំងនៅតំបន់លឹមកាំងប៉ងនឹងរិះគិតទៅវាយយកស្រុកឡាំគុនទៀត។

ឯ**ឡៅពី** ក៏ចាត់របស់ទ្រព្យសម្រាប់លៀងទាហាន ឲ្យ**ស៊ុនខៀន**នាំទៅគំនាប់**ជីវយី**។ **ស៊ុនខៀន**ក៏នាំរបស់ទៅឲ្យ**ជីវយី** ៗក៏សួរ**ស៊ុនខៀន**ថា ឥឡូវ**ឡៅពី**ចៅហ្វាយអ្នកឯងនៅទីតំបន់ណា? **ស៊ុនខៀន**ឆ្លើយថា **ឡៅពី**និង**ខុងបេង**នាំទាហានទៅតាំងនៅកំពង់ស្រុកអ៊ីកាំង។

**ជីវយី**ឮដូច្នោះក៏ស្តុតស្មារតី ហើយបង្គាប់**ស៊ុនខៀន**ថា ឲ្យវិលទៅវិញចុះ ចាំថ្ងៃក្រោយយើងនឹងទៅសួរ**ឡៅពី**។ **ស៊ុនខៀន**ក៏លា**ជីវយី**ទៅវិញ។ **ឡោសុក**ក៏សួរ**ជីវយី**ថា **ស៊ុនខៀន**ជម្រាបលោកថា **ឡៅពី**និង**ខុងបេង**លើកទាហានទៅតាំងនៅមាត់កំពង់អ៊ីកាំង លោកភ័យតក់ស្លុតស្មារតីដោយហេតុអ្វី? ព្រោះយើងឃើញហេតុថា **ឡៅពី**និង**ខុងបេង**មុខជាដណ្តើមយកស្រុកឡាំគុនជាប្រាកដ បានជាយើងភ័យបារម្ភណាស់។ ដែលយើងធ្វើការគ្រានេះក៏ខូចបង់ទ្រព្យរបស់មាសប្រាក់ ដែលចំណាយឲ្យសេនាទាហានប្រើប្រាស់ និងស្បៀងអាហារជាច្រើន ឯស្រុកឡាំគុននោះ ក៏ដូចជានៅក្នុងកណ្តាប់ដៃយើងហើយ បើត្រឡប់ជាបានស្រុកនោះទៅ**ឡៅពី**, **ខុងបេង**វិញ យើងក៏នឹងមានសេចក្តីតូចចិត្តដូចជាស្លាប់ខ្លួន ហេតុនេះទើបយើងភ័យបារម្ភណាស់។ **ឡោសុក**ថា បើដូច្នោះតើលោកនឹងគិតប្រការម្តេចវិញ ដើម្បីនឹងឲ្យ**ឡៅពី** និង**ខុងបេង**លើកទាហានថយពីទីនោះឲ្យឆ្ងាយពីដែនស្រុកឡាំគុនបាន? **ជីវយី**តបថា យើងត្រូវគិតឲ្យទៅនិយាយនឹង**ឡៅពី**ដោយសេចក្តីសុភាពសិន បើ**ឡៅពី**មិនស្តាប់

យើងទេ សឹមយើងគិតកម្លាត់ចេញឲ្យបាន។ **ឡោសុក**ថា លោកគិតនោះត្រូវណាស់ បើលោកត្រូវការទៅរក**ឡៅពី**វេលាណា ខ្ញុំបាទនឹងទៅផង។ ខណៈនោះ **ជីវយី**ក៏នាំ**ឡោសុក**ទៅជួបជាមួយនឹងទាហានបីពាន់ ចុះទូកចម្បាំងចេញចាកកងទ័ព ដើម្បីនឹងទៅរក**ឡៅពី**។

ឯ**ស៊ុនខៀន**កាលត្រឡប់មកទៅដល់ ក៏ចូលទៅជម្រាប**ឡៅពី**តាមរឿង **ជីវយី**និយាយនោះសព្វគ្រប់។ **ឡៅពី**ឮដូច្នោះក៏ប្រឹក្សានឹង**ខុងបេង**ថា ដែល**ជីវយី**ប្រុងនឹងមកគំនាប់យើងនោះ លោកយល់ឃើញប្រការម្ដេច? **ខុងបេង**ថា ឯចិត្ត**ជីវយី**នោះមិនមែនរាប់អានខ្ញុំនិងលោកដោយស្មោះត្រង់ ហើយចង់មកគំនាប់ដោយត្រង់ទេ គឺប្រុងនឹងមកដោយមន្ទិលសង្ស័យថា យើងមុខជានឹងដណ្ដើមយកស្រុកឡាំគុន។ **ឡៅពី**ថា បើ**ជីវយី**មកជាក្បួនទ័ព តើយើងនឹងត្រូវគិតប្រការម្ដេច? **ខុងបេង**ខិនខ្សឹបប្រាប់**ឡៅពី**ឲ្យឆ្លើយតបពាក្យសម្ដីទៅនឹង**ជីវយី**សព្វគ្រប់ ហើយប្រើទាហានឲ្យរៀបចំទូកចម្បាំងចេញទៅចតនៅមាត់កំពង់ ថាបើឃើញ**ជីវយី**មកដោយកាច ក៏ឲ្យជួយគ្នាច្បាំងការពារតាមការ។ ទទួលមានបម្រើចូលមកជម្រាបថា ឃើញ**ជីវយី**និង**ឡោសុក**លើកទាហានប្រហែលបីពាន់ ចតទូកនៅមាត់កំពង់។ **ឡៅពី**ក៏ប្រើ**ជូឡុង**ឲ្យនាំទាហានប្រហែលហាសិបនាក់ ចេញទៅទទួល**ជីវយី**ដល់ក្រៅបន្ទាយ។ **ជីវយី**ឲ្យទាហានទាំងពួងឈប់នៅខាងក្រៅ ហើយនាំ**ឡោសុក**ចូលទៅក្នុងបន្ទាយ។ **ឡៅពី**និង**ខុងបេង**ក៏ចេញទៅទទួល**ជីវយី** ៗចូលមកអង្គុយទីគួរសម ហើយក៏គំនាប់គ្នាទៅវិញទៅមក ហើយ**ឡៅពី**ឲ្យរៀបតុលៀងអាហារ អញ្ជើញ**ជីវយី**និង**ឡោសុក**បរិភោគផឹកស្រា។ **ឡៅពី**សរសើរ**ជីវយី**ថា ដែលលោករិះគិតកម្លាត់**ចូឆូ**ចេញបានក្នុងគ្រានេះ អាណាប្រជានុរាស្ត្របានសេចក្ដីសុខក្សេមក្សាន្ត ព្រោះលោកជាច្រើនណាស់។ **ជីវយី**សួរ**ឡៅពី**ថា ដែលលោកឃុំនាំទាហានមកតាំងនៅទីនេះ លោកគិតនឹងទៅវាយយក

ស្រុកឡាំគុនឬអ្វី? **ឡៅពី**ថាតាមពាក្យដែល**ខុងបេង**ខ្សឹបប្រាប់ទៅ**ជីវយី**ថា ដែលខ្ញុំលើកមកតាំងនៅទីនេះ ព្រោះគិតថាលោកនឹងលើកទ័ពទៅវាយស្រុកឡាំគុន ខ្ញុំនឹងលើកទាហានទៅជួយជាការរហ័សផង។ បើលោកមិនទៅទេ ខ្ញុំគិតថានឹងលើកទៅវាយស្រុកឡាំគុនជូនលោក មិនបាច់ឲ្យលោកព្រួយក៏បាន។ **ជីវយី**ឮដូច្នោះក៏អស់សំណើចហើយថា ខ្លួនខ្ញុំជាជាតិទាហាននៅស្រុកកាំងតាំង ខ្ញុំក៏គិតមកជាដរាបថានឹងលើកទ័ពទៅវាយយកអាណាខេត្តខាងទិសឧត្តរ ឲ្យជាបំណាច់ថ្វីដៃមុន តែទទួល**ចូឆ្វ**លើកកងទ័ពមកវាយយកខេត្តខណ្ឌខាងទិសទក្សិណគ្រានេះ បានជាខ្ញុំនៅចាំតស៊ូច្បាំងនឹង**ចូឆ្វ**ទាល់តែបែករត់ទៅវិញ។ ខ្ញុំក៏ខាតបង់ស្បៀងអាហារ និងរបស់ទ្រព្យដែលត្រូវការចំណាយក្នុងសង្គ្រាមច្រើនណាស់ ឯស្រុកឡាំគុនគ្រានេះបីដូចជានៅក្នុងកណ្ដាប់ដៃខ្ញុំហើយ បើខ្ញុំប៉ងយកពេលណាក៏បានដោយងាយណាស់ ហេតុម្ដេចលោកថាខ្ញុំនឹងមិនយកវិញ? **ឡៅពី**ថា កាល**ចូឆ្វ**បែកទៅនោះ បានចាត់**ចោយិន**ឲ្យទៅឈររក្សាស្រុកឡាំគុន ហើយសុទ្ធតែទាហានដែលមានថ្វីដៃ ឲ្យនៅរក្សាគយតាមច្រកផ្លូវគ្រប់អន្លើ ឯ**ចោយិន**នោះក៏មានកម្លាំងក្លៀវក្លាហានណាស់ ខ្ញុំក្រែងលោកទៅធ្វើការនោះមិនបានដូចបំណងគិត។ **ជីវយី**ថា បើខ្ញុំវាយយកស្រុកឡាំគុននោះមិនបានទេ ឲ្យលោកទៅវាយយកចុះ។ **ឡៅពី**ឮដូច្នោះក៏ឆ្លើយថា ដែលលោកមានប្រសាសន៍ដូច្នេះ ខ្ញុំសុំឲ្យ**ឡោសុក**និង**ខុងបេង**ដែលមកជួបប្រជុំក្នុងទីនេះជួយជាបន្ទាល់សាក្សីដឹងឮផងចុះ។ បើអំណឹះតទៅមុខ**ជីវយី**ប្រែពាក្យសម្ដីវិញយ៉ាងម្ដេច ខ្ញុំត្រូវយកអ្នកទាំងពីរហើយ។ **ជីវយី**ថា ខ្ញុំកើតមកជាប្រុស បានចេញនិយាយថាម្ដេចហើយមិនត្រឡប់កែប្រែវិញទេ។ **ខុងបេង**ក្លែងថា **ជីវយី**នេះបើនឹងចរចាអ្វីក៏រមែងពិតប្រាកដណាស់ បើដូច្នោះត្រូវឲ្យ**ជីវយី**ទៅវាយយកស្រុកឡាំគុនជាមុនចុះ បើ

ក្រងាយប្រការម្តេច សឹម**ឡៅពី**លើកទៅធ្វើការជាក្រោយ។ **ជីវយី**និង**ឡោសុក**ក៏លា**ឡៅពី**, **ខុងបេង**ចុះទូកត្រឡប់ទៅ។

**ឡៅពី**និយាយនឹង**ខុងបេង**ថា ឯការដែល**ជីវយី**ទៅវាយស្រុកឡាំគុននោះ មុខជានឹងបានជាប្រាកដ ខ្ញុំនៅគិតព្រួយមួយយ៉ាងថា សព្វថ្ងៃនេះខ្លួនយើងនឹងរកស្រុកនៅសំណាក់អាស្រ័យគ្មានសោះ បើដូច្នោះនឹងត្រូវគិតដូចម្តេច? **ខុងបេង**ថា ពីដើមខ្ញុំបាននិយាយជម្រាបលោក ឲ្យទទួលយកស្រុកកេងជីវទុកជាទីអាស្រ័យ ដើម្បីនឹងគិតការតទៅ លោកមិនចេះជឿស្តាប់ពាក្យខ្ញុំសោះ គ្រានេះលោកគិតឃើញហើយឬបានជានិយាយថាព្រួយចិត្តដូច្នេះវិញ? **ឡៅពី**ថា កាលពីដើម លោកបាននិយាយមែនហើយ ដែលខ្ញុំមិនព្រមយកស្រុកកេងជីវទុកនោះ ព្រោះហេតុថាជាស្រុករបស់**ឡៅពៀវ**។ ឥឡូវស្រុកកេងជីវត្រឡប់បានទៅ**ចូឆូ**វិញ ខ្ញុំនឹងរិះគិតវាយយកឲ្យបាន។ **ខុងបេង**ថា លោកកុំបីព្រួយឡើយ ចូរបង្អង់ឈប់ឲ្យ**ជីវយី**វាយយកស្រុកឡាំគុនឲ្យបានសិន ខ្ញុំនឹងរិះគិតកលឧបាយមិនឲ្យរវល់ដល់ទាហានទាំងពួង នឹងឲ្យបានស្រុកឡាំគុនដោយងាយ។

**ឡៅពី**សួរថា លោកនឹងរិះគិតប្រការម្តេច? **ខុងបេង**ថា លោកកុំអាលសួរសិនឡើយ ក្រោយសឹមដឹង។ **ឡៅពី**មានអំណរពន់ប្រមាណណាស់ មិនបានសួរតទៅទៀត។

ឯ**ជីវយី**និង**ឡោសុក**លុះវិលទៅដល់បន្ទាយ **ឡោសុក**ក៏សួរ**ជីវយី**ថា ហេតុម្តេចបានជាលោកនិយាយនឹង**ឡៅពី**ថា បើលោកវាយយកស្រុកឡាំគុនមិនបាន ថាឲ្យ**ឡៅពី**វាយយកស្រុកឡាំគុនវិញនោះជាយ៉ាងម្តេច? **ជីវយី**ថា ដែលខ្ញុំនិយាយនឹង**ឡៅពី**យ៉ាងនោះគឺពាក្យបញ្ឆោតទេតើ ព្រោះខ្ញុំថាឲ្យ**ឡៅពី**មានចិត្តភ្លើនកំរើបឡើងហើយថាគ្រានេះយើងនឹងលើកទៅវាយយកស្រុកឡាំគុន តើនរណានឹងទទួលអាសា

ចេញទៅជាទ័ពស្រួច? **ជីវយឹម**ឆ្លើយថា ខ្ញុំបាទសុំអាសាលើកទាហានជាកងមុខទៅមុន។ ទើប**ជីវយី**បើកទាហានប្រាំពាន់ ឲ្យ**ឈីសេង, តេងហង**ទៅជាមួយនឹង**ជីវយឹម** ហើយបង្គាប់ថា ឲ្យស្រួតលើកផ្លូងទន្លេហាន់តុងទៅមុនចុះ យើងនឹងលើកកងទ័ពហ្លួងទៅតាមជាក្រោយ។ **ជីវយឹម** និង**ឈីសេង, តេងហង**ក៏លើកទាហានប្រាំពាន់ចេញទៅ លុះទៅដល់គយអ៊ីឡេង **ឈីសេង, តេងហង**ក៏លើកគ្នាចូលច្បាំងកាច់យកគយនោះមិនបាន ទើបនាំទាហានវាងផ្លូវគយទៅជិតទៀបស្រុកឡាំគុន ហើយក៏តាំងបន្ទាយប្រុបនៅទីនោះ។

ខណៈនោះបម្រើសេះចូលទៅប្តឹង**ចោយិន**ថា ឥឡូវកងទ័ពស្រុកកាំងតាំងលើកមកច្បាំងទៀតហើយ តាំងបន្ទាយនៅជិតស្រុកយើងនេះ។ **ចោយិន**ឮដូច្នោះក៏ប្រឹក្សានឹងទាហានទាំងពួងថា ឥឡូវ**ជីវយី**ប្រើ**ឈីសេង, តេងហង**លើកទ័ពមកប៉ងនឹងធ្វើអន្តរាយស្រុកយើង ឯស្បៀងអាហារដែលមានក្នុងស្រុកនេះក៏ច្រើន យើងត្រូវតែការពាររក្សាស្រុក ទុកខាងក្នុងកុំឲ្យសត្រូវចូលមកបាន បើយូរទៅសត្រូវនឹងដាច់ស្បៀងលើកទៅឯង។ **ងីវយឹម**ថា ដែលនឹងតាំងរក្សាស្រុកតែពីខាងក្នុងឲ្យសត្រូវដាច់ស្បៀងនោះ សត្រូវក៏នឹងបានចិត្ត ប្រការមួយទៀត ទាហានរបស់យើងក៏គង់មានគិតតូចចិត្តថា យើងខ្លាចញញើត ខ្ញុំនឹងសុំអាសាលើកទាហានប្រាំរយចេញទៅតទល់ការពារ។ **ចោយិន**យល់ឃើញត្រូវ ក៏ចាត់ចែងទាហានប្រាំរយឲ្យ ឯ**ងីវយឹម**ក៏លើកទាហានប្រាំរយនោះចេញទៅច្បាំងនឹង**តេងហង** ៗឃើញដូច្នោះក៏ទាញសេះបង្អង់ឈប់ ហើយប្រកាសប្រាប់ទាហានទាំងពួងឲ្យចោមឡោមព័ទ្ធ**ងីវយឹម**ទុកឲ្យជាប់។ **ងីវយឹម**ស្វិតច្បាំងនៅក្នុងចំណោមទាហានដោយក្តៀវក្លា។

ឯ**ចោយិន**នៅលើសើនបន្ទាយ ឃើញ**តេងហង**ឡោមព័ទ្ធ**ងីវយឹម**ទៅក្នុងចំណោមដូច្នោះ ក៏តែងខ្លួនពាក់ក្រើសឡើងសេះនាំទាហានប្រហែលបីរយ ស្រួតចេញ

ចាកទ្វារស្រុកទម្ពុះពារទ័ពសត្រូវចេញទៅ ដើម្បីនឹងជួយ**ធីវឃឹម**។ **ឈីសេង**ឃើញដូច្នោះ ក៏របសេះចូលតច្បាំងនឹង**ចោយិន**យូរណាស់ **ឈីសេង**តទល់ពុំបានក៏ញាក់សេះថយរត់ទៅ។ **ចោយិន**ក៏នាំ**ធីវឃឹម**ចេញមកពីក្នុងចំណោម លុះក្រឡេកឃើញទាហានដែលសល់តាមចេញមកប្រហែលហាសិបនាក់ **ចោយិន**ក៏នាំ**ធីវឃឹម**ត្រឡប់វិលទៅតដៃវិញ ប៉ងនឹងសងសឹកទាហានទាំងពួង។ ឯ**ចោស៊ុន**នៅលើសើនលើកចេញទៅច្បាំងជាប់ដៃគ្នា ក៏ឡើងសេះកាន់លំពែងនាំទាហានជំនួយចូលទៅជួយប្រឡូកគ្នាជាច្រឡំបល់ បានកាប់ចាក់សម្លាប់គ្នាស្លាប់ជាច្រើន។ ឯ**ធីវឃឹម, ឈីសេង, តេងហាង**លុះតទល់ពុំឈ្នះ ក៏នាំទាហានដែលសល់នោះថយទៅ។ **ចោយិន**ក៏មានជ័យជម្នះ ហើយនាំ**ចោស៊ុន**និង**ធីវឃឹម**នូវអស់ទាហានត្រឡប់ចូលទៅស្រុកវិញ។

កាល**ធីវឃឹម**លើកទាហានមកជួបនឹងកងទ័ព**ធីវឃី** ក៏ពណ៌នាសេចក្ដីដែលបានទៅធ្វើការសង្គ្រាម ហើយបែកទ័ពត្រឡប់មកនោះ ឲ្យ**ធីវឃី**ស្ដាប់គ្រប់ប្រការ។ **ធីវឃី**ឮហើយខឹងណាស់ បង្គាប់ទាហានឲ្យយកខ្លួន**ធីវឃឹម**ទៅសម្លាប់ ទីប្រឹក្សានិងទាហានទាំងពួងក៏នាំគ្នាអង្វរសុំទោស**ធីវឃី** ៗក៏លើកទោស ហើយប្រមូលទាហានលើកទៅតាំងបន្ទាយភ្ជាប់គ្នាឯស្រុកឡាំគុននោះ។ **កាំឡេង**និយាយនឹង**ធីវឃី**ថា ខ្ញុំយល់ឃើញថាមិនត្រូវទេ ព្រោះ**ចោយិន**ឲ្យ**ចោហាង**ជាប្អូនលើកទាហានទៅតាំងបន្ទាយនៅស្រុកអ៊ីឡេង ឥឡូវកងទ័ពយើងលើកវាងចូលទៅហួសគយអ៊ីឡេងហើយ បើ**ចោហាង**ដឹងក៏នឹងលើកមកវាយខ្ទប់ ខ្ញុំនឹងសុំអាសាលើកទៅវាយគយអ៊ីឡេង ឲ្យទាហាន**ចោហាង**បែកខ្ញែកគ្នាសិន រួចសឹមលើកចូលទៅតាំងបន្ទាយភ្ជាប់ជិតគ្នានឹងស្រុកឡាំគុន ដើម្បីនឹងធ្វើសង្គ្រាមតទៅ។ **ធីវឃី**យល់ឃើញត្រូវ ក៏ចាត់ទាហានឲ្យ**កាំឡេង**បីពាន់។ **កាំឡេង**ក៏លើកទាហានស្រូតរូតចេញទៅជិតគយអ៊ីឡេង។

បម្រើសេះក៏ចូលទៅឲ្យដំណឹង**ចោយិន**ថា ឥឡូវ**ជីវឃី**ប្រើ**កាំឡេង**លើកទ័ពទៅវាយគយអ៊ីឡេងហើយ។ **ចោយិន**ឮដូច្នោះ ក៏ប្រឹក្សានឹងទាហានទាំងពួងថា ត្រូវគិតយ៉ាងម្ដេច? **តាន់កៀវ**ថា បើនឹងបង្អង់ទុកឲ្យយូរក៏នឹងខូចគយអ៊ីឡេងជាប្រាកដ បើគយនោះខូចហើយ ស្រុកឡាំគុនក៏យើងរក្សាការពារមិនឈ្នះ។

ខណៈនោះ **ចោយិន**ក៏ប្រើ**ចោស៊ុន**និង**ជីវឃឹម**ឲ្យលើកទាហានចេញទៅលបដើរតាមផ្លូវកាត់ នឹងបានជួយ**ចោហង**ការពាររក្សាគយអ៊ីឡេងទុកឲ្យបាន។ **ចោស៊ុន**និង**ជីវឃឹម**លើកទៅដល់កណ្ដាលផ្លូវ ក៏ប្រើទាហានស្រូតទៅប្រាប់**ចោហង**ថា **ចោយិន**ប្រើយើងទាំងពីរនាក់ឲ្យនាំទាហានមកជួយ ឲ្យ**ចោហង**បង្ខំលើកទ័ពចេញទៅច្បាំងនឹង**ជីវឃឹម**, **កាំឡេង** យើងទាំងពីរនឹងលើកវាយប្រសព្វចូលមកទៀត។ បម្រើសេះក៏ស្រូតទៅប្រាប់**ចោហង** ៗឮដូច្នោះក៏អរណាស់ ឲ្យបម្រុងទាហានត្រៀមទុកជាស្រេច។

ឯ**កាំឡេង**កាលទៅដល់គយអ៊ីឡេងហើយ ក៏តាំងបន្ទាយភ្ជាប់ជិតគ្នា។ **ចោហង**ឃើញដូច្នោះ ក៏លើកទាហានបើកទ្វារបន្ទាយចេញទៅតាំងច្បាំងគ្នាសន្ធឹកសន្ធាប់ ហើយថយទ័ពរត់ទៅ។ ខណៈ**កាំឡេង**លើកទ័ពចូលទៅនៅក្នុងបន្ទាយអ៊ីឡេង **ចោហង**ដែលរត់ទៅនោះ ក៏**ទៅ**ជួបនឹង**ជីវឃឹម** ហើយសាស័ព្ទគ្រប់រឿងដែលច្បាំងគ្នាគ្រប់ប្រការ លុះពេលអាធ្រាត្រ **ចោហង**, **ចោស៊ុន**, **ជីវឃឹម**ក៏លើកត្រឡប់មកព័ទ្ធបន្ទាយអ៊ីឡេងវិញ។ **ជីវឃី**ដឹងដូច្នោះក៏ភ័យណាស់ នៅមិនទាន់ប្រឹក្សាប្រការម្ដេច **ទៀវភៅ**ថា សុំឲ្យលោកបែងរំលែកទាហានទៅជួយ**កាំឡេង**ទៀតទើបបាន។ **ជីវឃី**តបថា ដែលអ្នកនឹងឲ្យបែងទាហានទៅជួយ**កាំឡេង**ទៀតនោះ មិនបានទេ ព្រោះទាហានកងទ័ពយើងក៏នៅស្ដួចស្ដើងតិចណាស់ ខ្លាចដឹងដល់**ចោយិន**ៗនឹងលើកទ័ពមកខ្ទប់វាយ យើងក៏នឹងថ្លោះការដោយសឹកសត្រូវ។

**លីបង**ថា **កាំឡេង**នោះមានថ្វីដៃខ្លាំងពូកែក្នុងស្រុកកាំងតាំងជាទាហានឯក បើលោកនឹងមិនបែងរំលែកទាហានទៅជួយ នោះក្រែង**កាំឡេង**អន់ចិត្តទាំងកិច្ចការរបស់លោកក៏នឹងទន់ថយអស់ទៅ។ **ជីវយី**តបថា គំនិតខ្ញុំចង់បែងរំលែកទាហានទៅជួយហើយ ទាំងខ្លួនខ្ញុំក៏ចង់ទៅឯងផងទៀត តែថាបន្ទាយដែលតាំងនៅនេះ ក្រែងមនុស្សអស់ទាំងនេះនឹងរក្សាទុកមិនបាន។ **លីបង**ថា ឲ្យ**ឡេងថង**នៅរក្សាបន្ទាយទុកក្នុងរវាងដប់ថ្ងៃ លោកជាកងហ្លួង ខ្ញុំបាទនឹងសុំអាសាលើកជាទ័ពស្រួចទៅជួយ**កាំឡេង**ទើបសមគួរ។ **ជីវយី**ក៏បង្គាប់ឲ្យ**ឡេងថង**នៅរក្សាបន្ទាយ។ **ឡេងថង**ក៏ទទួលតែសូមសន្យាដប់ថ្ងៃនឹងរក្សាទុកឲ្យគង់ បើលើសពីនោះក្រែងលើសកម្លាំង។

**ជីវយី**ថា ក្នុងដប់ថ្ងៃខ្ញុំនឹងវិលត្រឡប់មកវិញឲ្យដល់ ហើយបែងទាហានឲ្យ**ឡេងថង**មួយម៉ឺន សល់ពីនោះ**ជីវយី**និង**លីបង**ក៏លើកទៅដល់ពាក់កណ្ដាលផ្លូវ **លីបង**ថា គយអ៊ីឡេងនោះ ខាងទិសឯត្បូងមានផ្លូវកាត់ទៅស្រុកឡាំគុនផ្លូវមួយ សុំឲ្យលោកចាត់ទាហានទៅកាប់ឈើរំលំគ្របលើផ្លូវឲ្យអស់ បើ**ចោហង**រត់ទៅផ្លូវនោះមុខជារត់ទៅមិនរួច គង់នឹងចោលសេះនិងគ្រឿងសាស្ត្រាវុធអស់ពុំខាន យើងបានយកទុកជាកម្លាំង។ **ជីវយី**យល់ត្រូវផង ក៏ចាត់ទាហានប្រាំរយឲ្យទៅកាប់រំលំឈើគ្របលើផ្លូវតាមពាក្យ**លីបង** ហើយលើកកងទ័ពទៅជិតគយអ៊ីឡេង។ **ជីវយី**ក៏ប្រឹក្សានឹងទាហានទាំងពួងថា នរណានឹងអាចយកអាសាទៅវាយពុះទម្លាយទៅប្រាប់**កាំឡេង**ឲ្យបានដឹងថា យើងលើកកងទ័ពមកដល់ហើយ ឲ្យ**កាំឡេង**ច្បាំងទម្លាយចេញមក យើងនឹងវាយខ្ទប់ចូលទៅ។ **ជីវថាយ**ទទួលអាសាជិះសេះរាំងាវវាយទម្លាយទ័ព**ចោហង**ចូលទៅដល់ក្បែរបន្ទាយ **កាំឡេង**ឃើញដូច្នោះក៏បើកទ្វារទទួល**ជីវថាយ**ចូលមក។ **ជីវថាយ**ឆ្លើយប្រាប់**កាំឡេង**តាមរឿងរ៉ាវដែលវាយទម្លាយទ័ព

ចូលមកនោះឲ្យ**កាំឡេង**ស្លាប់គ្រប់ប្រការ។ **កាំឡេង**ក៏មានសេចក្ដីត្រេកអរណាស់ទើបចាត់ប្រើទាហានឲ្យរៀបចំការទុកជាស្រេច។

ឯ**ចោហាង, ចោស៊ុន**ក៏ធ្វើសំបុត្រឲ្យបម្រើសេះនាំទៅដល់**ចោយិន**ជាសេចក្ដីថាខ្ញុំបាទបានឡោមព័ទ្ធ**កាំឡេង**ទុកក្នុងបន្ទាយយូរថ្ងៃហើយ ឥឡូវ**ជីវយី**លើកកងទ័ពមកជួយ**កាំឡេង** ហើយ**ចោហាង**ក៏ចាត់ចែងត្រៀមទាហានទុកទាំងពីរអន្លើ កន្លែងគយប៉ងនឹងតច្បាំងនឹង**កាំឡេង, ជីវយី**។ ក្រោយនោះ**ជីវយី**ក៏បរពលតច្បាំងនឹង**ចោហាង**ជាជ្រួលច្របល់។ **កាំឡេង**បានឮស្គរចម្បាំងគ្នាជាអឹកអាធិក ក៏លើកទាហានវាយខ្ទប់ចេញមកពីក្នុងបន្ទាយ កាប់សម្លាប់ទាហាន**ចោហាង**ស្លាប់ជាច្រើន។ **ចោហាង, ចោស៊ុន, ងីវយឹម** តទល់មិនបានក៏នាំទាហានរត់ទៅតាមផ្លូវកាត់។ **ជីវយី**ក៏លើកទាហានដេញតាមទៅ។ ទាហាន**ចោហាង**ឃើញឈើរលំគ្របលើផ្លូវទៅមិនរួច ក៏ចោលសេះនិងគ្រឿងសាស្ត្រាវុធទាំងអស់ នាំគ្នារត់យកតែខ្លួនទៅ។

កាល**ជីវយី**លើកទាហានទៅតាមនោះ ក៏បានសេះនិងអាវុធជាច្រើន ហើយក៏លើកស្រួតទៅដល់មាត់ផ្លូវ ទាន់ប្រទះនឹងកងទ័ព**ចោយិន**លើកមកជួយ**ចោហាង**តាមសំបុត្រក៏បានតតាំងច្បាំងគ្នាជាពន្លឹក លុះដល់ពេលព្រលប់ក៏មិនចាញ់មិនឈ្នះ។ **ចោយិន**ក៏នាំ**ចោហាង, ចោស៊ុន** ត្រឡប់ចូលស្រុកឡាំគុន ហើយប្រឹក្សាគ្នាថា ឥឡូវយើងខូចគយអ៊ីឡេងហើយ មុខជាយើងនឹងការពារស្រុកឡាំគុនមិនឈ្នះទេ គិតហើយក៏បើកស្រោមសំបុត្រដែល**ចូឆូ**សរសេរទុកឲ្យនោះមើល។ លុះដឹងក្នុងសេចក្ដីទាំងពួងសព្វគ្រប់ហើយ ក៏ឲ្យយកងទង់ទៅដោតទុករៀងតាមសើនបន្ទាយ ឲ្យទាហានទាំងពួងរែកស្ពាយអាហារ ធ្វើបីដូចជានាំគ្នារត់ចោលស្រុកឡាំគុន ហើយបង្គាប់**តាន់កៀវ, ងីវយឹម** ឲ្យបើកទ្វារស្រុកទុកបីតំបន់ ឲ្យជីករំលុងតាមក្បែរមាត់ទ្វារ យកដីមកប្លុកគ្របពីលើមាត់រំលុងឲ្យជិត កុំឲ្យឃើញស្នាមស្គាល់បាន បើ

ទាហាន**ជីវឃើ**នឹងលើកចូលមក ក៏នឹងដើរទៅជាន់ធ្លាក់ទៅក្នុងរំលុងនោះ ហើយនឹងចាប់បានដោយងាយ ឯខ្លួនអ្នកទាំងពីរត្រូវឲ្យនាំទាហានផ្ទុទៅបង្កប់ពួនគ្រប់ទ្វារទាំងបី។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៤៤

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចោយិន, ចោហាង** ធ្វើឧបាយរត់ចោលស្រុកឡាំគុន **ជីវយី**ត្រូវព្រួញធ្វើជាស្លាប់។ **ចោយិន**ត្រឡប់ចាញ់ទ័ព**ជីវយី**។ **ខុងបេង**ដណ្ដើមយកស្រុកឡាំគុនបាន **ឡៅពី**វាយយកស្រុកឡេងឡេងបាន ហើយឲ្យ**ជូឡុង**វាយយកស្រុកហ៊ុយអៀងបានទៀត។)*

**មើឃើញជីវយី**លើកទាហានចូលមក ក៏ឲ្យច្បាំងរាំងរាភ្លាមៗ បើឮសំឡេងផាវេលាណា ត្រូវឲ្យទាហានធ្នូបាញ់ព្រួតគ្នាចម្រុះចូលទៅឲ្យមាំមួន លុះបង្គាប់ធ្វើស្រេចហើយ **ចោយិន**, **ចោហាង**ក៏នាំទាហានដែលស្ពាយស្បៀងនោះ ធ្វើជារត់ចេញចោលស្រុកទៅ។

ឯ**ជីវយី**ក៏ឡើងមើលលើសើនបន្ទាយ មិនបានឃើញទាហាននៅរក្សាក្នុងស្រុក ឃើញតែ**ចោយិន**, **ចោហាង**នាំទាហានស្ពាយរែកស្បៀងអាហារចេញពីស្រុកទៅប្រពាក់ប្រពូនក៏នឹកថា **ចោយិន**, **ចោហាង**រត់ចោលស្រុកហើយ **ជីវយី**ក៏ចុះពីលើសើនបន្ទាយ ហើយបង្គាប់ទាហានកងមុខឲ្យចូលច្បាំងនឹង**ចោយិន**, **ចោហាង** ឲ្យប៉ែកឆ្វេងស្តាំ ចូលប្រសព្វគ្នាច្បាំងជាជ្រួលច្របល់ ឯខ្លួនយើងនឹងលើកទាហានជាទ័ពជំនួយ បើកងមុខឮសំឡេងឃ្មោះហើយ ឲ្យបង្ហិស្រូតបំពារចូលទៅ។ ឯទាហានកងមុខនិងប៉ែកឆ្វេងស្តាំក៏លើកចូលទៅប្រយុទ្ធគ្នានឹង**ចោយិន**, **ចោហាង**ជាច្រឡំបល់។ **ជីវយី**ក៏ឲ្យ**ជីវថាយ**បរសេះចេញទៅច្បាំងនឹង**ចោយិន**បានដប់ភ្លែង មិនចាញ់មិនឈ្នះ **ជីវយី**ក៏ប្រើហាន់តុងឲ្យជិះសេះចូលទៅតនឹង**ចោហាង**បានសាមសិបភ្លែង។ **ចោយិន**, **ចោហាង**ធ្វើជាថយរត់ទៅទិសខាងជើងមិនបានចូលស្រុកឡាំគុនទេ។

**ជីវថាយ**, **ហាន់តុង**ឃើញដូច្នោះក៏បរសេះដេញតាមទៅ។ **ជីវយី**ក៏ដេញទាហានជំនួយទៅផុតជើងកំផែងស្រុក ឃើញទ្វារចំហ ក្រឡេកមើលទៅមិនឃើញមានមនុស្សម្នានៅក្នុងបន្ទាយនោះសោះ **ជីវយី**ក៏នាំទាហានប្រហែលហាសិបនាក់ចូលទៅតាមទ្វារដល់ក្នុងស្រុក។

ឯ**តាន់កៀវ**ក៏និយាយថា គំនិតដែលរិះគិតរបស់មហាឧបរាជឲ្យសំបុត្រនោះល្អណាស់ ដូចទេពតាមកបញ្ចូលចិត្ត ទទួលឮសំឡេងផាវ ក៏ឲ្យទាហានបាញ់ធ្នូចម្រុះចូលទៅជាច្រើន ឯ**តានក់កៀវ**ក៏បាញ់តម្រង់ទៅត្រូវជើងឆ្វេង**ជីវយី**ធ្លាក់ពីលើសេះ។ **ជីវឃើម**ឃើញដូច្នោះ ក៏លើកទាហានចូលទៅនឹងចាប់យក**ជីវយី**។ ទទួល**ឈីសេង**, **តេងហាង**ចូលមកទាន់ក៏ជួយគ្នាការពារ**ជីវយី**បាន ហើយគ្រាហ៍ឡើងសេះថយចេញមកពីស្រុក។ ឯ**តាន់កៀវ**ក៏បរពលចូលច្បាំង។ ពួកទាហាន**ជីវយី**ក៏រត់ទៅធ្លាក់អន្លុងជាច្រើន។ **តាន់កៀវ**ក៏ចាប់បានសម្លាប់ខ្លះចេញ។ **ឈីសេង**, **តេងហាង**ខំការពារ**ជីវយី**នាំចេញទៅក្រៅបាន។ **ទៀវភៅ**ឃើញ**ជីវយី**ថយមកក៏វាយឃ្មោះជាសញ្ញាប្រាថ្នានឹងហៅទាហានឲ្យថយមករាល់គ្នា។ ឯ**ជីវថាយ**និង**ហាន់តុង**លុះឮសំឡេងឃ្មោះក៏នាំទាហានថយមកតាមសញ្ញា។

**ចោយិន**, **ចោហាង**ឃើញដូច្នោះ ក៏លើកទាហានញែកគ្នាជាពីរកង តាមវាយផ្ទប់ប្រសព្វចូលទៅ។ **ជីវយី**និងទាហានក៏ថយចូលទៅក្នុងបន្ទាយវិញ។ **ជីវយី**ក៏កន្ត្រាក់ដកព្រួញចេញបាន ហើយឲ្យពេទ្យថែរក្សារបួស តែនៅឈឺចាប់ក្នុងរបួសនោះម្តងៗ។ ពេទ្យក៏និយាយថា ព្រួញនេះដាក់ថ្នាំពិស សុំឲ្យលោករម្ងាប់កំហឹងក្នុងខ្លួនកុំឲ្យមាន បើកាលណាមានកំហឹងហើយ ពិសថ្នាំក៏នឹងកម្រើកឡើងវិញ។ **ទៀវភៅ**ក៏បង្គាប់ទាហានទាំងពួងឲ្យត្រួតត្រារក្សាបន្ទាយឲ្យមាំមួន កុំឲ្យទីប្រឹក្សានិងទាហានទាំងពួងយកការអ្វីចូលទៅនិយាយនឹង**ជីវយី**ឲ្យសោះ បើឆ្ងល់ពីការអ្វី ក៏ឲ្យនាយទ័ព

នាយកងជួយគ្នារិះគិតការឲ្យបានសម្រេច កុំឲ្យអន្តរាយទម្រាំតែរបួសជើង**ជីវយី**នោះសះជា។

ឯ**ចោយិន, ចោហង** ក៏ឲ្យ**ជីវយីម**លើកទាហានទៅស្រែកជេរ**ជីវយី**នៅមុខបន្ទាយជាពាក្យអសុរោះគ្រប់បីថ្ងៃ។ **ទៀវភៅ**ក៏ហាមប្រាមទាហានទាំងពួងមិនឲ្យចេញច្បាំង ហើយប្រឹក្សានឹងនាយទ័ពនាយកងថា គ្រានេះ**ជីវយី**ឈឺត្រូវតែយើងរិះគិតឧបាយឲ្យ**ជីវយី**លើកទ័ពត្រឡប់ទៅវិញ ដើម្បីនឹងឲ្យ**ស៊ុនគួន**ជ្រាបកិច្ចការ រួចសឹមលើកកងទ័ពមកធ្វើសង្គ្រាមវិញ។ នាយទ័ពនាយកងទាំងពួងក៏នៅស្ងៀមមិនថាប្រការម្ដេច។

ខណៈនោះ **ជីវយី**បានឮសំឡេងទាហាន**ចោយិន**មកស្រែកជេរដៀមដាម**ជីវយី**ខំអត់សង្កត់ចិត្តកុំឲ្យកំហឹងកើតឡើងបាន ព្រោះខ្លាចពិសថ្នាំកម្រើកឡើងវិញ។ ថ្ងៃមួយ តមក**ចោយិន**ក៏លើកទាហានទៅដល់មុខបន្ទាយ**ជីវយី** ហើយឲ្យវាយគងស្គរស្រែកហ៊ោកញ្ជ្រៀវអឺងកង ដើម្បីផ្ដើនចំអក**ជីវយី**។ **ជីវយី**ឮហើយបណ្ដាលចិត្តគិតចង់ដឹង ទើបសួរពួកមនុស្សដែលនៅបម្រើថា សំឡេងអ្វីឮសន្ធឹកសន្ធាប់នោះ? ពួកអ្នកបម្រើឆ្លើយថា ទាហានកងទ័ពយើងកំពុងហ្វឹកហាត់គ្រឿងសាស្ត្រាវុធ។ **ជីវយី**ឮដូច្នោះខឹងណាស់ ទើបថា សំឡេងនោះ គឺទាហាន**ចោយិន**មកស្រែកជេរដៀមដាមច្រើនថ្ងៃហើយ យើងក៏ដឹងដែរ ទើបឲ្យហៅ**ទៀវភៅ**មក ហើយនិយាយថា ខ្លួនយើងជាមេទ័ពដេកឈឺ គួរឬខ្លួនអ្នកជាបាឡាត់ទ័ពនៅស្ងៀមព្រងើយ មិនដឹងជា**ចោយិន**វាប្រើទាហានមកស្រែកជេរដៀមដាមបីបួនថ្ងៃហើយ? ហេតុអ្វីមិនប្រាប់យើងឲ្យដឹងផង? **ទៀវភៅ**ឆ្លើយថា បានជាខ្ញុំបាទមិនជម្រាបលោកឲ្យជ្រាបនោះ ព្រោះក្រែងលោកជ្រាបទៅហើយ នឹងបណ្ដាលឲ្យមានចិត្តខឹងឡើង របួសព្រួញដែលមានក្នុងខ្លួនលោកនឹងកម្រើកពិសឡើងវិញ។ **ជីវយី**ថា បើអ្នកនៅស្ងៀមមិនចេញច្បាំងដូច្នេះ

តើគិតដូចម្ដេចទៅវិញ? **ទៀវភៅ**ថា ខ្ញុំបាទនិងទាហានទាំងពួងប្រឹក្សាគ្នាទៅឃើញថា ខ្លួនលោកនៅឈឺដូច្នេះ ខ្ញុំបាទចង់អញ្ជើញលោកលើកទ័ពត្រឡប់ទៅស្រុកកាំងតាំងសិន បើលោកគ្រាន់បើថ្ងៃណា សឹមលើកទ័ពមកធ្វើសង្គ្រាមនឹង**ចោយិន**វិញ។ **ជីវយី**ឮដូច្នោះស្ទុះក្រោកឡើងហើយថា ខ្លួនយើងនិងអស់អ្នករាល់គ្នាសុទ្ធតែជាទាហានស៊ីបៀវត្ស ត្រូវតែគិតតបស្នងសងគុណថៅហ្វាយនាយ បានជាខំមកធ្វើការប្ដូររស់ប្ដូរស្លាប់ ទោះបីក្ស័យជីវិតក្នុងសង្គ្រាម ក៏ឲ្យគេយកអានសេះបិទបាំងសាកសពទៅចុះ ដែលនឹងរាថយដោយញញើតខ្លាចនោះមិនគួរសោះឡើយ ត្រូវតែខំស្រូតទៅខាងមុខ ហេតុអ្វីអស់អ្នករាល់គ្នាសុទ្ធតែជានាយទ័ពនាយកង នាំគ្នាមកកើតទុក្ខធុញថប់ដល់យើងដែលឈឺប៉ុណ្ណេះ ហើយមិនគិតលើកកងទ័ពចេញទៅច្បាំងនឹងសត្រូវ ថាហើយ**ជីវយី**តែងខ្លួនពាក់ក្រោះកាន់លំពែងឡើងសេះ។ ទាហានទាំងពួងឃើញដូច្នោះ នាំគ្នាតាម**ជីវយី**ចេញទៅដល់ទ្វារបន្ទាយ។

ឯ**ចោយិន**ក៏ប្រើទាហានចេញទៅស្រែកជេរថា អា**ជីវយី**នោះអាយុវានៅក្មេងនៅឡើយ តែចិត្តគំនិតវាភ្លើតភ្លើនខ្លាំងណាស់ ជីវិតវានឹងស្លាប់ក្នុងកណ្ដាលសង្គ្រាមឥឡូវហើយ។ **ជីវយី**ឮដូច្នោះ ក៏បរសេះចេញទៅក្រៅបន្ទាយហើយស្រែកថា ខ្លួនអញនេះទោះបីអា**ចោយិន**និងចេញមកតស៊ូប្រទល់ខ្លួន ក៏អញមិនខ្លាចដែរ អាឯងរាល់គ្នាកុំមកជេរប្រមាថអញឡើយ។ និយាយរួចក៏ប្រើ**ជូភៀង**ឲ្យបរសេះចេញទៅច្បាំងនឹង**ចោយិន**ហើយបង្ខំដេញទាហានជាជំនួយតាមទៅ លុះនិយាយអស់ពាក្យកាលណា ថ្នាំពិសក៏កម្រើកឡើងក្អួតឈាមធ្លាក់ពីលើសេះ។ **ចោយិន**ឃើញដូច្នោះ ក៏លើកទាហានចូលទៅប្រយុទ្ធគ្នា ពួកទាហាន**ជីវយី**ក៏ពារប្រទល់តទៅវិញ ហើយគ្រាហ៍យក**ជីវយី**ចូលទៅក្នុងបន្ទាយ ខ្លះរួតរឹត ខ្លះគក់ច្របាច់ **ជីវយី**ក៏ភ្ញាក់ស្មារតីដឹងខ្លួនឡើងវិញ។ ឯ**ចោយិន**បានលើកទ័ពចូលស្រុក។

**ទៀភៅ**សួរ**ជីវយី**ថា បើលោកកំពុងឈឺដូច្នេះ តើគិតជាយ៉ាងម្ដេចទៅទៀត? **ជីវយី**ក៏ខិនខ្សឹបប្រាប់ថា អ្នកកុំព្រួយឡើយ យើងគិតការឃើញស្រួលហើយ ហើយប្រាប់**ទៀភៅ**ថា យើងត្រូវប្រើទាហាននិងមនុស្សទំនុកទុកចិត្តចេញទៅនិយាយថា យើងដល់នូវសេចក្ដីស្លាប់ទៅហើយ ដែលនឹងនាំគ្នានៅជាមួយនាយទ័ពនាយកងនោះមិនស្រួល គិតនាំគ្នាទៅចូលខាង**ចោយិន** ៗក៏នឹងមានចិត្តភ្លើតភ្លើនលើកទ័ពមកវាយបន្ទាយយើងជាប្រាកដ រួចយើងត្រូវដោះខ្លួនចេញពីបន្ទាយឲ្យអស់ នាំទាហានយើងទៅបង្កប់ទុកជាបួនកង ហើយឲ្យវាយខ្ទប់ត្រឡប់មកវិញនឹងចាប់យកខ្លួន**ចោយិន**បានដោយងាយ។ **ទៀភៅ**ស្ដាប់ហើយក៏យល់ត្រូវផង **ជីវយី**ក៏ប្រើទាហានទាំងពួងឲ្យដើរចេញទៅស្រែកយំថា **ជីវយី**ស្លាប់ទៅហើយ ឲ្យយកទង់សដោតនៅមុខបន្ទាយ ទាហានទាំងឡាយក៏ឲ្យស្លៀកពាក់សទាំងអស់ ហើយបង្គាប់ទាហានឲ្យធ្វើការតាមគំនិតដែលគិតនោះ។

ឯ**ចោយិន**ក៏ប្រឹក្សានឹងទាហានទាំងពួងថា យើងឲ្យទៅស្រែកជេរ**ជីវយី**ជាពាក្យអសុរោះមើលងាយ **ជីវយី**ខឹងចេញមកតច្បាំង ក៏ធ្វើអ្វីយើងមិនបាន ឈឺចិត្តណាស់ទាល់តែក្អួតធ្លាក់ឈាមចេញមក យើងយល់ថាជីវិត**ជីវយី**ក្នុងគ្រានេះ មុខជាស្លាប់ប្រាកដណាស់។ ទទួលទាហានចូលមកប្រាប់ថា ឥឡូវទាហាន**ជីវយី**ដប់ពីរនាក់ចូលមករកលោក។ **ចោយិន**ក៏ហៅចូលមកហើយសួរថា អ្នកឯងរាល់គ្នាចូលមកនេះដោយធុរៈអ្វី? ទាហានទាំងដប់ពីរនាក់ក៏ឆ្លើយព្រមគ្នាថា ទាហានដប់នាក់ជារបស់**ជីវយី** ឯទាហានពីរនាក់ជាទាហាន**ចូឆ្វ**ដែល**ជីវយី**ចាប់បានមក កាល**ជីវយី**ចេញមកច្បាំងនឹងលោកនោះ **ជីវយី**ក៏ក្អួតធ្លាក់ឈាមចេញមក ហើយត្រឡប់ចូលទៅក្នុងបន្ទាយវិញ បានមួយស្របក់ក៏ដាក់ខ្យល់ស្លាប់ ឥឡូវ**ទៀភៅ**ជាមេទ័ពបង្គាប់

បញ្ហាពុំត្រឹមត្រូវ ធ្វើតែតាមអំពើចិត្ត យើងខ្ញុំទាំងអស់ទ្រាំមិនបាន ទើបនាំគ្នារត់មកប្រាថ្នានឹងជ្រកកោននៅនឹងលោកតទៅ។

**ចោយិន**ឮដូច្នោះ ក៏ពិនិត្យមើលទាហានទាំងដប់ពីរនាក់នោះ ក៏ចាំបានថាជាទាហាន**ចូឆ្វ** ទើបប្រឹក្សានឹងទាហានទាំងពួងថា ឥឡូវ**ជីវយី**ស្លាប់ហើយ យប់នេះយើងត្រូវលើកទាហានទៅលុកបន្ទាយ**ទៀភៅ**ដណ្ដើមយកសព**ជីវយី**ឲ្យបាន ដើម្បីកាត់ក្បាលបញ្ជូនទៅឲ្យ**ចូឆ្វ**ឯស្រុកក្រុង។ ទាហានទាំងពួងក៏យល់ឃើញត្រូវផង។ **ចោយិន**ក៏ប្រើ**តាន់កៀវ**ឲ្យនៅរក្សាបន្ទាយស្រុក ឲ្យ**ជីវឃឹម**លើកទាហានចេញទៅជាទ័ពស្រួច ឲ្យ**ចោយិន**លើកទ័ពជាកងហ្លួង ឲ្យ**ចោហាង**និង**ចោស៊ុន**លើកទាហានជាកងក្រោយ។ លុះយប់ប្រហែលជាយាមមួយប្លាយ ក៏លើកទ័ពចេញទៅដល់មុខបន្ទាយ**ទៀភៅ** មិនឃើញមានមនុស្សនៅក្នុងបន្ទាយសោះ។ **ចោយិន**ក៏គិតពិភាល់ក្នុងចិត្តថា ប្រហែលជា**ជីវយី**ធ្វើកលឧបាយទេដឹង គិតហើយក៏ឲ្យលើកទ័ពចេញមកវិញនឹងចូលទៅក្នុងស្រុក ទទួលឮស្គរផាវនិងមាត់ទាហានស្រែកហ៊ោផ្ទុះចេញមកពីទិសទាំងបួន ហើយឃើញទិសខាងកើតនោះ**ហាន់តុង**និង**ជីវឃឹម**លើកទាហានចូលមក ទិសខាងលិចឃើញ**ភូជៀង**និង**ជីវថាយ**វាយខ្ទប់ចូលមកទៀត ឃើញ**ឈីសេង**និង**តេងហាង**លើកទាហានចេញមកពីទិសខាងត្បូង ឃើញ**តាន់ប៊ូ**និង**លីបង**លើកទាហានចេញមកពីទិសខាងជើង ប្រជុំគ្នាជុំវិញជាច្រឡំបល់។ កងទ័ព**ជីវយី**ក៏ព្រួតគ្នាកាប់សម្លាប់ទាហាន**ចោយិន**ស្លាប់ច្រើនណាស់។ **ចោយិន**និងទាហានទាំងពួងតទល់ពុំបាន ក៏នាំគ្នាបាក់រត់ចេញទៅជាបីផ្លូវ គិតគ្នាថានឹងចូលទៅក្នុងស្រុក ឃើញ**ឡេងថង**លើកទាហានមកស្ទាក់នៅពីមុខ **ចោយិន**ក៏នាំ**ចោហាង**រត់ទៅដល់មាត់ផ្លូវប្រទះនឹង**កាំឡេង**ស្ទាក់នៅពីមុខទៀត **ចោយិន, ចោហាង**ច្បាំងគ្នានឹង**កាំឡេង**ជាពន្លឹក ទប់កម្លាំងទ័ពរបស់**កាំឡេង**មិនបាន ក៏នាំទាហានប្រហែលម្ភៃនាក់រត់តម្រង់ទៅស្រុក

សុងយ៉ុង។ លុះពេលព្រឹកឡើង នាយទាហានទាំងពួងក៏នាំគ្នាទៅរក**ជីវយី** ៗក៏នាំទាហានទាំងអស់ចូលទៅស្រុកឡាំគុន។

កាលដែល**ជីវយី**លើកកងទ័ពទៅវាយយកស្រុកឡាំគុននោះ **ឡៅពី**និង**ខុងបេង**ក៏នាំ**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង** និង**ឡៅគី**នូវទាហានទាំងពួងក៏លើកទ័ពតាម**ជីវយី**ទៅបង្កប់នៅកណ្ដាលផ្លូវ។ **ខុងបេង**ក៏ប្រើបម្រើសេះទៅលបចាំមើលហេតុការណ៍ដែល**ជីវយី**និង**ចោយិន**ច្បាំងគ្នា។ បម្រើសេះក៏ត្រឡប់មកប្រាប់**ខុងបេង**ថា ឥឡូវ**ជីវយី**ស្លាប់ទៅហើយ។ **ខុងបេង**ឮដូច្នោះក៏ដឹងថា គំនិត**ជីវយី**ក្លែងកលឧបាយ ទើបនាំ**ឡៅពី**និងសេនាទាហានកាត់វាងផ្លូវទៅបង្កប់ក្បែរស្រុកឡាំគុន មិនឲ្យ**ជីវយី**ដឹងសោះ។ លុះ**ចោយិន**លើកទ័ពទៅប្លន់យកបន្ទាយ**ជីវយី** **ខុងបេង**ក៏ឲ្យទាហានស្រែកប្រាប់ទៅអស់ពួកអ្នកស្រុកថា ឥឡូវទ័ព**ចោយិន**បែកមកហើយ ឲ្យប្រញាប់បើកទ្វារទទួល។ **តាន់កៀវ**គិតថាប្រាកដមែន ក៏ឲ្យទាហានបើកទ្វារទទួល។ **ឡៅពី** និង**ខុងបេង**ក៏ចូលទៅព្រមទាំងសេនាទាហានទាំងពួង ហើយឲ្យ**ជូឡុង**និងទាហានទាំងពួងឡើងរក្សានាទីសើនបន្ទាយជាមាំមួនជុំវិញ។

ឯ**ជូឡុង** កាលបើឃើញ**ជីវយី**លើកទាហានចូលមកដល់ជើងកំផែងបន្ទាយស្រុក ក៏ស្រែកប្រាប់ទៅថា ខ្ញុំបាទសូមអភ័យទោសនឹង**ជីវយី**ចុះ ដ្បិត**ខុងបេង**ប្រើខ្ញុំបាទលើកទាហានមកវាយយកស្រុកឡាំគុនបានមុនទៅហើយ។ **ជីវយី**ឮដូច្នោះខឹងណាស់ ប្រើទាហានទៅតច្បាំងវាយទម្លាយទ្វារនិងកំពែង **ជូឡុង**ឃើញដូច្នោះ ក៏ឲ្យទាហានចោលដុំថ្មបាញ់ធ្នូចម្រុះទៅជាខ្លាំង **ជីវយី**ឃើញថា ទាហាននឹងចូលដណ្ដើមយកកំពែងមិនបាន ក៏ថយទាហានត្រឡប់ទៅបន្ទាយវិញ ហើយប្រឹក្សានឹងទាហានទាំងពួងថា ឥឡូវ**ខុងបេង**នាំ**ឡៅពី**ទៅដណ្ដើមស្រុកឡាំគុនបានហើយ ឯស្រុកកេងជីវនិងស្រុកសុងយ៉ុងនោះ បើនឹងបង្អង់ទុកឲ្យយូរមិនលើកទ័ពទៅវាយយកឲ្យ

បានទេ មុខជា**ខុងបេង**នឹងលើកទាហានទៅវាយដណ្តើមយកទៀត តទៅមុខយើងក៏គង់នឹងបានសេចក្តីទញ់ទាល់ចង្អៀតនឹងធ្វើការ។ ទីប្រឹក្សាទាំងពួងយល់ឃើញត្រូវផង **ជីវយី**ក៏ប្រើ**កាំឡេង**ឲ្យលើកទាហានបីពាន់ទៅវាយយកស្រុកកេងជីវ ឲ្យ**ឡេងថង**លើកទាហានបីពាន់ទៅវាយយកស្រុកសុងយ៉ុង។

កាលដែល**ជីវយី**ចាត់ប្រើ**កាំឡេង, ឡេងថង**នោះ ទទួលបម្រើសេះមកប្រាប់**ជីវយី**ថា ឥឡូវ**ខុងបេង**ឲ្យទាហានបន្លំជាទាហាន**ចោយិន** កាន់ត្រានិងទង់សម្រាប់ហៅទាហានក្នុងស្រុកកេងជីវ អ្នករក្សាស្រុកមិនបានដឹងកលឧបាយក៏ចាត់ទាហានបញ្ជូនទៅឲ្យ ហើយ**តៀវហ៊ុយ**លើកទៅវាយយកស្រុកកេងជីវ ឯស្រុកសុងយ៉ុងក៏**ខុងបេង**ឲ្យទាហានទៅបន្លំនិយាយដូចគ្នា ទាល់តែ**ហៃហួទុន**លើកទាហានមកឲ្យស្រុកសុងយ៉ុងនោះ គឺ**គួនអ៊ូ**លើកទ័ពទៅវាយ។ **ជីវយី**ឮដូច្នោះក៏ភ័យស្លុតស្មារតីនិយាយថា ចុះ**ខុងបេង**បានត្រានិងទង់ជ័យពីណាមក? **ទៀវអៅ**ថា កាលវាយបានស្រុកឡាំគុននោះ **តាន់កៀវ**ក៏នៅក្នុងកណ្តាប់ដៃគេ **ខុងបេង**ក៏ហៅយកត្រានិងទង់ប្រើឲ្យ**គួនអ៊ូ**និង**តៀវហ៊ុយ**ទៅធ្វើការទាំងនេះ។ **ជីវយី**ឮដូច្នោះ ក៏រឹតតែតូចចិត្តទោមនស្សខ្លាំងណាស់ ស្រែកដោយសំឡេងខ្លាំងថា ខ្លួនអញជាជាតិទាហានបានមកធ្វើការដល់ប៉ុណ្ណេះហើយ មិនគួរ**ខុងបេង**មកដណ្តើមយកស្រុកទាំងបីអន្លើនេះសោះ អញត្រូវតែគិតសម្លាប់**ខុងបេង**ចេញឲ្យបាន ហើយនឹងដណ្តើមយកស្រុកទាំងបីទៅឡើងស្តាប់បង្គាប់ស្រុកកាំងតាំងឲ្យបានវិញ ឯពិសថ្នាំនោះក៏បណ្តាលកម្រើកឡើង **ជីវយី**ក៏ដួលសន្លប់ចុះ មនុស្សក្នុងទីនោះក៏នាំគ្នាកែខៃឲ្យដឹងខ្លួនឡើងវិញ **ជីវយី**ក៏ឲ្យទៅហៅ**ឡោសុក**ចូលមកប្រឹក្សាថា ឥឡូវ**ខុងបេង**គិតការក្បត់ដណ្តើមយកស្រុកបានដល់បីតំបន់ហើយ យើងត្រូវតែលើកកងទ័ពទៅកម្ចាត់**ឡៅពី, ខុងបេង**ចេញឲ្យបាន អ្នកនឹងយល់ឃើញប្រការម្តេច? **ឡោសុក**ថា ដែល**ចូឆូ**បែកទ័ពទៅគ្រានេះ មិនមែននឹង

ស្ងៀមព្រមចាញ់តែម្តងទេ មុខជានឹងរិះគិតសងសឹកវិញប្រាកដ។ ឯ**ស៊ុនគួន**ចៅហ្វាយយើងឥឡូវនេះ ក៏លើកទ័ពទៅវាយយកស្រុកហាប់ប៉ា យើងក៏មិនទាន់បានដឹងដំណឹងយ៉ាងណានៅឡើយ វេលានេះ**ឡៅពី**និងយើងក៏ធ្វើដូចជាពួកក្រុមជាមួយគ្នា ដែលលោកនឹងលើកកងទ័ពទៅវាយកម្ចាត់**ឡៅពី, ខុងបេង**ចេញនោះ ខ្លាចក្រែង**ចូឆូ**ដឹងទៅនឹងលើកទ័ពមកវាយយកស្រុកកាំងតាំងវិញ យើងក៏នឹងបានសេចក្តីព្រួយការជាពីរចំណែក។ ប្រការមួយទៀត **ឡៅពី**ក៏ជាមនុស្សធ្លាប់ស្គាល់រាប់អានគ្នាមកពីដើម ខ្លាច**ឡៅពី**នឹងនាំយកស្រុកទាំងបីតំបន់នេះទៅប្រគល់ឲ្យ**ចូឆូ** ហើយខ្លួន**ឡៅពី, ខុងបេង**ក៏នឹងចូលគំនិតគិតទៅធ្វើការសង្គ្រាមនឹង**ចូឆូ**វិញ ស្រុកកាំងតាំងក៏នឹងអន្តរាយជាប្រាកដ។

**ជីវយី**តបថា ដែលយើងធ្វើការសង្គ្រាមនឹង**ចូឆូ**គ្រានេះ យើងក៏បានខូចខាតសោហ៊ុយ ចំណាយជាមាសប្រាក់ស្បៀងអាហារ និងឲ្យបំណាច់រង្វាន់ទាហានជាច្រើន ហើយក៏បានលើកមកធ្វើការចម្បាំងនឹង**ចោយិន**ដល់ស្រុកឡាំគុនទៀត ឯ**ឡៅពី**និង**ខុងបេង**មិនបានខូចខាតរបស់ទ្រព្យសព្វសារពើ ឬទាហានដល់ម្នាក់សោះ មកចាំតែលាងដៃទទួលយកស្រុកទាំងបីតំបន់នោះដោយងាយ មុខគួរឲ្យយើងមានសេចក្តីខឹងខ្លាំងណាស់។ **ឡោសុក**ថា លោកមានសេចក្តីខឹងនេះក៏គួរហើយ តែសុំបង្អង់ឲ្យខ្ញុំទៅនិយាយនឹង**ឡៅពី, ខុងបេង**ដោយល្អសិន បើ**ឡៅពី, ខុងបេង**រឹងទទឹងប្រការម្តេច សឹមរិះគិតតទៅទៀត។

**ជីវយី**ឮដូច្នោះក៏ប្រឹក្សានឹងទាហានទាំងពួងថា អស់អ្នកយល់ឃើញដូចម្តេច? ទាំងអស់គ្នាក៏ឆ្លើយថា ដែល**ឡោសុក**ឆ្លើយជម្រាបលោកនោះត្រូវហើយ។ **ជីវយី**ក៏ព្រមឲ្យ**ឡោសុក**ទៅ។ **ឡោសុក**ក៏លា**ជីវយី** នាំទាហានប្រហែលដប់នាក់ទៅឯស្រុកឡាំគុនជួបនឹង**ជូឡុង**។ **ឡោសុក**ថា អ្នកចូរទៅជម្រាប**ឡៅពី**ថាខ្ញុំមានការមកជួប។

**ជូឡុង**ថា ឥឡូវ**ឡៅពី** និង**ខុងបេង**នាំគ្នាទៅនៅស្រុកកេងជីវហើយ។ **ឡៅសុក**ក៏នាំទាហានស្រួតទៅឯស្រុកកេងជីវ ឃើញទង់ដោតនៅលើសើនបន្ទាយជុំវិញ **ឡៅសុក**ក៏នឹកថា តម្រិះប្រាជ្ញា**ខុងបេង**នេះជ្រៅទូលាយណាស់កម្រនឹងដឹងបាន ហើយក៏ប្រាប់នាយទ្វារថា យើងត្រូវការចូលទៅជួបនឹង**ខុងបេង**, **ឡៅពី** នាយទ្វារក៏ចូលទៅជម្រាបតាមដំណើរ។ **ខុងបេង**ក៏ឲ្យបើកទ្វារទទួល។ **ឡៅសុក**ចូលទៅជួបនឹង**ខុងបេង** ៗក៏អញ្ជើញឲ្យទៅអង្គុយក្នុងទីដ៏សមគួរ តែ**ឡៅពី**នោះ **ខុងបេង**ឲ្យនៅខាងក្នុង។ **ឡៅសុក**គំនាប់**ខុងបេង**ហើយថា ដែល**ចូឆ្វូ**លើកពលទាហានប្រហែលមួយរយម៉ឺននាក់មកនោះ មិនមែននឹងប៉ងធ្វើអន្តរាយចំពោះតែស្រុកកាំងតាំងប៉ុណ្ណោះក៏ទេ **ចូឆ្វូ**គិតប្រាថ្នានឹងចាប់យកខ្លួន**ឡៅពី**ជាតួដើមហេតុ វេលានោះ**ស៊ុនគួន**និង**ជីវយី**ក៏មានចិត្តអាណិត**ឡៅពី** ទើបប្រឹក្សាគ្នាយល់ព្រមឲ្យ**ជីវយី**លើកកងទ័ពចេញមកតទល់នឹង**ចូឆ្វូ** ប្រាថ្នានឹងជួយ**ឡៅពី**ឲ្យរួចពីសេចក្ដីស្លាប់ ទាំងនឹងបានការពារស្រុកកាំងតាំងផង ដែល**ស៊ុនគួន**, **ជីវយី**ខំធ្វើការសង្គ្រាមគ្រានេះ លោកក៏ល្មមជ្រាបយល់ហើយ គឺថាការដែលធ្វើនោះបានខាតបង់របស់ទ្រព្យសព្វសារពើគ្រប់មុខជាច្រើនណាស់ លុះ**ចោយិន**, **ចោហាង**បែកទ័ពទៅទៀត ស្រាប់តែលោកនិង**ឡៅពី**មកជ្រែកដណ្ដើមយកស្រុកកេងជីវ ស្រុកសុងយ៉ុង ស្រុកឡាំគុនដោយស្រួលទទេដូច្នេះ មិនសមគួរសោះ ខ្ញុំយល់ឃើញថាខុសនឹងប្រវេណី ទើបមកជម្រាបដើម្បីជាផ្លូវតឿនរំឭកស្មារតីឲ្យលោកយល់។

**ខុងបេង**តបថា ខ្លួនអ្នកជាមនុស្សមានតម្រិះប្រាជ្ញា គួរឬមកនិយាយដូច្នេះ? ឯស្រុកបីតំបន់នេះ បើស្រុករបស់**ចូឆ្វូ** ខ្ញុំក៏នឹងលើកទៅឲ្យ**ស៊ុនគួន**តែម្ដង មិនបាច់នាំអ្នកមកតឿនក្រើនដូច្នេះទេ តែថាគឺស្រុកទាំងបីនេះជារបស់**ឡៅពៀវ** អ្នកក៏ដឹងយល់ស្រាប់ថា **ឡៅពៀវ**និង**ឡៅពី**ជាសាច់សាលោហិតនឹងគ្នា ទោះបី**ឡៅពៀវ**ស្លាប់ទៅ

ហើយក្តី ក៏មាន**ឡៅគី**ជាបុត្រារស់នៅត្រូវតែទទួលមត៌ក បានជាខ្ញុំនិង**ឡៅពី**ខំស្រូតមកជ្រែកយកស្រុកទាំងបីតំបន់នេះ ទុកជាប្រយោជន៍ឲ្យ**ឡៅគី**តាមប្រវេណីបុរាណ ដែលអ្នកមកថាខ្ញុំធ្វើខុសនោះមិនបាន។ **ឡៅសុក**ថា ស្រុកទាំងបីនោះជារបស់**ឡៅពៀរ**ក៏មែនហើយ តែថា**ឡៅគី**ជាបុត្រនៅឈរនៅស្រុកកាំងហែ នឹងបានមកនៅស្រុកនេះក៏ទេ ហេតុម្តេចបានជាលោកថាយកទុកឲ្យ**ឡៅគី**ទៀត? **ខុងបេង**ថា អ្នកនឹងចង់ឃើញ**ឡៅគី**ឬ? ឥឡូវ**ឡៅគី**ឈឺហើយ ក៏ឲ្យមនុស្សគ្រាប់**ឡៅគី**ចេញមក។ **ឡៅគី**ក៏និយាយនឹង**ឡៅសុក**ថា ខ្ញុំសូមអភ័យទោសចុះព្រោះខ្ញុំឈឺ នឹងនៅគំនាប់គួរសមនឹងលោកមិនកើត ហើយក៏ឲ្យគ្រាប់ចូលទៅក្នុងវិញ។ **ឡៅសុក**ក៏និយាយនឹង**ខុងបេង**ថា ដែលលោកមានប្រសាសន៍នោះក៏ត្រូវហើយ តែបើ**ឡៅគី**មានអាយុរស់រហូតទៅ ក៏ត្រូវបានស្រុកទាំងនេះជាជំនួសបិតា ចុះបើសិនណា**ឡៅគី**អស់ជីវិតទៅវិញ លោកនឹងថាដូចម្តេច? **ខុងបេង**ថា បើសំណាងបុណ្យ**ឡៅគី**រស់នៅបានតែមួយថ្ងៃ ពីរថ្ងៃក្តី ខ្ញុំក៏ត្រូវតែជួយទំនុកបម្រុងតាមការ បើអស់បុណ្យវាសនា**ឡៅគី**ទៅហើយ សឹមគិតតទៅទៀត។

**ឡៅសុក**ក៏ថែមសួរបញ្ជាន់ដោយចង់ដឹងច្បាស់ថា បើ**ឡៅគី**អស់បុណ្យហើយ លោកនឹងបង្វិលស្រុកតំបន់នេះឲ្យ**ស៊ុនគួន**ឬ? **ខុងបេង**ក៏ទទួលពាក្យបែបបន្ធំថា ល្អហើយៗ ក៏អញ្ជើញ**ឡៅសុក**ឲ្យបរិភោគអាហារផឹកស្រាជាមួយគ្នា **ឡៅសុក**លុះបរិភោគរួចហើយ ក៏លា**ខុងបេង**ត្រឡប់ទៅដល់បន្ទាយវិញ ហើយយកសេចក្តីទៅជម្រាប**ជីវយី**ស្តាប់គ្រប់ប្រការ។ **ជីវយី**ឮដូច្នោះក៏និយាយថា **ឡៅគី**នោះនៅក្មេងនៅឡើយ កាលណានឹងដល់នូវសេចក្តីស្លាប់ឆាប់ ហេតុម្តេចអ្នកទៅប្រញាប់សន្យាដូច្នេះ? **ឡៅសុក**ថា ឯខ្លួន**ឡៅគី**នោះក៏ឈឺធ្ងន់ណាស់ទៅហើយ សេចក្តីនេះខ្ញុំសុំកុំឲ្យលោកព្រួយ ចាំខ្ញុំគិតយកស្រុកទាំងបីតំបន់នេះមកឡើងស្រុកកាំងតាំងឲ្យបាន។

**ជីវយី**ថា អ្នកគិតឃើញយ៉ាងម្ដេចបានជាថាដូច្នេះ? **ឡៅសុក**តបថា **ឡៅគី**នោះនៅក្មេងក៏មែន តែចូលចិត្តផឹកស្រាលេងស្រីដែលបង្កើតរោគឈឺនោះព្រោះទោសទាំងពីរប្រការនេះ ខ្ញុំយល់ឃើញថា អាយុ**ឡៅគី**មិនយឺនទៅមុខដល់កន្លះឆ្នាំឡើយ បើស្លាប់កាលណាហើយ ខ្ញុំនឹងទៅទារយកស្រុកទាំងបីនោះឲ្យបានវិញ។

ខណៈនោះមានបម្រើសេះកាន់សំបុត្រ**ស៊ុនគួន**មកឲ្យ**ជីវយី**សេចក្ដីថា **ស៊ុនគួន**លើកទ័ពទៅធ្វើសង្គ្រាមឯស្រុកហាប់ប៉ា បានតតាំងច្បាំងនឹង**ទៀវលៀវ**ទាហាន**ចូឆូ**នៅមិនទាន់ចាញ់ឈ្នះ ឲ្យ**ជីវយី**រំលែកទាហានលើកទៅជួយនឹងបានធ្វើការតទៅ។ **ជីវយី**ដឹងដូច្នោះ ក៏ចាត់បែងចែកទាហានឲ្យ**ទៀវភៅ**ជានាយកងទ័ពលើកទៅជួយ**ស៊ុនគួន** ឯ**ជីវយី**នៅដេកឈឺ ទើបលើកកងទ័ពត្រឡប់ទៅស្រុកឆសងគុនមាត់កំពុងស្រុកកាំងតាំង។

ឯ**ឡៅពី**កាលបានស្រុកបីតំបន់ហើយ ក៏តាំងចិត្តគិតបម្រុងរក្សាអាណាប្រជានុរាស្ត្រឲ្យបានសេចក្ដីសុខ។ លុះនៅមកថ្ងៃមួយ **ឡៅពី**ក៏ប្រឹក្សានឹង**ខុងបេង**នូវអស់ទាហានទាំងពួងថា យើងនឹងរិះគិតប្រការម្ដេច ទើបនឹងរក្សាស្រុកកេងជីវទុកបានហើយនឹងបានគិតការទំនុកបម្រុងផែនដីតទៅ? **ខុងបេង**និងទាហានទាំងពួងនៅមិនទាន់ឆ្លើយថាប្រការម្ដេច **អ៊ីជៀ**ឆ្លើយថា ខ្ញុំបាទសូមជម្រាបលោកខមួយ។ **ឡៅពី**ឮដូច្នោះក៏មានអំណរណាស់ ដោយគិតដល់**អ៊ីជៀ**ដែលបានប្រាប់ហេតុកាលនៅស្រុកសុងយ៉ុងនោះ **ឡៅពី**ក៏ចាប់ដៃ**អ៊ីជៀ**ឲ្យឡើងទៅអង្គុយថ្នាក់ខាងលើ ហើយសួរថាអ្នកនឹងប្រាប់ខសេចក្ដីអ្វីដល់យើងក៏ឲ្យថាទៅចុះ។ **អ៊ីជៀ**ឆ្លើយថា ខ្ញុំបាទដឹងថាក្នុងដែនស្រុកកេងជីវនេះមានសែម៉ានៅប្រាំនាក់ជាបងប្អូននឹងគ្នា ឯ**ម៉ាចេក**ជាប្អូននោះមានថ្វីដៃខ្លាំងពូកែណាស់ តែ**ម៉ាលៀង**ជាបងមិនសូវខ្លាំងពូកែទេ តែមានប្រាជ្ញាជ្រាលជ្រៅវាងវៃ បើលោកយកបានមកទុកជាទីប្រឹក្សានិងទាហាន នឹងបានជួយជា

កម្លាំងមាំមួនឡើងទៀត។ **ឡៅពី**ឮដូច្នោះក៏ត្រេកអរណាស់ ទើបប្រើទាហានទៅហៅ**ម៉ាលៀង**មកជួប ហើយឲ្យអង្គុយទីសមគួរ ក៏គំនាប់គ្នាទៅវិញទៅមក **ឡៅពី**និយាយថា ដែនដីសព្វថ្ងៃនេះកើតវឹកវរចលាចលផ្សេងៗ យើងនឹងគិតទំនុកបម្រុងឲ្យបានសេចក្ដីសុខក្សេមក្សាន្ត បានជាចូលមកនៅក្នុងស្រុកកេងជីវនេះ ប្រាថ្នានឹងគិតការតទៅ តែយើងនៅព្រួយចិត្តជ្រិតនឹងគិតការពារប្រការម្ដេច ទើបនឹងបានឲ្យអាណាប្រជានុរាស្ត្របានសេចក្ដីសុខ? **ម៉ាលៀង**ឆ្លើយថា ឯកេងជីវនេះជាមុខសឹកសង្គ្រាមគ្រប់ទាំងបួនទិស កម្រដែលនឹងគិតការពារក្សាឲ្យបានស្រួល គួរលោកតាំង**ឡៅគី**ឲ្យធ្វើចៅហ្វាយស្រុកកេងជីវជាបណ្ដោះអាសន្ន ហើយពន្យល់ឲ្យទៅបញ្ចុះបញ្ចូលមនុស្សខ្ញុំរាជការចាស់របស់**ឡៅពៀវ** ឲ្យចូលមកប្រមូលគ្នាជាសេនាទាហានឲ្យបានច្រើន ទើបរាស្ត្រទាសទាំងពួងនឹងបាននៅជាសុខតាមប្រក្រតី ព្រោះឃើញថា**ឡៅគី**ជាចៅហ្វាយស្រុកកេងជីវស្រាប់ហើយ ទើបឲ្យចាត់កងទ័ពទៅវាយយកស្រុកខាងទិសទក្សិណដែលឡើងដល់ស្រុកកេងជីវនេះ គឺស្រុកប៊ុឡេង, ស្រុកទៀងសា, ស្រុកហ៊ុយអៀង, ស្រុកឡេងឡេង ទាំងបួនតំបន់នេះសឹងប្រកបដោយមាសប្រាក់និងស្រូវអង្ករចំណីត្រីសាច់បរិបូរណាស់ បើបានហើយនឹងជួយជាកម្លាំងតទៅ។

**ឡៅពី**ក៏សួរថា អ្នកនឹងឲ្យយើងទៅវាយយកស្រុកណាជាមុន? **ម៉ាលៀង**ឆ្លើយថា សុំឲ្យរៀបកងទ័ពលើកទៅវាយយកស្រុកឡេងឡេងជាមុន ព្រោះជាដើមផ្លូវ ហើយទើបវាយយកស្រុកប៊ុឡេងជាបន្ទាប់ ឯស្រុកទៀងសានិងស្រុកហ៊ុយអៀងនោះនៅខាងទិសឯលិច ឲ្យលើកទៅវាយជាក្រោយក៏បាន តែឲ្យទៅនៅស្រុកសុងយ៉ុងនឹងបានបញ្ចុះបញ្ចូលមនុស្ស**ឡៅពៀវ**ទុកជាកម្លាំង។ ហើយ**ឡៅពី**ក៏ប្រឹក្សានឹង**ខុងបេង**នូវអស់ទាហានទាំងពួងតាមពាក្យ**ម៉ាលៀង**។ **ខុងបេង**ក៏យល់ត្រូវផង **ឡៅពី**ក៏ឲ្យហៅ**គួនអ៊ូ**មកពីស្រុកសុងយ៉ុង ឲ្យមកនៅរក្សាស្រុកកេងជីវ ហើយ**ឡៅពី**ក៏ប្រមូល

ទាហានមួយម៉ឺនប្រាំពាន់ ឲ្យ**តៀវហ៊ុយ**ជាកងមុខ ខ្លួន**ឡៅពី**និង**ខុងបេង**ជាកងហ្លួង **ជូឡុង**ជាកងក្រោយ ហើយក៏លើកទ័ពទៅតាំងនៅជិតស្រុកឡេងឡេង។

ឯ**ឡៅតៅ**ចៅហ្វាយស្រុកឡេងឡេង លុះដឹងថា**ឡៅពី**លើកកងទ័ពមក ក៏ប្រឹក្សានឹង**ឡៅហៀន**ជាបុត្រថា **ឡៅពី**លើកកងទ័ពមកនឹងច្បាំងយកស្រុកយើង ចៅនឹងរិះគិតប្រការម្ដេច? **ឡៅហៀន**ឆ្លើយថា ឮល្បីគេនិយាយថា **ឡៅពី**មានទាហានឯកឈ្មោះ**ទៀវជូឡុង**មានថ្វីដៃខ្លាំងពូកែណាស់ តែកូនទាហានមានតិច ឯស្រុកយើងនេះ **តុះអេង**ក៏ជាទាហានឯក ស៊ូនឹងពលបានមួយម៉ឺន នឹងខ្លាចអ្វីដែល**ឡៅពី**នោះ ខ្ញុំបាទនឹងសុំយកអាសាចេញទៅវាយឲ្យបែកទាល់តែបាន។

**ឡៅតៅ**បានឮដូច្នោះក៏ពេញចិត្ត ទើបចាត់ទាហានឲ្យ**ឡៅហៀន**ចំនួនមួយម៉ឺន **ឡៅហៀន**ក៏លាបិតាឡើងសេះនាំទាហានចេញទៅ ចម្ងាយផ្លូវប្រហែលមួយរយសិន (៤ គ.ម) ទើបឲ្យតាំងបន្ទាយនៅជើងភ្នំមួយ។ **ខុងបេង**ឃើញកងទ័ពស្រុកឡេងឡេងលើកចេញមក ក៏ឡើងជិះសេះកាន់ផ្លិតរោមសត្វ មានទង់លឿងដោតលើរទេះមួយ ហើយនាំទាហានចេញទៅដល់មុខបន្ទាយ។ **តុះអេង**ឃើញដូច្នោះក៏ឡើងសេះកាន់ពូថៅធំលើកទាហានចេញមក ហើយស្រែកថា អាពួកចោរ ហេតុម្ដេចបានជាហ៊ានលើកទ័ពកន្លងចូលមកដែនស្រុករបស់ចៅហ្វាយអញ ឯងមិនខ្លាចស្លាប់ទេឬ? **ខុងបេង**ឮដូច្នោះក៏ឆ្លើយតបថា ខ្លួនអញឈ្មោះថា**ខុងបេង**នៅដែនស្រុកឡាំយ៉ុង គ្រាដែល**ចូឆូ**លើកពលមួយរយម៉ឺន ជាក្បួនទ័ពគោកទ័ពទឹកមក នឹងវាយយកខេត្តខណ្ឌខាងទិសទក្សិណនោះ អញគិតកលឧបាយតែខមួយ ក៏ដុតកងទ័ព**ចូឆូ**បានទាំងទ័ពគោកទាំងទ័ពទឹក ដែលចៅហ្វាយអញលើកកងទ័ពមកនេះ បើឯងព្រមអង្វរលន់តួដោយល្អ ក៏នឹងរួចជីវិត។

**តុះអេង**បានឮដូច្នោះក៏ខឹងណាស់ឆ្លើយថា អញដឹងឯងហើយ ឯងកុំអួតអាងអ្វីឡើយ កាល**ចូឆ្នូ**បែកទ័ពទៅនោះ ព្រោះគំនិតរបស់**ជីវយី**ទេ ហើយបរសេះដេញចូលទៅនឹងចាប់ខ្លួន**ខុងបេង** ៗក៏ប្រើអ្នកបរទេះឲ្យថយរទេះត្រឡប់ក្រោយ។ **តុះអេង**ក៏បរសេះដេញទៅដល់ជើងកំពែង ឃើញទង់លឿងដែលដោតលើរទេះនោះ កំបាំងបាត់នៅក្នុងកៀនភ្នំ ឃើញឯ**តៀវហ៊ុយ**បរសេះរាំលំពែងចេញមកស្រែកថា ខ្លួនអញឈ្មោះ**តៀវហ៊ុយ** ឯងអាចមកតស៊ូនឹងដៃអញឬ? **តុះអេង**ឮដូច្នោះក៏ខឹងណាស់ បរសេះចូលទៅប្រយុទ្ធនឹង**តៀវហ៊ុយ** ដោយទប់នឹងកម្លាំង**តៀវហ៊ុយ**មិនបានក៏បំផាយសេះរត់ទៅ។ **តៀវហ៊ុយ**ក៏ដេញដិតតាមពីក្រោយ **តុះអេង**ខំស្រូតទៅដល់មាត់ផ្លូវទទួលឮសំឡេងស្រែកហ៊ោអឺងកងឡើង ហើយឃើញទាហានសងខាងផ្លូវចេញមកស្ទាក់ពីមុខ **ជូឡុង**ស្រែកថា អញឈ្មោះ**ជូឡុង** មកចាំយកជីវិតឯងហើយ ៗក៏ដេញទាហានឲ្យព័ទ្ធឡោមជុំជិត។ **តុះអេង**ទាល់ច្រកនឹងរកផ្លូវចៀសទៅមិនរួច ក៏ចោលពូថៅចុះពីដៃ ហើយលោតចុះពីលើខ្នងសេះចូលមកគំនាប់**ជូឡុង** ៗក៏ឲ្យទាហានចង**តុះអេង**ជាប់ ហើយនាំយកខ្លួនទៅជូន**ឡៅពី**ក្នុងបន្ទាយ។ **ឡៅពី**ក៏បង្គាប់ឲ្យយកខ្លួន**តុះអេង**ទៅសម្លាប់ចេញ **ខុងបេង**ដឹងដូច្នោះក៏ហាមឃាត់**ឡៅពី**ឲ្យបង្អង់ ហើយសួរពិចារណា**តុះអេង**ថា បើខ្លួនអ្នកឯងព្រមនៅនឹងចៅហ្វាយយើង ៗនឹងលែងឲ្យរួចខ្លួនទៅវិញ ហើយត្រូវខំរិះគិតយកខ្លួន**ឡៅហៀន**មកឲ្យយើងនឹងបានឬមិនបាន? **តុះអេង**ក៏ថា បើលោកទុកជីវិតខ្ញុំបាទហើយ ខ្ញុំបាទនឹងរិះគិតយកខ្លួន**ឡៅហៀន**មកជូនលោកឲ្យទាល់តែបាន បើលោកបានខ្លួន**ឡៅហៀន** ក៏ដូចជាខ្លួន**ឡៅតៅ**ជាបិតាដែរ។

**ខុងបេង**សួរថា អ្នកឯងនឹងទៅគិតធ្វើប្រការម្តេចនឹងបាន**ឡៅហៀន**នោះ? **តុះអេង**ថា ពេលយប់ក្នុងថ្ងៃនេះ ឲ្យលោកលើកកងទ័ពទៅប្លន់បន្ទាយ**ឡៅហៀន**ចុះ

ខ្ញុំបាទនឹងធ្វើជាកលសឹកខាងក្នុង ចាប់យកខ្លួន**ឡៅហៀន**មកជូនលោក។ **ឡៅពី**ឮដូច្នោះក៏និយាយនឹង**តុះអេង**ថា ពាក្យនេះយើងយល់ឃើញថាមិនមែនទេ គឺអ្នកឯងក្លែងយកតែជីវិតឲ្យរស់។ **ខុងបេង**ថា **តុះអេង**នេះជាមនុស្សមានពាក្យសត្យពិតត្រង់ណាស់ ល្មមនឹងជឿស្ដាប់បាន ហើយក៏ឲ្យស្រាយចំណងចេញបើកលែងទៅ។ **តុះអេង**លុះទៅដល់បន្ទាយ ក៏ពណ៌នាសេចក្ដីទាំងពួងឲ្យ**ឡៅហៀន**ស្ដាប់គ្រប់ប្រការ។

**ឡៅហៀន**ថា យើងនឹងរិះគិតប្រការម្ដេចទើបស្រួល? **តុះអេង**ថា លោកកុំវិតក្កជាទុក្ខព្រួយឡើយ ខ្ញុំបាទនឹងគិតកែខៃឲ្យបាន ក្នុងថ្ងៃនេះទាហាន**ឡៅពី**នឹងលើកមកតាមពាក្យខ្ញុំបាទនិយាយ យើងត្រូវតែលះបង់ចោលបន្ទាយនេះចេញ ហើយលើកទាហានចេញទៅពួនបង្កប់ខាងក្រៅបន្ទាយជាពីរកង បើឃើញទាហាន**ឡៅពី**លើកមកយើងនឹងលើកចេញទៅវាយខ្ទប់ទាំងសងខាង។ **ឡៅហៀន**យល់ឃើញត្រូវ ក៏ឲ្យធ្វើតាមពាក្យ**តុះអេង** លុះវេលាយាមពីរប្លាយ ឃើញទាហាន**ឡៅពី**មួយកងកាន់គប់ចំបើងគ្រប់ដៃ លបទៅដុតបន្ទាយឆេះឡើង **ឡៅហៀន**និង**តុះអេង**ក៏លើកទាហានវាយខ្ទប់ទាំងសងខាងចូលមក ពួកទាហាន**ឡៅពី**ក៏លបរត់ទៅ **ឡៅហៀន**និង**តុះអេង**តាមទៅមិនទាន់ ក៏វិលត្រឡប់មកជិតដល់បន្ទាយវិញ ភ្លើងនោះក៏ឆេះភ្លឺខ្លាំងឡើងក្រឡេកមើលទៅឃើញ**តៀវហ៊ុយ**ជិះសេះមកស្ទាក់ពីមុខ។

**ឡៅហៀន**ក៏និយាយនឹង**តុះអេង**ថា **ឡៅពី**លើកទ័ពមកលុកបន្ទាយយើង តែទាហានដែលនៅក្នុងបន្ទាយ**ឡៅពី**នោះស្ដួចស្ដើងណាស់ បើយើងនឹងលើកទៅប្លន់យកបន្ទាយ**ឡៅពី**វិញនឹងបានដោយងាយ **តុះអេង**យល់ឃើញត្រូវ ក៏លើកទៅប្លន់យកបន្ទាយ**ឡៅពី** លុះលើកទៅដល់ពាក់កណ្ដាលផ្លូវ ក៏ប្រទះនឹង**ជូឡុង**លើកទាហានមកស្ទាក់ពីមុខ **ជូឡុង**ក៏បរសេះពុះទម្លាយកងទ័ពសម្លាប់ទាហានទន្ទ្រានចូលទៅ ហើយយកលំពែងចាក់ត្រូវ**តុះអេង**ធ្លាក់ពីលើសេះស្លាប់។ **ឡៅហៀន**ឃើញដូច្នោះក៏

តក់ស្លុតក្នុងចិត្ត បំផាយសេះរត់ទៅជួបនឹង**តៀវហ៊ុយ** ។ចូលតច្បាំងហើយក៏ព័ទ្ធចាប់**ឡៅហៀន**បាន ចងយកខ្លួនទៅឲ្យ**ខុងបេង** ។ក៏ពិចារណាសួរ**ឡៅហៀន**ថា យើងចាប់**តុះអេង**បាន ហើយយើងដោះលែងទៅវិញ ក៏ត្រឡប់គិតប្រទូសរ៉ាយបញ្ឆោតយើងដោយអំពើទុច្ចរិត។ **ឡៅហៀន**ថា ដែល**តុះអេង**ធ្វើការបញ្ឆោតលោកនោះ ជាតម្រិះរិះគិតរបស់**តុះអេង**ខ្លួនឯង។ **ខុងបេង**ក៏ឲ្យស្រាយចំណង**ឡៅហៀន**ចេញ ហើយយកអាវព្រៃយ៉ាងល្អឲ្យ**ឡៅហៀន**ពាក់ រួចហៅឲ្យឡើងតុបរិភោគអាហារ ហើយថា យើងនឹងបើកលែងឲ្យអ្នកឯងទៅទៀត ដើម្បីឲ្យទៅប្រាប់បិតារបស់អ្នកឯង ឲ្យចេញមកលន់តួចំណុះចុះចូលយើង ដោយសុភាពល្អ បើអ្នកឯងទៅហើយ មិននាំបិតាចេញមកទេ យើងនឹងលើកទ័ពចូលទៅវាយយកស្រុក ហើយនឹងកាប់សម្លាប់គ្រប់គ្រួសារនូវបណ្តាញាតិបងប្អូនឲ្យអស់កុំឲ្យសល់។

**ឡៅហៀន**ក៏ទទួលពាក្យថា ខ្ញុំបាទនឹងនាំបិតាមកជួបនឹងលោកជាប្រាកដ។ **ខុងបេង**ក៏បើកលែងឲ្យ**ឡៅហៀន**ចូលទៅក្នុងស្រុកវិញ ហើយអធិប្បាយសេចក្តីឲ្យបិតាស្តាប់គ្រប់ប្រការ រួចថាឯចិត្ត**ឡៅពី**និង**ខុងបេង**នេះជាមនុស្សល្អសុភាពរៀបរយគួរសមណាស់។ **ឡៅតៅ**បានស្តាប់សព្វគ្រប់ ក៏យកទង់សលើកឡើងដោតលើសើនបន្ទាយសម្គាល់ថា ស្រុកចំណុះ ហើយបើកទ្វារគ្រប់ទិសចំហ រួចក៏រៀបចំយកទ្រព្យរបស់ជាបណ្ណាការ និងគ្រាសម្រាប់ងារ នាំ**ឡៅហៀន**ជាបុត្រនិងបណ្តាពួកអ្នកស្រុកទាំងពួង ចេញទៅគំនាប់**ឡៅពី,** **ខុងបេង**ក៏យកគ្រាសម្រាប់ងារបង្វិលឲ្យ**ឡៅតៅ** ហើយថា យើងនឹងឲ្យអ្នកធ្វើជាចៅហ្វាយស្រុកនៅដដែល តែ**ឡៅហៀន**ជាបុត្រនៅក្មេងសេចក្តី យើងនឹងយកទៅស្រុកកេងជីវជាមួយ នឹងបានជួយធ្វើការតទៅ។ **ខុងបេង**ក៏នាំ**ឡៅពី**និងទាហានទាំងពួងចូលទៅក្នុងស្រុកឡេងឡេង។ **ឡៅពី**ក៏ប្រាស្រ័យប្រាបប្រាមរំឭក ប្រដៅបណ្តារាស្ត្រក្នុងស្រុកឲ្យនៅជាសុខតាមប្រក្រតី

ហើយថា ដែលយើងលើកទ័ពមកនេះក៏បានស្រុកឡេងឡេងហើយ ឯស្រុកហ៊ុយអៀងនោះនរណានឹងអាចយកអាសាចេញទៅវាយឲ្យបាន? **ជូឡុង**ក៏ឆ្លើយទទួលសុំអាសា **តៀវហ៊ុយ**ក៏ថា សូមឲ្យលោកប្រើខ្ញុំបាទទៅវិញកុំឲ្យ**ជូឡុង**ទៅឡើយ។ **ជូឡុង**ថា ខ្ញុំសុំសរសេរសំបុត្រសញ្ញាទុកជូន នឹងសុំតែទាហានបីពាន់លើកទៅវាយយកស្រុកហ៊ុយអៀងឲ្យបាន បើមិនបានទេ សុំឲ្យលោកកាត់ក្បាលខ្ញុំបាទវិញចុះ។ និយាយហើយក៏សរសេរសំបុត្រសញ្ញាជូនទៅឲ្យ**ខុងបេង** ៗក៏ប្រគល់ទាហានបីពាន់ឲ្យ**ជូឡុង**។

**តៀវហ៊ុយ**ថា ឯសំបុត្រសញ្ញានោះ ខ្ញុំបាទក៏ហ៊ានធ្វើទុកជូនដែរ តែសុំឲ្យលោកប្រើខ្ញុំបាទទៅវិញចុះ បើមិនបានស្រុកហ៊ុយអៀងទេ ខ្ញុំបាទសុំឲ្យលោកសម្លាប់ខ្ញុំបាទចុះ។ **ឡៅពី**ក៏ស្រែកគំហកឲ្យ**តៀវហ៊ុយ**ថា កាល**ជូឡុង**ព្រមទទួលយកអាសាហើយ បានទាំងសរសេរសំបុត្រទុកជាស្រេច ហេតុម្ដេចក៏មកជែកដណ្ដើមគេដូច្នេះ? **តៀវហ៊ុយ**ក៏មិនឆ្លើយតបថាម្ដេច។ **ជូឡុង**ក៏លា**ឡៅពី, ខុងបេង**លើកទាហានបីពាន់ចេញទៅច្បាំងយកស្រុកហ៊ុយអៀង។ ឯបម្រើសេះលុះឃើញកងទ័ពលើកមកក៏នាំយកសេចក្ដីទៅប្រាប់**ទៀវហាម**ចៅហ្វាយស្រុកហ៊ុយអៀងថា ឥឡូវ**ជូឡុង**ទាហាន**ឡៅពី**លើកកងទ័ពមកនឹងច្បាំងយកស្រុកយើង។

**ទៀវហាម**បានឮដូច្នោះ ក៏ប្រឹក្សានឹងទាហានទាំងពួងថា យើងនឹងគិតប្រការម្ដេច? **តាន់អេង**និង**ប៉ៅឡុង**នាយទាហានឆ្លើយថា ដែល**ឡៅពី**លើកទ័ពមកនេះ ខ្ញុំនឹងសុំអាសាលើកទាហានចេញទៅច្បាំងរាំងតទល់ មិនឲ្យរវល់ដល់អន្តរាយស្រុកឡើយ។ **ទៀវហាម**តបថា អ្នកកុំអាលប្រមាថមើលងាយ**ឡៅពី**ដូច្នោះ ព្រោះ**ឡៅពី**នោះជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** មានតម្រិះប្រាជ្ញាជាសុចរិតពិតត្រង់ល្អណាស់ ទាំង**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**ក៏មានថ្វីដៃខ្លាំងពូកែ ជាទាហានឯក។ ឥឡូវ

**ឡៅពី**ប្រើ**ជូឡុង**ឲ្យលើកកងទ័ពមកនឹងវាយយកស្រុកយើង ឯ**ជូឡុង**នោះក៏មានកម្លាំងខ្លាំងពូកែណាស់ គ្រា**ចូឆូ**លើកទាហានប្រមាណមួយរយម៉ឺនមកដល់វាលទៀងបាន់បោ **ជូឡុង**បានតច្បាំងទម្លាយកងទ័ពចូលចេញដោយរួសរហ័សបីដូចនៅកណ្ដាលវាលគ្មានទាហានសោះ ដែលអស់អ្នកនឹងអាចហ៊ានចេញទៅតស៊ូនោះមុខជាមិនបាន ព្រោះទាហានយើងក៏តិចផង យើងត្រូវគិតគ្នាចេញទៅអង្វរលន់តួសុំចុះចូល ទើបនឹងបានសេចក្ដីសុខតទៅ។ **តាន់អេង**ឆ្លើយថា ខ្ញុំបាទនឹងសុំអាសាចេញទៅច្បាំងមើលម្ដងសិន បើតទល់មិនឈ្នះសឹមចេញទៅចំណុះចុះចូលជាក្រោយ។ **ទៀវហម**តបបណ្ដោយថា តាមចិត្តចុះ។ **តាន់អេង**ក៏ចាត់ចែងទាហានលើកចេញទៅជិតបន្ទាយ**ជូឡុង**។

ឯ**ជូឡុង**ឃើញដូច្នោះ ក៏ជិះសេះកាន់លំពែងចេញទៅឈរមុខទាហាន ហើយស្រែកថា ខ្លួនអញជាទាហាន**ឡៅពី** ៗនោះជាពូជព្រះរាជវង្ស ហើយក៏ជាប្អូន**ឡៅពៀវ**ដែលទើបស្លាប់ គ្រានេះ**ឡៅពី**ទំនុកបម្រុង**ឡៅគី**ជាក្មួយ ហើយប្រើអញលើកកងទ័ពមកប្រាបប្រាមស្រុកហ៊ុយអៀង ដែលត្រូវឡើងស្រុកកេងជីវ ហេតុម្ដេចក៏ឯងចេញមកតស៊ូនឹងអញដែលមានថ្វីដៃនេះ? ឯងមិនខ្លាចសេចក្ដីស្លាប់ទេឬ? **តាន់អេង**ឆ្លើយតបថា ឯស្រុកហ៊ុយអៀងនេះត្រូវឡើងដល់ស្រុកកេងជីវក៏មែន តែឥឡូវ**ឡៅពៀវ**ក៏ស្លាប់ទៅហើយ **ទៀវហម**ចៅហ្វាយអញទើបលើកស្រុកនេះទៅប្រគល់ឲ្យ**ចូឆូ** ឯងកុំអួតថាមានថ្វីដៃនោះអញមិនកោតខ្លាចនឹងទៅចំណុះចុះចូលនឹង**ឡៅពី**នោះទេ។ **ជូឡុង**ឮដូច្នោះក៏ខឹងណាស់ បរសេះវាំលំពែងចូលច្បាំងនឹង**តាន់អេង**បានប្រាំភ្លេង **តាន់អេង**ទ្រកម្លាំងនឹង**ជូឡុង**មិនបានក៏ញាក់សេះថយរត់ **ជូឡុង**ក៏បំផាយសេះតាមទៅទាន់ចាប់ខ្លួន**តាន់អេង**បាន ឲ្យទាហានចងទុក ឯទាហាន**តាន់អេង**រត់បែកខ្ញែកទៅអស់។ **ជូឡុង**ក៏ស្រាយចំណងចេញ ហើយនិយាយនឹង**តាន់អេង**ថា

យើងមិនសម្លាប់ជីវិតខ្លួនទេ យើងលែងឲ្យខ្លួនវិលទៅ យកសេចក្ដីចូលទៅប្រាប់**ទៀវហម**ជាចៅហ្វាយស្រុក ឲ្យប្រញាប់ចេញមកអង្វរលន់តួចំណុះយើងដោយល្អចុះ បើរឹងទទឹង ហើយតែយើងចូលទៅក្នុងស្រុកបានកាលណា យើងនឹងសម្លាប់ឲ្យអស់ទាំងបុត្រភរិយា។ **តាន់អេង**មានសេចក្ដីត្រេកអរណាស់ ទទួលពាក្យ**ជូឡុង**ហើយក៏គំនាប់លាត្រឡប់ទៅវិញ ទើបយកសេចក្ដីនោះទៅអធិប្បាយឲ្យ**ទៀវហម**ស្ដាប់។ **ទៀវហម**ថា យើងបានហាមប្រាមហើយ អ្នកក៏មិនព្រមស្ដាប់ពាក្យយើង ខំតែចចើងនាំទាហានចេញទៅតស៊ូនឹង**ជូឡុង** ទាល់តែបានសេចក្ដីដុនដាបអប្បយសដូច្នេះ ហើយ**ទៀវហម**ក៏រៀបចាត់ចែងរបស់មាសប្រាក់ជាបណ្ណាការ និងត្រាសម្រាប់ងារឲ្យទាហានប្រមាណដប់ប្រាំនាក់នាំចេញទៅគំនាប់**ជូឡុង** ៗក៏ទទួលយក របស់និងត្រាទុកហើយអញ្ជើញ**ទៀវហម**ឲ្យឡើងតុបរិភោគអាហារ។

ខណៈកាលកំពុងបរិភោគផឹកស្រានោះ **ទៀវហម**ក៏និយាយថា លោកនិងខ្ញុំជាសែជាមួយគ្នា ហើយក៏ជាអ្នកស្រុកជិតតេងដូចគ្នា ដែលខ្ញុំបានធ្វើល្មើសខុសឆ្គងប៉ុណ្ណេះ សូមកុំប្រកាន់ទោសខ្ញុំឡើយ ខ្ញុំសូមលោកទុកជាបងប្អូននឹងគ្នាតាមសែតទៅ **ជូឡុង**ក៏ឃើញថាចាស់ជាង**ទៀវហម**បួនខែ **ទៀវហម**ក៏ហៅ**ជូឡុង**ថាបង។ លុះវេលាព្រឹកឡើង **ទៀវហម**ក៏នាំ**ជូឡុង**និងទាហានប្រមាណដប់នាក់ចូលទៅក្នុងស្រុក **ជូឡុង**និយាយប្រាបប្រាមទូន្មានប្រដៅអស់បណ្ដាអ្នកស្រុក ឲ្យនៅជាសុខក្សេមក្សាន្តតាមប្រក្រតី **ទៀវហម**ក៏អញ្ជើញ**ជូឡុង**ចូលទៅបរិភោគអាហារខាងល្វែង។ ក្នុងខណៈកាលកំពុងសេពសុរានោះ **ទៀវហម**ក៏ហៅបងថ្លៃស្រីចេញមកគំនាប់**ជូឡុង** ៗឃើញស្រីនោះមានរូបរាងល្អ ក៏សួរថា នាងនេះឈ្មោះអ្វី? ត្រូវជាម្ដេចនឹងអ្នក? **ទៀវហម**ឆ្លើយថា ស្រីនេះឈ្មោះនាង**ហ្លួនស៊ី**ជាភរិយា**ទៀវហាប់**បងខ្ញុំបាទ។ ឥឡូវបងខ្ញុំស្លាប់ហើយ។ **ជូឡុង**ថាបងថ្លៃអ្នកជាធំដែលនឹងឲ្យមកគំនាប់ខ្ញុំមិនគួរ ហើយ

**ជូឡុង**ក៏និយាយឲ្យនាង**ហ្លួនស៊ី**វិលចូលទៅក្នុងវិញ នាង**ហ្លួនស៊ី**ក៏លាចូលទៅវិញ។ **ទៀវហាម**ក៏និយាយនឹង**ជូឡុង**ថា **ទៀវហាប់**បងខ្ញុំបាទស្លាប់បីឆ្នាំទៅហើយ ខ្ញុំបាទបាននិយាយប្រាប់នាង**ហ្លួនស៊ី**ឲ្យមានប្ដីថ្មី នាង**ហ្លួនស៊ី**ថា បើអ្នកណារូបស្អាតល្អ ហើយមានតម្រិះប្រាជ្ញាប្រការមួយ មានថ្វីដៃខ្លាំងពូកែល្បីល្បាញប្រការមួយ ជាសែជាមួយខ្មោចស្វាមីមុនប្រការមួយ បើបានព្រមទាំងបីប្រការនេះ ទើបនាង**ហ្លួនស៊ី**ព្រមយកធ្វើជាស្វាមី។ ឥឡូវខ្ញុំបាទឃើញលោកមានលក្ខណៈព្រមទាំងបីប្រការ ដូចសេចក្ដីប្រាថ្នានឹង**ហ្លួនស៊ី**ប្ដេជ្ញាទុកមកហើយ លោកក៏មិនទាន់មានភរិយា បានជាខ្ញុំបាទឲ្យចេញមកគំនាប់ ប្រាថ្នាលើកជូនជាភរិយានៃលោក។ **ជូឡុង**ឮដូច្នោះក៏ខឹងណាស់ ក្រោកឡើងស្រែកគំហកហើយថា ខ្លួនអ្នកនិងខ្ញុំរាប់អានគ្នាថា ជាបងប្អូនព្រោះសែជាមួយ ឯនាង**ហ្លួនស៊ី**ជាបងថ្លៃនៃអ្នកស្រាប់មកហើយ ក៏ដូចជាបងថ្លៃខ្ញុំដែរ ហេតុម្ដេចអ្នកមកគិតធ្វើដូច្នេះនឹងមិនខុសទម្លាប់ទំនៀមទេឬ? **ទៀវហាម**បានឮដូច្នោះក៏មានសេចក្ដីអៀនខ្មាសក្នុងចិត្តណាស់ ទើបញាក់មុខឲ្យទាហានដែលបម្រើជិតខាងនោះគិតធ្វើអន្តរាយដល់**ជូឡុង** ៗឃើញដូច្នោះក៏រឹតតែខឹងណាស់ទៅទៀត ស្ទុះទៅធាក់**ទៀវហាម**ដួលសន្លប់ទៅ ហើយ**ជូឡុង**ក៏ចេញមកឡើងសេះ នាំទាហានប្រមាណដប់នាក់ត្រឡប់មកបន្ទាយ។

**ទៀវហាម**ប្រឹក្សានឹង**តាន់អេង, ប៉ៅឡុង**ថា ឥឡូវ**ជូឡុង**ខឹងនឹងខ្ញុំ បើខ្ញុំនឹងលើកទាហានទៅតស៊ូជាសង្គ្រាម **ជូឡុង**ក៏មានថ្វីដៃខ្លាំងពូកែណាស់ ឃើញថាតស៊ូគេពុំបានទេ អ្នកទាំងពីរនឹងយល់ឃើញថាប្រការម្ដេច? **តាន់អេង, ប៉ៅឡុង**ថា ខ្ញុំបាទសុំលើកទាហានប្រាំរយធ្វើជាចូលទៅនៅនឹង**ជូឡុង** រួចឲ្យលោកលើកទ័ពចេញទៅ បើ**ជូឡុង**នឹងលើកទ័ពមកច្បាំងនឹងលោក ខ្ញុំបាទទាំងពីរនឹងចាប់**ជូឡុង**សម្លាប់ចេញ។ **ទៀវហាម**យល់ឃើញត្រូវ **តាន់អេង, ប៉ៅឡុង**ក៏លើកទាហានប្រាំរយទៅដល់បន្ទាយ

ហើយប្រាប់ទាហាន**ជូឡុង**ថា យើងទាំងពីរនឹងសុំចូលទៅគំនាប់**ជូឡុង** ទាហានក៏ចូលទៅជម្រាប**ជូឡុង** ៗឮដូច្នោះក៏គិតថា **តាន់អេង**និង**ប៉ៅឡុង**មកនេះ ប្រាថ្នាប្រុងបញ្ឆោតយើង តែយើងត្រូវឲ្យចូលមកចុះ សឹមយើងរិះគិតចាប់ខ្លួនសម្លាប់ចេញឲ្យបាន ហើយ**ជូឡុង**ឲ្យទាហានទៅហៅខ្លួន**តាន់អេង, ប៉ៅឡុង**ចូលមក ឈ្មោះទាំងពីរក៏ចូលទៅគំនាប់**ជូឡុង** ហើយថាយើងទាំងពីរឃើញ**ទៀវហាម**ធ្វើសេចក្ដីមិនគួរសមដល់លោក បើខ្ញុំបាទនឹងនៅស្ងៀមក្នុងស្រុកក៏ឃើញថាស្លាប់ជាមួយគ្នា បានជាខ្ញុំនាំគ្នាចេញមកគំនាប់លោក ប្រាថ្នានឹងនៅពឹងបុណ្យធ្វើជាបាវលោកតទៅ។ **ជូឡុង**ឮហើយក៏ធ្វើជាត្រេកអររួសរាយ យកសំពត់ព្រែមួយអាវឲ្យ**តាន់អេង** និង**ប៉ៅឡុង**ជាបំណាច់ ហើយឲ្យតែងតុលៀងអាហារផឹកស្រា ខណៈនោះ**តាន់អេង, ប៉ៅឡុង**ជាមនុស្សមិនសូវចេះគិត ផឹកស្រាស្រវឹងហួសកម្លាំងដេកលក់ទៅ **ជូឡុង**ក៏ឲ្យទាហានចាប់ចងទាំងពីរនាក់ ហើយឲ្យចាប់ពួកទាហានទាំងប្រាំរយចង ហើយកំហែងសួរថា ដែលនាយឯងទាំងពីរនាក់ចូលមករកអញវេលានេះ ជាកាច វៀច ឬត្រង់ប្រការម្ដេច ឲ្យឯងឆ្លើយឲ្យត្រង់ បើកុហកអញៗនឹងសម្លាប់ទាំងអស់គ្នា។ ទាហានទាំងអស់ភ័យខ្លាចក៏ឆ្លើយថាជាកលឧបាយវៀចទេ។

**ជូឡុង**ឮដូច្នោះ ក៏ឲ្យយកខ្លួន**តាន់អេង, ប៉ៅឡុង**ទៅប្រហារជីវិត ហើយឲ្យស្រាយចំណងពួកទាហានទាំងអស់ចេញ ទុកឲ្យនៅធ្វើការជាមួយ ហើយនិយាយថា ដែល**តាន់អេង, ប៉ៅឡុង**មកប៉ងនឹងប្រទូសរ៉ាយយើង ៗក៏ឲ្យសម្លាប់ចេញហើយ តែអ្នករាល់គ្នាជាអ្នកតូចតាមមកដោយស្ដាប់បង្គាប់គេ យើងក៏ទុកជីវិតឲ្យរស់ ត្រូវវិលទៅកាន់បុត្រភរិយាវិញចុះ បើអ្នករាល់គ្នាវៀចនឹងយើង ៗឲ្យសម្លាប់ចេញទាំងអស់។ ពេលយប់នេះយើងលើកចូលទៅលុកយកស្រុកហ៊ុយអៀង ត្រូវអ្នករាល់គ្នាចេញទៅជាទ័ពស្រួច ហៅអ្នកចាំទ្វារឲ្យបើកទទួលជាបានឬទេ? ពួកទាហានទាំង

នោះក៏ត្រេកអរសាទរនាំគ្នាទទួលតាមពាក្យ**ជូឡុង**។ លុះពេលកណ្ដាលយប់ **ជូឡុង**ក៏លើកទាហានចូលទៅជិតជើងកំផែងស្រុកហ៊ុយអៀង ឯពួកទាហានទាំងប្រាំរយក៏នាំគ្នាស្រែកហៅអ្នកចាំទ្វារថា **តាន់អេង, ប៉ៅឡុង**ចាប់**ជូឡុង**បានសម្លាប់ទៅហើយ ឲ្យប្រញាប់បើកទ្វារនឹងចូលទៅវិញ ដើម្បីនឹងយកសេចក្ដីទៅជម្រាប**ទៀវហាម**ឲ្យជ្រាប។

ឯទាហានលើសើនបន្ទាយ បានឮសំឡេងច្បាស់ក៏បំភ្លឺភ្លើងមើលមុខឃើញថាជាពួកទាហានខាងខ្លួនដែលចេញទៅជាមួយនឹង**តាន់អេង, ប៉ៅឡុង**ក៏មានចិត្តត្រេកអរព្រោះមិនដឹងកល**ជូឡុង** ក៏នាំគ្នាជម្រាប**ទៀវហាម** ៗឮដូច្នោះក៏នាំទាហានចេញទៅទទួល**តាន់អេង, ប៉ៅឡុង**។ **ជូឡុង**ក្រឡេកឃើញក៏បរសេះចូលទៅចាប់ខ្លួន**ទៀវហាម**បាន ឲ្យទាហានចងចំណងទុកហើយលើកចូលទៅប្រកាសប្រាប់បណ្ដារាស្ត្រក្នុងស្រុកកុំឲ្យភិតភ័យថា យើងមិនបានធ្វើអ្វីអន្តរាយទេ។ លុះវេលាព្រឹកឡើង**ជូឡុង**ក៏ឲ្យធ្វើសំបុត្របកប្ដឹងទៅដល់**ឡៅពី, ខុងបេង** ៗដឹងក្នុងសំបុត្រសព្វគ្រប់ក៏ត្រេកអរណាស់ ចាត់ចែងទាហានហើយក៏លើកទៅឯស្រុកហ៊ុយអៀង។ **ជូឡុង**ក៏ចេញទៅទទួល**ឡៅពី, ខុងបេង**ចូលទៅក្នុងស្រុកហើយឲ្យនាំខ្លួន**ទៀវហាម**មកជូន**ឡៅពី**។

*ចប់សៀវភៅទីប្រាំ។*

*សូមរង់ចាំអានសៀវភៅទីប្រាំមួយបន្តទៀត។ ជាមួយគ្នា អ្នកអានក៏អាចរកបានសៀវភៅផ្សេងទៀត ដូចជា “ស្រីហិតោបទេស” “សម្ដេច” (ដោយនីកូឡូ ម៉ាការវែល្លី) តាមរយៈប្លុក khmerliterature.wordpress.com នេះផងដែរ។*

*សូមអរគុណ។*

*ណុល ដារ៉ា*